# បុណ្យធំនៅស្រុកខ្មែរ

## ក្រាំងបុណ្យទាំង១២ខែ

ភាគទី២

ឆឹង ផាន់សុផុន

# បុណ្យទំនៀមខ្មែរ

## បុណ្យទំនៀមទំលាប់ខ្មែរខ្មៅ



ឆឹង ជាន់សុជុន

ភាគទី ២

ពិនិត្យនិងកែសំរួលដោយ

ភិក្ខុ មហាយិន នឿន

# អារម្ភកថា

អាត្មាភាព ភិក្ខុវិនយធរោ (ថហាយិន-សឿន) ទក្ខខ្មែរ សាន់តាអេណា ស.រ.អ. បានត្រួតពិនិត្យរួចហើយ យល់ឃើញថា "សៀវភៅ បុណ្យទំនៀមខ្មែរ" ដែលបានរៀបរៀងឡើងដោយលោក ឆឹង-ផាន់សុផុន នេះ មានសារប្រយោជន៍ច្រើនណាស់ ចំពោះប្រជាពលរដ្ឋ និង សង្គមខ្មែរយើងទាំងអស់គ្នា ព្រោះថាប្រជាពលរដ្ឋខ្មែរយើងសព្វថ្ងៃនេះ កំពុងតែមាន ការខ្វះខាតក្បួនច្បាប់ទាំងផ្លូវលោក និង ផ្លូវធម៌ច្រើនណាស់ ។

អាត្មាភាព សូមកោតសរសើរដោយស្មោះ នូវស្នាដៃដ៏ថ្លៃថ្នូរ របស់លោក ឆឹង-ផាន់សុផុន ដែលបាននិពន្ធសៀវភៅនេះ ដើម្បីទុកជាប្រទីបសំរាប់បំភ្លឺ និង ដើម្បីលើកស្ទួយនិងផ្សព្វផ្សាយ នូវអរិយធម៌ខ្មែរ ទំនៀមទំលាប់ខ្មែរ អក្សរសាស្ត្រខ្មែរ ។ល។ ឲ្យបានរីកចំរើនឡើងវិញ បន្ទាប់ពីត្រូវបានបំផ្លិចបំផ្លាញ ដោយសារភ្លើងសង្គ្រាម ស្ទើរតែរលត់រលាយបាត់អស់ទៅហើយនោះ ។

សូមឲ្យសេចក្តីប្រាថ្នា របស់លោក ឆឹង-ផាន់សុផុន បានសំរេចសមតាមបំណងកុំបីខានឡើយ ។

សូមប្រទេសកម្ពុជា ជាទឹកដីសក់ និង ជាទីស្នេហា ចាប់បានសុខសន្តិភាព ដើម្បីបំពេញនូវសេចក្តីត្រូវការ របស់ប្រជាពលរដ្ឋខ្មែរទូទាំងប្រទេសដែលកំពុងតែស្រេកឃ្លានជាទីបំផុតនូវសន្តិភាពដ៏ពិតប្រាកដនុ៎ះ ។

ថ្ងៃសៅរ៍ ១៥កើត ខែជេស្ឋ ឆ្នាំថោះ ឯកស័ក ព.ស.២៥៤៣

២៩ ឧសភា ១៩៩៩

## អារម្ភកថា

ខ្ញុំព្រះករុណា ខ្ញុំបាទ បានរៀបរៀងសៀវភៅ " **បុណ្យទំនៀមខ្មែរ** " នេះឡើង ក្នុងគោលបំណងចង់ថែរក្សា និង ប្រមូលចងក្រងនូវឯកសារ ព្រះពុទ្ធសាសនា និង បុណ្យទំនៀមទំលាប់ខ្មែរផ្សេងៗ ដែលស្ទើរតែរលាយបាត់បង់ទៅហើយនោះអោយបានគង់វង្សតទៅ ។

ដើម្បីអោយបានងាយស្រួលដល់ការសិក្សាស្រាវជ្រាវ និង បដិបត្តិ ខ្ញុំព្រះករុណា ខ្ញុំបាទ បានចែកសៀវភៅ " **បុណ្យទំនៀមខ្មែរ** " នេះជា ៣ភាគ :

**ភាគទី១** : ក្រាំងព្រះធម៌ ( ធម៌សំរាប់សូត្រក្នុងពេលធ្វើបុណ្យនានាក្នុងសៀវភៅ ភាគទី២ និង ភាគទី៣ ) ។

**ភាគទី២** : បុណ្យទាំង ១២ខែ ( បុណ្យទ្វាទសមាស ) ។

**ភាគទី៣** : បុណ្យទំនៀមទំលាប់ទូទៅ ។

ខ្ញុំព្រះករុណា ខ្ញុំបាទ សូមថ្លែងអំណរព្រះគុណ ជាពិសេសចំពោះព្រះភិក្ខុមហា យិន នឿន ប្រធានគណៈកម្មាធិការ វត្តខ្មែរ សាន់តាអាណា សហរដ្ឋអាមេរិច ដែលព្រះអង្គបានយកព្រះទ័យទុកដាក់ជួយត្រួតពិនិត្យ និង កែសំរួលអក្ខរាវិរុទ្ធ ទាំងអស់ក្នុងសៀវភៅនេះ ។

ខ្ញុំព្រះករុណា ខ្ញុំបាទ សូមថ្លែងអំណរគុណ :

- ចំពោះលោក តូច បុប្ផា និង អ្នកស្រី ឯម សុគន្ធារី ដែលបានចំណាយប្រាក់ជួលជាងថតរូបពីវត្តទន្លេសាគរ ហៅ វត្តសំរោងអណ្តែត ដែលគូរដោយវិចិត្រករ យៀង វិសាល ( ថតដោយលោក ឈឹម វណ្ណៈ ) ។
- ចំពោះ លោក ហែម វិបុល ដែលបានរចនារូបភាពទាំងអស់ ក្នុងសៀវភៅនេះតាមបច្ចេកទេស កុំព្យូទ័រ ដើម្បីអោយបានភ្លឺច្បាស់ និង ត្រឹមត្រូវល្អ ។

ធ្វើនៅ ទីក្រុង សាន់តាអាណា ស.រ.អ ថ្ងៃ សៅរ៍ ទី ១ មករា ព.ស. ២៥៤៤
គ.ស. ២០០០

**ឆឹង ជាន់សុផុន**

# ផ្សាយចេញពី
# សាកលវិទ្យាល័យ បញ្ញាសាស្ត្រ




លេខ១១០ វិថីសម្តេចប៉ាន

សង្កាត់ជ័យជំនះ ខ័ណ្ឌដូនពេញ រាជធានីភ្នំពេញ

# មាតិការឿង

## ភាគទី១

## គ្រាំងព្រះធម៌

## ភាគទី២

## បុណ្យតាំង១២ខែ (បុណ្យទ្វាទសមាស)

## ភាគទី៣

## បុណ្យធំទៀមធំលាប់ខ្លួនទៅ

ផ្សេងៗ:

# ០១. ខែ ចេត្រ (មេសា)

## រំលឹកដល់

- បុណ្យចូលឆ្នាំថ្មី (បុណ្យមហាសង្ក្រាន្ត)
- ព្រះពុទ្ធរកសន្តិភាពប្រទាននគរសក្កៈ និងកោលិយៈ ក្នុងរឿងវិវាទដណ្ដើមទឹកស្ទឹងរោហិណី

ប្រទេសកម្ពុជាយើង ពីដើមគឺចាប់ពីត្រឹមសម័យក្រុងនគរធំឡើង ទៅ(មុនសម័យក្រុងនគរធំ)ជនជាតិខ្មែរយើងនិយមប្រើ ចន្ទគតិ (ដំណើរនៃព្រះចន្ទ) ជាសំខាន់ ទើបកំណត់លេខរៀង យកខែមិគសិរ ជាខែទី១ នៃការចូលឆ្នាំថ្មី រីឯ ខែកត្តិកជាខែ១២ នៃការបញ្ចប់ឆ្នាំ។ ការចូលឆ្នាំខែមិគសិរនេះ ក៏មានចែងក្នុងសេចក្ដីកត់ហេតុរបស់អ្នកប្រាជ្ញចិនម្នាក់ឈ្មោះ ជូតាក្វាន់ ដែលបានមកស្រុកខ្មែរក្នុងគ្រិស្តសករាជ ១២៩៥ នោះដែរ។

លុះក្រោយមក ប្រហែលពីពេលក្រោយដែលចាប់ផ្ដើមប្រើ ចុល្លសករាជមក ទើបខ្មែរយើងនិយមប្រើ សុរិយគតិ (ដំណើរនៃព្រះអាទិត្យ) ជាសំខាន់វិញ ហើយបានកំណត់ចូលឆ្នាំ នៅខែចេត្រ(ខែទី៥) ជាដើមឆ្នាំ តាមកំណត់ព្រះអាទិត្យចរចូលកាន់មេសារាសី ក្នុងរដូវក្ដៅ ជារៀងរាល់ឆ្នាំ ជាប់រហូត មកដល់សព្វថ្ងៃនេះ។ ថ្ងៃចូលឆ្នាំថ្មី រមែងចំលើថ្ងៃទី១៣ ខែមេសា(ខែចេត្រ) ជារៀងរាល់ឆ្នាំ ក៏ប៉ុន្តែ យូរៗម្ដងប៉ះចំថ្ងៃទី១៤មេសាដែរ។ មហាសង្ក្រាន្តដែលប្រើគន់គូរតាមសុរិយគតិ មានឈ្មោះថា 'សាមញ្ញសង្ក្រាន្ត' គឺព្រះអាទិត្យដើរចំត្រង់ពីលើក្បាល ជាសង្ក្រាន្ត។ រីឯមហាសង្ក្រាន្តដែលប្រើគន់គូរតាម ចន្ទគតិ ឈ្មោះថា 'អាយន្តសង្ក្រាន្ត' គឺព្រះអាទិត្យដើរបញ្ឆៀង មិនចំពីលើក្បាលទេ។ គេនៅប្រើចន្ទគតិអែបជាប់នឹងសុរិយគតិមិនអាចលុបចោលបាន ព្រោះចន្ទគតិមានទំនាក់ទំនងនឹងពុទ្ធប្បញ្ញត្តិ ជាច្រើន។ កាលណាព្រះចន្ទ និងព្រះអាទិត្យ ដើរឃ្លាតឆ្ងាយពីគ្នា ល្មមប្លូកគ្នាទៅបាន១ខែ ត្រូវគិតតាមសុរិយាត្រា គឺគិតបន្ថែម

១ខែទៅក្នុងចន្ទគតិ ដើម្បីអោយស្មើនឹងថ្ងៃ ក្នុងសុរិយគតិ ដែលហៅថា 'លើកអធិកមាស' គឺបន្ថែម១ខែ ទៅក្នុងចន្ទគតិ ដើម្បីអោយទៅជា១ឆ្នាំ មាន១៣ខែ។ ដូច្នេះការចូលឆ្នាំតាមចន្ទគតិ មិនទៀងថាចូលថ្ងៃណាពិតប្រាកដទេ ជួនចូលក្នុងវេលាខ្នើត ជួនក៏ចូលក្នុងវេលារនោច ក្នុងរវាង១ខែ គឺមិនមុនថ្ងៃ៤កើត ខែចេត្រ និងក៏មិនហួសពីថ្ងៃ៤កើត ខែពិសាខ។ ហេតុនេះហើយ បានជាសង្ក្រាន្តខ្លះត្រូវលើកអធិកមាសដល់ខែពិសាខ។

បុណ្យចូលឆ្នាំថ្មី ជាបុណ្យមានសារៈសំខាន់គួរអោយសប្បាយរីករាយ និងគួរអោយចាប់ចិត្តជាងគេ ក្នុងមួយឆ្នាំ។ ប្រជាពលរដ្ឋគ្រប់ជាន់ថ្នាក់ចំណាយប្រាក់កាស ទិញរបស់របរពោរពាស ដើម្បីប្រារព្ធពិធីបុណ្យចូលឆ្នាំថ្មី អោយបានត្រឹមត្រូវ។ គេបោសសំអាតគេហដ្ឋានយ៉ាងស្អាត។ តាក់តែងផ្កាភ្លើចំរុះពណ៌នៅក្នុងគេហដ្ឋាន និងតាមបង្អួចហាងទាំងឡាយ។

ក្នុង មហាសំការស្ងួត្រ មានរឿងសំខាន់មួយ ទាក់ទងនឹងបុណ្យចូលឆ្នាំថ្មី ឬបុណ្យមហាសង្ក្រាន្ត នេះថាៈ "ក្នុងកាលដើមនៃភទ្ទកប្បនេះ មានបុរសម្នាក់ ឈ្មោះ ធម្មបាល ជាបុត្រសេដ្ឋី រស់នៅក្នុងភូមិមួយ ជាអ្នកមានចំណេះវិជ្ជាដ៏វិសេស(បញ្ញាឯក) មានចិត្តសប្បុរស រៀនចេះចប់គម្ពីរត្រៃវេទ តាំងពីអាយុបាន៧ឆ្នាំ។ សេដ្ឋីបិតាសាងប្រាសាទអោយនៅទៀបនឹងដើមជ្រៃមួយធំ ប្របមាត់ទន្លេដែលជាទីអាស្រ័យនៅនៃបក្សាបក្សីទាំងឡាយ។ ធម្មបាលកុមារនោះ បានចេះទាំងភាសាសត្វបក្សាបក្សីទាំងពួងផង និងអាចដឹងនូវសម្លេងឃ្មុំ។ លុះក្រោយមកក៏បានក្លាយជាអាចារ្យ

សំដែងមង្គលផ្សេងៗដល់មនុស្សទាំងពួង។ ប្រជាពលរដ្ឋនាំគ្នាគោរពបូជា និងសសើរចំពោះកុមារនោះ រួចហើយ កិត្តិសព្ទរបស់កុមារក៏បានល្បីសុះសាយ រហូតឮទៅដល់ជនចម្លែកម្នាក់ទៀត ដែលជាអាទិទេព ដ៏មានឫទ្ធិអំណាចខ្លាំងពូកែ នៅឋានសួគ៌។

គ្រានោះ មនុស្សលោករមែងគោរពរាប់អានដល់ កបិលមហាព្រហ្ម មួយអង្គទៀត ចាត់ទុកជាអ្នកពូកែសំដែងមង្គលផ្សេងៗ ដល់មនុស្សទាំងពួង។ កបិលមហាព្រហ្ម គឺជាអាទិទេពមានព្រះភ័ក្ត្របួន ដែលអាចមើលឃើញទិសទាំង៤ ក្នុងពេលតែមួយ និង ជាអាទិទេពមានតុច្ឆភាព ឬជាស្តេចស្ងួត្រាស។ ព្រះអង្គមិនអាចទប់ព្រះទ័យបាន កាលបើទ្រង់ជ្រាបថា មាននរណាម្នាក់មានប្រាជ្ញាវៃឆ្លាតនិងចិត្តសប្បុរសដែលគេគោរពរាប់អានច្រើន។ ទោះបីជាយ៉ាងណា ក៏ព្រះអង្គបានជ្រាបច្បាស់ថា ប្រជាពលរដ្ឋទាំងនោះ ចាប់ផ្តើមជឿលើធម្មបាលកុមារ កាន់តែច្រើនឡើងៗ លើសពីព្រះអង្គ។ រឿងនេះ ធ្វើអោយព្រះអង្គមិនសព្វព្រះទ័យទាល់តែសោះ និងមិនអាចអនុគ្រោះបានសោះឡើយ។

ថ្ងៃមួយ កបិលមហាព្រហ្មយាងចុះអំពីឋានសួគ៌ ហើយភ្នាល់ជាមួយធម្មបាលកុមារ អោយឆ្លើយនូវប្រស្នាពយ៉ាងរបស់ព្រះអង្គ គឺៈ

១. តើសិរីសួស្តីរបស់មនុស្ស ពេលព្រឹកស្ថិតនៅកន្លែងណា?

២. តើសិរីសួស្តីរបស់មនុស្ស ពេលថ្ងៃត្រង់ស្ថិតនៅកន្លែងណា?

៣. តើសិរីសួស្តីរបស់មនុស្ស ពេលល្ងាចស្ថិតនៅកន្លែងណា?

ការភ្នាល់មានកតិតខ្ពស់ គឺថា បើធម្មបាលកុមារ ដោះប្រស្នាទាំងអស់រួច កបិលមហាព្រហ្មសុខចិត្តកាត់ព្រះកេសរបស់ព្រះអង្គ បូជាដល់កុមារ និងប្រសិនជាធម្មបាលកុមារ ដោះប្រស្នាទាំងពាយ៉ាងមិនរួច ព្រះអង្គនឹងកាត់ក្បាលធម្មបាលកុមារ ទុកធ្វើជាជ័យភណ្ឌ ក្នុងជ័យជំនះរបស់ព្រះអង្គ។ ធម្មបាលកុមារសុខចិត្តរកប្រស្នាទាំងអស់នោះនិងសុំបង្អង់៧ថ្ងៃសិន ដើម្បីគិតនូវប្រស្នានោះ។

ធម្មបាលកុមារចាប់ផ្ដើមរកចម្លើយប្រស្នារបស់កបិលមហាព្រហ្ម។ លុះវេលាកន្លងទៅ៦ថ្ងៃហើយ ធម្មបាលកុមារនៅតែគិតប្រស្នានោះ មិនឃើញ និងដឹងខ្លួនថា ព្រឹកស្អែកនេះអាត្មាអញនឹងត្រូវកំបុតក្បាលស្លាប់ដោយអាជ្ញារបស់កបិលមហាព្រហ្មមិនខាន។ បើដូច្នេះ គួរតែអញរត់ទៅលាក់ខ្លួនពួនអាត្មា អោយស្លាប់បង់ដោយខ្លួនឯងប្រសើរជាង។ គិតយ៉ាងនេះហើយ ធម្មបាលកុមារក៏ចុះអំពីប្រាសាទ ទៅពួនដេក នៅក្រោមដើមត្នោតមួយគុ។ នៅលើដើមត្នោតនោះ មានសត្វឥន្ទ្រីញីឈ្មោលធ្វើសំបុកអាស្រ័យនៅ។ វេលាយប់ឥន្ទ្រីញីសួរទៅឥន្ទ្រីឈ្មោលថា៖ "ព្រឹកស្អែកនេះយើងនឹងបានអ្វីធ្វើជាអាហារ?"។ ឥន្ទ្រីឈ្មោលឆ្លើយថា៖ "យើងនឹងបានស៊ីសាច់ធម្មបាលកុមារ ដែលត្រូវកបិលមហាព្រហ្មសម្លាប់ ពីព្រោះដោះប្រស្នាមិនរួច"។ ឥន្ទ្រីញីសួរថា៖ "តើប្រស្នានោះ មានន័យដូចម្ដេចខ្លះ?" ឥន្ទ្រីឈ្មោលប្រាប់ថា៖ "វេលាព្រឹក សិរីស្ថិតនៅត្រង់ណា? -ត្រូវឆ្លើយថា សិរីស្ថិតនៅលើមុខ។ វេលាថ្ងៃត្រង់ សិរីស្ថិតនៅត្រង់ណា? -ត្រូវឆ្លើយ

ថា សិរីស្ថិតនៅលើដើមទ្រូង។ និង វេលាល្ងាច សិរីស្ថិតនៅត្រង់ណា?
-ត្រូវឆ្លើយថា សិរីស្ថិតនៅលើជើង។ ហេតុដូច្នេះហើយ បានជាមនុស្ស យកទឹកមកលុបមុខ នៅពេលព្រឹក មកលាបទ្រូងនៅពេលថ្ងៃត្រង់ និង មកលាងជើង នៅពេលល្ងាច មុនពេលចូលដំណេក។ កាលបានស្តាប់ ឮពាក្យដូច្នោះហើយ ធម្មបាលកុមារក៏ត្រឡប់ទៅកាន់ប្រាសាទវិញ។

លុះព្រឹកស្អែកឡើង កបិលមហាព្រហ្ម ភ្ញាល់ចាញ់ធម្មបាលកុមារ ហើយក៏បង្ខំព្រះទ័យកាត់ព្រះកេសរបស់ព្រះអង្គ បូជាដល់ធម្មបាលកុមារ តាមកិច្ចសន្យា។ ទោះបីជាយ៉ាងណា ក៏មុនពេលបំពេញកិច្ចនេះ កបិលមហាព្រហ្មដ៏អភ័ព្វ បានហៅបុត្រីទាំង៧រូប ដែលជាបាទបរិចារិកាព្រះឥន្ទ មកប្រាប់ថា៖ "ឥឡូវនេះ បិតាត្រូវកាត់ក្បាលបូជាធម្មបាលកុមារ ក៏ប៉ុន្តែ បើដាក់ក្បាលនេះលើផែនដី ក៏នឹងកើតជាភ្លើង ឆេះលោកធាតុទាំងមូល បើបោះទៅលើអាកាស នឹងគ្មានភ្លៀងធ្លាក់អស់កាល៧ឆ្នាំ ហើយបើនឹង ចោលទៅក្នុងមហាសាគរ ក៏នឹងរីងស្ងួតហួតហែងអស់ទៅមួយរំពេច។"

ដើម្បីចៀសវាងនូវមហន្តរាយនោះ កបិលមហាព្រហ្មក៏ទ្រង់បញ្ជា អោយបុត្រីទាំង៧រូបរបស់ព្រះអង្គ ចែកវេនគ្នា ទ្រព្រះកេសព្រះអង្គដែល តំកល់ នៅលើពានមាស ម្នាក់ៗក្នុងរយៈពេល១ឆ្នាំ។ ព្រះអង្គទ្រង់បញ្ជា អោយបុត្រីច្បងឈ្មោះ ទុង្សា យកពានមកទទួលព្រះកេសព្រះអង្គ មុនគេ រួចហើយក៏ហែព្រះកេសនោះ ប្រទក្សិណភ្នំព្រះសុមេរុ ៦០នាទី ទើបយក ទៅប្រតិស្ឋានទុកក្នុងមណ្ឌបមួយ ក្នុងមហាគុហាគន្ធមាលី នៃភ្នំកៃលាស

ដើម្បីបូជាគ្រឿងទិព្វផ្សេងៗ។ ព្រះវិស្សកម្មទេវបុត្រក៏និមិត្តរោងមួយប្រកបដោយកែវ៧ប្រការឈ្មោះថា "ភគ្គវតីសភា" អោយជាទីប្រជុំនៃពួកទេវតាទាំងឡាយ។ លុះគំរប់១ឆ្នាំ ជាសង្ក្រាន្តហើយ គឺនៅពេលចូលឆ្នាំថ្មីម្តងៗ កូនស្រីកបិលមហាព្រហ្ម តែងតែនាំពួកទេពនិករបរិវារកញ្ញាទាំងមួយសែនកោដិ ហោះទៅកាន់ មហាគុហាគន្ធមាលី នៃភ្នំកៃលាស ក្នុងខេត្តហិមពាន្ត ដែលជាទីប្រតិស្ឋាននៃព្រះសិរសាកបិលមហាព្រហ្ម តំកល់ទុកលើពានមាសនោះ មកដង្ហែប្រទក្សិណភ្នំព្រះសុមេរុ ជុំចក្រវាឡ តាមផ្លូវព្រះអាទិត្យចរជាគំរប់៦០នាទី ហើយក៏អញ្ជើញទៅតំកល់ទុកកន្លែងដើមវិញ។ រួចមក ទើបប្រជុំអស់ទេវបុត្រនិងទេពធីតាទាំងឡាយមួយសែនកោដិចូលទៅស្រង់ទឹកមហាអនោត្តស្រះ ដែលមានកំពង់៧ ហូរចេញពីថ្មកែវដែលជាមាត់ គោឧសភរាជ យ៉ាងត្រជាក់ក្សេមក្សាន្តព្រះហឫទ័យ។ លុះស្រង់ទឹករួចហើយ ទើនាំគ្នាចូលទៅសមាទាន រក្សាសីល នៅឯក្នុងធម្មសាលា ដែលវិស្សកម្មទេវបុត្រពាននិម្មិតថ្វាយ។ កាលបន្ទោរបង់នូវអពមង្គលជ្រះស្រឡះហើយ រាល់ព្រះអង្គពានទទួលនូវសិរីសួស្តីជយមង្គល វិបុលសុខជន្មាយុស្សាយឺនយូរ តាំងពីចូលឆ្នាំថ្មីនេះមក។

មានរឿងមួយទៀតតំណាលថា៖ "កាលព្រះសម្ពុទ្ធទ្រង់គង់ព្រះជន្មនៅឡើយ *ព្រះបាទបសេនទិកោសល* ពានចូលទៅបង្គំទូលសួរព្រះអង្គថា 'បពិត្រព្រះអង្គដ៏ចំរើន! បើព្រះអាទិត្យចរចូលមកកាន់ទីជួបមួយជុំនៃរាសីចក្រនេះហើយ តើពួកពុទ្ធបរិស័ទ ត្រូវប្រតិបត្តិដូចម្តេច ដើម្បីអោយពាន

សេចក្ដីសុខ កុំអោយមានជម្ងឺតម្កាត់មកបៀតបៀន?"។

ព្រះមានព្រះភាគទ្រង់ត្រាស់ថា៖"បពិត្រមហារាជ! ត្រូវពុទ្ធបរិស័ទកុំមានសេចក្ដីប្រមាទ គឺកុំប្រមាទក្នុងអំពើទុច្ចរិត ដោយកាយ វាចា និងចិត្ត គឺត្រូវប្រព្រឹត្តអោយល្អ ក្នុងកុសលកម្មបថ១០"។

ដូច្នេះពាក្យថា សង្ក្រាន្ត គឺដំណើរឃ្លាតចាកទី ឈានចូលដល់ដំណើរដែលព្រះអាទិត្យចរចូលដល់ទីជួប មួយជុំនៃរាសីចក្រ ឬក៏ដំណើរដែលដើមនិងចុងនៃរាសីចក្រជួបគ្នា ពេញគ្រប់មួយឆ្នាំ បានដល់ការដាច់ឆ្នាំចាស់ ផ្លាស់ចូលឆ្នាំថ្មីនេះឯង។ ពោលគឺកំណត់យកពេល ព្រះកេសរបស់កបិលមហាព្រហ្មត្រូវប្តូរដៃគ្នាកាន់ ហើយឆ្នាំក៏ប្តូរដែរ។ ឧទាហរណ៍ដូចជា ឆ្នាំទៅមិញជាឆ្នាំឆ្លូវ ត្រូវប្តូរមកឆ្នាំនេះ ជាឆ្នាំខាល។

សេចក្ដីទំនាយនៅក្នុងគម្រោ មហាសំការសូត្រ បាននិយាយអំពីឈ្មោះទេពធីតាមហាសង្ក្រាន្តទាំង៧រូប និងគ្រឿងអាភរណៈរបស់នាងថា៖

បើសង្ក្រាន្តជា ថ្ងៃអាទិត្យ ទេពធីតាឈ្មោះ ទុង្សាទេវី សៀតផ្កាទទឹម គ្រឿងប្រដាប់បទុមរាគ ភក្សាហារផ្លែឧទុម្ពរ អាវុធស្ដាំចក្រ ឆ្វេងស័ង្ខ និង ពាហនៈគ្រុឌ។

បើសង្ក្រាន្ត ថ្ងៃចន្ទ ទេពធីតាឈ្មោះ គោរាគៈទេវី សៀតផ្កាអង្គាបុស្ស គ្រឿងប្រដាប់មុត្តា ភក្សាហារប្រេង អាវុធស្ដាំព្រះខ័ន ឆ្វេងកាន់ឈើច្រត់ និង ពាហនៈខ្លា។

បើសង្ក្រាន្ត ថ្ងៃអង្គារ ទេពធីតាឈ្មោះ រាក្សសាទេវី សៀតផ្កាឈូក គ្រឿងប្រដាប់មោរា ភក្សាហារលោហិត អាវុធស្តាំត្រីសូល៍ ឆ្វេងធ្នូ និង ពាហនៈអស្សតរ(សេះ)។

បើសង្ក្រាន្ត ថ្ងៃពុធ ទេពធីតាឈ្មោះ មណ្ឌាទេវី សៀតផ្កាចំប៉ា គ្រឿងប្រដាប់ពិទូរ្យ ភក្សាហារទឹកដោះ-សប្បិ អាវុធស្តាំម្ជុល ឆ្វេងឈើច្រត់ និង ពាហនៈលា។

បើសង្ក្រាន្ត ថ្ងៃព្រហស្បតិ៍ ទេពធីតាឈ្មោះ កិរិណីទេវី សៀតផ្កាមណ្ឌា គ្រឿងប្រដាប់មរកត ភក្សាហារសណ្តែក-ល្ង អាវុធស្តាំកង្វេរ ឆ្វេងកាំភ្លើង និង ពាហនៈដំរី។

បើសង្ក្រាន្ត ថ្ងៃសុក្រ ទេពធីតាឈ្មោះ កិមិរាទេវី សៀតផ្កាចង្កុលណី គ្រឿងប្រដាប់បុស្សរាគ៌ម ភក្សាហារចេកណាំវ៉ា អាវុធស្តាំព្រះខ័នឆ្វេងពិណ និង ពាហនៈក្របី។

បើសង្ក្រាន្ត ថ្ងៃសៅរ៍ ទេពធីតាឈ្មោះ មហោទរាទេវី សៀតផ្កាត្រកៀត គ្រឿងប្រដាប់នីលរតន៍ ភក្សាហារសាច់ទ្រាយ អាវុធស្តាំចក្រ ឆ្វេងត្រីសូល៍ និង ពាហនៈក្ងោក។

តាមទំនៀម ទេពធិតាទាំង៧រូបដែលត្រូវវេនចេញហែ ដៃម្ខាងទ្រពានមាសដែលតំកល់ក្បាលកបិលមហាព្រហ្ម ហើយមិនដែលជិះពាហនៈជារបៀបធម្មតាទេ គឺសុទ្ធតែសំដែងកិរិយាតាមបែបបទផ្សេងៗ ដូចជាគេ

លេងសៀក។ ប៉ុន្តែ គេបានកំណត់យកតាមពេលវេលាចេញ យ៉ាងដូច្នេះ៖

-ពីពេលព្រលឹមដល់ថ្ងៃត្រង់ :ជិះឈរលើខ្នងពាហនៈ មិនបាច់កាន់បង្ហៀរ ឬខ្សែទេ។

-ពីថ្ងៃត្រង់ដល់ពេលព្រលប់ :ជិះអង្គុយពាក់ធៀង។

-ពីព្រលប់ដល់កណ្ដាលអធ្រាត្រ :ជិះដេក បើកភ្នែក។

-ពីពាក់កណ្ដាលអធ្រាត្រដល់ភ្លឺ :ជិះដេក ធ្មេចភ្នែក។

បុណ្យចូលឆ្នាំថ្មី ប្រព្រឹត្តទៅអស់កាលបីថ្ងៃ ក្នុងខែចេត្រ ត្រូវនឹងថ្ងៃទី១៣,១៤,និង ១៥ ខែមេសា មានដូចតទៅនេះ៖

. ថ្ងៃទី១ ហៅ ថ្ងៃមហាសង្ក្រាន្ត ជាថ្ងៃចូលឆ្នាំដំបូង។

. ថ្ងៃទី២ ហៅ ថ្ងៃវ័នបត ជាថ្ងៃកណ្ដាល(ចែកឆ្នាំចាស់និងថ្មី)។

. ថ្ងៃទី៣ ហៅ ថ្ងៃឡើងស័ក្តិ ជាថ្ងៃចាប់ផ្ដើមចូលសករាជថ្មី។

ក្នុងថ្ងៃចូលឆ្នាំដំបូង ឬ ថ្ងៃមហាសង្ក្រាន្ត នៅតាមគេហដ្ឋានទីមួយៗ សមាជិកគ្រួសារម្នាក់ៗស្លៀកពាក់ស្អាតបាត មកអង្គុយជួបជុំគ្នា នៅមុខអាសនៈមានរៀបពលិកា រង់ចាំស្ដាប់សម្លេងស្គរពិវត្តឯនាយអោយសញ្ញាថា ឆ្នាំថ្មីនឹងមកដល់ឥឡូវហើយ។ កាលឮស្គរសម្លេងស្គររោទិ៍រណ្ដំហើយ ពិធីក៏ចាប់ផ្ដើមប្រព្រឹត្តទៅ។ ទានទិងធូបត្រូវបានដុតឡើង។ សមាជិកនៃគ្រួសារម្នាក់ៗក្រាបថ្វាយបង្គំព្រះពុទ្ធបដិមាករ បីដង និង នាំគ្នាចាប់ផ្ដើម

នមស្សការថ្វាយបង្គំព្រះរតនត្រ័យ (សូមអានទំព័រ១២)ព្រមទាំងនាំគ្នាសូម ស្វាគមន៍ចំពោះទេវតាឆ្នាំថ្មី ដែលជាអ្នកទទួលបន្ទុកថែរក្សាសុខមាលភាព មនុស្សជាតិ ក្នុងរយៈពេល មួយឆ្នាំ។ នៅក្នុងឱកាសនោះ ម្នាក់ៗបន់សុំ សេចក្ដីសុខ ចំរើនគ្រប់ប្រការ អំពីទេវតាឆ្នាំថ្មី ដោយយកទឹកមង្គលមក ស្រោចស្រពលើក្បាល និងខ្លួនប្រាណ តាមជំនឿរបស់ខ្លួន។

គ្រួសារនីមួយៗនាំកូនចៅ និងយកម្ហូបអាហារដែលបានតាក់តែង រួចហើយនោះ ទៅប្រគេនព្រះសង្ឃ នៅឯវត្ត ក្នុងវេលាមុនថ្ងៃត្រង់ និង ស្ដាប់ព្រះសង្ឃសូត្រមន្ត បំក្សុកូល។

គេអាចដឹងនូវ ឈ្មោះទេវតា គ្រឿងអលង្ការ ក្រយាស្ងោយ វត្ថុ ដែលព្រះអង្គកាន់ ព្រះរាជទីនាំង សេចក្ដីសុខទុក្ខ ឫក្ស ឬកាលបរិច្ឆេទ ដែលទេវតាឆ្នាំថ្មី ចុះមកទទួលវេនអំពីទេវតាឆ្នាំចាស់ កាលបរិច្ឆេទផ្លាស់ សករាជថ្មី អាកាសធាតុ និង ផលិតផលកសិកម្ម គន់គូរតាមក្បួនមហា សង្ក្រាន្ត បែបបូរាណ។ ឧទាហរណ៍: ឆ្នាំថ្មីនេះ ជាឆ្នាំខាល ស័រិទ្ធិស័ក ព.ស.២៥៤២ ទេវតាឆ្នាំថ្មីជាទេពធីតាព្រះនាមរាក្សសាទេវី គង់នៅឋាន ចាតុម្មហារាជិកា ទ្រង់សៀតផ្កាឈូកនៅព្រះកាណ៌ ទ្រង់អម្ពរពណ៌ស្វាយ ប្រដាប់ដោយមោរា សោយលោហិតជាអាហារ ព្រះហស្តស្ដាំទ្រង់ត្រី សូល៍ ព្រះហស្តឆ្វេងទ្រង់កៅទណ្ឌ(ធ្នូ) គង់លើខ្នងសេះ ជារាជទីនាំង។ ចូលឆ្នាំថ្មីនៅថ្ងៃអង្គារ ៣រោច ខែចេត្រ ត្រូវនឹងថ្ងៃទី១៤ ខែមេសា គ. ស. ១៩៩៨ វេលាម៉ោង ០៥:១២នាទី ព្រឹក។ ផ្លាស់សករាជថ្មី នៅថ្ងៃ

សុក្រ ៦រោច ខែចេត្រ ត្រូវនឹងថ្ងៃទី១៧ ខែមេសា ១៩៩៨ វេលាម៉ោង ០៥:១២នាទី ព្រឹក។ ភ្លៀងធ្លាក់៥០០មេ ធ្លាក់នៅលើចក្រវាឡ ២០០មេ ធ្លាក់នៅលើព្រៃហិមពាន្ត ១៥០មេ ធ្លាក់នៅលើមហាសមុទ្រ១០០មេ និងធ្លាក់នៅលើផែនដី៥០មេ។ ផលិផលកសិកម្ម ចំរើនតែ១០ភាគរយ ខូចខាតអស់៩០ភាគរយ។ ធញ្ញហារ ផល្លាហារ មច្ឆមំសាហារ មិនគ្រប់គ្រាន់។ ប្រជាពលរដ្ឋលំបាកវេទនា និងមានទុរភិក្ស ។ល។

ក្នុងថ្ងៃទី២ ថ្ងៃវ័នបត ម្នាក់ៗក្រោកពីព្រលឹម ខុសពីធម្មតា។ កូនចៅរៀបចំវត្ថុជាច្រើនមុខ យ៉ាងសមរម្យ មានសំលៀកបំពាក់ថ្មីថ្មោងនិងចំណីអាហារ យកទៅជូនដល់មាតាបិតា ជីដូនជីតា និងគ្រូបាធ្យាយន៍។ ការធ្វើរបៀបនេះ បង្ហាញអោយឃើញនូវការគោរពនិងការដឹងគុណរបស់កូនចៅចំពោះអ្នកមានគុណ។ គ្រួសារបរិច្ចាកលុយកាក់ដាក់ទានដល់ជនក្រីក្រ ដល់អ្នកបំរើ និងគ្រួសារទុគ៌តទាំងឡាយ រួចហើយគេនាំគ្នាទៅវត្តដើម្បីធ្វើបុណ្យឧទ្ទិសកុសលដល់បុព្វការីជន។

ក្នុងថ្ងៃទី២នេះ ពុទ្ធបរិស័ទនិយមប្រារព្ធពិធីពូនភ្នំខ្សាច់។ គេពូនភ្នំធំមួយចំកណ្តាល និង ភ្នំតូចៗ៤សងខាង ធ្វើរាជវតិព័ទ្ធជុំវិញ មានទ្វារចេញចូលបានទាំង៤ទិស ដែលហៅថា វាលុកចេតិយ ។ វាលុកចេតិយ គឺជាតំណាងចូឡាមណីចេតិយ ជាទីដែលពួកទេព្តាសាងបញ្ចុះព្រះមោលី (ព្រះកេសធាតុ) និង ព្រះទាឋាធាតុ(ព្រះចង្កូមកែវ) របស់ព្រះសម្ពុទ្ធជា

ម្ចាស់ នៅឯឋានត្រៃត្រឹង្ស ដោយសំគាល់ថា បានផលានិសង្សច្រើនផង បានរួចរំដោះអំពីគ្រោះចង្រៃ ក្នុងឆ្នាំចាស់ចេញស្រឡះផង និងបានទទួលសិរីសួស្តីក្នុងឆ្នាំថ្មី ជារៀងរហូតទៅផង។

មានមតិត្រឹមត្រូវមួយ ដែលអាចនាំអោយកើតជា បុណ្យកុសលថា ភ្នំធំនៅចំកណ្តាលនោះគឺជាតំណាងព្រះសក្យមុនីចេតិយ ជាទីបញ្ចុះព្រះសារីរិកធាតុព្រះអង្គ រីឯភ្នំតូច៤ទៀតជាតំណាងចេតិយបញ្ចុះអដ្ឋិធាតុរបស់ ព្រះសារីបុត្រ ព្រះមោគ្គល្លាន ព្រះអានន្ទ និង ព្រះមហាកស្សប ដែលជាសាវកសំខាន់ៗរបស់ព្រះអង្គ សុទ្ធសឹងជា ព្រះអរហន្តមានគុណធម៌ខ្ពស់ កំចាត់អំពើបាបរួចអស់ហើយ។ ម្យ៉ាងទៀត ខ្មែរយើងតែងមានជំនឿថា គ្រាប់ខ្សាច់មួយគ្រាប់ៗ ដែលបាក់ពូននោះ អាចផ្តល់អានិសង្សដល់អ្នកដែលបានពូននោះ អោយបានរួចរំដោះនូវបាបគ្រោះនិងកម្មពៀរវេរាទាំងពួងទៀតផង។

មហាសំការសូត្រ ក៏បានបញ្ជាក់អំពីអានិសង្សនៃការ ពូនភ្នំខ្សាច់នេះថា៖ "ពេលសង្រ្កាន្តថ្មីចូលមកដល់ ព្រះបាទបសេនទិកោសល បានចូលទៅទូលសួរព្រះដ៏មានព្រះភាគថា 'មុនពេលព្រះអង្គទ្រង់បរិនិព្វានទៅ បើដល់រដូវសង្រ្កាន្តចូលឆ្នាំថ្មីម្តងៗ តើខ្ញុំព្រះអង្គគួរបំពេញបុញ្ញកម្មអ្វីខ្លះ?"

ព្រះពុទ្ធទ្រង់ត្រាស់ថា៖ "បពិត្រមហារាជ! គួរសាង វាលុកចេតិយនៅឆ្នេរស្ទឹង ឬទន្លេ ហើយនាំយកគ្រឿងសក្ការៈមានទៀន ធូប គ្រឿងក្រអូប ផ្កាភ្ញី ជាដើម មកបូជាចុះ"។ ព្រះអង្គក៏បានត្រាស់បញ្ជាក់អំពី

អានិសង្សនៃការកសាង វាលុកចេតិយ ជាព្រះបាលីគាថាយ៉ាងដូច្នេះថា៖

"ពាលុកចេតិយំ កត្វា យេ នរា អថ នារិយា អន្នំ បានំ ខត្តំ បុប្ផំ គន្ធវិលេបនានិ អាហរិត្វា ចេតិយំ បូជំ កត្វា សទ្ធាយ ច អានិសំសំ មហប្ផលំ វេធ កុលេ ឧប្បជ្ជតិ ខត្តិយេ ចាបិ ព្រាហ្មណេ ហីនេ កុលេ ន ជាយន្តិ ពាលុកស្ស ឥទំ ផលំ"។

ប្រែថា: "នរៈនារីណាដែលបានសាង វាលុកចេតិយ ហើយបាន យកនូវ បាយ ទឹក សំពត់ ផ្កា គ្រឿងក្រអូប គ្រឿងលាប ជាដើមទៅ បូជាព្រះចេតិយនោះ ដោយសទ្ធាជ្រះថ្លា នរៈនារីនោះរមែងបានទទួលនូវ ផលានិសង្សច្រើន រមែងទៅកើតក្នុងត្រកូលពីរ គឺៈ ខត្តិយត្រកូល និង ព្រាហ្មណ៍ត្រកូល មិនទៅកើត ក្នុងត្រកូលថោកទាបឡើយ។ នេះជាផល នៃការសាងវាលុកចេតិយ"។

ក្នុងថ្ងៃទី៣ ថ្ងៃឡើងស័ក្តិ កម្មវិធីបុណ្យមានសារៈសំខាន់ ជាងថ្ងៃ ដទៃទៀត។ វេលាព្រឹក ពុទ្ធបរិស័ទនិមន្តព្រះសង្ឃប័ង្សុកូល ឆ្លងភ្នំខ្សាច់ វាលុចេតិយ។ វេលារសៀល មានការស្រង់ ព្រះពុទ្ធបដិមាករ ព្រះសង្ឃ និងមាតាបិតា ឬជីដូនជីតា។ ការងូតទឹកជំរះកាយជូនចំពោះមាតាបិតាឬ ជីដូនជីតា កូនចៅបានទទួលនូវពរសព្វសាធុការ និងដំបូន្មានល្អៗសំរាប់ អប់រំខ្លួន តទៅអនាគត។ រីឯ ការស្រង់ព្រះពុទ្ធបដិមាករ ជានិមិត្តរូបថា ទឹកគឺជាសេចក្តីត្រូវការចាំបាច់ចំពោះរុក្ខជាតិ និងជីវិតសព្វសត្វ។

មហាសំការសូត្រ ក្នុងគម្ពីរ សុត្តជាតក បញ្ជាក់អំពីអានិសង្សនៃការស្រង់ទឹកព្រះសង្ឃនិងមាតាបិតាថា៖ "កាលថ្ងៃសង្ក្រាន្តចូលមកដិតដល់ព្រះបាទបសេនទិកោសល បានរៀបចំបារាំយ៉ាងស្អាត នៅឈ្នោរស្ទឹងមួយរួចហើយក៏និមន្តព្រះពុទ្ធនិងព្រះសង្ឃស្រង់ទឹក ដោយមានសមាទានសីលប្រគេនភត្តាហារចំពោះព្រះពុទ្ធ និងព្រះសង្ឃទាំងអស់ ក្នុងទីនោះផង"។ គម្ពីរដដែលបញ្ជាក់ថា អ្នកណាបានស្រង់ទឹកព្រះសង្ឃ មាតាបិតា និងគ្រូឧបជ្ឈាយ៍ បានទទួលអានិសង្សច្រើនណាស់។ លុះដល់អនាគតជាតិនឹងបានទៅកើតក្នុងទេវលោកឋាន និងបានជាស្តេចចក្រពត្តិ មានបុណ្យបារមីច្រើន មានរូបសម្បត្តិល្អ មានទ្រព្យសម្បត្តិច្រើន មានសេចក្តីសុខគ្រប់បែបយ៉ាង ។ល។

ប្រទេសខ្មែរយើងសម័យបុរាណ ក្នុងរជ្ជកាលព្រះបាទជ័យវរ្ម័នទី៧ ពេលចូលឆ្នាំថ្មីម្តងៗ ពុទ្ធបរិស័ទតែងនិមន្តព្រះពុទ្ធរូបដ៏មានមហិទ្ធិឫទ្ធិ ២៥ អង្គ ដែលជាតំណាងនៃអាណាខេត្តទីមួយៗ ក្នុងព្រះរាជាណាចក្រកម្ពុជា មកធ្វើពិធីស្រង់ទឹក នៅប្រាសាទព្រះខ័ន(ឬប្រាសាទជ័យស្រី) រួចហើយគេដង្ហែព្រះពុទ្ធរូបគ្រប់អង្គ ជាក្បួនយ៉ាងមហោឡារិក គគ្រឹកគគ្រេង មុននឹងយកទៅទៅតំកល់ទុក នៅកន្លែងដើមវិញ។

រាជរដ្ឋាភិបាលក៏ប្រារព្ធបុណ្យឡើងស័ក្តិ ក្នុងថ្ងៃទីបីនេះដែរ ដើម្បីតម្លើងឋានន្តរសក្តិ ដល់ជនស៊ីវិលនិងទាហានណាដែលខំប្រឹងធ្វើការបំរើប្រទេសជាតិ អស់ពីសមត្ថភាព អោយឡើងកាន់តំណែង ក្រសួង និង

ឋានៈខ្ពង់ខ្ពស់។ រាជរដ្ឋាភិបាលប្រកាន់យក ព្រះពុទ្ធសាសនាថេរវាទ ថាជាសាសនារបស់រដ្ឋ។ ព្រះពុទ្ធទ្រង់ជ្រើសរើស ផ្លូវសន្តោស យោគយល់និងសេចក្តីស្រឡាញ់ ដើម្បីបញ្ឈប់នូវសេចក្តីលោភៈ ទោសៈនិងមោហៈ ហេតុដូច្នោះហើយ បានជាអ្នកទោសទាំងឡាយ ត្រូវបានបន្ធូរទោសឬក៏ដោះលែងអោយរួចខ្លួន មានសិទ្ធិសេរីភាពឡើងវិញ។

ក្នុងឱកាស បុណ្យចូលឆ្នាំ ទាំងបីថ្ងៃនេះ វេលាព្រឹក ពុទ្ធបរិស័ទនាំគ្នាទៅកាន់ទីវត្ត ប្រគេនចង្ហាន់ដល់ព្រះសង្ឃ សមាទានសីល៥ (សូមអានទំព័រទី២២) ពូនភ្នំខ្សាច់ និងនិមន្តព្រះសង្ឃបង្សុកូលឆ្លងភ្នំខ្សាច់នោះ ដើម្បីឧទ្ទិសវិញ្ញាណខន្ធ ជូនបុព្វការីជន (សូមអានទំព័រទី១៨៦)។ វេលារសៀល មនុស្សប្រុសស្រីក្មេងចាស់នាំគ្នាលេងល្បែងប្រជាប្រិយយ៉ាងរីករាយ ដូចជា នាំគ្នាបោះអង្គុញ បោះឈូង ទាញព្រ័ត្រ។ គេប្រជុំគ្នាច្រៀងនិងប្រឡែងគ្នាលេង សំដែងរបាំប្រជាប្រិយ ។ល។ មិត្រភ័ក្តិសើចក្អាកក្អាយ សត្រូវក្លាយជាមិត្រ និង បំភ្លេចនូវរឿងអាស្រូវចាស់ចោល។ គេធ្វើដំណើរកាត់ពីភូមិមួយទៅភូមិមួយ ពីវត្តមួយទៅវត្តមួយដើម្បីជួបជាមួយមនុស្សដទៃ ហើយលេងល្បែងប្រជាប្រិយកំសាន្តសប្បាយទាំងអស់គ្នា។ អ្នកខ្លះនាំគ្នាទស្សនា ប្រាំងប្រាសាទ ដែលជាបូជនីយដ្ឋាន ព្រៃភ្នំជ្រោះជ្រលងដងអូរ បឹងបួរ ឬមាត់សមុទ្រជាដើម។ ការលេងល្បែងស៊ីសងមិនមែនជាទំនៀមទំលាប់ របស់ខ្មែរយើងទេ ក៏ប៉ុន្តែ ជាអាវុធសំរាប់បំផ្លាញសុភមង្គលគ្រួសារ និងសង្គមទៅវិញ។

គំរោង: គំរោងត្រូវអនុវត្តយ៉ាងតឹងរ៉ឹង ក្នុងពេលបុណ្យចូលឆ្នាំថ្មីបីថ្ងៃនេះ។ ពាក្យកំហឹង ឥរិយាបទច្រងេងច្រងាង និងការវាយតប់គ្នាត្រូវតែហាមឃាត់ ជាដាច់ខាត។ ម្នាក់ៗត្រូវប្រយ័ត្ន ក្នុងការជេរ ប្រទេចសត្វ ទោះបីជា សត្វចិញ្ចឹម មាន ជ្រូក គោ ក្របី សេះ ដំរី ឆ្កែ ឆ្មា និង សត្វជាតុជទៃទៀតក៏ដោយ។ ត្រូវអោយទឹក ដុសលាងអោយបានស្អាតបាត បំប៉នចំណីអាហារ និង ក្នុងករណីខ្លះ សត្វខ្លះត្រូវដោះលែងអោយមានសេរីភាព ទៀតផង។

មានសារៈមួយ បង្កប់ក្នុងរឿងមិនធម្មតានេះ។ មុខទាំងបួនរបស់កបិលមហាព្រហ្ម គឺជានិមិត្តរូបនៃព្រហ្មវិហារធម៌ទាំង៤ ដែលព្រះសម្មាសម្ពុទ្ធទ្រង់បានទូន្មាន គឺ: មេត្តា១ ករុណា១ មុទិតា១ និង ឧបេក្ខា១។ ព្រហ្មវិហារធម៌គឺជាគុណសម្បត្តិខាងផ្លូវចិត្ត មានសារៈប្រយោជន៍សំរាប់សហវិជ្ជមានសន្តិភាព និង សហប្រតិបត្តិការ នៅក្នុងសង្គម។ ប្រសិនជាមនុស្សគ្រប់រូបមិនប្រតិបត្តិតាមព្រហ្មវិហារធម៌ទាំងបួននេះ ហើយបោះបង់ធម៌ទាំងនោះចោល បញ្ហាស្មុគស្មាញក្នុងសង្គម នឹងកើតមានឡើងពុំខានឡើយ។ ដូច្នេះ ម្នាក់ៗត្រូវមានព្រហ្មវិហារធម៌ ប្រចាំកាយ ប្រតិបត្តិចំពោះព្រះកេសកបិលមហាព្រហ្ម ដោយប្រុងប្រយ័ត្នយ៉ាងណា ប្រព្រឹត្តចំពោះព្រហ្មវិហារធម៌ អោយដូចជាយ៉ាងនោះឯង។

បុណ្យចូលឆ្នាំខ្មែរមានគោលបំណងច្បាស់លាស់មួយ ដែលគ្មានផ្លាស់ប្តូរតាំងអំពីបុរាណកាល(ក្រុងនគរធំ) រហូតមកដល់សព្វថ្ងៃនេះ គឺៈ

(១). កសាងជីវភាពផ្ទាល់ខ្លួន និងសង្គមថ្មី ព្រមទាំងបំភ្លេចនូវរឿងរាវអពមង្គលក្នុងឆ្នាំចាស់ចោល។

(២). អបអរចំពោះធម្មជាតិ និងផលិតផលកសិកម្ម ក្នុងក្ដីសង្ឃឹមថា ឆ្នាំក្រោយភោគផលនឹងបានបរិបូណ៌។

(៣). សំដែងកតញ្ញូតាធម៌ ចំពោះបុព្វការីជន មាន មាតាបិតា ជីដូនជីតា និងគ្រូបាធ្យាយន៍ ជាដើម។

(៤). អបអរសាទរចំពោះស្នាដៃលែលអមតៈ របស់បុព្វការីជន។

(៥). គោរពវិញ្ញាណក្ខន្ធនៃវីរបុរសអ្នកស្នេហាជាតិ គ្រប់ជំនាន់។

(៦). ទំនុកបំរុងនិងរក្សាព្រះពុទ្ធសាសនា អស់កាលយូរអង្វែង។

(៧). បណ្ដុះ ព្រហ្មវិហារធម៌ និង សាមគ្គីធម៌ ក្នុងដួងចិត្តខ្មែរយើងគ្រប់ៗរូប។

នៅថ្ងៃទី៤ ប្រជាពលរដ្ឋគ្រប់រូប ត្រឡប់ទៅប្រកបមុខការ ប្រចាំជីវិតរៀងៗខ្លួនវិញ អស់មានកង្វល់អ្វី ទៀតឡើយ។ ទោះបីជាយ៉ាងណាក៏បុណ្យចូលឆ្នាំថ្មីមិនទាន់កន្លងផុត ទាំងស្រុងដែរ ថ្ងៃបុណ្យនៅតែបន្តជាវិសាមញ្ញនៅក្នុងចំណោមមនុស្សជាច្រើន ទាល់តែគេចំណាយអស់ប្រាក់បំរុងទុក ក្នុងឱកាសបុណ្យចូលឆ្នាំថ្មីនោះ។

# ព្រះពុទ្ធ រកសន្តិភាពប្រទាននគរសក្កៈ និងកោលិយៈ ក្នុងរឿងវិវាទដណ្ដើម ទឹកស្ទឹងរោហិណី

នៅរដូវប្រាំងខែចេត្រ រាំងស្ងួតហួតហែងមួយ ព្រះរាជាណាចក្រពីរ គឺៈសាក្យៈ និង កោលិយៈ មានវិវាទឈ្លោះទាស់ទែងគ្នាមិនចេះចប់ អំពីរឿងទឹកធ្វើស្រែ។ កសិករទាំងពីរប្រទេសធ្វើស្រែអាស្រ័យលើទឹកស្ទឹងរោហិណី។ បន្ទាប់ពីព្រះអង្គបានទទួលដំណឹងនេះមក ព្រះពុទ្ធទ្រង់សំរេចព្រះហឫទ័យយាងទៅជួយសម្រុះសម្រួលក្នុងរឿងវិវាទដណ្ដើមទឹកនោះ។

សាក្យនគរគ្រប់គ្រងដោយព្រះបាទមហានាមដែលត្រូវជាបងប្អូនជីដូនមួយនឹងព្រះពុទ្ធ។ រីឯកោលិយនគរគ្រប់គ្រងដោយព្រះបាទសុប្បពុទ្ធដែលត្រូវជាព្រះបិតាក្មេក របស់ព្រះពុទ្ធ។ កោលិយៈក៏ជានគរកំណើតរបស់ព្រះនាងសិរិមហាមាយា ដែលត្រូវជាព្រះវរមាតារបស់ព្រះពុទ្ធដែរ។ ព្រះនាងពិម្ពាយសោធរា ដែលជាមហេសីរបស់ព្រះអង្គ ក៏យាងមកអំពីកោលិយនគរ។ ព្រះនាងពិម្ពាយសោធរានិងទេវទត្ត ជាបងប្អូនបង្កើតនឹងគ្នា និងជាបុត្រី-បុត្រារបស់ព្រះបាទសុប្បពុទ្ធ។

ប្រទេសទាំងពីរ យកស្ទឹងរោហិណីធ្វើជាព្រំដែន។ ដោយសារតែមានការរាំងស្ងួត នគរទាំងពីរ ក៏ពុំមានទឹកគ្រប់គ្រាន់សំរាប់បញ្ចូលស្រែ។

ស្តេចនៃនគរទាំង២ចង់ធ្វើទំនប់កាត់ស្ទឹងដើម្បីចែកទឹកដែលនៅសល់បន្តិចបន្តួចនោះ។ ជម្លោះកើតឡើងមុនដំបូង គ្មានអ្វីក្រៅអំពីកសិករជេរបញ្ចោគ្នា និងយកដុំថ្មចោលគ្នា ទៅវិញទៅមក នោះឡើយ។ ម្តងៗនាំគ្នាយកតម្អូញទៅការពារប្រជាពលរដ្ឋរបស់ខ្លួន។ ចុងក្រោយបំផុត គេបានយកទាហានទៅវាយតាមសង្ខាងមាត់ស្ទឹង។ ដោយមានការតានតឹងខ្លាំងឡើងៗសង្គ្រាមហាក់ដូចជាចង់ផ្ទុះឡើង ដោយសារតែការវិវាទនេះ។

ដំបូងបង្អស់ ព្រះដ៏មានព្រះភាគចង់ជ្រាបអំពីដើមហេតុនៃជម្លោះពិតប្រាកដ។ ពេលព្រះអង្គត្រាស់សួរឧត្តមសេនីយម្នាក់ ខាងសាក្យនគរនៅជិតមាត់ស្ទឹង ឧត្តមសេនីយនោះបានឆ្លើយថា ប្រជាពលរដ្ឋខាងនគរកោលិយជាអ្នកគំរាមកំហែងដល់ជីវិត និងទ្រព្យសម្បត្តិរបស់ប្រជាពលរដ្ឋខាងសាក្យៈនគរ។ ពេលព្រះអង្គទ្រង់ត្រាស់សួរទៅឧត្តមសេនីយម្នាក់ខាងកោលិយនគរម្តងវិញ គេក៏ចោទប្រកាន់ថាប្រជាពលរដ្ឋខាងសាក្យៈនគរបានទៅគំរាមកំហែងដល់ជីវិតនិងទ្រព្យសម្បត្តិរបស់គេដែរ។ ប៉ុន្តែ ពេលព្រះអង្គត្រាស់សួរទៅកាន់កសិករតាមជនបទផ្ទាល់វិញ ទើបព្រះអង្គជ្រាបច្បាស់ថា ប្រភពនៃជម្លោះពិតប្រាកដនោះ គឺការខ្វះទឹកសំរាប់ធ្វើស្រែ។

ដោយសារតែព្រះអង្គស្គាល់សន្តតិវង្សទាំងសង្ខាង យ៉ាងជិតស្និទ្ធព្រះពុទ្ធអាចយាងក្សត្រទាំងពីរព្រះអង្គ អោយមកប្រជុំដោះស្រាយនូវវិបត្តិនោះ។ ទ្រង់ព្រះតំរិះថា នគរទាំងពីរអាចខូចប្រយោជន៍ក្នុងសង្គ្រាមដូចគ្នាទោះបីតិចក្តី ច្រើនក្តី បើព្រះអង្គមិនជួយដោះស្រាយ ទើបព្រះអង្គត្រាស់

នឹងក្សត្រទាំងឡាយនោះថា៖ "បពិត្រមហារាជទាំងឡាយ! ទឹក និងក្សត្រ (ជីវិតមនុស្ស) ណាមួយមានតម្លៃជាង?"

ពួកញាតិវង្សក្រាបបង្គំទូលថា៖ "បពិត្រព្រះអង្គដ៏ចំរើន! ទឹកមានតម្លៃតិច ចំណែកឯជីវិតមនុស្ស មានតម្លៃរកប្រមាណមិនបានឡើយ។"

ព្រះពុទ្ធទ្រង់ត្រាស់បន្តថា៖ "អ្នកទាំងឡាយអាស្រ័យទឹក ដែលមានតម្លៃតិច ហើយញ៉ាំងជីវិតមនុស្សដែលមានតម្លៃច្រើន ប្រមាណមិនបានអោយវិនាសសាបសូន្យ តើសមរម្យដែរឬទេ?"

ពួកក្សត្រទាំងឡាយបានឆ្លើយព្រមគ្នាថា៖ "មិនសមទេ ព្រះអង្គ!"

ព្រះពុទ្ធទ្រង់ត្រាស់នឹងក្សត្រទាំងពីរអង្គថា៖ "បពិត្រមហារាជទាំងឡាយ! សេចក្តីត្រូវការទឹកគ្រប់គ្រាន់សំរាប់បញ្ចូលស្រែគឺជាបុព្វហេតុពិតនៃជម្លោះនេះ។ បពិត្រមហារាជ! បើសិនជាគ្មានសេចក្តីមានះនិងកំហឹង ជម្លោះប្រាកដជាងាយដោះស្រាយ។ ដូច្នេះ ត្រូវតែដោះស្រាយ តាមការសម្រុះសម្រួលគ្នាដោយសន្តិវិធីវិញ ប្រសើរជាង។ មហារាជទាំងពីរព្រះអង្គ មិនចាំបាច់ត្រូវការធ្វើសង្គ្រាមទេ។ សូមកុំបង្ហូរឈាមប្រជាពលរដ្ឋរបស់ព្រះអង្គ ដោយសារតែសេចក្តីមានះនិងកំហឹងអោយសោះ។ នៅថ្ងៃណាមួយ សេចក្តីមានះនិងកំហឹងនេះ នឹងត្រូវរលាយសាបសូន្យទៅ ដោយឯកឯង។ ការតានតឹងដែលនាំអោយមានសង្គ្រាមក៏នឹងត្រូវបាត់បង់ដែរ។ សូមមហារាជទាំងឡាយ តង់អោយស្រួលព្រះទ័យ រួចហើយចរចាគ្នារកដំណោះស្រាយយ៉ាងណា ដើម្បីនឹងចែកបាទឹកដែលនៅសល់ទាំងប៉ុន្មាន

អំពីការរាំងស្ទួននេះ អោយបានស្ងើត្តាទៅ។"

ដោយការប្រទាននូវព្រះយោបល់ដ៏សមរម្យ និងយុត្តិធម៌ របស់ព្រះដ៏មានព្រះភាគមក គូវិវាទទាំងសង្ខាងក៏បានមកដល់ការយល់ព្រមគ្នាយ៉ាងឆាប់រហ័សបំផុត។ ភាពកក់ក្ដៅនិងស្និទ្ធស្នាលរវាងប្រទេសទាំងពីរក៏បានកើតមានឡើងវិញជាធម្មតា។

ព្រះបាទមហានាមអង្វរសូមព្រះពុទ្ធគង់ចាំព្រះវស្សាឆ្នាំនេះ(វស្សាទី១៥ បន្ទាប់អំពីព្រះពុទ្ធទ្រង់បានត្រាស់ដឹង) នៅនិគ្រោធារាម ជិតក្រុងកបិលពស្តុ ក្នុងដែនសាក្យៈ។

ព្រះដ៏មានព្រះភាគទ្រង់ព្រះមេត្តាប្រោស ដោយតុណ្ហីភាព។



# ០២. ខែ ពិសាខ (ឧសភា)

## រំលឹកដល់

- បុណ្យច្រត់ព្រះនង្គ័ល
- បុណ្យវិសាខបូជា
  - ព្រះពោធិសត្វទ្រង់ប្រសូត
  - ព្រះសមណគោតមត្រាស់ដឹងសម្មាសម្ពោធិញ្ញាណ
  - ព្រះពុទ្ធទ្រង់ព្រះបរិនិព្វាន

# បុណ្យច្រត់ព្រះនង្គ័ល



ពិធីច្រត់ព្រះនង្គ័លប្រព្រឹត្តទៅ ជារៀងរាល់ឆ្នាំ នៅថ្ងៃ៤រោច ខែពិសាខ នៅក្នុងវាលព្រះស្រែ(វាលមេរុ) ស្ថិតនៅជាប់ពីខាងជើងព្រះរាជវាំង និងពីខាងមុខសាលារចនា នាទីក្រុងភ្នំពេញ។

បុណ្យនេះជារាជពិធី បែបលទ្ធិព្រាហ្មណ៍ ដែលសព្វថ្ងៃគេនិយមហៅថា "និទាឃសិរម្ម"។ រដូវវស្សាចូលមកដល់ភ្លៀងចាប់ធ្លាក់ កសិករក៏ចាប់ផ្តើមធ្វើស្រែចំការឲ្យរដំណាំ តាមភូមិស្រុករៀងៗខ្លួន។ ដើម្បីបើកការដ្ឋានកសិកម្មនេះ ព្រះរាជា ឬប្រមុខរដ្ឋ តែងប្រារព្ធ ពិធីសុំទឹកភ្លៀង និងភ្ជួរស្រែ ដែលហៅថា 'ពិធីច្រត់ព្រះនង្គ័ល'។

រាជពិធី 'ច្រត់ព្រះនង្គ័ល' នេះ ជាសាសនពិធីមួយ ដ៏សំខាន់ជាប់ទាក់ទងនឹងពុទ្ធប្បវត្តិ ដោយមានសេចក្តីតំណាលមកថា៖ "ថ្ងៃមួយពេលព្រះសិទ្ធត្ថកុមារ គំរប់ព្រះជន្ម៩ឆ្នាំ ព្រះអង្គបានចូលរួមក្នុងពិធីច្រត់ព្រះនង្គ័ល ដែល ព្រះមហាក្សត្រ ព្រះបាទសិរីសុទ្ធោទន៍ ជាព្រះវរបិតាទ្រង់បានប្រារព្ធឡើង ជាលើកដំបូង ក្នុងខែពិសាខ នៅក្នុងវាលព្រះមេរុមួយ ជិតព្រះរាជវាំង នារាជធានីកបិលពស្តុ។ ដោយបព្វជិតព្រាហ្មណ៍សូត្រធម៌យូរពេក និង ដោយអាកាសធាតុក្តៅស្ទះផង ធ្វើអោយព្រះរាជកុមារអផ្សុក ក៏យាងចេញពីហ្វូងមនុស្ស តែមួយព្រះអង្គឯង ទៅគង់នៅក្រោមម្លប់ដើមព្រីង(ជម្ពូព្រឹក្ស)ដ៏ត្រជាក់ក្បែរផងផ្លូវជិតវាលព្រះមេរុនោះ។

ពេលបព្វជិតព្រាហ្មណ៍សូត្រធម៌ចប់ ព្រះបាទសុទ្ធោទន៍ទ្រង់យាងចុះកាន់ព្រះស្រែ ហើយក៏ទ្រង់ចាប់ផ្តើមភ្ជួរនូវគន្លងដំបូងនៃរដូវ។ បន្តមក

ទើបពួកកសិករចាប់ភ្ជួរតាមពីក្រោយព្រះអង្គ។ ដោយឮសូរសម្លេងមនុស្ស ស្រែកហោកញៀវខ្លាំងពេក ធ្វើអោយព្រះពោធិសត្វអត់ទ្រាំពុំបាន ក៏ព្រះអង្គរត់ឆ្ពោះទៅកាន់ឯខាងចុងព្រះស្រែ។ គ្រានោះ ព្រះអង្គបានទតឃើញ សត្វគោខំប្រឹងអូសនង្គ័លយ៉ាងធ្ងន់ ហើយកសិករក៏វាយសំពងសត្វគោនោះ នឹងរំពាត់ខ្សែតី បង្ខំអោយអូសទៅមុខ យ៉ាងពិបាក។ ខណៈដែលនង្គ័ល ផ្ងាក់អាចម៍បំណះ ព្រះពោធិសត្វសំគាល់ឃើញ មានសត្វជន្លេនខ្លះ ត្រូវកាត់ដាច់ជាកំណាត់ៗ និងខ្លះទៀតត្រូវសត្វស្លាបឆាបឆក់ចឹកពាំនឹងចំពុះ នាំយកទៅ។ ព្រះអង្គក៏ទ្រង់ទតឃើញ សត្វស្លាបធំៗឆាបចុះ រួចខ្ទាំយ៉ាង ជាប់នូវសត្វស្លាបតូចៗក្នុងក្រញាំ។ ជាពិសេស ព្រះអង្គបានទតឃើញ សត្វពស់មួយកំពុងតែលេបបង្កួយ យ៉ាងពិបាក រួចហើយក៏ស្រាប់តែមាន សត្វខ្លែងមួយយ៉ាងធំ មកឆាបខ្ទាំសត្វពស់នោះបន្តទៅទៀត។ ព្រះអង្គក៏ យាងត្រឡប់ទៅកាន់ម្លប់ដើមព្រីងនោះវិញយ៉ាងរហ័ស។ ព្រះអង្គទ្រង់គង់ បត់ព្រះភ្នែន បិទព្រះនេត្រទាំងពីរចុះ រួចទ្រង់កំណត់ នូវអានាបានុស្សតិ ញុំាំងបឋមឈានអោយកើតឡើង។ ព្រះអង្គផ្ចោតព្រះអារម្មណ៍ខ្លាំងជាង គេតែទៅលើរូបភាពសត្វទាំងឡាយ ដែលកើតឡើងនៅក្នុងព្រះស្រែនោះ។ ព្រះពោធិសត្វទ្រង់ព្រះចិន្តាថា៖ "ឱ សត្វលោកទាំងឡាយ! កំពុងតែមាន ជីវិតរស់នៅសុខៗ ម្តេចឡើយក៏សម្លាប់គ្នាទៅវិញទៅមកយ៉ាងដូច្នោះ?" ដោយព្រះវរមាតា ព្រះនាងសិរីមហាមាយា ទើបសោយព្រះទិវង្គតស័យ ទៅពេលថ្មីៗនោះផង រឹងរឹតតែធ្វើអោយព្រះអង្គកើតមានសេចក្តីសង្វេគ

យ៉ាងខ្លាំងដល់ជីវិតសត្វតូចធំទាំងអស់នោះ។

គ្រាន់តែចប់ពិធីច្រត់ព្រះនង្គ័លភ្លាម ព្រះមហាក្សត្រជាព្រះវរបិតា និងព្រះនាងបជាបតីគោតមី ជាព្រះមាតុច្ឆា បានយាងមករក ព្រះសិទ្ធត្ថកុមារ នៅក្រោមម្លប់ព្រឹងនោះភ្លាម។ ទាំងពីរព្រះអង្គ បានទតឃើញព្រះពោធិសត្វកំពុងគង់ស្ងៀងស្ងាត់នៅនឹងថ្កល់មួយកន្លែង យ៉ាងស្ងៀមស្ងាត់។ សភាពបែបនេះ ធ្វើអោយព្រះរាជាទ្រង់បាប់ភ្លឹក និងព្រះចិន្តា អស់មួយស្របក់ថា: "បើបុត្រានៃអាត្មាអញចេះអង្គុយស្ងៀងស្ងាត់តែមួយព្រះអង្គឯងតាំងពីព្រះជន្មនៅក្មេងខ្ចីយ៉ាងនេះ ម្ល៉េះសមពាក្យព្យាករណ៍របស់ អសិតតាបស នឹងក្លាយជាការពិត ពុំខានឡើយ។"

កាលបានទតឃើញនូវបាដិហារ្យដ៏អស្ចារ្យយ៉ាងដូច្នេះហើយ ព្រះរាជាក៏ទ្រង់ទម្លាក់ព្រះកាយក្រាបថ្វាយបង្គំព្រះរាជបុត្រាម្តងទៀត ជាលើកទីពីរ ក្នុងពេលនោះភ្លាមទៅ។ រួចហើយ ព្រះរាជាក៏យាងត្រឡប់ទៅកាន់ព្រះរាជនិវេសនដ្ឋានវិញ តែមួយព្រះអង្គឯង ដោយយានអាជានេយ្យ។

មិនយូរប៉ុន្មាន ព្រះពោធិសត្វសិទ្ធត្ថ ក៏បើកព្រះនេត្រឡើង ទ្រង់ទតឃើញព្រះមាតុច្ឆាបជាបតីគោតមី កំពុងតែញញឹមដាក់ព្រះអង្គ។ ព្រះពោធិសត្វទូលសួរទៅព្រះនាងថា: "បពិត្រព្រះមាតា! ទូលបង្គំគិតថាទោះបីជាបព្វជិតព្រាហ្មណ៍ទាំងនោះ ខំសូត្រធម៌តាមគម្ពីរត្រៃវេទ យ៉ាងណាក៏ដោយ ក៏មិនអាចជួយសង្គ្រោះ ដល់ជីវិតសត្វ គោ ក្របី ជន្លេន ពស់ បង្កួយ និងសត្វស្លាប ទាំងអស់នោះបានដែរ។"

ព្រះនាងគោតមីទ្រង់គ្មានព្រះវាចាអ្វី ក្រៅពីឯកព្រះសិរសបព្រះអង្គវិញយ៉ាងស្ងាត់ស្ងៀមនោះឡើយ។"

នៅក្នុងរឿងរាមកេរ្តិ៍ ក៏មាននិទានថា ព្រះបាទទសរថ នៅពេលកំពុងភ្ជួរស្រែ ទ្រង់បានរើសនាងសីតាពីក្នុងគន្លងនង្គ័ល។ ជនជាតិខ្មែរក៏បានប្រារព្ធពិធីច្រត់ព្រះនង្គ័លនេះតាំងពីសម័យបុរេប្រវត្តិសាស្ត្រមកម្ល៉េះ។

ពិធីច្រត់ព្រះនង្គ័ល ត្រូវចាប់ភ្ជួរដោយព្រះរាជា (ស្ដេចមាគ៌) ឬព្រះរាជតំណាងនិងព្រោះពូជស្រូវពីក្រោយដោយព្រះអគ្គមហេសី(មីហ៊ួ)។ ភ្ជួរគំរប់៣ជុំ ដើម្បីជានិមិត្តរូបនៃការចាប់ផ្ដើមរដូវ ធ្វើកសិកម្ម។ នៅខាងចុងព្រះស្រែ មានរៀបពានតំកល់គ្រាប់ធុញ្ញជាតិ ដូចជាស្រូវ ល្ង ពោត សណ្ដែក ទឹក ស្រា ជាដើម ។ល។ សំរាប់គោពិសិដ្ឋ ដែលទឹមអូសនង្គ័លនោះស៊ី។ គេមានជំនឿថា បើគោដ៏ពិសិដ្ឋនោះ ស៊ីគ្រាប់ធុញ្ញជាតិណា ឆ្នាំដែលនឹងមកដល់នោះត្រូវសំបូរផលដោយគ្រាប់ធុញ្ញជាតិនោះ។ ក្បួនធ្វើបុណ្យនេះទាក់ទងទៅនឹងលិទ្ធិព្រាហ្មណ៍ មានក្បួនដង្ហែអមដោយវង់តន្ត្រីលើកពិជានិងចង្រៀងគោម។ សម័យពុទ្ធកាល មានពួកព្រាហ្មណ៍សូត្រធម៌វេទ យ៉ាងវែងអន្លាយ តែសម័យឥឡូវ មានព្រះសង្ឃសូត្រធម៌ជយន្តោប្រសិទ្ធិពរជ័យ ជំនួសវិញ។

ថ្ងៃព្រហស្បតិ៍ ១៥កើត ពេញបូរមី ខែអាសាឍ ឆ្នាំរកា (មុន ព.ស. ៨០ឆ្នាំ និង១០ខែ) ក្នុងវេលាព្រឹក ព្រះនាងមាយាទេវី ដែលជាព្រះអគ្គមហេសីនៃព្រះបាទសុទ្ធោទន៍ ជាស្តេចសាមន្តរាជក្នុងសក្យត្រកូល ប្រទេសនេប៉ាល់ បានធ្វើបុណ្យនិងបរិច្ចាគទានជាទ្រព្យអស់ចំនួន៤សែនកហាបណៈ ដល់ប្រជាពលរដ្ឋ។ លុះដល់ពេលរាត្រី ព្រះនាងសមាទានឧបោសថសីល រួចហើយក៏ឡើងទៅផ្ទំលើសិរីសយនា ក្នុងព្រះខែនបន្ទំ។ ព្រះនាងបានសុបិននិមិត្តឃើញថា មានចាតុម្មហារាជបួនអង្គ មកលើកព្រះនាងទាំងសិរីសយនា នាំទៅកាន់ព្រៃហេមពាន្ត រួចក៏តម្កល់ទុក លើផ្ទាំងមនោសិលាដ៏ធំ ខាងក្រោមដើមរាំងដ៏ធំមួយ។ ពេលនោះ ទេពធីតាទាំងឡាយរបស់ចាតុម្មហារាជ ក៏បានយាងព្រះនាងទេវី ទៅស្រង់ព្រះភក្ត្រ នៅក្នុងស្រះអនោតត្ត ដើម្បីជំរះព្រះកាយ និង បានលាបនូវគ្រឿងសុគន្ធវិលេបនៈ ថ្វាយព្រះនាងទៀតផង។ នៅជិតស្រះនោះ មានភ្នំមួយដែលមានប្រាសាទមាស(សុវណ្ណវិមាន) ដ៏ល្អវិចិត្រមួយ សង់នៅលើកំពូល។ ទេពធីតាទាំងឡាយ បានយាងព្រះនាងទៅផ្ទំ នៅក្នុងប្រាសាទមាសនោះ ដោយយកព្រះសិរទៅទិសខាងកើត។ មានភ្នំមាស(សុវណ្ណគីរី)មួយ នៅជិតនោះដែរ ហើយមានដំរីស ភ្លុក៦(សេតហត្ថី) ស្រស់ឆើតឆាយមួយ មានសម្បុរសស្គុសដូចភ្នំទឹកកកមានប្រមោយកាន់ជាប់នូវផ្កាឈូកក្រហម (សេតបទុមជាតិ) ហោះចុះអំពីភ្នំមាសនោះ ដោយមានតន្ត្រីករ និងអ្នកចម្រៀង ប្រគំនិងច្រៀង នូវបទថ្វាយព្រះពរ ហែហមកំដរ មកជាមួយ

យ៉ាងតត្រឹតតគ្រេង។ នៅពេលចុះមកដល់ជិតប្រាសាទមាស ដំរីសភ្លុក៦ ក៏ដើរសន្សឹមៗតម្រង់ទៅកាន់ព្រះនាងទេវី ដែលទ្រង់កំពុងតែផ្ទំលង់លក់។ ដំរីសដើរប្រទក្សិណបីជុំ មុននឹងដាក់ផ្កាឈូកក្រហម ចូលទៅក្នុងព្រះគភ៌ របស់ព្រះនាង។ ដំរីសខ្លួនឯងក៏ហាក់ដូចជា ដើរចូលទៅក្នុងឧទរប្រទេស (គភ៌) ខាងស្តាំរបស់ព្រះនាងមាយាទេវីដែរ។ ក្នុងគ្រានោះឯង ព្រះនាង ហាក់ដូចជាមានព្រះសុខភាពស្រួល និងសព្វព្រះហឫទ័យ ក្នុងព្រះចិន្តា យ៉ាងខ្លាំង។ ព្រះនាងគ្មានព្រះហឫទ័យគិតពិចារណាថា មានការពិបាក ភិតភ័យ ឬក៏ឈឺចាប់ចុកចាប់អ្វីសោះឡើយ។ បន្ទាប់មក ព្រះនាងក៏ចាក និទ្រាឡើង ដោយមានព្រះហឫទ័យសោមនស្សរីករាយនៅក្នុងបរមសុខ។ ពេលយាងចុះចាកពីព្រះទែនបន្ទំមក ព្រះនាងនៅតែឮសូរសម្លេងតូរ្យតន្ត្រី នៃសុបិន ឧរមិនដាច់សូរ នៅក្នុងព្រះសោតា។ ដោយមិនចង់សម្ងំលាក់ រឿងនេះទុកដល់ថ្ងៃស្អែក ព្រះនាងមាយាទេវី ក៏ប្រញាប់យាងចូលទៅបង្គំ គាល់សួរព្រះស្វាមី ព្រះបាទសុទ្ធោទន៍នូវរឿងសុបិននិមិត្តដ៏ចម្លែកអស្ចារ្យ នេះ។ ព្រះរាជាទ្រង់កោតស្ញប់ស្ញែងនូវរឿងសុបិនដ៏ចម្លែកនេះណាស់។

លុះព្រឹកស្អែកឡើង ព្រះរាជាទ្រង់ត្រាស់បង្គាប់អោយរាជបុរសទៅ អញ្ជើញពួកព្រាហ្មណ៍ មកគន់គូរគាត់សប្តិនោះ ថាតើមានអត្ថន័យយ៉ាង ណាដែរ។ ពួកព្រាហ្មណ៍សោតក៏ទូលនូវទំនាយតាមប្រការទាំងឡាយថាៈ "បពិត្រព្រះសម្មតទេព! ព្រះអង្គម្ចាស់ក្សត្រិយ៍ នឹងប្រសូតនូវព្រះបុត្រា មួយព្រះអង្គ ដែលនឹងក្លាយជាអ្នកនាំមុខនៃរាជាណាចក្រដ៏ឆ្នើម ហើយ

ព្រះរាជកុមារនឹងមានវាសនាធ្វើជាព្រះអធិរាជដែលមានឥទ្ធានុភាព ខ្លាំងពូកែអាចនាំមុខសត្វលោកគ្រប់ទិសទាំងបួនយ៉ាងល្បីល្បាញឬក៏នឹងក្លាយជាមហាសាស្តាចារ្យដ៏កំពូលដែលអាចនាំមុខសព្វសត្វ ទាំងក្នុងឋានសួគ៌ និងទាំងក្នុងឋានមនុស្សលោក អោយគោរពប្រតិបត្តិតាមព្រហ្មចរិយធម៌។ បពិត្រមហារាជ! នគររបស់យើងរង់ចាំអ្នកមានបុណ្យបែបនេះ កើតឡើងជាយូរយាណាស់មកហើយ។"

ព្រះបាទសុទ្ធោទន៍ទ្រង់ញញឹមតបព្រាហ្មណ៍វិញ ដើម្បីបង្ហាញនូវការសព្វព្រះរាជហឫទ័យ។

បន្ទាប់ពីបានប្រឹក្សាប្តូរព្រះយោបល់ជាមួយព្រះអគ្គមហេសីរួចមក ព្រះរាជាក៏ទ្រង់បញ្ជាអោយបើយកទ្រព្យចេញអំពីឃ្លាំងយកទៅចែកជាទានដល់ប្រជាពលរដ្ឋ ដែលក្រខ្សត់អត់ឃ្លាន ទូទាំងប្រទេស។ ការធ្វើដូច្នោះបណ្តាលអោយប្រជាពលរដ្ឋដឹងថា ព្រះមហាក្សត្រ និងព្រះអគ្គមហេសីនឹងប្រសូតនូវបុត្រមួយព្រះអង្គក្នុងពេលអនាគតដ៏ខ្លីខាងមុខជាមិនខាន។ ព្រះនាងមាយាទេវី ជាស្ត្រីប្រកបដោយគុណធម៌ដ៏ធំធេង។ ព្រះនាងមានព្រះទ័យស្រឡាញ់រាប់អានមនុស្ស-សត្វទាំងអស់ ឥតមានប្រកាន់ឡើយ។

តាំងអំពីថ្ងៃដែលព្រះបរមពោធិសត្វចាប់បដិសន្ធិ មកទល់នឹងថ្ងៃព្រះអង្គប្រសូត គំរប់មួយទសមាសគត់ (១០ខែ) មានទេវបុត្របួនអង្គដែលមានព្រះហស្តកាន់ព្រះខ័ន ឃ្លាំចាំរក្សានិងការពារនូវសេចក្តីអន្តរាយមិនអោយកើតមានដល់ព្រះទារក និងព្រះវរមាតាឡើយ។

តាមទំនៀមទំលាប់នៃជនជាតិឥណ្ឌា នាសម័យនោះ កាលណាដល់ពេលសំរាលបុត្រម្តងៗ ស្ត្រីឥណ្ឌាតែងតែត្រឡប់ទៅសំរាលបុត្រ នៅខាងផ្ទះមាតាបិតានៃខ្លួនវិញ។ ចំពោះព្រះនាង សិរិមហាមាយា ក៏ដូច្នោះដែរ ពេលព្រះគភ៌បរិបូណ៌គំរប់១០ខែហើយ ព្រះនាងក៏មានព្រះទ័យយាងទៅកាន់វេទហៈនគរ ដែលជាជាតិភូមិរបស់ព្រះនាង ទើបយាងទៅក្រាបបង្គំទូលព្រះភស្តា ដើម្បីសុំរាជានុញ្ញាត។ ព្រះរាជាជ្រាបសព្វហេតុការណ៍ ទើបទ្រង់អនុញ្ញាតនិងត្រាស់បញ្ជាអោយរាជអាមាត្យទាំងឡាយរៀបចំក្បួនរទេះគោ និងរទេះសេះ ដើម្បីនឹងដង្ហែព្រះអគ្គមហេសីយាងចូលទៅកាន់វេទហៈនគរនោះ។

លុះដល់ថ្ងៃសុក្រ ១៥កើត ពេញបូរមី ខែពិសាខ ឆ្នាំច (មុន ព.ស. ៨០ឆ្នាំគត់) ព្រះនាងមហាមាយាទេវី យាងចូលទៅថ្វាយបង្គំលាព្រះភស្តា ហើយក៏ចេញព្រះដំណើរទៅកាន់ស្រុកកំណើតជាមួយនឹងពួកសេនា គឺលៀង ដែលជាបរិវារ។ នៅក្នុងព្រះរាជដំណើរ ព្រះនាងបានឈប់សំរាកព្រះកាយ នៅពាក់កណ្តាលផ្លូវ ក្នុងឧទ្យានដ៏ល្អប្រណិតមួយឈ្មោះ លុម្ពិនី ដែលស្ថិតនៅចំព្រំដែននៃនគរទាំងពីរគឺៈ កបិលពស្តុ និង និង វេទហៈ (បច្ចុប្បន្ន ហៅ រុម្មិនដេ នៅក្នុងខេត្ត ពិហារ នៃប្រទេសនេប៉ាល់)។ ព្រៃលុម្ពិនី មានខ្យល់ត្រជាក់បក់ស្រួលណាស់ រុក្ខជាតិ និងវល្លិជាតិ លូតលាស់ខៀវស្រងាត់ គួរអោយគយគន់។ បុប្ផជាតិរីកស្គុសស្គាយ និងចោលក្លិនសុគន្ធពិដោរក្រអូបសាយ។ មានសត្វម្រឹគម្រឹគារត់

ចុះឡើង និង បក្សាបក្សីតូចធំប្រចិកប្រលែងគ្នាលេង យ៉ាងអឺងកងរំពងឰៀវក្រា។ ភាពដ៏សែនមនោរម្យនេះហើយ ដែលធ្វើអោយអ្នកធ្វើដំណើរទាំងឡាយ ចូលឈប់សំរាកយកកម្លាំង នៅទីឧទ្យានលុម្ពិនីនេះ មុននឹងបន្តដំណើរទៅមុខទៀត។

ព្រះនាងមាយាទេវីសព្វព្រះហឫទ័យចូលទៅប្រពាតក្នុងព្រៃម្លុំនេះ។ ពួករាជអាមាត្យក៏យាងព្រះនាងចូលទៅ។ ពេលយាងទៅដល់ក្រោមដើមរាំងភ្នំមួយ (ឬ ដើមសាលព្រឹក្ស) ព្រះនាងទ្រង់ឈោងព្រះហស្តខាងស្តាំចាប់កាច់ផ្ការាំងភ្នំមួយទង។ ក្សិណនោះ ព្រះនាងក៏មានព្រះអារម្មណ៍ធឹងធោង ទើបស្រវាព្រះហស្តចាប់មែករាំងភ្នំនោះ ដើម្បីទប់ព្រះអង្គប្រាណ។ ស្រីស្នំទាំងឡាយបានឃើញនិងយល់នូវហេតុថា ព្រះនាងនឹងប្រសូតបុត្រក្នុងពេលឥឡូវនេះហើយ ក៏នាំគ្នាយកព្រះសន្ទិយា(រាំងនន) ទៅបិទបាំងនៅក្រោមដើមរាំងភ្នំនោះ។ ព្រះនាងទ្រង់ឈរប្រតោងមែករាំងភ្នំរហូតដល់ព្រះពោធិសត្វទ្រង់ប្រសូតចាកព្រះឧទរ ក្នុងវេលាថ្ងៃជិតត្រង់។ ព្រះទារកមានព្រះរូបឆោមលោមពណ៌ល្អបរិសុទ្ធ មានព្រះសុខភាពល្អបរិបូណ៌និងគ្រប់ព្រះលក្ខណៈ ក្នុងថ្ងៃសុក្រ ១៥កើត ពេញបូណ៌មីខែពិសាខ ឆ្នាំច។ ព្រះទារកត្រូវបានស្រីស្នំទាំងឡាយយកទៅស្រង់ព្រះភក្ត្រ ជុសលាងមន្ទិលគភ៌ និងរុំដណ្តប់ដោយសំពត់សូត្រពណ៌លឿង។

តាមប្រភពមហាជន ដែលបានឃើញការប្រសូតនេះ ផ្ទាល់ភ្នែកបាននិយាយថា៖ ពេលព្រះនាងមាយាទេវី យាងចូលដល់ក្រោមម្លប់ដើម

រាំងភ្នំ នៅក្នុងសួនលុម្ពិនីនោះ ក៏មានព្រះទ័យចង់ឈោងចាប់មែករាំងភ្នំ។ ប៉ុន្តែ ព្រះនាងឈោងចាប់ពុំដល់ ក៏ស្រាប់តែមែករាំងភ្នំនោះ ទោរទន់ចុះមកក្រោមដោយឯកឯង ដើម្បីអោយព្រះនាងចាប់។ រួចមកព្រះនាងទ្រង់ប្រឈូនព្រះឧទរ ប្រសូតនូវព្រះពោធិសត្វដោយស្រួល និងមានទឹកក្តៅ ទឹកត្រជាក់ហូរធ្លាក់ចុះមកដោយឯកឯងដើម្បីលាងមន្ទិលគភ៌។ ពេលទ្រង់ប្រសូតមកភ្លាម មានពួកសុទ្ធាវាសមហាព្រហ្មទាំងបួន យកផ្ទាំងសំពត់ពណ៌មាស(បណ្តាញមាស) មកទទួល។ ចាតុម្មហារាជ រក្សាទិសទាំង៤ បានទទួលយកអំពីមហាព្រហ្ម។ ពួកស្រីស្នំក៏ទទួលយកពីដៃចាតុម្មហារាជបន្តទៅទៀត។ មហាព្រហ្មក៏យកស្វេតឆ័ត្រ (ខ្លោះ) មកបើកបាំងថ្វាយ។ សុយាមទេវរាជ យកវិជនី(ផ្លិត)មកបក់ថ្វាយ។ ទេវបុត្តមួយអង្គកាន់កែវ៧ប្រការ ទេវបុត្តមួយអង្គកាន់សុវណ្ណបាទុក(ស្បែកជើងមាស)និងទេវបុត្តមួយអង្គទៀត កាន់គ្រឿងប្រដាប់រាជ៥យ៉ាង (កុក្កុធភ័ណ្ឌ) គឺ: មកុដ១ ព្រះខ័ន១ ស្វេតឆ័ត្រ១ សុពណ៌បាទ១ និងវាលវិជនី១។ ព្រះពោធិសត្វក៏ទ្រង់ប្រមើលមើល ទៅកាន់ទិសទាំង១០ គឺ: ទិសធំ៤ ទិសតូច៤ និងទិសខាងក្រោម និងខាងលើ ក៏ពុំឃើញមានជនណាម្នាក់ស្មើនឹងព្រះអង្គឡើយ ទើបព្រះអង្គកំណត់ទុកក្នុងព្រះហឫទ័យថា: នេះជាទិសខាងជើង (ឧត្តរ)។ វេលានោះ ព្រះពោធិសត្វទ្រង់ប្រថាប់ឈរបែរព្រះភ័ក្ត្រទៅទិសឧត្តរនោះ រួចហើយទ្រង់យាងទៅអស់៧ជំហាន និង ក្នុងជំហាននីមួយៗ មានផ្កាឈូកលេចចេញអំពីដី មកទ្រព្រះបាទព្រះអង្គ។ បន្ទាប់មក ទើប

ព្រះពោធិសត្វបន្លឺនូវព្រះអភិសវាចាថា៖ " ខ្ញុំនអញជាកំពូលនៃលោក ជាបុគ្គលដ៏ប្រសើរវិសេសលើសគេក្នុងលោក ជាចម្បងជាងគេទាំងអស់នៅក្នុងលោក ជាតិនេះ គឺជាកំណើតចុងក្រោយបំផុតរបស់អាត្មាអញហើយ អំណើះអំពីជាតិនេះទៅ អាត្មាអញនឹងមិនកើតទៀតឡើយ។"

ពេលរាជបរិពារទាំងឡាយ ដង្ហែព្រះនាងមាយាទេវី និងរាជបុត្រាមកដល់វាំងវិញ ព្រះមារកត្រូវបានពួកស្រីស្នំ នាំយកទៅងូតលាងជម្រះមន្ទិលនឹងទឹកក្តៅឧណ្ហៗ ម្តងទៀត មុននឹងយកទៅផ្ទេកជិតព្រះវរមាតា។

កាលបានជ្រាបច្បាស់នូវដំណឹងនេះហើយ ព្រះបាទសុទ្ធោទន៍ ក៏ស្តេចយាងមកជាបន្ទាន់ ដើម្បីជួបជាមួយនឹងព្រះអគ្គមហេសីនិងព្រះរាជបុត្រា។ ព្រះមហាក្សត្រទ្រង់ព្រះអំណរយ៉ាងខ្លាំង កាលបានទតឃើញព្រះអគ្គមហេសី និងព្រះឱរស បានសេចក្តីសុខ។

ទារាត្រីនោះមានឥសីមួយអង្គឈ្មោះអសិតតាបស(ឬកាឡទេវិល) គង់ក្នុងព្រៃជិតព្រះរាជវាំងនោះ និងត្រូវជាជីតុន(គ្រូអាចារ្យ) នៃព្រះបាទសុទ្ធោទន៍ផង បានសង្កេតឃើញមានពន្លឺរស្មីចាំងផុសត្រចែតឡើងនៅម្តុំជុំវិញ ព្រះរាជនិវេសនដ្ឋាន នៃព្រះមហាក្សត្រ។ អសិតតាបសក៏បានគាត់យល់ថាហេតុការណ៍នេះជាប្រផ្នូលមួយដ៏ពិសេសអស្ចារ្យ លោកក៏និមន្តចុះអំពីលើភ្នំ ដោយទប់អង្គកាយនឹងឈើច្រត់ ចូលមកកាន់សំណាក់ព្រះរាជា ដើម្បីសួរសុខទុក្ខ។ ពេលអសិតតាបសនិមន្តដល់ ព្រះរាជាទ្រង់ធ្វើគារវកិច្ចស្វាគមន៍រួចស្រេចហើយ ក៏ទ្រង់ត្រាស់បង្គាប់អោយស្រីស្នំនាំយក

ព្រះពោធិសត្វមកបង្ហាញអសិតតាបស ដើម្បីពិនិត្យមើល។ ពេលអសិតតាបសអោនពិនិត្យនូវរូបលក្ខណៈនៃព្រះរាជកុមារ ស្រាប់តែព្រះបាទទាំងគូ របស់ព្រះពោធិសត្វក្រឡាលអំពីដៃស្រីស្នំ ទៅប្រថាប់ពីលើព្រះកេសអសិតតាបស ដោយថៃដន្យ។ អសិតតាបសស្រវាទម្លាក់ខ្លួនក្រាបថ្វាយបង្គំព្រះរាជកុមារ អស់ចំនួនបីដង ដោយគោរព។ កាលព្រះរាជាបានទតឃើញនូវភាពដ៏ចម្លែកអស្ចារ្យដូច្នោះកើតឡើង ក៏ទ្រង់លុតជង្គង់ថ្វាយបង្គំបុត្ររបស់ព្រះអង្គជាលើកទី១ ដូចអសិតតាបសក្នុងពេលនោះភ្លាមដែរ។

បន្ទាប់ពីបានពិនិត្យនូវព្រះលក្ខណៈនៃព្រះពោធិសត្វសព្វគ្រប់មក អសិតតាបសក៏ព្យាករក្នុងខ្លួនថា៖ "ព្រះរាជកុមារនេះ នឹងបានត្រាស់ជាព្រះពុទ្ធ ឥតមានសេចក្ដីសង្ស័យឡើយ។"

កាលបានដឹង នូវហេតុយ៉ាងដូច្នោះហើយ អសិតតាបសក៏តាំងសើចក្អាកក្អាយ មួយសន្ទុះមកក៏បែរជាយំសោកយ៉ាងខ្លាំងទៅវិញ។ ព្រះរាជាស្រឡាំងកាំងទើបស្ដេចត្រាស់សួរភ្លាមថា៖ "កាឡទេវិលឥសី! តើមានរឿងអ្វីកើតឡើងឬ? តើព្រះរាជកុមារនេះ ឥតមានក័ព្វសំណាងទេឬអ្វី?"

អសិតតាបសលើកដៃជូតទឹកភ្នែក គ្រវីព្រះកេសមុននឹងទូលព្រះរាជាថា៖ "បពិត្រមហារាជ! ព្រះរាជកុមារនេះ មិនមែនជាអ្នកឥតឲ្យបាយទេ បើសិនជានៅគ្រប់គ្រងគេហដ្ឋានក៏នឹងបានជាស្ដេចចក្រពត្តិ បើចេញទ្រង់ព្រះផ្នួសនឹងបានជាសាស្ដាឯកក្នុងលោក។ ព្រះអង្គជាមហាបុរស នៃពន្ទីត្រាស់ដឹង ដែលយកឋានសួគ៌និងឋានមនុស្ស ធ្វើជាលំនៅឋានរបស់

ព្រះអង្គ និងយកសត្វលោកទាំងអស់ ជាញាតិសន្តាន។ ការដែលអាត្មាសើចនោះ ក៏ព្រោះតែអាត្មាមានអំណរចំពោះព្រះអយ្យបុត្រនឹងបានត្រាស់ជាព្រះពុទ្ធមួយអង្គ ក្នុងពេលខាងមុខនេះ។ ប៉ុន្តែហេតុដែលអាត្មាយំវិញនោះ ក៏ព្រោះតែអាត្មាគិតអាណិតខ្លួនឯងថា ជាមនុស្សអភ័ព្វ ឥតព្រេងវាសនា នឹងនៅទាន់ព្រះពុទ្ធដូចគេ និង គ្មានភ័ព្វសំណាងបានស្តាប់នូវសម្លេងព្រហ្មចរិយធម៌ ដែលព្រះអង្គបានរកឃើញផង។ បពិត្រមហារាជ! ព្រះអង្គនិងនគររបស់ព្រះអង្គ មានភ័ព្វសំណាងខ្ពស់ណាស់ ដែលមានព្រះពោធិសត្វដ៏មានបុណ្យបែបនេះ កើតឡើងនៅក្នុងព្រះនគរ។"

ការទស្សន៍ទាយរបស់អសិតតាបស ធ្វើអោយព្រះរាជាមានព្រះទ័យខ្វល់ខ្វាយយ៉ាងខ្លាំង ពីព្រោះទ្រង់មិនចង់អោយបុត្រាតែមួយក្លាយជាអ្នកបួស ដូចពួកតាបសឥសី រស់នៅក្នុងព្រៃភ្នំក្រំថ្មនោះឡើយ។

បន្ទាប់ពីព្រះរាជកុមារប្រសូតបានប្រាំថ្ងៃមក ព្រះមហាក្សត្រទ្រង់ប្រារព្ធនូវពិធីថ្វាយព្រះនាមដល់ព្រះរាជនិរស ទើបទ្រង់កោះប្រជុំអស់ពួកវង្សក្សត្រ ប្រមុខមន្ត្រី និងព្រាហ្មណ៍ទាំងឡាយនៅក្នុងព្រះរាជនិវេសន៍។ ព្រះរាជានិមន្តព្រាហ្មណ៍១០៨រូបមកទទួលចង្ហាន់ ក៏ប៉ុន្តែ ព្រះរាជាទុកតែព្រាហ្មណ៍៨រូប ដែលជាអ្នកចេះចាំស្ទាត់នូវគម្ពីរត្រៃវេទ ដើម្បីព្យាករណ៍និងថ្វាយព្រះនាម។ ព្រាហ្មណ៍ទាំង៨រូបនោះគឺៈរាមព្រាហ្មណ៍១ លក្ខណៈព្រាហ្មណ៍១ យញ្ញព្រាហ្មណ៍១ ធជព្រាហ្មណ៍១ ភោជព្រាហ្មណ៍១ សុទត្តព្រាហ្មណ៍១ សុយាមព្រាហ្មណ៍១ និង កោណ្ឌញ្ញព្រាហ្មណ៍១។

ព្រាហ្មណ៍ទាំង៧ខាងដើម បានលើកម្រាមដៃពីរ ទាយជាពីរចំណែកដូចជាអសិតតាបសដែរ ថា៖ "បពិត្រព្រះសម្មតិទេព! បើព្រះរាជកុមារនៅជាឃរាវាស សោយរាជសម្បត្តិទៅ នឹងបានជាស្តេចចក្រពត្តិប្រកបដោយគុណធម៌ ជាធម្មរាជ ជាឥស្សរៈលើមហាទ្វីប ដែលមានមហាសមុទ្រទាំងបួនជាព្រំប្រទល់។ ព្រះអង្គជាស្តេចគ្រប់គ្រងលើផែនដីនៃទ្វីបទាំងបួននោះដោយមិនបាច់ប្រើអាជ្ញាឬគ្រឿងសស្ត្រាវុធអ្វីឡើយ។ ព្រះអង្គនឹងយកព្រះធម៌ទៅអប់រំទូន្មានសត្វលោកទាំងឡាយដោយស្មើៗគ្នា។ បើព្រះរាជកុមារនឹងចេញទៅសាងបព្វជ្ជាវិញនោះ ព្រះអង្គនឹងបានត្រាស់ជា ព្រះអរហំសម្មាសម្ពុទ្ធ ក្នុងលោកទាំងមូល។"

ចំពោះកោណ្ឌញ្ញព្រាហ្មណ៍(ទី៨) ដែលជាព្រាហ្មណ៍មួយអង្គនៅក្មេងជាងគេ បានលើកចង្អុលដៃតែមួយទាយថា៖ "បពិត្រមហារាជ! ព្រះរាជកុមារនេះ ពុំមែនជាអ្នកនៅគ្រប់គ្រងគេហដ្ឋានទេ ព្រះអង្គពិតជានឹងយាងចេញសាងព្រះផ្នួស ដោយឥតមានអ្វីមកទប់ទល់បានឡើយ ហើយនឹងបានត្រាស់ជា 'ព្រះពុទ្ធ' មួយអង្គ យ៉ាងពិតប្រាកដ។"

បន្ទាប់ពីបានទាយថ្វាយរួចហើយ ពួកព្រាហ្មណ៍ទាំងអស់ក៏ស្រុះស្រួលមូលមតិគ្នា ថ្វាយព្រះនាមដល់ព្រះអង្គថា៖ "សិទ្ធត្ថ" មានន័យថា "អ្នកធ្វើប្រយោជន៍គ្រប់យ៉ាងអោយសំរេច"។ លុះក្រោយមក ព្រះអង្គក៏បានទទួលគោត្តនាមមួយឈ្មោះ "គោតម" មកប្រើគូបជាមួយគ្នាហៅថា "សិទ្ធត្ថគោតម"។ មហាជននិយមហៅតាមគោត្រនាមថា "គោតម"។

បន្ទាប់អំពីព្រះពោធិសត្វប្រសូតបាន៧ថ្ងៃមក ព្រះនាងមាយាទេវី សោយព្រះវិលាល័យ យ៉ាងតក់ក្រហល់ជាទីបំផុត។ ព្រះបាទសុទ្ធោទន៍ក៏តែងតាំងព្រះនាងបជាបតីគោតមី ដែលជាព្រះអនុជក្សត្រិយ៍ នៃព្រះនាងមាយាទេវី អោយឡើងធ្វើជា ព្រះមហាក្សត្រិយានី។ ព្រះនាងបជាបតីក៏មានបុត្រាមួយអង្គដែរ ព្រះនាម នន្ទ ហើយព្រះនន្ទកុមារមានព្រះជន្មប្អូនជាងព្រះពោធិសត្វតែពីរបីថ្ងៃប៉ុណ្ណោះ។ ព្រះនាងបជាបតីគោតមីទទួលធ្វើជាមេនំ បំបៅ និងបីបាច់ថែរក្សាព្រះពោធិសត្វ ដោយព្រះទ័យប្រោសប្រណី ដូចជាព្រះមាតាបង្កើត តរៀងមក។



# ព្រះសមណគោតមទ្រង់ត្រាស់ដឹង



កាលព្រះសិទ្ធត្ថមានវ័យចំរើនឡើង ក៏បានសិក្សាវិជ្ជាអក្សរសាស្ត្រ និងយុទ្ធសាស្ត្រក្នុងសំណាក់គ្រូឈ្មោះ វិស្វាមិត្រ ។ លុះព្រះជន្មគំរប់១៦ ឆ្នាំ នៅថ្ងៃអាទិត្យ ពេញបូរមី ខែកត្តិក ឆ្នាំឆ្លូវ ទ្រង់ទទួលរាជាភិសេក ជាមួយព្រះនាងពិម្ពាយសោធរា ដែលមានព្រះជន្មតំណាលគ្នា និងឡើង សោយរាជ្យជាធំ លើសក្យវង្ស គ្រប់គ្រងក្រុងកបិលពស្តុ ស្នងព្រះបាទ សុទ្ធោទន៍ ជាព្រះវររាជបិតា។ សោយរាជ្យបាន ១៣ឆ្នាំ ក្នុងព្រះជន្ម២៩ ឆ្នាំ ទ្រង់បានព្រះរាជបុត្រមួយអង្គ ព្រះនាម រាហុល ។ នៅថ្ងៃព្រហស្បតិ៍ ពេញបូរមី ខែអស្សុជ ឆ្នាំថោះ ទ្រង់យាងចេញទៅទ្រង់ព្រះផ្នួសដើម្បីនឹង ស្វែងរកមោក្ខធម៌ ដោយការប្រព្រឹត្តទុក្ករកិរិយាអត្តកិលមថានុយោគ និង ពិសោធរកពោធិញ្ញាណ នាឆ្នេរស្ទឹងអនោមា ក្នុងឧរុវេលាប្រទេស មគធ រដ្ឋ។ ក្រោយពីពេលទ្រង់លះការប្រព្រឹត្តទុក្ករកិរិយាចេញហើយ ទ្រង់បែរ មកបំពេញមជ្ឈិមាបដិបទា នៅក្រោមដើមពោធិព្រឹក្សមួយ ខាងលិចស្ទឹង នេរញ្ជរា នាមណ្ឌលគយា (សព្វថ្ងៃហៅ ពុទ្ធគយា) ឋិតនៅចម្ងាយ១០ គីឡូម៉ែត្រពីក្រុងគយា នៅក្នុងរដ្ឋពិហារ ប្រទេសឥណ្ឌា។ ព្រះសិទ្ធត្ថបាន សំរេចព្រះទ័យគង់នៅក្រោមដើមពោធិព្រឹក្សពីខាងកើត យកព្រះភក្ត្របែរ ទៅទិសបូព៌ា ដាក់ព្រះបិដ្ឋ (ខ្នង) ទៅរកគល់ពោធិនោះ។ ទ្រង់យកស្បូវ ភ្លាំង៨ក្តាប់ ដែលសោត្ថិយកុមារបានប្រគេននៅតាមផ្លូវនោះ ទៅក្រាល ធ្វើជាទ្រនាប់ សំរាប់គង់ពីលើ។ មានសេចក្តីដំណាលថា៖ "រតនបល្ល័ង្ក មួយផុសឡើងកំពស់១៤ហត្ថ ទ្រព្រះអង្គពីខាងក្រោម។"

កាលមានរតនបល្លង្កផុសទ្រព្រះអង្គអោយគង់ស្រួលដូច្នោះហើយ ព្រះពោធិសត្វទ្រង់បត់ព្រះភ្នែន ពែនព្រះបាទ រួចទ្រង់អធិដ្ឋានដោយអង្គ៤ ថា៖ "ស្បែក សរសៃ សាច់ និង ឈាម របស់អាត្មាអញចូររីងស្ងួតចុះ បើអាត្មាអញមិនបានសំរេចការត្រាស់ដឹងទេ អាត្មាអញនឹងមិនក្រោកចាក ពីរតនបល្លង្ក នេះឡើយ។"

បន្ទាប់មក ព្រះពោធិសត្វក៏ទ្រង់ចាប់ផ្តើមចំរើនអនាបានុស្សតិធ្វើ ព្រះចិត្តអោយស្ងប់ចាកនីវរណធម៌ទាំង៥ ដើម្បីសំរេចឈានជាលំដាប់។

នៅក្រោមម្លប់ពោធិព្រឹក្សនេះ ឥសីគោតមផ្ចង់ព្រះស្មារតីលើគ្រប់ កម្លាំងធាតុ ក្នុងការសញ្ជឹងគិតយ៉ាងជ្រៅ ទៅក្នុងរូបកាយរបស់ព្រះអង្គ។ ទ្រង់បានសញ្ជឹងគិតឃើញនូវស្ទឹងនៃសង្ខារខន្ធឬសញ្ញាខន្ធ ដែលហូរទៅ តាមបណ្តោយស្ទឹងនៃរូបខន្ធ និងវិញ្ញាណខន្ធ។ ព្រះអង្គទតឃើញមនុស្ស លោកកំពុងជាប់ជំពាក់គ្មានទីបញ្ចប់ នូវសេចក្តីទុក្ខវេទនា ក៏ព្រោះតែការ ភ័ន្តច្រឡំនៃសញ្ញាខន្ធរបស់គេ។ មនុស្សម្នាក់ៗនៅមានជំនឿថា អ្វីៗដែល ជារបស់មិនទៀងទាត់ថាជារបស់ទៀងទាត់ អ្វីៗដែលមិនមែនជារបស់ខ្លួន (អនត្តា) ថាជារបស់ខ្លួន(អត្តា) អ្វីៗដែលគ្មានការកើតនិងការស្លាប់ ថា មានការកើតនិងការស្លាប់ និងអ្វីៗដែលនៅជាប់គ្នា ថាជារបស់ដាច់ចេញ ដោយឡែកពីគ្នា។

បន្ទាប់មក ព្រះបរមពោធិសត្វទ្រង់បានបញ្ចេញអោយឃើញ នូវ ការយល់ដឹងរបស់ព្រះអង្គចំពោះភាវៈខាងគំនិតប្រាជ្ញា ដែលជាប្រភពនៃ

សេចក្តីទុក្ខ ដូចជា ការភ័យខ្លាច ខឹង ស្អប់ ក្រអឺតក្រអោង ច្រណែន ប្រចណ្ឌ លោភ និង ល្ងង់ខ្លៅ ជាដើម។ សេចក្តីទុក្ខប្រភេទនេះ មានសភាពផ្ទុយស្រឡះទៅនឹងការពិចារណាដ៏ត្រឹមត្រូវ។ ព្រះអង្គទ្រង់ឈ្វេងយល់យ៉ាងច្បាស់ថា ប្រភពនៃទុក្ខទាំងឡាយពិតជាកើតឡើងដោយសារអវិជ្ជា ។ ដើម្បីរំដោះសេចក្តីទុក្ខនេះ ត្រូវតែវាយទម្លុះ នូវអវិជ្ជា ហើយរុលចូលជ្រៅទៅក្នុងបេះដូងរបស់វា និងវែករកបុព្វហេតុពិតនៃស្នឹងទាំង៥ គឺរូបខន្ធ១ វេទនាខន្ធ១ សញ្ញាខន្ធ១ សង្ខារខន្ធ១ និងវិញ្ញាណខន្ធ១។ ឥឡូវនេះ ព្រះអង្គទ្រង់បានយល់ច្បាស់ថា ភាពមិនឋិតថេរ(អនិច្ចំ) និងភាពមិនមែនជារបស់ខ្លួន (អនត្តា) គឺជាលក្ខខណ្ឌចាំបាច់នៃជីវិត។ បើគ្មានធម៌អនិច្ចំនិងអត្តតា ទេ ក៏គ្មានអ្វីអាចកើតឡើងនិងចំរើនលូតលាស់បានឡើយ។ ឧទាហរណ៍ ដូចជា គ្រាប់ស្រូវ បើសិនជាគ្មាន ធម្មជាតិអនិច្ចំ និងអនត្តា នៃគ្រាប់ស្រូវនេះទេ ក៏គ្រាប់ស្រូវនោះពុំអាចដុះកើតជាដើមស្រូវបានដែរ។ ពពក បើឥតមានអនិច្ចំនិងអនត្តានៃពពកនោះទេ ក៏ពពកនោះ ពុំអាចក្លាយជាភ្លៀងបានឡើយ។ បើគ្មានធម្មជាតិអនិច្ចំ និងអនត្តាទេ កូនក្មេងក៏មិនអាចក្លាយទៅជាមនុស្សចាស់បានឡើយ។ ដូច្នោះហើយ បានជាព្រះអង្គទ្រង់ឈ្វេងយល់ថា៖ "មានជីវិតត្រូវតែមានធម្មជាតិអនិច្ចំ និងអនត្តា។" ប្រភពនៃសេចក្តីទុក្ខ គឺការជឿខុសថា៖ "អ្វីៗទាំងអស់សុទ្ធតែមានការឋិតថេរ (និច្ចំ) និងជារបស់ខ្លួន (អត្តៈ)។" មនុស្សម្នាក់ៗនៅតែយល់ថា បើគ្មានការកើតក៏គ្មានស្លាប់ បើគ្មានការផលិត ក៏

គ្មានការវិនាស បើគ្មានមួយក៏គ្មានច្រើន បើគ្មានក្នុងក៏គ្មានក្រៅ បើគ្មានធំក៏គ្មានតូច បើគ្មានអាក្រក់ក៏គ្មានល្អ បើគ្មានចាស់ក៏គ្មានថ្មី ។ល។ ព្រះពោធិសត្វទ្រង់មានព្រះទស្សនៈថា៖ "មនុស្សឬសត្វ កើតឡើងដោយច្បាប់ធម្មជាតិ និងដោយធាតុទាំង៤គឺៈ ទឹក ដី ភ្លើង និង ខ្យល់ ព្រមទាំងមានកម្មរបស់ខ្លួន ជាអ្នកចាត់ចែងវាសនា។ ទាំងមនុស្សទាំងសត្វ ធាតុដែលផ្សំអោយកើតជារូបរាងឡើង នឹងធ្វើអោយរូបរាងនោះ រលាយបាត់បង់ទៅវិញ ក៏ដោយសារតែសញ្ញាខន្ធទាំង៥នេះឯង។ មិនដូចគ្នានឹងលទ្ធិព្រាហ្មណ៍និយាយថា៖ "មនុស្សឬសត្វកើតឡើងដោយមានអាទិទេពជាអ្នកបង្កើតនោះឡើយ។" បើកាលណាធាតុទាំងឡាយបានជួបជុំគ្នា ឬផ្សំគ្នា ទើបធ្វើអោយកើតជារូបរាងឡើង និងរូបរាងនោះឯងរមែងប្រែប្រួល មានសុខភាពល្អ ឬអាក្រក់ ធាត់ ឬស្គម រួចក៏រលត់បាត់ទៅវិញ ជាធម្មតា។ បន្ទាប់មក ទើបរត់ទៅជួបផ្សំផ្គុំគ្នាសារជាថ្មីឡើងវិញ (កើតជីវិតថ្មីទៀត)។ ខ្លួននិងសង្ខារតោងជាប់គ្នា ដូចជាទឹកនិងរលក ដែលតែងមុជងើបៗជាប់គ្នារដឹក មិនដាច់ជារៀងរហូតទៅ។"

ព្រះពោធិសត្វមានជំនឿថា ខន្ធទាំង៥នៃមនុស្សឬសត្វត្រូវរលត់បាត់ទៅក៏ពិតមែនហើយ តែឋាមពល ឬចំហាយនៃខន្ធនៅសល់ ដែលនឹងទៅផ្សំជាមួយធាតុដទៃទៀត បណ្តាលអោយកើតជារូបថ្មីមួយ ឡើង។ ឋាមពលឬចំហាយនៃជីវិតចាស់នេះហើយ ឈ្មោះថា "កម្មផល"។ ជីវិតចាស់និងជីវិតថ្មីដូចគ្នាផង ប្លែកគ្នាផង។ ដូចគ្នាត្រង់ជីវិតថ្មីទទួលចំហាយ

កម្មផលពីជីវិតចាស់ ប្លែកគ្នាត្រង់ជីវិតថ្មីមានការកសាងនិងអប់រំថ្មីទៀត។ ជីវិតមនុស្សនិងសត្វ តែងវិលកើតវិលស្លាប់ មិនចេះអស់មិនចេះហើយ វិលវល់ក្នុងវាលវដ្តសង្សារ។ កាលបើជីវិតកើតឡើងហើយរមែងមានការចាស់ ឈឺ និងស្លាប់ ទៅវិញជាធម្មតា។

ក្នុងពេលព្រលប់ ព្រះពោធិសត្វទ្រង់គង់នៅលើរតនបល្ល័ង្កក្រោមដើមពោធិព្រឹក្ស ដោយមានទេពនិករចោមរោមធ្វើសក្ការបូជាយ៉ាងណែនណាន់តាន់តាប់។ នៅក្នុងគ្រានោះ ព្រះអង្គទ្រង់ភាវនាឃើញមនុស្សចិត្តអាក្រក់ម្នាក់ឈ្មោះ "មារ" បានហៅកូនស្រីបីនាក់របស់ខ្លួន គឺឈ្មោះ៖ តណ្ហា ១ អរតី ១ និងរាគា ១ អោយមកបញ្ចូលចិត្តព្រះសមណគោតមដើម្បីលះបង់នូវការស្វែងរកផ្លូវត្រាស់ដឹងនោះ ចោលចេញទៅ។ ក៏ប៉ុន្តែព្រះសមណគោតមទ្រង់ពុំមានការចាប់អារម្មណ៍អ្វីបន្តិចសោះឡើយ។

បន្ទាប់ពីទទួលបរាជ័យក្នុងការបញ្ចូលចិត្តនោះមក មារចិត្តឫស្សាបានព្រលែងកងទ័ពបិសាចដ៏កាចសាហាវនិងសត្វចម្លែកតូចធំច្រើនសន្ធឹកអោយមកច្បាំងដណ្តើមរតនបល្ល័ង្កអំពីព្រះអង្គ។ មារឡើងជិះលើដំរីឈ្មោះគិរិមេខលា កំពស់១៥០យោជន៍ (១យោជន៍ស្មើ១៦គីឡូម៉ែត្រ) និមិត្តដៃមួយពាន់កាន់នូវគ្រឿងសស្ត្រាវុធគ្រប់ប្រការ។ មារបានបញ្ជាពលសេនាដ៏ច្រើនរាប់មិនអស់ កម្រាសពីខាងមុខ១២យោជន៍ ពីខាងស្តាំនិងពីខាងឆ្វេង១២យោជន៍ ពីខាងលើ៩យោជន៍។ សន្ធឹកគឹកកងក្រើកផែនដីនិងពួសួរខួរអាកាស អស់ចម្ងាយ១សែនយោជន៍។ ពលសេនារបស់មារបាន

និមិត្តកាយមានពណ៌លឿង ខៀវ ខ្មៅ។ ពលសេនាខ្លះមានខ្លួនជាសត្វ មានក្បាលជាយក្ស ពួកខ្លះមានខ្លួនជាយក្ស មានក្បាលជាសត្វម្រឹគនិងជាបក្សី ហើយមានរូបកាយខ្ពស់ៗ ខុសគ្នា តាំងអំពីកំពស់មនុស្សធម្មតា រហូតដល់កំពស់១យោជន៍។ គ្រាន់តែពួកសន្និកកងទ័ពមារចូលមកជិតដល់ធ្វើអោយទេវតាចិត្តល្អមួយចំនួនដែលនៅថែរក្សាព្រះអង្គ ដូចជាសក្កទេវរាជ ដែលជាអ្នកកាន់សង្ខវិជយុត្ត មហាព្រហ្មដែលជាអ្នកកាន់ស្វេតឆ័ត្រ និងស្តេចកាឡនាគ ដែលជាអ្នកនាំកញ្ញារបាំមកច្រៀងរាំថ្វាយ នាំគ្នីគ្នារត់គេចយកប្រាសអាយុរៀងៗខ្លួនទៅកាន់កន្លែងទីទៃៗពីគ្នាទុកព្រះពោធិសត្វអោយគង់នៅក្រោមដើមពោធិព្រឹក្សនោះ តែមួយព្រះអង្គឯង។

ព្រះសមណគោតមទ្រង់ទតមើលទៅឃើញតែពលមារលើកមកពីទិសឧត្តរ រកមើលពួកទេវតា ក៏មិនឃើញ សូម្បីតែព្រះញាតិវង្សានុវង្សមានព្រះមាតា ព្រះបិតា ព្រះនាងពិម្ពាយសោធរា ឬក៏រាហុលកុមារក៏មិនឃើញដែរ។ ប៉ុន្តែទោះបីជាយ៉ាងណា ក៏ព្រះអង្គទ្រង់គង់យ៉ាងព្រងើយឥតមានតក់ស្លុតឬភិតភ័យអ្វីឡើយ។

រាមារធិរាជស្រែកប្រាប់ពលរេហ៍របស់ខ្លួនថា៖ "នែវើយពួកយើង! សិទ្ធត្ថនេះមានឫទ្ធិបារមីខ្លាំងពូកែណាស់ ពួកយើងចូលពីខាងមុខមិនបានទេ ពួកយើងអាចចូលបានតែពីចំហៀង ខាងឆ្វេង និងខាងស្តាំ ឬពីខាងក្រោយ ប៉ុណ្ណោះ។" មារក៏បាប់ផ្លែងសអោយកើតជាខ្យល់ព្យុះដែលមានកម្លាំងអាចបក់បោកកំពូលភ្នំអោយរលំបាន ទៅបក់បោករូបព្រះអង្គអោយ

វិនាស។ តែកម្លាំងខ្យល់នោះ មិនធ្វើអោយព្រះសិទ្ធត្ថ ចាប់ព្រះអារម្មណ៍បន្តិចសោះឡើយ សូម្បីតែជាយស្បង់ចីវររបស់ព្រះអង្គ ក៏មិនកំរើកផង។ បន្ទាប់មក ក្រុងមារក៏បានបណ្ដាលអោយកើតជា ផ្គររន្ទះ ផ្លេកបន្ទោរ ភ្លៀងព្យុះធំ ភ្លៀងដុំថ្ម ភ្លៀងគ្រឿងប្រហារ ភ្លៀងរងើកភ្លើង ភ្លៀងផេះក្ដៅ ភ្លៀងដីខ្សាច់ ភ្លៀងភក់ និង ផ្សែងអព្ទងងឹតសូន្យសុង ពីគ្រប់ទិសបាចសាចមកលើព្រះអង្គ តែគ្រឿងប្រហារទាំងនោះ ក៏មិនអាចមកបៀតបៀនព្រះអង្គបានឡើយ ប្រែក្លាយទៅជាគ្រឿងបូជាទៅវិញ។ កាលបានឃើញដូច្នោះ វាមារធិរាជក៏បរជើរដៃកាន់អាវុធមួយពាន់ ចូលទៅជិតព្រះអង្គ ហើយស្រែកគំរាមថា៖ "នែសិទ្ធត្ថ! ចូរអ្នកដើរចេញពីរតនបល្លង្កនេះភ្លាមទៅ ព្រោះអីរតនបល្លង្កនេះ ជារបស់យើងទេតើ?"

ព្រះសិទ្ធត្ថទ្រង់ពោលតបទៅកាន់វាមារធិរាជ វិញថា៖ "ម្នាលមារអើយ! រតនបល្លង្កនេះមិនមែនកើតមកសំរាប់រូបអ្នកទេ គឺពិតជាកើតមកសំរាប់យើង ដែលជាអ្នកបានបំពេញនូវ បារមី៣០ មហាបរិច្ចាគ៥ និងចរិយា៣ ឯណោះទេតើ? ឃើញថាមានតែរូបអ្នកឯងវិញទេដែលមិនមែនជាអ្នកបានបំពេញនូវបារមីទាំងអស់នេះ អ្នកត្រូវតែថយចេញអំពីមណ្ឌលនៃរតនបល្លង្ក ក្រោមដើមពោធិព្រឹក្សនេះភ្លាមទៅ!"

ព្រះបរមពោធិសត្វត្រូវបានការពារដោយអានុភាពនៃគុណធម៌រាប់មិនអស់ ដែលព្រះអង្គធ្លាប់បានកសាងសន្សំ និងបន្ទុំទុក តាំងអំពីអតីតជាតិមក។ កម្លាំងនៃការភាវនារបស់ព្រះអង្គពិតជាពុំអាចមានអ្វីមកបំបែក

បំបាក់ព្រះអង្គបានឡើយ។

កាលពុំដូច្នោះ មារចិត្តបាប រឹងរិតតែខឹងខ្លាំងឡើង ហើយក៏ដក យកចក្រាវុធដ៏មានមុខស្រួចមុត ចោលសំដៅព្រះពោធិសត្វ តែចក្រាវុធ នោះក៏ប្រែក្លាយទៅជាពិតានឋិតនៅពីលើរូបព្រះអង្គទៅវិញ។ រីឯពលរេហ៍ ដែលយកកំពូលភ្នំធំៗចោលសំដៅទៅលើព្រះអង្គដែរនោះតែដុំថ្មទាំងនោះ ក៏ប្រែក្លាយទៅជាកម្រងផ្កា និងគ្រឿងសក្ការបូជាថ្វាយព្រះអង្គទៅវិញ។

បន្ទាប់ពីការធ្លាក់ចុះ ក្នុងក្តីអស់សង្ឃឹមយ៉ាងខ្លាំងមក ក្រុងមារក៏ សម្លុតទាររកភ័ស្តុតាងគុណធម៌ទាំងឡាយដែលព្រះសមណគោតមមាន។

ព្រះគោតមទ្រង់ព្រះចិន្តាថា តាមធម្មតា នៅថ្ងៃត្រាស់ដឹង រតន- បល្លង្កតែងកើតមានសំរាប់ព្រះពោធិសត្វរាល់ព្រះអង្គជានិច្ច ឯរតនបល្លង្ក នេះក៏កើតឡើងសំរាប់រូបអាត្មាអញ ហើយក៏សំរាប់តែអាត្មាអញម្នាក់ដែរ។ ទ្រង់ព្រះចិន្តាដូច្នោះហើយក៏ត្រាស់សួរទៅកាន់ក្រុងមារវិញថា៖ "ម្នាលមារ! បើរតនបល្លង្កនេះជារបស់អ្នក តើអ្នកបាននរណាធ្វើជាសាក្សី?"

មារឆ្លើយតបវិញ យ៉ាងខែងរ៉ែងថា៖ "ពួកពលរេហ៍ទាំងអស់នេះ ហើយជាបន្ទាល់របស់យើង ចុះសិទ្ធត្ថឯងវិញ មានអ្វីធ្វើជាសាក្សីដែរ?"

ព្រះពោធិសត្វទ្រង់យកចង្អុលព្រះហស្តស្តាំ ទៅពាល់ព្រះធរណី និង សូមអំពាវនាវព្រះធរណីអោយជួយធ្វើជាសាក្សី ទទួលដឹងឮចំពោះ អំពីល្អរបស់ព្រះអង្គ។ ព្រះអង្គទ្រង់ត្រាស់ថា៖ "សាក្សីរបស់អ្នកសុទ្ធតែមាន ចិត្តចេតនា រីឯសាក្សីរបស់យើង គឺក្រឡាមហាប្រថពីនេះឯង។":

មុទ្រះ ឬក្បាយវិការនៃព្រះហស្តនេះ បានសន្មតិថា "ការបង្ក្រាប ឬ ផ្ចាញ់មារ" ឬថា "ការយកព្រះធរណីធ្វើជាសាក្សី"។ គ្រាន់តែទ្រង់មានព្រះបន្ទូលដូច្នេះ មហាប្រថពីក៏លាន់រញ្ជួយកក្រើកឡើង ហាក់បីដូចជាមកឆ្លើយទទួលថាខ្លួនយល់ព្រមធ្វើជាបន្ទាល់របស់ព្រះពោធិសត្វមែន។ ក្នុងគ្រានោះឯងព្រះពោធិសត្វក៏ទ្រង់រលឹកនឹកឃើញដល់ដំរីបច្ច័យនាគេន្ទ្រ ដែលព្រះអង្គបានប្រទានដល់ពួកអ្នកស្រុកកលិង្គរាស្ត្រកាលពីទ្រង់សោយព្រះជាតិជា វេស្សន្តរពោធិសត្វ ។ ពេលនោះ ដំរីគិរិមេខលាក៏លុតជង្គង់ ទ្រោមក្បាលចុះក្រាបថ្វាយបង្គំព្រះអង្គ។ ចំណែកឯ នាងគង្ហីងព្រះធរណីក៏បានច្បូតសក់ បណ្តាលអោយមានទឹកជន់លិចលង់ ពួកពលសេនាមារអស់មួយចំនួនធំ។ ក្រុងមារឃើញដូច្នោះក៏ក្រាបថ្វាយបង្គំ និងពោលពាក្យសរសើរថា៖ "បពិត្រមហាបុរស អ្នកមានញាណញេយ្យ ខ្ញុំព្រះអង្គសូមនមស្សការចំពោះព្រះអង្គជា កំពូលនៃបុរស។ ទ្រង់ជាអ្នកគ្មានបុគ្គលណាប្រៀបបាន នៅក្នុងលោកនេះ និងក្នុងទេវលោក។ ព្រះអង្គជាអ្នកត្រាស់ដឹង ជាមហាសាស្តាចារ្យ ជាអ្នកប្រាជ្ញអាចគ្រប់សង្កត់មារបាន ទ្រង់កាត់ផ្តាច់នូវគ្រឿងត្រាំកិលេស ហើយអាចនាំពួកសត្វអោយផុងផុតអំពីភពបីដាក់ដល់ឋានបរមសុខ ជាអវសាន្ត។"

មារនិងពលសេនា កាលបានពោលពាក្យយ៉ាងនេះហើយ ក៏នាំគ្នាគេចខ្លួនចេញបាត់អស់ទៅ នៅក្នុងវេលាព្រះអាទិត្យជិតអស្តង្គត។ រីឯពួកទេពនិករទាំងឡាយវិញ កាលឃើញពួកមារបាក់ទ័ពរត់ខ្ចាត់ខ្ចាយអស់

ក៏នាំគ្នាត្រឡប់ចូលមក ធ្វើសក្ការបូជា ថ្វាយសព្ទសាធុការពរ ចំពោះព្រះពោធិសត្វយ៉ាងគឹកកង។ មហាប្រថពី និងធម្មជាតិនានា បានសំដែងនូវអាការៈនិងកាយវិការថ្វាយព្រះពោធិសត្វ ដោយប្រការផ្សេងៗគ្នា។ ព្រះពោធិសត្វទ្រង់គង់លើរតនបល្លង្កក្រោមដើមពោធិនោះ ដោយស្ងាត់ស្ងៀម ដើម្បីពិចារណានូវ ការស្វែងស្វាធរកពន្លឺត្រាស់ដឹង បន្តទៅមុខទៀត។

ព្រះបរមពោធិសត្វ ទ្រង់បន្តធ្វើភាវនា ទៅកាន់ពេលរាត្រីទៀត។ ព្រះអង្គសង្ឃឹមក្នុងព្រះចិន្តាថា ផ្លូវនៃពន្លឺត្រាស់ដឹង ប្រហែលជានឹងបើកថ្វាយព្រះអង្គ ក្នុងរាត្រីនេះហើយ។

**បឋមយាមនៃរាត្រី** ៖ ហ្វូងតារារះព្រោងព្រាត ព្រះបរមពោធិសត្វទ្រង់ប្រមូលព្រះបញ្ញាទាំងអស់ ទៅក្នុងជម្រៅភាវនា រួចទ្រង់បិទព្រះនេត្រចុះសន្សឹមៗ។ ព្រះអង្គទ្រង់ភាវនាឃើញមានសត្វច្រើនរាប់មិនអស់ឋិតនៅក្នុងព្រះរូបកាយព្រះអង្គ។ សត្វខ្លះមានជីវិត សត្វខ្លះឥតជីវិត ដូចជាស្មៅស្មៅ បាណជាតិ ខនិជ(រ៉ែ) សត្វតិរច្ឆាន មនុស្សលោក និង សត្វខ្លះជារូបព្រះអង្គផ្ទាល់តែម្តង។ ព្រះអង្គទ្រង់ភាវនា ឃើញជីវិតអំពីអតីតជាតិរបស់ព្រះអង្គ ទាំងពេលប្រសូតនិងទាំងពេលសោយព្រះទិវង្គត។ ព្រះអង្គភាវនាឃើញការកើត និងការរលាយបាត់ទៅនៃផែនដីនិងផ្កាយរាប់ពាន់។ ព្រះអង្គទ្រង់បានយល់យ៉ាងច្បាស់អំពីសេចក្តីសុខ និងសេចក្តីទុក្ខនៃជីវិតសត្វលោក ទាំងសត្វកើតចេញពីខទរម្តាយឬមេ ទាំងសត្វញាស់ចេញពីស៊ុត(ពង) និងសត្វដែលកើតចេញពីការផ្សាំឬបំបៅ គឺសត្វដែលបំបែក

ខ្លួនឯងអោយទៅជាសត្វមួយថ្មីទៀត។ ព្រះអង្គទ្រង់បានភាវនាឃើញគ្រប់កោសិកាក្នុងរូបកាយព្រះអង្គ ទាំងនៅក្នុងឋានសួគ៌ និងទាំងនៅក្នុងឋានមនុស្សលោក ហើយត្រូវឆ្លងកាត់វដ្តសង្សារទាំងបីកាល គឺៈ អតីតកាល១ បច្ចុប្បន្នកាល១ និង អនាគតកាល១ ។ ព្រះសមណគោតមទ្រង់ជ្រាបច្បាស់នូវសេចក្ដីនេះហើយ ក៏ទ្រង់បន្លឺនូវឧទានគាថា យ៉ាងនេះថា៖ "ធម៌ទាំងឡាយរមែងមានដល់ខីណាសវព្រាហ្មណ៍ណា ដែលជាអ្នកបានព្យាយាមញុំាងកិលេសអោយក្ដៅ និងលះបង់នូវកិលេសទាំងអស់នោះ។ សេចក្ដីសង្ស័យទាំងឡាយក៏រម្ងាប់អស់ក្នុងកាលនោះដែរ ពីព្រោះតែខីណាសវព្រាហ្មណ៍នោះ បានដឹងច្បាស់នូវធម៌និងបុព្វហេតុនៃធម៌ទាំងនោះ។" ការភាវនានៅក្នុង បឋមយាមនៃរាត្រីនោះ ព្រះសមណគោតមទ្រង់បានសំរេចនូវ " បុព្វេនិវាសានុស្សតិញ្ញាណ គឺប្រាជ្ញា ជាគ្រឿងរំលឹកនូវខន្ធទាំងឡាយ ដែលធ្លាប់បានប្រព្រឹត្តកាលអំពីជាតិមុនៗមក។"

**មជ្ឈិមយាមនៃរាត្រី** (នៅពេលពាក់កណ្ដាលអធ្រាត្រ) :ការទតឃើញជាលើកទីពីរ នៃរាត្រី ព្រះពោធិសត្វទ្រង់សញ្ជឹងគិតជ្រៅ ទៅក្នុងសមាធិហើយ។ ព្រះអង្គភាវនាឃើញ ពិភពឋានរាប់មិនអស់ អណ្ដែតឡើង ហើយលិចចុះទៅវិញ។ ពិភពលោកជាច្រើនបានកើតឡើងថ្មី រួចក៏រលាយបាត់អស់ទៅវិញ។ ព្រះអង្គទ្រង់ទតឃើញសត្វដ៏ច្រើនឥតគណនាកើតហើយ ស្លាប់ទៅវិញរាប់ផងមិនអស់ វិស័យដូចជារលកទឹករាប់លានដែលលេចឡើងហើយ រលាយធ្លាក់ចុះទៅវិញ ឥតឈប់ឈរ នៅលើផ្ទៃ

ទឹកសមុទ្រ (នៅពេលសមុទ្រខ្លួនឯង ស្ថិតនៅឆ្ងាយអំពីការកើត និងការស្លាប់ ដូច្នោះឯង)។ បើសិនជាបរលោកទាំងអស់នោះយល់ថាខ្លួនឯងជាទឹក ទើបបរលោកនោះអាចពុះពារលើសេចក្តីកើត និងសេចក្តីស្លាប់ ព្រមទាំងមកដល់សេចក្តីស្ងប់ ខាងផ្លូវចិត្ត ដែលអាចមានជ័យជំនះ លើការភ័យខ្លាចទាំងអស់បាន។ ព្រះអង្គទតឃើញសត្វទាំងឡាយប្រកបដោយកាយទុច្ចរិត វចីទុច្ចរិត មនោទុច្ចរិត ជាអ្នកតិះដៀលនូវព្រះអរិយៈ ជាមនុស្សមិច្ឆាទិដ្ឋិ សមាទាននូវមិច្ឆាទិដ្ឋិកម្ម លុះដល់ពេលស្លាប់ទៅ នឹងទៅកើតក្នុងអបាយទុគ្គតិវិនិបាត នា ឋាននរក។ សត្វទាំងឡាយប្រកបដោយ កាយសុចរិត វចីសុចរិត មនោសុចរិត ជាអ្នកមិនតិះដៀល នូវព្រះអរិយៈ ជាមនុស្សសម្មាទិដ្ឋិ សមាទាននូវ សម្មាទិដ្ឋិកម្ម លុះពេលស្លាប់ទៅនឹងទៅកើតក្នុងសុគតិសួគ៌ នា ឋានទេវលោក។ ព្រះគោតមទ្រង់ជ្រាបច្បាស់នូវសេចក្តីនេះហើយ ព្រះអង្គក៏បន្លឺនូវឧទានគាថាយ៉ាងនេះថា៖ "ធម៌ទាំងឡាយរមែងមានដល់ខីណាសវព្រាហ្មណ៍ ដែលជាអ្នកព្យាយាមញុំាងកិលេសអោយក្តៅ និងលះបង់ចោលនូវកិលេសទាំងនោះ។ សេចក្តីសង្ស័យទាំងឡាយក៏រម្ងាប់អស់ក្នុងពេលនោះដែរ ព្រោះខីណាសវព្រាហ្មណ៍នោះ បានដឹងច្បាស់នូវព្រះនិព្វាន ដែលជាទីអស់ទៅនៃបច្ច័យហើយ។"

ការយល់ដឹងនេះ អាចនាំអោយព្រះសិទ្ធត្ថពុះពារលើសំណាញ់នៃការកើតនិងការស្លាប់បាន។ ព្រះសមណគោតមទ្រង់ញញឹម ដោយបានសំរេចការទតលើកទីពីរនៃរាត្រីនេះនូវ "ចុតូបបាតញ្ញាណ គឺប្រាជ្ញា ជា

គ្រឿងមើលឃើញច្បាស់ចំពោះសត្វដែលកើតក្នុងទីថោកទាប ឬឧត្តមខ្ពង់ខ្ពស់ មានដំណើរជីវិតអាក្រក់ឬល្អយោលតាមអំពើដែលខ្លួនបានសាង។"

បច្ឆិមយាមនៃរាត្រី (ពេលទៀបភ្លឺ) :ការទតជាលើកទីបំផុតនៃរាត្រី ព្រះសមណគោតមទ្រង់ពិចារណាថា៖ "កាលបើនេះមាននោះក៏មាន បើនេះគ្មាននោះក៏គ្មាន បើនេះរលត់នោះក៏រលត់ដែរ ។ល។"

ព្រះអង្គទ្រង់ប្រៀបធៀបទៅរកការកើតនិងការស្លាប់ ថា៖ "បើភពមាន ជាតិក៏មាន ដូច្នេះតើភពមានអ្វីជាបច្ច័យ?"

ព្រះអង្គទ្រង់ពិចារណាវេញវេហូតទាល់តែរកឃើញថា ពុំមានភាវៈណាមួយកើតឡើងដាច់តែឯកឯង ដោយគ្មានហេតុបច្ច័យទាក់ទងគ្នានោះទេ និងក៏ពុំមានភាវៈណាមួយសំខាន់ឬដើមគេ ដូចភាវៈព្រហ្ម័ន នៅក្នុងលិទ្ធិព្រាហ្មណ៍ឡើយ។ ព្រះអង្គរកឃើញឫសគល់នៃសេចក្តីទុក្ខចំពោះការកើតនិងការស្លាប់ថាពិតជាកើតឡើងដោយ "អវិជ្ជា" ហើយជាប់ទាក់ទងរវាងគ្នានិងគ្នា ក្នុងបុព្វហេតុ១២យ៉ាង ដូចតទៅនេះ៖

| | | | |
|---|---|---|---|
| ០១. | អវិជ្ជា | នាំអោយកើត | សង្ខារ |
| ០២. | សង្ខារ | នាំអោយកើត | វិញ្ញាណ |
| ០៣. | វិញ្ញាណ | នាំអោយកើត | នាមរូប |
| ០៤. | នាមរូប | នាំអោយកើត | អាយតនៈ |
| ០៥. | អាយតនៈ | នាំអោយកើត | ផស្សៈ |
| ០៦. | ផស្សៈ | នាំអោយកើត | វេទនា |

| | | | |
|---|---|---|---|
| ០៧. | វេទនា | នាំអោយកើត | តណ្ហា |
| ០៨. | តណ្ហា | នាំអោយកើត | ឧបាទាន |
| ០៩. | ឧបាទាន | នាំអោយកើត | ភព |
| ១០. | ភព | នាំអោយកើត | ជាតិ |
| ១១. | ជាតិ | នាំអោយកើត | ជរា |
| ១២. | ជរា | នាំអោយកើត | មរណៈ។ |

ព្រះពោធិសត្វទ្រង់ពិចារណាជាអនុលោម គឺគិតជាបណ្តោយថា៖ បើធាតុឬភាវៈណា១ កើតឡើងហើយ ធាតុឬភាវៈដទៃទៀតក្នុងបុព្វហេតុទាំង១២ត្រូវតែកើតឡើងបន្តបន្ទាប់គ្នា។ មានន័យថាបើអវិជ្ជាកើត សង្ខារក៏កើត ឯសង្ខារនាំអោយវិញ្ញាណកើតតៗគ្នាជាហូរហែរហូតដល់មរណៈ។

ព្រះអង្គក៏ទ្រង់ពិចារណា ជាបដិលោម គឺគិតបញ្ច្រាសមកវិញថា បើអវិជ្ជារលត់ សង្ខារក៏រលត់ គឺរលត់តៗគ្នា លុះត្រាតែអស់រលីងសូន្យសុង ដែលហៅថា និរោធ គឺការជ្រះស្រឡះឬរលត់រលាយអស់នូវឫសគល់នៃការកើតនិងស្លាប់ ឬនៃសេចក្តីទុក្ខនោះឯង។ ការទាក់ទងគ្នា ទៅវិញទៅមក តាមបែបខាងលើនេះ មានសភាពដូចជាច្រវាក់ដែលទាក់ទងគ្នាជាកម្រង ឬជារង្វង់មូលពុំមានចុងពុំមានដើម ហើយមានចលនាវិលចុះវិលឡើង មិនចេះចប់។ បុព្វហេតុនៃការកើតនិងស្លាប់របស់សត្វលោកដែលជាធម៌ភាព ផ្ទាប់ហេតុនិងផលនេះ ព្រះពោធិសត្វទ្រង់ព្រះបញ្ញត្តិជា

ទ្រឹស្តីថា "ទ្រឹស្តីបដិច្ចសមុប្បាទ" ។

ព្រះអង្គទ្រង់បានពិចារណាឃើញទៀតថា ការយល់ដឹង (បញ្ញា) និង សេចក្តីស្រឡាញ់(មេត្តា) មានតែមួយ។ បើគ្មានការយល់ដឹងក៏គ្មានសេចក្តីស្រឡាញ់ដែរ។ មានការយល់ដឹងច្បាស់លាស់ ពិតជានាំអោយមានសេចក្តីស្រឡាញ់(មេត្តា) ដែលអាចរំលាយ នូវគ្រប់សេចក្តីទុក្ខ និងព្រួយបារម្ភបាន។ ដើម្បីអោយបានសំរេច នូវការយល់ដឹងនេះ ចាំបាច់មនុស្សម្នាក់ៗត្រូវតែរស់នៅដោយមានការពិចារណាត្រឹមត្រូវ។ ការពិចារណាត្រឹមត្រូវអាចនាំអោយមានការយល់ដឹងនូវការរំដោះខ្លួនចេញផុតអំពីសេចក្តីទុក្ខ និងឆ្ពោះទៅរកពន្លឺត្រាស់ដឹង។ ជីវិតអាចបញ្ចាំងអោយឃើញច្បាស់ ដោយការពិតដ៏ប្រសើរឧត្តមមួយ ដែលព្រះអង្គបានពិចារណារកឃើញនូវ អរិយសច្ចៈ៤ ឬ ចតុរារិយសច្ចៈ គឺ:

១. ទុក្ខអរិយសច្ចៈ
២. សមុទយអរិយសច្ចៈ
៣. និរោធអរិយសច្ចៈ
៤. មគ្គអរិយសច្ចៈ

ឥឡូវនេះ ដល់ទីបញ្ចប់នៃការទតលើកទីបំផុតនៃរាត្រីហើយ។ ផ្ការន្ទះ ភ្លៀង ក៏បាត់ស្ងាត់ឈឹង ពពកខ្មួលខ្មៅក៏រសាត់បាត់អស់ពីផ្ទៃមេឃ រីឯ ព្រះចន្ទក៏បញ្ចេញពន្លឺថ្លាត្រចះត្រចង់ និងហ្វូងតារារះភ្លឺព្រោងព្រាត។

ព្រះសមណគោតមមានព្រះហឫទ័យដូចជាពន្ធនាគារ ដែលបានឃុំឃាំង ព្រះអង្គអស់រាប់ពាន់ឆ្នាំមកហើយនោះត្រូវបើកទ្វារចំហរធ្លុងឡើង។ អវិជ្ជា ទុកដូចជាឆ្មាំយាមពន្ធនាគារ ដោយសារអវិជ្ជានេះហើយ ដែលធ្វើអោយ ព្រះចិន្តារបស់ព្រះអង្គងងឹតសូន្យសុង ប្រៀបដូចជា ពន្លឺព្រះចន្ទនិងផ្កាយ ដែលត្រូវបិទបាំងអាប់ស្មើ ដោយផ្ទាំងពពកខ្មួលខ្មៅដូច្នោះដែរ។ ព្រះអង្គ ទ្រង់បន្លឺនូវព្រះឧទានភាសាមួយវគ្គថា៖

"កាលពីអង្គអញតថាគត អន្ទោលក្នុងវាលវដ្តសង្សារ
ច្រើនអសង្ខេយ្យកោដិកប្បា តែងបានទុក្ខារាល់ជាតិភព។
ឥឡូវ តណ្ហា គឺជាងផ្ទះ តថាគតយល់ច្បាស់ក្នុងចិត្តស៊ប់
បានដឹងបានឃើញដោយសព្វគ្រប់ អ្នកឈប់សង់ផ្ទះបានទៀតហើយ។
ឆ្អឹងជំនី និង ដំបូលអ្នក ត្រូវអញបំបាក់ឥតសល់ឡើយ
ចិត្តតថាគតបានដល់ត្រើយ ឥតតណ្ហាឡើយ គឺនិព្វាន។

សេចក្តីទុក្ខនៃការកើត ចាស់ ឈឺ និងស្លាប់ គ្រាន់តែធ្វើអោយ ជញ្ជាំងគុកកាន់តែក្រាស់ឡើងប៉ុណ្ណោះ។ មានរឿងតែមួយគត់ដែលយើង ត្រូវធ្វើគឺចាប់អ្នកយាមគុកអវិជ្ជានោះអោយបាន ហើយមើលមុខវាអោយ ច្បាស់។ ដើម្បីនឹងច្បាំងឈ្នះ នូវអវិជ្ជានេះ យើងម្នាក់ៗត្រូវតែអនុវត្តនូវ មគ្គអរិយសច្ចៈប្រកបដោយអង្គ៨(អដ្ឋង្គិកមគ្គ)អោយបានខ្ជាប់ខ្ជួន។ នៅ ពេលអ្នកយាមគុកត្រូវចាប់ខ្លួន ពន្ធនាគារក៏បាត់រូបដែរ ហើយមិនអាច

សង់ឡើងវិញម្តងទៀតឡើយ។ ព្រះសមណគោតមទ្រង់ជ្រាប នូវសេចក្តីនេះច្បាស់ហើយ ក៏ទ្រង់បន្លឺនូវឧទានវាចាចុងក្រោយបង្អស់ថា៖ "ធម៌ទាំងឡាយរមែងមានដល់ខីណាសវព្រាហ្មណ៍ ដែលជាអ្នកបានព្យាយាមញ៉ាំងកិលេសអោយក្តៅ និង បានលះបង់ចោលនូវកិលេស ទាំងអស់នោះ។ ខីណាសវព្រាហ្មណ៍ បានកំចាត់បង់នូវមារ ព្រមទាំងសេនារបស់វា ក្នុងពេលនោះ បីដូចជាពន្លឺរស្មីព្រះអាទិត្យរះឡើង កំចាត់បង់នូវភាពងងឹតអន្ធការ និងធ្វើអោយអាកាសភ្លឺរុងរឿង ដូច្នោះដែរ។"

ពេលព្រះសមណគោតម ងើយព្រះសិរទតទៅលើមេឃ ទ្រង់ទតឃើញផ្កាយព្រឹក រះឡើង នាជើងមេឃទិសបូព៌ា កំពុងតែបញ្ចេញរស្មីភ្លឺពណ្ណរាយ បីដូចជាដុំពេជ្រដ៏ធំមហិមាមួយ។ ព្រះសមណគោតមធ្លាប់ទតឃើញផ្កាយព្រឹកនេះ រាប់រយដងមិនអស់មកហើយ នៅពេលព្រះអង្គគង់ធ្វើសមាធិក្រោមដើមពោធិព្រឹក្ស ក៏ប៉ុន្តែនៅព្រឹកនេះ ព្រះអង្គហាក់ដូចជាទើបនឹងទតឃើញផ្កាយព្រឹកនេះ ជាលើកដំបូងបង្អស់ ក្នុងជីវិតរបស់ព្រះអង្គ។ ព្រះឈ្មះមារក៏ទ្រង់បានជ្រាបយ៉ាងច្បាស់ថា ព្រះអង្គបានរកឃើញពន្លឺនៃការត្រាស់ដឹង និង បានសំរេចព្រះបំណងហើយ។ ឥឡូវនេះ ព្រះហឫទ័យរបស់ព្រះអង្គបានទទួលនូវសុខសន្តិភាពល្អឥតខ្ចោះ ប្រាសចាកស្រឡះកងទុក្ខទាំងពួងនិងការងោកងុយ។ ព្រះអង្គបានទទួលនូវព្រះបរមសុខ ពេញបរិបូណ៌ហើយ។

កាលបានត្រាស់ដឹង នូវព្រះសម្មាសម្ពោធិញ្ញាណរួចហើយ ព្រះ

សមណគោតម ហាក់មានពន្លឺរស្មីចាំងសាយចេញអំពីព្រះអង្គកាយដែលប្រកបទៅដោយ សិរីសោភគ្គសម្បត្តិ ដ៏រុងរឿងក្រៃពេក។ ជំនោរត្រជាក់បក់មករំភើយៗ មកប៉ះនឹងស្លឹកពោធិពណ៌ប្រាក់ ក្រោមពន្លឺព្រះចន្ទថ្លាធ្វើអោយលាន់ឮសម្លេងរងំហាក់បីដូចជាគេប្រគំតន្ត្រីដ៏ពីរោះ។ បុប្ផជាតិចំរុះពណ៌ត្រូវទឹកសន្សើមរីកស្គុះស្គាយ ចោលសុគន្ធពិដោរក្រអូបសាយហាក់ចូលមកបូជា និងថ្វាយព្រះពរជ័យចំពោះការត្រាស់ដឹងរបស់ព្រះអង្គ នាពេលមុនព្រះអរុណរះ ក្នុងថ្ងៃពុធ ១៥កើតពេញបូរមី ខែពិសាខ ឆ្នាំរកា ត្រូវនឹងថ្ងៃទី៨ ខែធ្នូ មុនពុទ្ធសករាជ ៤៥ឆ្នាំ ក្នុងព្រះជន្មាយុ ៣៥ព្រះវស្សា នោះឯង។

កាលព្រះពុទ្ធ និងភិក្ខុសង្ឃទាំងឡាយ ចូលទៅដល់ព្រៃសាលវ័ន របស់ពួកមល្លក្សត្រហើយ ព្រះសម្ពុទ្ធទ្រង់ត្រាស់នឹងព្រះអានន្ទថា៖ "ម្នាលអានន្ទ! ចូរអ្នករៀបចំគ្រែ អោយមានក្បាលដំណេកបែរទៅកាន់ទិសខាងជើង(បែរទៅរកភ្នំគិជ្ឈកូដ) ក្នុងចន្លោះដើមសាលព្រឹក្សមួយគូនេះ អោយតថាគតដោយឆាប់មក តថាគតមានកាយល្ហិតល្ហៃខ្លាំងណាស់ តថាគតនឹងសិង។"

ព្រះអានន្ទទទួលព្រះបន្ទូលព្រះដ៏មានព្រះភាគថា៖ "ព្រះករុណាព្រះអង្គ!" រួចហើយក៏រៀបចំគ្រែថ្វាយ។ កាលព្រះអានន្ទរៀបចំគ្រែថ្វាយ រួចហើយ ព្រះសម្ពុទ្ធទ្រង់មានព្រះសតិសម្បជញ្ញៈ ទ្រង់សំរេចសីហសេយ្យាផ្អៀងទៅខាងស្តាំ ទ្រង់យកព្រះបាទឆ្វេងតម្រួតលើព្រះបាទស្តាំ នឹងយកព្រះកេសទៅកាន់ទិសខាងជើង។ ភិក្ខុទាំងឡាយនាំគ្នាអង្គុយព័ទ្ធជុំវិញព្រះអង្គនិងគិតពិចារណាក្នុងចិត្តថា ព្រះមានព្រះភាគប្រាកដជានឹងបរិនិព្វានក្នុងរាត្រីនេះ និងក្នុងទីនេះ ពុំខានឡើយ។

ព្រះពុទ្ធទ្រង់ទតសម្លឹងដើមសាលព្រឹក្សទាំងគូ រួចក៏ទ្រង់ត្រាស់នឹងព្រះអានន្ទថា៖ "ម្នាលអានន្ទ! អ្នកមើលហ្នក មិនទាន់ដល់រដូវផ្ការីកផង (អកាលបុប្ផ) សាលព្រឹក្សទាំងគូនេះមានផ្ការីកស្គុះស្គាយ តាំងអំពីគល់រហូតដល់ចុង រោយរាយចាចសាចមកលើសិរ:តថាគត ដើម្បីបូជាតថាគត។ សូម្បីតែផ្កាមន្ទារវៈនិងលម្អិតខ្លឹមចន្ទន៍ជាទិព្វ ក៏ធ្លាក់ចុះអំពីអាកាសរោយរាយចាចសាចលើសិរ:តថាគត ដើម្បីបូជាដែរ។ សាលវ័ននេះពិត

ជាល្អក្រៃពេក និងគួរជាទីរីករាយណាស់។ ទាំងតូរ្យតន្ត្រី ទាំងចម្រៀងជាទិព្វ ក៏លាន់ឮឯងអាកាស ដើម្បីបូជាតថាគត។ ម្នាលអានន្ទ! តថាគតមិនបានឈ្មោះថា ជាអ្នកដែលបរិស័ទ ធ្វើសក្ការៈក្តី គោរពក្តី រាប់អានក្តី បូជាក្តី និង កោតក្រែងក្តី ដោយហេតុមានប្រមាណ តែប៉ុណ្ណេះឡើយ។ ម្នាលអានន្ទ! បុគ្គលណាមួយ ទោះជាភិក្ខុក្តី ភិក្ខុនីក្តី ឧបាសកក្តី ឧបាសិកាក្តី ជាអ្នកប្រតិបត្តិនូវធម៌ សមគួរដល់ធម៌ ប្រតិបត្តិធម៌ដោយសេចក្តីកោតក្រែង ប្រព្រឹត្តតាមធម៌ បុគ្គលនោះឈ្មោះថា ជាអ្នកបានធ្វើសក្ការៈ បានគោរព បានរាប់អាន និង បានបូជា ដល់តថាគត ដោយគ្រឿងបូជាដ៏ឧត្តមហើយ។ ម្នាលអានន្ទ! ព្រោះហេតុនោះ បរិស័ទក្នុងសាសនានេះ គប្បីសិក្សាថា យើងទាំងឡាយនឹងប្រតិបត្តិនូវធម៌ សមគួរដល់ធម៌ ប្រតិបត្តិធម៌ដោយសេចក្តីកោតក្រែង ប្រព្រឹត្តតាមធម៌។ ម្នាលអានន្ទ! អ្នកទាំងឡាយគប្បីសិក្សា យ៉ាងនេះឯង។"។

.......ព្រះពុទ្ធទ្រង់ត្រាស់នឹងព្រះអានន្ទបន្តទៀតថា៖ "ម្នាលអានន្ទ! ព្រះធម៌និងព្រះវិន័យ ដែលតថាគតបានសំដែងនិងបញ្ញត្ត ដល់អ្នកទាំងឡាយដោយច្បាស់លាស់ហើយ លុះអំណើះតតអំពីតថាគតទៅ ព្រះធម៌និងព្រះវិន័យនោះហើយ ជាគ្រូរបស់អ្នកទាំងឡាយ។"

"ម្នាលអានន្ទ! សព្វថ្ងៃនេះ ពួកភិក្ខុធ្លាប់ហៅគ្នានឹងគ្នាជាពាក្យថា 'អាវុសោ' អំណើះតតអំពីតថាគតទៅ អ្នកទាំងឡាយកុំហៅតាមពាក្យយ៉ាងនេះតទៅទៀត។ ភិក្ខុចាស់ជាងត្រូវហៅភិក្ខុខ្ចីជាងដោយនាម(ខ្លួន)

ក៏បាន ដោយនាមត្រកូល(គោត្រ)ក៏បាន និងដោយពាក្យថា 'អាវុសោ' យ៉ាងនេះក៏បាន។ ចំណែកឯភិក្ខុខ្ចីជាងត្រូវហៅភិក្ខុចាស់ជាងថា 'ភន្តេ' ឬ ' អាយស្មា ' ក៏បាន។"

"ម្នាលអានន្ទ! លុះអំណើះតអំពីតថាគតទៅ បើសង្ឃមានប្រាថ្នានឹងដកសិក្ខាបទ ចូរដកសិក្ខាបទណាដែលតូចនិងតូចដោយលំដាប់ចុះ!"

"ម្នាលអានន្ទ! លុះអំណើះតអំពីតថាគតទៅ សង្ឃត្រូវតែដាក់ 'ព្រហ្មទណ្ឌ' ដល់ឆន្នភិក្ខុ(អតីតនាយសារថីព្រះសិទ្ធត្ថ) នោះផងចុះ!"

ព្រះអានន្ទក្រាបបង្គំទូលសួរព្រះសម្ពុទ្ធថា៖ "បពិត្រព្រះអង្គដ៏ចំរើន! តើព្រហ្មទណ្ឌនោះ ដូចម្តេច?"

ព្រះមានព្រះភាគទ្រង់ត្រាស់ថា៖ "ម្នាលអានន្ទ! ឆន្នភិក្ខុចង់ពោលនូវពាក្យណា ក៏ពោលនូវពាក្យនោះចុះ។ ប៉ុន្តែពួកភិក្ខុទាំងឡាយមិនត្រូវនិយាយរក មិនត្រូវទូន្មាន មិនត្រូវប្រៀនប្រដៅភិក្ខុឆន្ន នោះឡើយ។"

ព្រះអានន្ទបន្តបង្គំសួរថា៖ "បពិត្រព្រះអង្គដ៏ចំរើន! ខ្ញុំព្រះអង្គដាក់ព្រហ្មទណ្ឌដល់ឆន្នភិក្ខុដូចម្តេចបាន ព្រោះឆន្នភិក្ខុកាចរឹងរូសខ្លាំងណាស់។"

ព្រះសម្ពុទ្ធទ្រង់មិនឆ្លើយនឹងសំនួររបស់ព្រះអានន្ទនោះថាដូចម្តេចឡើយ។ លំដាប់នោះ ព្រះដ៏មានព្រះភាគក៏ទ្រង់ត្រាស់ហៅភិក្ខុទាំងឡាយមកថា៖ "ម្នាលភិក្ខុទាំងឡាយ! បើអ្នកមានសេចក្តីសង្ស័យ សេចក្តីងឿងឆ្ងល់ ក្នុងព្រះពុទ្ធ ព្រះធម៌ ព្រះសង្ឃ ក្នុងមគ្គ ឬ បដិបទា ចូរអ្នកទាំងឡាយ សាកសួរនឹងតថាគតមកចុះ។ ចូរកុំអោយឱកាស ដ៏មានតម្លៃនេះ

កន្លងហួស ហើយស្រាប់តែមានសេចក្តីក្តៅក្រហាយស្តាយក្នុងកាលខាងក្រោយថា ថ្ងៃហ្នឹងព្រះសាស្តាគង់នៅចំពោះមុខយើងរាល់គ្នាៗមិនបានជាយកចិត្តទុកដាក់ ដើម្បីសាកសួរព្រះអង្គ ក្នុងទីចំពោះព្រះភ័ក្ត្រសោះ។"

ព្រះដ៏មានព្រះភាគទ្រង់ត្រាស់ពាក្យនេះនឹងភិក្ខុទាំងឡាយ ជាគំរប់ពីរដងផង ជាគំរប់បីដងផង ភិក្ខុទាំងនោះក៏នៅស្ងៀម ជាគំរប់ពីរដងផង ជាគំរប់បីដងផងដែរ។

ព្រះសម្ពុទ្ធទ្រង់ត្រាស់បន្តថា៖ "ម្នាលភិក្ខុទាំងឡាយ! បើអ្នកមានសេចក្តីសង្ស័យ ហើយមិនហ៊ានសាកសួរតថាគត ដោយខ្លួនឯង ព្រោះតែសេចក្តីគោរពក្នុងព្រះសាស្តា ចូរអ្នកប្រាប់ដល់ភិក្ខុ ជាសំឡាញ់ផងចុះក៏បាន។"

កាលបើ ព្រះដ៏មានព្រះភាគទ្រង់មានព្រះបន្ទូល យ៉ាងនេះហើយ ភិក្ខុទាំងនោះ ក៏នៅតែស្ងៀមស្ងាត់ដដែល។ ទើបព្រះអានន្ទក្រាបបង្គំទូលនឹងព្រះពុទ្ធថា៖ "បពិត្រព្រះអង្គដ៏ចំរើន! ហេតុនេះ អស្ចារ្យពេកណាស់ចម្លែកណាស់ ខ្ញុំព្រះអង្គមានសេចក្តីជ្រះថ្លា(មានជំនឿ) លើភិក្ខុសង្ឃជាសំឡាញ់ទាំងអស់នេះហើយ។ គ្មានភិក្ខុរូបណាមានសេចក្តីសង្ស័យ មានសេចក្តីងឿងឆ្ងល់ ក្នុងព្រះពុទ្ធ ព្រះធម៌ ព្រះសង្ឃ ក្នុងមគ្គ ឬ បដិបទានេះឡើយ។"

ព្រះមានព្រះភាគទ្រង់ត្រាស់នឹងព្រះអានន្ទទៀតថា៖ "ម្នាលអានន្ទ! អ្នកនិយាយនេះដោយសេចក្តីជ្រះថ្លាហើយ ញាណតថាគតដឹងពិត ក្នុង

សេចក្ដីទាំងនេះដែរ។ ម្នាលអានន្ទ! បណ្ដាភិក្ខុទាំង៥០០រូប ដែលមានវត្តមាននៅចំពោះមុខតថាគតនេះ សុទ្ធតែជា អរិយសាវក មានភក្ដីភាពបំផុតចំពោះព្រះរតនត្រ័យ និងដែលមានគុណធម៌ យ៉ាងទាបបំផុតក៏គង់ត្រឹម ជា សោតាបន្នបុគ្គល ដែលមិនធ្លាក់ចុះក្នុងអបាយ ជា និយតបុគ្គល ដែលនឹងបានទទួលការត្រាស់ដឹង ក្នុងកាលខាងមុខ។"

ព្រះសម្ពុទ្ធទ្រង់ទតសម្លឹងទៅកាន់ភិក្ខុសង្ឃទាំងឡាយដោយសភាពស្ងៀមស្ងាត់ រួចទ្រង់មានព្រះបន្ទូលជាចុងក្រោយបំផុតថា៖ "ម្នាលសាវករបស់តថាគតទាំងឡាយ! ណ្ហើយចុះ ឥឡូវនេះ តថាគតនឹងប្រាប់អ្នកទាំងឡាយអោយដឹងថា សង្ខារទាំងឡាយមានសេចក្ដីសាបសូន្យជាធម្មតា អ្នកទាំងឡាយចូរញ៉ាំងកិច្ចទាំងពួងអោយសំរេច ដោយសេចក្ដីមិនប្រមាទចុះ! នេះជាបច្ឆិមវាចា(ពាក្យបណ្ដាំចុងក្រោយ)របស់តថាគតហើយ។"

ព្រះដ៏មានព្រះភាគ ទ្រង់បិទព្រះនេត្រចុះសន្សឹមៗ ផែនដីក៏ចាប់កក្រើករំពើកញាប់ញ័រយ៉ាងខ្លាំង ទាំងផ្គរក៏លាន់ឮគគ្រឹកគគ្រេង ព្រមគ្នាឡើង។ ផ្កាសាលព្រឹក្សនិងផ្កាមន្ទារវៈ ក៏បន្តជ្រុះរោយរាយមកបូជាដូចជាដំណក់ទឹកភ្លៀង និង ពួកភិក្ខុសង្ឃក៏ចាប់ផ្ដួកផ្ដួល ស្រែកទួញយំឡើង។ ភិក្ខុសង្ឃទាំងនោះ ក៏បានដឹងយ៉ាងច្បាស់ថា ព្រះសមណគោតមបរមគ្រូទ្រង់បរិនិព្វាន ក្នុងឋានបរមសុខ ឬឋានផុតទុក្ខហើយ។

ព្រះសមណគោតមបរមគ្រូទ្រង់យាងចាកលោកយើងនេះទៅ ក្នុងវេលាពាក់កណ្ដាលអធ្រាត្រ នា ថ្ងៃអង្គារ ពេញបូណ៌មី ខែពិសាខ ឆ្នាំ

ម្យ៉ាញ់។ ភិក្ខុទាំងឡាយ ដែលមិនទាន់ប្រាសចាករាគៈ ក៏យំសោកពោក ខ្លួនលើប្រថពី និងស្រែករៀបរាប់ជាច្រើនទំនងថា៖ "ព្រះដ៏មានព្រះភាគ ទ្រង់ប្រញាប់បរិនិព្វានពេកណាស់! ព្រះសម្ពុទ្ធដ៏មានចក្ខុក្នុងលោកក៏ទ្រង់ ប្រញាប់បាត់ទៅពេកណាស់! ព្រះមានព្រះភាគទ្រង់ចាកចោលអាត្មាអញ ហើយ! តើមានអ្នកណាជាទីពឹងទៀត? ។ល។ "រីឯ ភិក្ខុណាដែលបាន ប្រាសចាករាគៈហើយ ភិក្ខុទាំងអស់នោះមានសតិសម្បជញ្ញៈ អាចសង្កត់ វេទនាបាន ដោយគិតថា សង្ខារទាំងឡាយ មិនទៀងទាត់ពិត ព្រោះតែ ហេតុនេះ បុគ្គលគប្បីបាននូវសេចក្ដីទៀងទាត់ក្នុងខន្ធប្បវត្តិមកអំពីណា។

ពួកមល្លក្សត្រ អ្នកក្រុងកុសិនារាបានរៀបចំពិធីបុណ្យឈាបនកិច្ច នៃព្រះសពព្រះសមណគោតម តាមរបៀបស្ដេចចក្រពត្តិ អស់រយៈកាល ៦ថ្ងៃ៦យប់។ ប្រជាពលរដ្ឋក្នុងក្រុងកុសិនារានិងបាវា នាំគ្នាកត្រឹកកគ្រេង ចូលមកធ្វើសក្ការបូជាដល់ព្រះសរីរៈ ដោយគ្រឿងក្រអូប ផ្កាកម្រង និង របាំ ចម្រៀង ភ្លេងប្រគំ ជាដើម។ នៅថ្ងៃទី៧ គឺនៅថ្ងៃពុធ ៨រោច ខែ ពិសាខ ឆ្នាំម្សាញ់ ទើបពួកមល្លក្សត្រ អ្នកក្រុងកុសិនារា និងពុទ្ធបរិស័ទ ថ្វាយព្រះភ្លើងព្រះសរីរៈព្រះសព នៅមកុដពន្ធនៈចេតិយ ឬអង្គារៈចេតិយ (សព្វថ្ងៃហៅ រាមភរៈចេតិយ) ពីខាងកើតក្រុងកុសិនគរៈ។ ព្រះពុទ្ធសរីរ ធាតុ បានរើសប្រមូលដាក់ក្នុងកោដ្ឋមាស រួចហើយក៏យកទៅដំកល់ទុក ក្នុងសណ្ឋាគារដ្ឋាន ហើយនាំគ្នាធ្វើសក្ការបូជាអស់៧ថ្ងៃ ថែមទៀត។

៧ថ្ងៃក្រោយមក ព្រះបាទអជាតសត្តុ ព្រះចៅនគរមគធៈ ទ្រង់បាន

បញ្ជូនសមណទូត ទៅកាន់សំណាក់ពួកមល្លក្សត្រ ដើម្បីសុំចែកព្រះសរីរធាតុ។ រាជទូតនគរឯទៀត ក៏សុំចែករំលែកព្រះពុទ្ធសរីរធាតុ រវាងគ្នានិងគ្នាដែរ។ មុនដំបូង ពួកមល្លក្សត្រ អ្នកក្រុងកុសិនារា បានជំទាស់នឹងសេចក្ដីស្នើសុំនេះ ដែលជាហេតុធ្វើអោយមានការទាស់ទែងខ្វែងគំនិតគ្នារហូតបំរុងនឹងផ្ទុះជាសង្គ្រាមធំទៀតផង។ ក្សត្រនិងព្រាហ្មណ៍ ទាំង៧នគរថាយើងក៏ជាក្សត្រនិងជាព្រាហ្មណ៍ យើងគួរបានចំណែកនៃព្រះសរីរធាតុដែរ។ ក៏ប៉ុន្តែ លុះដោយនិវាទរបស់មហាបណ្ឌិតព្រាហ្មណ៍ម្នាក់ ឈ្មោះទោណៈ ការទាស់ទែងខ្វែងគំនិតគ្នានោះ ក៏ត្រូវបានរសាយបាត់ទៅវិញ។ ទោណព្រាហ្មណ៍ បាននិយាយទៅកាន់គណៈទូតទាំងនោះថា៖ "លោកទាំងឡាយដ៏ចំរើន! សូមស្ដាប់ពាក្យរបស់ខ្ញុំមួយមាត់សិន។ ព្រះពុទ្ធជាម្ចាស់នៃយើង ព្រះអង្គជាខន្តិវាទ (អ្នកពោលសរសើរគុណនៃខន្តី) ដ៏ពិត។ ការប្រហារគ្នា ព្រោះតែចំណែកនៃព្រះសរីរធាតុ របស់ឧត្តមបុគ្គលនេះ មិនប្រពៃឡើយ។ បពិត្រលោកទាំងឡាយដ៏ចំរើន! យើងទាំងអស់គ្នា គួរតែស្រុះស្រួលគ្នា ព្រមព្រៀងគ្នា រីករាយរកគ្នា ចែកព្រះសរីរធាតុនេះ ជា៨ចំណែក ដើម្បីដំកល់ទុក ក្នុងព្រះស្តូបទាំងឡាយ រួចផ្សាយទៅកាន់គ្រប់ទិសចុះ គង់មានជនដ៏ច្រើន នឹងជ្រះថ្លាចំពោះព្រះសម្ពុទ្ធដ៏មានចក្ខុ មិនខានឡើយ។"

ពួកមល្លក្សត្រ អ្នកក្រុងកុសិនារា ព្រមទាំងក្សត្រ និងព្រាហ្មណ៍នៃនគរទាំង៧ ដល់នូវសេចក្ដីព្រមព្រៀង រវាងគ្នានិងគ្នា ហើយព្រះពុទ្ធ

សរីរធាតុ ក៏ត្រូវបានចែកជា៨ចំណែកស្មើៗគ្នា ក្នុងពេលនោះឯង។

ចំពោះទោណព្រាហ្មណ៍ ដែលជាមេចំណែក ក្នុងការចែកព្រះពុទ្ធសរីរធាតុនោះ បានត្រឹមតែ តុម្ព (ឈ្មោះវង្វាល់របស់ឥណ្ឌា ក្នុងសម័យនោះ)មួយ យកមកដំកល់ទុកក្នុងព្រះស្តូប ដើម្បីធ្វើសក្ការបូជា។

រីឯ ក្សត្រមោរិយៈ អ្នកក្រុងបិប្ផលិវ័ន បានបញ្ជូនរាជទូតមកកាន់សំណាក់មល្លក្សត្រ អ្នកក្រុងកុសិនារា ដើម្បីសុំព្រះពុទ្ធសរីរធាតុ ក្រោយគេ ក៏បានត្រឹមតែព្រះអង្គារ(ធ្យូង) ពីកន្លែងថ្វាយព្រះភ្លើងនោះយកទៅ។

# ០៣. ខែ ជេស្ឋ (មិថុនា)

## រំលឹកដល់

- តតិយសង្គាយនា ឬ មហាសន្និបាតសង្ឃលើកទី៣ (សូមអានទំព័រទី ៣២៦)
- ព្រះមហាមហិន្ទត្ថេរ នាំព្រះពុទ្ធសាសនាចូលកាន់លង្កាទ្វីប ជាលើកដំបូង

# ព្រះមហាមហិន្ទត្ថេរ នាំព្រះពុទ្ធសាសនា ចូលកាន់លង្កាទ្វីប ជាលើកដំបូង

បន្ទាប់ពីទ្រង់ព្រះសណ្ដាប់ធម្មទេសនា របស់ព្រះមោគ្គលីបុត្តតិស្សត្ថេរមក ព្រះបាទធម្មាសោកមហារាជ ជាស្ដេចចុល្លចក្រពត្រ ក្នុងជម្ពូទ្វីប នៃប្រទេសឥណ្ឌា និង ជាព្រះអគ្គពុទ្ធសាសនូបត្ថម្ភក៏មួយអង្គ ទ្រង់សព្វព្រះរាជហឫទ័យ បំបួសព្រះរាជបុត្រា ព្រះនាម មហិន្ទ ជាភិក្ខុ និងព្រះរាជបុត្រី ព្រះនាម សង្ឃមិត្តា ជាភិក្ខុនី ក្នុងព្រះពុទ្ធសាសនា។

ក្រោយពីលោកបានបព្វជ្ជា និង ឧបសម្បទា ហើយបានសំរេចមគ្គផល ព្រមទាំងអភិញ្ញា៦ រួចមក ព្រះមហិន្ទត្ថេរបាននាំព្រះថេរៈ៤អង្គទៀត ដែលបានសំរេចមគ្គផល និងអភិញ្ញា៦ដូចគ្នា ចេញទៅផ្សាយព្រះពុទ្ធសាសនា នៅឯលង្កាទ្វីប។ មុនដំបូង លោកទាំងអស់ចូលទៅគង់នៅលើភ្នំមួយ មិនឆ្ងាយប៉ុន្មានអំពីព្រះរាជវាំង នៃ ព្រះបាទទេវានម្បិយតិស្ស ព្រះរាជាលង្កាទ្វីប។ នៅថ្ងៃដែលលោកទាំង៥អង្គនិមន្តដល់នោះជួនជាព្រះរាជាស្ដេចចេញមកក្រសាលព្រៃ ហើយបានជួបជាមួយលោក។ ព្រះរាជាបានសាកសួរនិងទ្រង់ជ្រាបថា ព្រះមហិន្ទត្ថេរជាព្រះរាជបុត្រព្រះបាទធម្មាសោក ដែលជាមហាមិត្រ ក៏ទ្រង់ជ្រះថ្លានិមន្តទៅឆាន់ក្នុងព្រះរាជវាំង។

នេះជាលើកទីមួយហើយ ដែលមហាជន ក្នុងលង្កាទ្វីបទាំងមូល

មានព្រះរាជវង្សានុវង្ស នាហ្មឺនសព្វមុខមន្ត្រី និងប្រជាពលរដ្ឋទាំងប្រុសស្រី ផ្អើលឈូឆរណែនណាន់តាន់តាប់ មកទស្សនា ព្រះមហាមហិន្ទត្ថេរ ដែលព្រះអង្គសំដែងធម្មទេសនា ស្តីអំពីពុទ្ធប្បវត្តិ ជាដើម ជាទីសណ្តាប់ដល់មហាសន្និបាតនោះ។ កាលទ្រង់ព្រះសណ្តាប់រួចហើយ ព្រះបាទទេវានម្បិយតិស្ស ព្រះចៅលង្កាទ្វីបជាប្រធាន បានប្តេជ្ញាព្រះអង្គជាឧបាសកដល់នូវព្រះត្រៃសរណគមន៍ជាទីពឹងទីរលឹក។ មហាជនភាគច្រើនក៏ដូច្នោះដែរ បានប្រគល់កាយថ្វាយខ្លួន ជា ឧបាសក-ឧបាសិកា ព្រមទាំងបានសំរេចនូវមគ្គផល សមគួរ តាមឧបនិស្ស័យ រៀងៗខ្លួន។ ក្រោយមកក៏មានបុរសអ្នកមានសទ្ធាទទួលបព្វជ្ជានិងឧបសម្បទាក្នុងព្រះពុទ្ធសាសនា។

ចាប់តាំងពីពេលនោះមក ប្រទេសលង្កា ក៏ក្លាយជាប្រទេសកាន់ព្រះពុទ្ធសាសនា មានពុទ្ធបរិស័ទគោរពបូជាពុទ្ធសាសនាយ៉ាងមាំមួននិងចំរើនរុងរឿង នេះក៏ដោយសារព្រះរាជបេសកកម្មរបស់ព្រះមហាមហិន្ទត្ថេរ ដែលបាត់តាំងឡើងដោយព្រះបាទធម្មាសោក ជាព្រះវរបិតា។

ប្រទេសកម្ពុជាយើងក៏ជាប្រទេសកាន់ព្រះពុទ្ធសាសនា តំណាលគ្នានឹងប្រទេសលង្កានោះដែរ ដោយសារព្រះរាជសកម្មភាពរបស់ព្រះបាទធម្មាសោក ទ្រង់បានផ្សាយមក។ ក្នុងពេលជាមួយគ្នានោះ ព្រះមោគ្គលី-បុត្តតិស្សត្ថេរ ក៏បានបញ្ជូនព្រះថេរៈ ពីរអង្គ គឺ ព្រះសោណត្ថេរ១ និងព្រះឧត្តរត្ថេរ១ ជាសមណទូត អោយមកផ្សាយព្រះពុទ្ធសាសនា នៅក្នុងជ្រោយសុវណ្ណភូមិ មានប្រទេសខ្មែរ ជាដើម ហើយកុលបុត្រខ្មែរ ទូទាំង

ប្រទេស ក៏បានបព្វជ្ជា និងឧបសម្បទា ជាសាមណេរ ភិក្ខុតៗគ្នា ដើម្បី ញ៉ាំងព្រះពុទ្ធសាសនា អោយបានរុងរឿងរុងរឿងជារហូតមក។ ព្រះមហាក្សត្រខ្មែរពីសម័យបុរាណ ទ្រង់សព្វព្រះរាជហឫទ័យនឹងបព្វជ្ជាកម្មណាស់ ដូចមានភ័ស្តុតាងសិលាចារឹក នៅប្រាសាទអង្គរវត្ត ត្រង់ថ្នាក់កណ្តាលពីខាងមុខ ដែលនិយាយអំពីព្រះរាជាទ្រង់បំបួសព្រះរាជបុត្រ។ សិលាចារឹកមួយនិយាយអំពី ព្រះបាទជ័យវរ្ម័ន ទ្រង់ជ្រះថ្លាក្នុងព្រះពុទ្ធសាសនា ខ្លាំងណាស់ ទ្រង់បានថ្វាយព្រះអង្គជា មហាឧបាសក ក្នុងព្រះពុទ្ធសាសនា។ សូម្បីតែព្រះរាជបុត្រនៅក្នុងព្រះឧទរនៃព្រះអគ្គមហេសីនៅឡើយ មិនទាន់ទាំងប្រាបច្បាស់ថាជាប្រុសឬស្រីផង ក៏ទ្រង់ឧទ្ទិសទុកជាមុនថា៖ "កាលបើប្រសូតមកជាព្រះរាជបុត្រី នឹងថ្វាយជាអ្នកឧបដ្ឋាកព្រះរតនត្រ័យ បើជាព្រះរាជបុត្រានឹងអោយទ្រង់ផ្នួស ក្នុងសំណាក់ព្រះពុទ្ធសាសនា។"

# ០៤. ខែ អាសាឍ (កក្កដា)

រំលឹកដល់

- ព្រះសិទ្ធត្ថយាងចេញសាងព្រះផ្នួស
- បុណ្យអាសាឍបូជា ៖ព្រះពុទ្ធសំដែងបឋមទេសនា "ធម្មចក្កប្បវត្តនសូត្រ" ប្រោសបញ្ចវគ្គិយភិក្ខុ
- បឋមសង្គាយនា (មហាសន្និបាតសង្ឃលើកទី១)

នាថ្ងៃព្រហស្បតិ៍ ទី១៥កើត ពេញបូណ៌មី ខែអាសាឍ ឆ្នាំថោះ នៅក្នុងព្រះរាជវាំង នាក្រុងកបិលភស្តុ មានធ្វើពិធីជប់លៀង រាំរែកមួយយ៉ាងសប្បាយ ដែលព្រះបាទសុទ្ធោទនព្រះរាជទ្រង់ប្រារព្ធឡើងដើម្បីអបអរសាទរនិងផ្តល់កិត្តិយសដល់ព្រះអយ្យបុត្ត ព្រះរាហុលកុមារ ដែលទើបនឹងប្រសូត។ យប់ជ្រៅណាស់ទៅហើយ ព្រះអង្គម្ចាស់សិទ្ធត្ថ ទ្រង់គង់ខាងក្រៅព្រះរាជតំណាក់តែមួយព្រះអង្គឯង ទតមើលពន្លឺព្រះចន្ទនិងហ្វូងតារាទាំងឡាយ។ ព្រះអង្គទ្រង់បានដាក់ព្រះចិន្តាថានឹងចាកចេញអំពីព្រះរាជវាំងទៅស្វែងរកធម៌ដូចតាបសទាំងឡាយនៅក្នុងព្រៃ នាពាក់កណ្ដាលរាត្រីនេះជាដាច់ខាត។ ទីបំផុតព្រះអង្គយាងចូលទៅក្នុងក្រឡាបន្ទំ ដើម្បីផ្លាស់គ្រឿងអម្ពរ រួចទើបព្រះអង្គយកព្រះហស្ត វែកព្រះសន្និយា(វាំងនន)សន្សឹមៗ។ ទ្រង់ទតទៅកាន់ពិម្ពាយសោធរា ជាមហេសី និងរាហុលជាបុត្រា ដែលកំពុងផ្ទំលង់លក់។ ព្រះអង្គមានព្រះហឫទ័យចង់យាងចូលទៅផ្តែផ្តាំមហេសី នូវពាក្យខ្លះមុននឹងទ្រង់យាងព្រះរាជដំណើរចេញ ប៉ុន្តែទ្រង់នៅស្ទាក់ស្ទើរក្នុងព្រះចិន្តា។ ព្រះអង្គទ្រង់ព្រះតំរិះថា៖ "អាត្មាអញបានពោលរៀបរាប់ នូវអ្វីៗដែលមានសារៈសំខាន់ ប្រាប់ដល់ពិម្ពាមហេសីសំឡាញ់រួចពីមុនមកអស់ហើយ។ ប្រសិនជាអាត្មាអញ ដាស់មហេសីក្នុងពេលនេះ ក៏នឹងអាចធ្វើអោយការចេញដំណើររបស់អាត្មាអញមានការឈឺចាប់រឹតតែខ្លាំងឡើង។"

កាលទ្រង់បានពិចារណាដូច្នោះហើយ ទ្រង់ក៏ទម្លាក់វាំងននចុះមកវិញ ហើយក៏យាងថយចេញ។ ព្រះសិទ្ធត្ថទ្រង់មិនទាន់សព្វព្រះហឫទ័យ

សោះ ទ្រង់ចាប់បង្អើបវាំងននម្ដងទៀត ដើម្បីទតមើលមហេសីនិងបុត្រា ក្នុងនាទីចុងក្រោយបំផុត។ ព្រះអង្គខំទតយ៉ាងខ្លាំងរហូតដល់រូបភាពរបស់ មហេសីនិងបុត្រាជិតជាប់ក្នុងព្រះអារម្មណ៍។ ទីបំផុត ព្រះអង្គទ្រង់ទម្លាក់ វាំងននចុះមកវិញសន្សឹមៗ រួចហើយក៏យាងចេញផុតតែម្ដងទៅ។

ខណៈដែលព្រះសិទ្ធត្ថ យាងកាត់តាមល្វែងទទួលភ្ញៀវ ទ្រង់បាន ទតឃើញស្រីអ្នកចម្រៀងនិងរបាំ ដេកលក់ស្ដូកស្ដឹងលើកំរាល មានសក់ សិតពីងសំពោង ហារមាត់ប្រវាបៗដូចជាត្រីងាប់។ ដៃដែលគេរាំជំទន់ល្វន់ ល្វែតកាលពីព្រលប់នោះ ក្លាយជារឹងឆ្អឹងដូចជាអង្កត់អុស។ ជើងរបស់គេ គងតាក់លើគ្នាទៅវិញទៅមកដូចជាមនុស្សស្លាប់នៅក្នុងទីសមរភូមិ។ ព្រះ សិទ្ធត្ថមានព្រះអារម្មណ៍ដូចជាទ្រង់យាងកាត់តាមព្រៃខ្មោចដ៏ស្ងាត់ជ្រងំ។

ពេលព្រះអង្គយាងដល់ក្រោលសេះ ទ្រង់ទតឃើញ នាយសារថី មិនទាន់ដេកនៅឡើយ។ ឆន្នមាត្យ បានដឹក សេះកណ្ឋកៈ ដែលបានពាក់ បង្ហៀរនិងកែបរួចជាស្រេចហើយនោះមកថ្វាយព្រះអង្គ។ នាយឆន្នមាត្យ ត្រូវបានព្រះសិទ្ធត្ថអនុញ្ញាត អោយធ្វើដំណើរទៅជាមួយដែរ។ ព្រះសិទ្ធត្ថ និងនាយសារថីបណ្ដើរសេះកណ្ឋកៈចេញដំណើរយឺតៗ និង យ៉ាងស្ងៀម ស្ងាត់បំផុត សំដៅទៅកាន់ក្លោងទ្វារវាំង ខាងក្រៅ។ ឆ្មាំទ្វារទាំងអស់ដេក លក់ស្ងាត់ឈឹង ដែលជាឱកាសមួយធ្វើអោយព្រះសិទ្ធត្ថ និងឆន្នអាមាត្យ អាចឆ្លងកាត់តាមក្លោងទ្វារវាំងនោះបានយ៉ាងស្រួល។ ព្រះសិទ្ធត្ថទ្រង់គង់ លើខ្នងសេះកណ្ឋកៈ ដោយដាក់នាយឆន្នអាមាត្យអោយអង្គុយនៅពីខាង

ក្រោយ។ សេះកណ្ឋកៈលន់យ៉ាងពេញទំហឹងឆ្ពោះទៅទិសខាងត្បូងក្រោម ពន្លឺព្រះចន្ទដ៏ថ្លា នារាត្រីថ្ងៃពេញបូរមី។

កាលទ្រង់យាងចេញទៅបានបន្តិច ក៏មានមារាធិរាជ មកបង្អាក់ព្រះដំណើររបស់ព្រះអង្គថា៖ "នែសិទ្ធត្ថ! ចូរអ្នកកុំយាងចេញទៅបួសអី លុះអំណើះតែ៧ថ្ងៃទៀតទេ សម្បត្តិចក្រនឹងកើតឡើងដល់អ្នកហើយ។"

ប៉ុន្តែ ព្រះសិទ្ធត្ថទ្រង់កាត់ព្រះហឫទ័យ ហើយពោលតប នឹងមារវិញថា៖ "អាត្មាអញមិនអាឡោះអាល័យនឹងសម្បត្តិមហាចក្រនោះឡើយ។" លុះព្រះអង្គបានឃាតបាកខទ្ទសន្តានអស់ហើយ ទ្រង់បន្លឺនូវព្រះវាចាថា៖ "រាហុល! រាហុល!" រួចទ្រង់ញាក់សេះអស្សតរ បន្តព្រះរាជដំណើរទៅមុខទៀតយ៉ាងលឿន។

នេះគឺជាការធ្វើដំណើរមួយ យ៉ាងវែង លេចវាលចូលព្រៃ លេចព្រៃចូលវាល រហូតដល់ពេលថ្ងៃរះ ទើបព្រះសិទ្ធត្ថនិងឆន្នអាមាត្យ បានឆ្លងផុតព្រំដែននគរបីគឺ: កបិលពស្ថុ ១ សាវត្ថី ១ និង វេសាលី ១ អស់ចម្ងាយផ្លូវប្រមាណ៣០យោជន៍(ប្រហែលជា២១៨គីឡូម៉ែត្រ)និងឆ្លងកាត់ស្ទឹងអនោមា មុននឹងព្រះអង្គទ្រង់យាងទៅដល់មាត់ព្រៃស្វាយមួយ ឈ្មោះអនុបិយម្ពវ័ន ក្នុងដែន មល្លៈ ក្នុងខេត្តពិហារ សព្វថ្ងៃនេះ។

ព្រះអង្គម្ចាស់សិទ្ធត្ថទ្រង់លោតចុះអំពីខ្នងសេះកណ្ឋកៈ ហើយទ្រង់ថ្លែងអំណរគុណដល់សេះនោះថា៖ "នែកណ្ឋកៈសំឡាញ់! ខ្ញុំអរគុណច្រើនណាស់ ដែលអ្នកបានជូនដំណើរខ្ញុំមកដល់ទីនេះ។"

អាជានេយ្យកណ្ឋកៈងើបក្បាលអង្រួន ហើយសម្លឹងទៅកាន់ព្រះអង្គ ដោយយកចិត្តទុកដាក់ និងពេញចិត្តជាទីបំផុត។

ព្រះសិទ្ធត្ថទ្រង់ដកព្រះខ័នចេញអំពីស្រោម ដែលចងភ្ជាប់នឹងកែបសេះ រួចទ្រង់ចាប់ក្របួចព្រះមោលី(ផ្នួងសក់) ដោយព្រះហស្តឆ្វេង កាត់ព្រះកេសា(សក់) អោយនៅខ្លីស្មើត្រឹមឫស ឬត្រឹមពីរធ្នាប់។ ទ្រង់ក៏ហុចព្រះមោលី ជាមួយព្រះខ័ននោះ ទៅអោយឆន្នអាមាត្យ។ បន្ទាប់មកព្រះអង្គដោះខ្សែព្រះសុរង ហុចអោយទៀត មុននឹងព្រះអង្គមានព្រះបន្ទូលថា "ឆន្នអាមាត្យ! សូមបងប្រុសយកវត្ថុទាំងអស់នេះ ទៅថ្វាយដល់ព្រះវរបិតាខ្ញុំផង និងបង្គំទូលព្រះអង្គអោយជឿទុកព្រះទ័យលើខ្ញុំចុះ។ ខ្ញុំមិនមែនជាអ្នករត់ចោលគេហដ្ឋានដើម្បីគេចវេះនូវការទទួលខុសត្រូវការងាររបស់ខ្ញុំនោះទេ។ ខ្ញុំមកនេះគឺក្នុងនាមនៃមនុស្សទាំងឡាយ និងសំរាប់សព្វសត្វលោក។ សូមបងប្រុសជួយអង្វរលួងលោម ដល់ព្រះវរបិតា ព្រះមាតុច្ឆា និងមហេសី ពិម្ពាយសោធរា ជំនួសខ្ញុំផងណា!"

ពេលលើកដៃទទួលព្រះសុរង ជាចុងក្រោយ នាយឆន្នស្រក់ទឹកភ្នែកមាត់ៗ ហើយក្រាបទូលវិញយ៉ាងរអាក់រអួលថា៖ "បពិត្រព្រះអង្គម្ចាស់ រាល់ព្រះអង្គនឹងព្រួយព្រះហឫទ័យខ្លាំងហើយ ចំពោះព្រះអង្គ។ ទូលបង្គំមិនដឹងជាយកពាក្យអ្វីទៅពណ៌នាទូលព្រះមហាក្សត្រ និងព្រះមហាក្សត្រិយានី ព្រមទាំងព្រះនាងពិម្ពា ដែលជាមហេសីរបស់ព្រះអង្គបានឡើយ។ បពិត្រព្រះអង្គម្ចាស់! តើព្រះអង្គផ្ទំនៅក្រោមដើមឈើ ដូចជាតាបសឥសី

ម្តេចនឹងកើត បើក្នុងជីវិតរបស់ព្រះអង្គៗពុំដែលស្គាល់អ្វីក្រៅអំពីព្រះសយនា និងជាហ៊ុំជំទន់ល្មើយ និងកក់ក្តៅ យ៉ាងដូច្នោះសោះនោះ?"

ព្រះសិទ្ធត្ថទ្រង់មានព្រះបន្ទូល ដោយព្រះភក្ត្រញញឹមថា៖ "សូមកុំបារម្ភអី បងប្រុស! មនុស្សដទៃគេរស់នៅយ៉ាងណាកើត ខ្ញុំក៏អាចរស់បានដូចជាគេ យ៉ាងនោះដែរ។ សូមទុកអោយខ្ញុំនៅទីនេះ តែម្នាក់ឯងចុះ មិនអីទេ!"

ព្រះសិទ្ធត្ថយកព្រះហស្តអង្អែលក្បាលសេះកណ្ឋកៈម្តងទៀត ថា៖ "កណ្ឋកៈសំឡាញ់! ឥឡូវនេះ អ្នកវិលទៅកាន់ព្រះបរមរាជវាំងជាមួយនឹងឆន្នអាមាត្យវិញចុះ!"

កាលចេញដំណើរផុតពីរង្វង់ព្រះចក្ខុនៃព្រះសិទ្ធត្ថបន្តិចមក សេះកណ្ឋកៈដែលមានចិត្តនឹកស្រណោះអាល័យម្ចាស់ខ្លាំងពេកនោះ ក៏បែកទ្រូងស្លាប់ទៅ។ ចំណែកឯឆន្នមាត្យ កាលបើសេះកណ្ឋកៈបែកទ្រូងស្លាប់ចោលហើយ ក៏ស្ពាយបង្វិចដើរត្រឡប់ទៅកាន់ក្រុងកបិលពស្តុវិញដោយសេចក្តីទុក្ខទោមនស្ស យ៉ាងក្រៃលែង។

ពីរខែ បន្ទាប់អំពីថ្ងៃព្រះសមណគោតមបានត្រាស់ដឹងមក គឺនៅថ្ងៃ១៥កើត ពេញបូរមី ខែអាសាឍ ឆ្នាំរកានោះឯង ព្រះពុទ្ធទ្រង់សំដែងនូវបឋមទេសនា ធម្មចក្កប្បវត្តនសូត្រ ដើម្បីប្រោស បញ្ចវគ្គិយភិក្ខុ ៥រូប នៅក្នុងព្រៃឥសិបតនមិគទាយវ័នទៀបក្រុងពារាណសី។ កាលបានស្តាប់ព្រះធម្មទេសនារបស់ព្រះពុទ្ធរួចមក បញ្ចវគ្គិយទាំង៥រូប ក៏មានជំនឿជឿជាក់លើព្រះអង្គ ព្រមទាំងសុំបួសជាភិក្ខុក្នុងពេលនោះតែម្តង។

អស្សជិព្រាហ្មណ៍ ដែលកំពុងអង្គុយភាវនាតបធម៌ នៅក្នុងខឌ្យានម្រឹគទាវៈ នាព្រៃឥសិបតនមិគទាយវ័ននោះ បានក្រឡេកឃើញព្រះសង្ឃមួយអង្គលើមៗអំពីចម្ងាយ កំពុងតែនិមន្តចូលមក តាមក្លោងទ្វារខឌ្យាន។ ពេលព្រះសង្ឃនោះ និមន្តចូលមកជិតដល់ ទើបអស្សជិដឹងថា គ្មានអ្នកណាក្រៅពីព្រះសិទ្ធត្ថឡើយ។ អស្សជិព្រាហ្មណ៍ក៏ស្ទុះក្រោកម្នីម្នាទៅប្រាប់ភិក្ខុព្រាហ្មណ៍ជាសំឡាញ់ខ្លួនទាំង៤រូបទៀត អោយបានដឹងផង។ ឥទ្ធិយៈបាននោលប្រាប់សំឡាញ់ថា៖ "ម្នាលអាវុសោទាំងឡាយ! សិទ្ធត្ថគោតមនេះ ជាអ្នកប្រតិបត្តិ ដើម្បីល្បោក បោះបង់មគ្គៈចោលទាំងពាក់កណ្តាលផ្លូវ។ ជាអ្នកបរិភោគនូវបាយ និងទឹកដោះ(គោ) ព្រមទាំងប្រលែងលេងជាមួយក្មេងៗកូនអ្នកស្រុកទៀតផង។ សិទ្ធត្ថនេះ ប្រមាទមើលងាយដល់ពួកយើងខ្លាំងណាស់ និងធ្វើអោយពួកយើងអាប់ឱនកិត្តិយសទៀតផង។ ឥឡូវនេះ ព្រះអង្គនិមន្តមកហើយ ខ្ញុំគិតថាពួកយើងនឹងមិនគួរថ្វាយបង្គំ មិនគួរនាំគ្នាក្រោកទទួល និង មិនគួរទទួលយកបាត្រអំពីព្រះអង្គឡើយ។

ប៉ុន្តែ យើងត្រូវតែរៀបចំក្រាលអាសនៈ(កន្ទេល)បំរុងទុក បើព្រះអង្គចង់អង្គុយក៏អង្គុយទៅចុះ។"

បញ្ចវគ្គិយភិក្ខុប្តេជ្ញាទឹងគ្នាថា យើងមិនត្រូវស្វាគមន៍ព្រះសិទ្ធត្ថជាដាច់ខាត។ ប៉ុន្តែ អ្វីៗដែលបានកើតឡើងក្នុងពេលព្រះពុទ្ធចូលមកដល់ទីនោះ វាផ្ទុយស្រឡះតែម្តង។ ពេលព្រះពុទ្ធយាងចូលដល់ក្លោងទ្វារឧទ្យានបញ្ចវគ្គិយទាំង៥រូប ចាប់អារម្មណ៍យ៉ាងខ្លាំង នូវពន្លឺរស្មីដែលចាំងសាយចេញអំពីព្រះកាយរបស់ព្រះអង្គ។ បញ្ចវគ្គិយទាំង៥រូប ភ្លេចពាក្យបដិញ្ញាទឹងគ្នាអស់រលីង បែរជានាំគ្នាក្រោកអរ ស្ទុះក្រោកឈរ ហើយនឹងរត់ទៅទទួលស្វាគមន៍ព្រះពុទ្ធ ដោយមិនដឹងខ្លួន។

ព្រះពុទ្ធហាក់ដូចជាហ៊ុំព័ទ្ធជុំវិញ ទៅដោយអាការៈនៃពន្លឺ។ មួយជំហានៗដែលព្រះអង្គឈាន បញ្ចាក់នូវកម្លាំងទឹកចិត្តដែលកម្ររកបាន។ ការទតសម្លឹងយ៉ាងយកព្រះទ័យទុកដាក់របស់ព្រះអង្គ អាចធ្វើអោយអន្តរាយ ដល់ចេតនារបស់បញ្ចវគ្គិយទាំង៥រូប ដែលមានបំណងចង់ព្រងើយកន្តើយ និងប្រមាទមើលងាយព្រះអង្គ។ កោណ្ឌញ្ញព្រាហ្មណ៍ ស្ទុះទៅជិតព្រះពុទ្ធ រួចក៏ទទួលយកបាត្រអំពីព្រះអង្គ។ មហានាម ស្ទុះទៅដងទឹកយកមកប្រគេនព្រះអង្គលាងព្រះហស្តនិងព្រះបាទា។ ភទ្ទិយៈ ទាញយកកន្ទេលមកក្រាលថ្វាយ។ វប្បៈ រកបានថ្មិតស្លឹកត្នោតមួយ មកបក់ថ្វាយព្រះអង្គ។ អស្សជិឈររនៅផ្អៀងម្ខាង មឹងមាំង មិនដឹងជាធ្វើអ្វីកើត។ បន្ទាប់អំពីព្រះពុទ្ធលាងជំរះព្រះហស្តនិងព្រះបាទរួចមក ទើបអស្សជិដឹងថាខ្លួនត្រូវចាក់

ទឹកក្ដៅខណ្ឌៗមួយផ្តិលទៀត មកថ្វាយព្រះអង្គ។ ពេលនោះ បញ្ចវគ្គិយទាំង៥រូបនាំគ្នាហៅព្រះពុទ្ធដោយចំព្រះនាមថា "សិទ្ធត្ថ" ផង និងពាក្យថា "អាវុសោ" ផង។

បញ្ចវគ្គិយទាំង៥រូបអង្គុយជំកង់ព័ទ្ធជុំវិញព្រះពុទ្ធលើកដៃប្រណម្យ ហើយមើលឆ្ពោះត្រង់ចំព្រះភ័ក្ត្រព្រះសាស្ដាដែលព្រះអង្គកំពុងតែទតមើលដោយសុភាព ទៅកាន់បញ្ចវគ្គិយទាំង៥រូបនោះវិញដែរ។ ព្រះពុទ្ធទ្រង់ព្រះតម្រាស់ថា៖ "ម្នាលអាវុសោទាំងឡាយ! តថាគតបានឆ្ងាយចាកកិលេសរួចស្រេចអស់ហើយ តថាគតបានរកឃើញនូវ ព្រះសម្មាសម្ពោធិញ្ញាណ ដ៏ឧត្តមដោយខ្លួនតថាគតផ្ទាល់។ ចូរអ្នកទាំងឡាយតម្កល់នូវ សោតាប្បសាទ រង់ចាំស្ដាប់នូវ អមតធម៌ នោះចុះ តថាគតនឹងសំដែងនូវធម៌នោះដល់កុលបុត្តទាំងឡាយ ដែលបានចាកចោលផ្ទះ ហើយមកបួសដើម្បីជាប្រយោជន៍ដល់អនុត្តរធម៌។ បើអ្នកទាំងឡាយណាបានប្រតិបត្តិតាមពាក្យប្រៀនប្រដៅរបស់តថាគតហើយ អ្នកទាំងឡាយនោះពុំយូរឡើយ ក៏នឹងបានយល់ច្បាស់ដោយបញ្ញាខ្លួនឯងនូវ អនុត្តរធម៌ ដែលជាទីបំផុតនៃ មគ្គព្រហ្មចរិយៈ រួចនឹងបានសំរេចសំរាននៅ ដោយឥរិយាបថទាំង៤នោះ គឺ៖ ដេក ដើរ ឈរ និង អង្គុយ។"

អស្សជិភិក្ខុ ហាក់ដូចជាជឿពាក់កណ្តាល មិនជឿពាក់កណ្តាលនូវព្រះពុទ្ធដីកានេះ។ រីឯ ភិក្ខុ៤រូបទៀតប្រហែលជាមានការចាប់អារម្មណ៍ដូចជាអស្សជិភិក្ខុដែរ។ ដោយគ្មានភិក្ខុរូបណាបញ្ចេញយោបល់អស់មួយ

ស្របក់មក ទើបកោណ្ឌញ្ញភិក្ខុពោលឡើង ដោយប្តូតមាត់ថា៖ "អាវុសោ គោតម! ព្រះអង្គមិនទាំងទាន់បានត្រាស់ដឹងនូវ ឧត្តរិមនុស្សធម៌ ដែលជាធម៌វិសេស ដោយញាណនិងទស្សនៈដ៏ឧត្តម អាចកំចាត់បង់នូវកិលេស ដោយការប្រព្រឹត្តផង ដោយការប្រតិបត្តិផង ដោយអំពើដែលអ្នកដទៃធ្វើតាមបាន ដោយកម្រផង និង ឥឡូវនេះ ក៏ព្រះអង្គប្រតិបត្តិដើម្បីល្មោភច្រើនផង និងឃ្លាតចាកព្យាយាមផង។ តើអោយពួកយើងជឿព្រះអង្គថាជាអ្នកបានរកឃើញផ្លូវត្រាស់ដឹងនោះ ដូចម្តេចនឹងកើត?"

ព្រះពុទ្ធទ្រង់ទតឆ្ពោះចក្ខុភិក្ខុកោណ្ឌញ្ញ ហើយក៏ទ្រង់ត្រាស់សួរថា៖ "មើលកោណ្ឌញ្ញ! អ្នកធ្លាប់ស្គាល់តថាគតជាយូរយាណាស់មកហើយ តើរាល់ពេលទាំងអស់នោះ តថាគតធ្លាប់បានភូតភរអ្នកដែរឬទេ?"

កោណ្ឌញ្ញបង្គំទូលថា៖ "ពិតជាមិនដែលមានទេព្រះអង្គ! ទូលបង្គំមិនដែលឮព្រះអង្គពោលពាក្យភូតកុហកសោះឡើយ។"

ព្រះពុទ្ធទ្រង់ត្រាស់បន្តទៀតថា៖ "បើដូច្នោះមែន សូមសំឡាញ់ទាំងឡាយ ផ្ទៀងសោតាស្តាប់តថាគត អោយបានច្បាស់នូវអមតធម៌ ដែលតថាគតបានរកឃើញនោះចុះ។ ម្នាលអ្នកទាំងឡាយ! អ្នកពិតជាមានភ័ព្វសំណាងធំណាស់ ដោយបានស្តាប់នូវអមតធម៌ ដែលជាផ្លូវដ៏ឧត្តមនេះមុនគេបង្អស់។ ធម៌នេះ មិនមែនជាលទ្ធផលនៃការសញ្ជឹងគិតទេ តែជាផលដែលបានមកអំពីការពិសោធរបស់តថាគតផ្ទាល់តែម្តង។"

កោណ្ឌញ្ញភិក្ខុលើកដៃប្រណម្យ ហើយក៏ពោលជំនួសភិក្ខុជាមិត្រ

សំឡាញ់ខ្លួនថា៖ "បពិត្រសំឡាញ់គោតម! សូមព្រះអង្គបង្ហាញពួកយើងអោយបានដឹងអំពីមេគ្គាធម៌និងផ្លូវដ៏ឧត្តម(អរិយមគ្គ) របស់ព្រះអង្គនោះផងមើល៍។"

ព្រះពុទ្ធចាប់ផ្ដើមសំដែងនូវ អន្តធម៌ (ធម៌ថោកទាប)២ប្រការប្រាប់បញ្ចវគ្គិយភិក្ខុថា៖ "ម្នាលអាវុសោទាំងឡាយ! មានធម៌អមសង្វាង២ប្រការ ដែលមនុស្សនៅលើមគ្គៈឬបព្វជិត ត្រូវចៀសវាង និងមិនគួរសេពគប់។ ធម៌អមសង្វាងទាំងពីរប្រការនោះគឺ៖

១. **កាមសុខល្លិកានុយោគ** :ការជំរុញខ្លួន អោយធ្លាក់ចុះទៅក្នុងអន្ទងកាមកិលេស ដែលជារបស់បុថុជ្ជន។

២. **អត្តកិលមថានុយោគ** :ការប្រឹងធ្វើតបកម្មដែលបង្ខំធ្វើបាបខ្លួនឯង អោយលំបាកវេទនា នៅពេលដែលខ្លួនកំពុងតែត្រូវការ ចៀសមិនទាន់រួចនៅឡើយ។

អន្តធម៌ទាំងពីរប្រការនេះ មានលក្ខណៈថោកទាប គឺជាធម៌របស់អ្នកស្រុក មិនមែនជាធម៌របស់អរិយបុគ្គលឡើយ។ អន្តធម៌នេះ តថាគតធ្លាប់បានសេពគប់ប្រព្រឹត្តពីដើមរួចមកហើយ។បានយល់យ៉ាងច្បាស់ទើបតថាគតលះបង់ចោល នៅក្នុងពេលធ្វើទុក្ករកិរិយានោះទៅ។ ផ្លូវខុសទាំងពីរយ៉ាងនេះ មិនអាចធ្វើអោយបុគ្គលបានសំរេចនូវពន្លឺត្រាស់ដឹងបានទេ។ ផ្លូវដ៏ឧត្តមដែលតថាគតបានរកឃើញនោះ គឺជា ផ្លូវកណ្ដាល ឬ មជ្ឈិមាបដិបទា ដោយប្រាសចោលនូវផ្លូវអមសង្វាងទាំងពីរប្រការនេះ និងជាផ្លូវ

ដ៏ត្រង់ដែលអាចនាំអោយអ្នកប្រតិបត្តិកើតមានចក្ខុបញ្ញា សំរេចការត្រាស់ដឹងនូវអរិយសច្ចធម៌ ដើម្បីព្រះនិព្វាន និងដើម្បីក្សេមផុតចាកទុក្ខ។ ផ្លូវដ៏ឧត្តមនោះ ប្រកបដោយអង្គ៨ ហៅថា "អដ្ឋង្គិកមគ្គ" គឺជាធម៌ដែលតថាគតបានប្រតិបត្តិផ្ទាល់ខ្លួនឯង រួចមកហើយ។ បានធ្វើអោយ តថាគតបានសំរេចនូវ ការត្រាស់ដឹង។ ផ្លូវដ៏ប្រសើរប្រកបដោយអង្គ៨ នោះគឺៈ

១. សម្មាទិដ្ឋិ :ការមើលឃើញត្រូវ គឺមើលឃើញយ៉ាងច្បាស់នូវ ចតុរារិយសច្ចធម៌។

២. សម្មាសង្កប្បៈ :ការត្រិះរិះត្រូវ គឺត្រិះរិះមិនបៀតបៀន មិនចង់បានទ្រព្យសម្បត្តិអ្នកដទៃ និង ត្រិះរិះចេញចាកកាម។

៣. សម្មាវាចា :ការពោលពាក្យត្រូវគឺនិយាយតែពាក្យសំដីណាត្រឹមត្រូវ វៀរចាកវចីទុច្ចរិត៤យ៉ាងគឺៈ មុសាវាទ(ការពោលពាក្យកុហក)១ បិសុនាវាទ(ការពោលពាក្យញុះញង់បំបែកបំបាក់)១ ផរុសវាទ(ការជេរប្រទេចផ្ដាសារនិងជៀមដាម)១ និង សម្ផប្បលាវាទ(ការនិយាយលេងសើច ឥតប្រយោជន៍)១។

៤. សម្មាកម្មន្តា :ការងារត្រឹមត្រូវគឺប្រកបការងារដោយសុចរិតយុត្តិធម៌ វៀរចាកនូវកាយទុច្ចរិត៣យ៉ាងគឺៈ បាណា(ការសម្លាប់សត្វមានជីវិត)១ អទិន្នា(ការលួចទ្រព្យសម្បត្តិអ្នកដទៃ)១ និង កាមេ(ការប្រព្រឹត្តខុសក្នុងផ្លូវកាម)១។

៥. **សម្មាអាជីវៈ** :ការចិញ្ចឹមជីវិតត្រូវ គឺរស់នៅក្នុងមុខរបរដែលស្របច្បាប់និងដោយគន្លងធម៌។ វៀរចាកនូវជំនួញខុស៥ប្រការគឺ: ជួញគ្រឿងសាស្ត្រាវុធ១ ជួញមនុស្ស១ ជួញសាច់១ ជួញគ្រឿងស្រវឹង១ និង ជួញថ្នាំពិស១។

៦. **សម្មាវាយាមៈ** :ការព្យាយាមត្រូវ គឺព្យាយាមលះបាប ដែលកើតរួចហើយ ខាឃាំងមិនអោយបាបថ្មីកើតឡើងបាន។ រក្សាទុកកុសលដែលបានកើតរួចហើយ។ កុសលដែលមិនទាន់កើតធ្វើអោយកើតឡើង។

៧. **សម្មាសតិ** :ការនឹករលឹកត្រូវ គឺការដំកល់ចិត្តត្រូវក្នុងសតិ-បដ្ឋាន៤គឺ: ដំកល់ក្នុងកាយ១ វេទនា១ ចិត្ត១ និង ធម្មៈ១ ថាគ្រាន់តែជាកាយ ជាវេទនា ជាចិត្ត និងជាធម្មៈ តែប៉ុណ្ណោះ។ ពុំមែនជាសត្វ ឬជាបុគ្គល ដែលមានសភាពសោះសូន្យទទេ។ នោះឡើយ។

៨. **សម្មាសមាធិ** :ការដំកល់ចិត្តនឹងត្រូវ គឺជាភាពរបស់ចិត្តនិងចេតសិក ជាកុសលដែលដំកល់ស្មើល្អ ក្នុងអារម្មណ៍តែមួយ គឺស្ងប់ចាកនីវរណធម៌ទាំង៥។

ម្នាលអាវុសោទាំងឡាយ! ផ្លូវកណ្តាល (មជ្ឈិមាបដិបទា) នេះតថាគតបានត្រាស់ដឹងរួចស្រេចហើយ។ ចូរអ្នកទាំងឡាយ ចងចាំទុកក្នុងចិត្តអោយច្បាស់ថា មានតែផ្លូវដ៏ប្រសើរទាំង៨យ៉ាងឬអដ្ឋង្គិកមគ្គ នេះទេដែលអាចជួយដល់សត្វលោក អោយវៀរចាកផុតអំពីសេចក្តីទុក្ខ នៅក្នុងចំណង់លោកិយ និង នាំទៅដល់ពន្លឺត្រាស់ដឹង ជាទីបំផុតបាន។

ម្នាលអាវុសោទាំងឡាយ! តថាគតក៏បានពិចារណារកឃើញ នូវសេចក្តីទុក្ខ ដែលកើតមានដល់សត្វលោក។ សត្វលោកមានសេចក្តីទុក្ខ ចៀសពុំរួច៤យ៉ាងគឺ៖

១. ទុក្ខអរិយសច្ចៈ គឺទុក្ខជាសេចក្តីពិត ឬវត្ថុមាននៃទុក្ខ ដែលកើតមានដល់មនុស្សនិងសត្វលោកទាំងអស់ ពុំអាចចៀសផុត គ្រាន់តែអ្នកខ្លះមានតិច អ្នកខ្លះមានច្រើន តែប៉ុណ្ណោះ។ ទុក្ខអរិយសច្ចៈមាន៤គឺ៖

(១). ជាតិទុក្ខ គឺទុក្ខព្រោះតែមានជាតិកំណើត(តាំងពីនៅក្នុងផ្ទៃម្តាយម្ល៉េះ)។

(២). ព្យាធិទុក្ខ គឺទុក្ខព្រោះឈឺ មានជម្ងឺតម្កាត់ មកបៀតបៀនដល់រូបកាយ។

(៣). ជរាទុក្ខ គឺទុក្ខព្រោះរូបកាយចាស់គ្រាំគ្រា និងទ្រុឌទ្រោម។

(៤). មរណទុក្ខ គឺទុក្ខព្រោះសេចក្តីស្លាប់(ឈឺចុកចាប់ខ្លាំង នៅពេលជិតស្លាប់)។

ក្រៅអំពីទុក្ខទាំង៤យ៉ាងនេះ មនុស្សនិងសត្វមានទុក្ខច្រើនប្រភេទទៀត ដូចជាទុក្ខព្រោះព្រួយបារម្ភ ភ័យ ខ្លាច ខឹង ច្រណែន ប្រច័ណ្ឌ អស់សង្ឃឹម ព្រាត់ប្រាស លែងលះប្តីប្រពន្ធ ចង់មានចង់បានខ្លាំងពេក សេពគប់ជាមួយមនុស្សពាល មិនបានសំរេចបំណងអ្វីមួយ និង ជំពាក់ចិត្តខ្លាំង(ស្រឡាញ់)ទៅលើវត្ថុអ្វីមួយ ។ល។

២. **សមុទយអរិយសច្ចៈ** គឺទុក្ខជាសេចក្ដីពិត ដែលកើតឡើងអំពីហេតុអ្វីមួយដ៏ពិតប្រាកដ ឬជាបុព្វហេតុនៃទុក្ខ។ តថាគតបានធ្វើការពិចារណាទៅឃើញថា ហេតុដែលនាំអោយមានសេចក្ដីទុក្ខបែបនេះមានពីរយ៉ាងគឺៈ អវិជ្ជា និង តណ្ហា។

. **អវិជ្ជា** គឺសេចក្ដីល្ងង់ខ្លៅ ដែលមិនយល់ដឹងនូវហេតុដែលនាំអោយមានទុក្ខ។ អវិជ្ជានេះហើយ ជាហេតុនាំអោយកើតតណ្ហា ឡើង។ ដោយសារតែអវិជ្ជា មនុស្សមិនអាចមើលឃើញរឿងពិតនៃជីវិតរបស់ខ្លួនទេ ហើយគេតែងត្រាំជាប់ជានិច្ចនៅក្នុងសេចក្ដីលោភៈ ទោសៈ មោហៈ សោកសង្រេង ភ័យខ្លាច សប្បាយភ្លើតភ្លើន និងការអស់សង្ឃឹម។ល។

. **តណ្ហា** គឺជាធម្មជាតិនាំសត្វអោយកើតទៀត និងអោយត្រេកត្រអាលក្នុងភពនានា ឬក្នុងអារម្មណ៍នានា។ តណ្ហាទាំងអស់នោះគឺៈ

(១). **កាមតណ្ហា** ៈសេចក្ដីប្រាថ្នាក្នុងកាមភព។

(២). **ភវតណ្ហា** ៈសេចក្ដីប្រាថ្នាក្នុងរូបភព។

(៣). **វិភវតណ្ហា** ៈសេចក្ដីប្រាថ្នាក្នុងអរូបភព។

៣. **និរោធអរិយសច្ចៈ** គឺការផុតរលត់នូវទុក្ខ ជាសេចក្ដីពិត ឬការបញ្ឈប់ទុក្ខ។ តថាគតបានពិចារណាទៅឃើញថា មានតែនិព្វានមួយទេ ដែលជាកន្លែងសំរាប់រលត់ទុក្ខ។ ដើម្បីអោយបានផុតអំពីសេចក្ដីទុក្ខ ត្រូវតែផ្ដាច់ឫសកែវរបស់វា គឺអវិជ្ជានោះអោយអស់រលីង។ ការយល់ដឹង

នូវសច្ចភាពនៃជីវិត អាចនាំមកនូវការបញ្ឈប់ទុក្ខជាទីបំផុត ហើយក៏នាំអោយកើតមានសេចក្តីស្ងប់កាយ និងរីករាយក្នុងចិត្ត។ តថាគតប្រតិបត្តិតាមអដ្ឋង្គិកមគ្គ ជាផ្លូវដ៏ប្រសើរប្រកបដោយអង្គ៨នេះទុកជាមាគ៌ាសំរាប់រំលត់ទុក្ខ។

៤. **មគ្គអរិយសច្ចៈ** គឺផ្លូវនាំអោយផុតទុក្ខ ជាសេចក្តីពិត ឬផ្លូវរំលត់ទុក្ខ។ តថាគតបានពិចារណាឃើញថា មានតែការប្រតិបត្តិតាមផ្លូវកណ្តាលឬមជ្ឈិមាបដិបទានេះទេដែលអាចរំលត់ទុក្ខឆ្លងដល់និព្វានបាន។

នៅពេលដែលព្រះពុទ្ធកំពុងសំដែងនូវចតុរារិយសច្ចៈនេះ ធម្មចក្ខុ ឬ ភ្នែកមើលឃើញធម៌ ប្រាសចាកកិលេស និងមន្ទិល ក៏កើតមានដល់កោណ្ឌញ្ញភិក្ខុ។

ភិក្ខុកោណ្ឌញ្ញបានពិចារណាឃើញថា៖ "សង្ខារទាំងឡាយ ដែលកើតឡើងហើយ រមែងរលត់បាត់ទៅវិញជាធម្មតា"។ ភិក្ខុកោណ្ឌញ្ញបានត្រេកអរសជាតិពន្លឺត្រាស់ដឹងដោយទឹកចិត្តរីករាយនិងច្បាស់លាស់ហើយ។

កាលបើព្រះធម្មចក្ករបស់ព្រះអង្គមានព្រះភាគទ្រង់សំដែងទៅដូចជាគេបង្វិលហើយ ភុម្មទេវតាទាំងឡាយក៏បន្លឺនូវសូរសព្ទថា ព្រះធម្មចក្កនេះមិនមានចក្កដទៃឯណាប្រសើរជាងឡើយ។ ទោះបីសមណៈក្តី ព្រាហ្មណ៍ក្តី មារក្តី ព្រហ្មក្តី ជនណានីមួយក្តី នៅក្នុងលោកនេះ មិនអាចប្រព្រឹត្តទៅបានឡើយ។ ឥឡូវនេះ ព្រះសម្ពុទ្ធទ្រង់បានប្រព្រឹត្តទៅបានហើយក្នុង

ឥសិបតនមិគទាយវ័ន ទៀបក្រុងពារាណសី។ ទេវតាទាំងឡាយក្នុងឋាន ចាតុម្មហារាជិកា បានឮសម្លេងរបស់ ភុម្មទេវតាហើយ ក៏បន្លឺនូវសម្លេង នេះដូចគ្នា។ ទេវតាទាំងឡាយក្នុងឋានតាវត្តិង្ស បានឮសម្លេងរបស់ចាតុម្មហារាជិកា ក៏បន្លឺនូវសម្លេងនេះដូចគ្នា។ ទេវតាទាំងឡាយក្នុងយាមា... ក្នុងឋានតុសិត...... ក្នុងឋាននិម្មានរតី......ក្នុងឋានបរនិម្មិតវសវត្តី...... ក្នុងឋានព្រហ្ម ក៏បន្លឺនូវសូរសព្ទនេះ ដូចគ្នាដែរ។ កាលសូរសព្ទនេះបាន លាន់ឮកងរំពងទៅដល់ឋាន ព្រហ្មលោកហើយ លោកធាតុទាំងមួយម៉ឺន ក៏កក្រើករំពើកញាប់ញ័រចំប្រប់ឡើង។ ពន្លឺរស្មីដ៏ធំមហិមារកប្រមាណមិន បាន (លើសអំពីអានុភាពរបស់ទេវតាទាំងឡាយ) ក៏ភ្លឺចាំងថែង ប្រាកដ ឡើង ក្នុងលោកយើងនេះ។

ព្រះពុទ្ធទ្រង់ចង្អុលទៅកាន់កោណ្ឌញ្ញព្រាហ្មណ៍ ហើយបន្លឺនូវព្រះ ឧទានវាចាថា៖ "មើលហ្នក! កោណ្ឌញ្ញបានត្រាស់ដឹងពិតប្រាកដហើយ! មើលហ្នក! កោណ្ឌញ្ញបានទទួលមគ្គៈនៃពន្លឺត្រាស់ដឹងហើយ!"

ក្នុងគ្រានោះឯង កោណ្ឌញ្ញព្រាហ្មណ៍ ក៏បានដល់ បានជឿស៊ប់ បានត្រាស់ដឹងនូវអរិយសច្ចធម៌ ហើយបានឆ្លងផុតសេចក្តីមន្ទិលសង្ស័យ និង បានដល់នូវ សេចក្តីក្លៀវក្លា មិនជឿបុគ្គលដទៃណា ក្រៅអំពីព្រះ សាស្តាទៀតឡើយ ក៏ក្រាបបង្គំទូលព្រះពុទ្ធគោតម ជាពាក្យយ៉ាងនេះថា៖ "បពិត្រព្រះអង្គដ៏ចំរើន! សូមទ្រង់ព្រះមេត្តាប្រោសខ្ញុំព្រះអង្គ សូមបព្វជ្ជា និង ឧបសម្បទា ក្នុងសំណាក់ព្រះដ៏មានព្រះភាគ។"

ព្រះពុទ្ធទ្រង់ត្រាស់នូវពាក្យយ៉ាងនេះថា៖ "ម្នាលអាវុសោកោណ្ឌញ្ញ អ្នកចូរជាភិក្ខុចុះ! ចូរអ្នកប្រព្រឹត្តព្រហ្មចរិយធម៌ ដើម្បីនឹងធ្វើនូវនិព្វានជាទីបំផុតនៃកងទុក្ខទាំងឡាយ ដោយប្រពៃចុះ។"

កោណ្ឌញ្ញភិក្ខុក៏មាននាមបញ្ញត្តថា "អញ្ញាកោណ្ឌញ្ញៈ" និងបានជា ឯតទគ្គ គឺអ្នកស្គាល់នូវរាត្រីកាល ហៅថា "រត្តញ្ញូ" ចាប់តាំងតែអំពីពេលនោះមក។

កាលឃើញសភាពបែបនេះកើតឡើង ភិក្ខុ៤អង្គទៀតក៏ស្រវាដើបទៅថ្វាយបង្គំព្រះពុទ្ធ សុំប្រគល់កាយថ្វាយខ្លួន ធ្វើជាសាវករបស់ព្រះអង្គដែរ។ ពេលភិក្ខុទាំងអស់ថយទៅអង្គុយ នៅក្នុងកន្លែងដ៏គួរសមវិញ ព្រះពុទ្ធទ្រង់ត្រាស់ថា៖ "ម្នាលអាវុសោទាំងឡាយ! កុមារជាច្រើននៅឯឧរុវេលនិគម ឯណោះ បាននាំគ្នាហៅតថាគតថា "ពុទ្ធ"។ ពាក្យនេះ ជាពាក្យពិត ព្រោះតថាគតបានត្រាស់ដឹងរួចហើយ។"

បញ្ចវគ្គិយភិក្ខុបានពោលសរសើរនូវគំនិតដ៏អស្ចារ្យ នៃកុមារទាំងអស់នោះ ក្នុងការប្រសិទ្ធិនាមដែលមានអត្ថន័យត្រឹមត្រូវឥតខ្ចោះ ហើយបានមូលមតិគ្នា ទទួលយកព្រះសមណគោតម ធ្វើជា មហាសាស្តាចារ្យរបស់ខ្លួន ហើយហៅព្រះអង្គថា "ព្រះពុទ្ធ" តរៀងទៅ។

ព្រះពុទ្ធទ្រង់ញញឹម និងត្រាស់បញ្ជាក់ថា៖ "សូមអ្នកទាំងឡាយខំហាត់រៀនដោយវីរិយភាព នូវគំនិតទូលំទូលាយនិងវៃឆ្លាត។ ក្នុងរយៈតែបីខែប៉ុណ្ណោះ អ្នកនឹងបានសំរេចផលនៃពន្លឺត្រាស់ដឹង ជាប្រាកដ!"។

ដោយមានវីរិយភាពខ្ពង់ខ្ពស់ បញ្ចវគ្គិយភិក្ខុទាំង៥រូបក៏បានដល់នូវព្រហ្មចរិយធម៌នៃការត្រាស់ដឹងយ៉ាងឆាប់រហ័សបំផុត។ អញ្ញាកោណ្ឌញ្ញភិក្ខុបានសំរេចនូវលោកុត្តរធម៌មុនគេបង្អស់ គឺបានសំរេចសោតាបត្តិផលនៅក្នុងថ្ងៃ១៥កើត ពេញបូរមី ខែអាសាឍ ឆ្នាំរកា នេះឯង។ បន្ទាប់មកព្រះដ៏មានព្រះភាគទ្រង់ប្រទាន ឯហិភិក្ខុ ដល់វប្បៈ ក្នុងថ្ងៃ១រោច ដល់ភទ្ទិយៈក្នុងថ្ងៃ២រោច ដល់មហានាមក្នុងថ្ងៃ៣រោច និង ដល់អស្សជិក្នុងថ្ងៃ៤រោច។ បញ្ចវគ្គិយភិក្ខុទាំង៥រូបបានទទួលឧបសម្បទាជាឯហិភិក្ខុនិងបានប្រព្រឹត្តនូវព្រហ្មចរិយធម៌ ដើម្បីធ្វើនូវទីបំផុតនៃទុក្ខ។

លុះស្អែកឡើង ថ្ងៃ៥រោច ក្នុងខែនិងឆ្នាំដដែល ព្រះពុទ្ធទ្រង់ទតឃើញឧបនិស្ស័យព្រះអរហន្តកើតមានដល់បញ្ចវគ្គិយភិក្ខុ ទើបទ្រង់ត្រាស់ហៅភិក្ខុទាំងអស់នោះមក ហើយទ្រង់សំដែងនូវ អនត្តលក្ខណសូត្រ ប្រាប់ថាៈ បញ្ចក្ខន្ធ(ខន្ធ៥គឺៈ រូប វេទនា សញ្ញា សង្ខារ និងវិញ្ញាណ) គឺជាសភាវៈមិនបានប្រព្រឹត្តក្នុងអំណាចទេសុទ្ធតែមិនមែនជារបស់ខ្លួន(អនត្តា) និងមិនទៀងទាត់(អនិច្ចំ)ទេ។ កាលបានស្តាប់នូវអនត្តលក្ខណសូត្រនោះចប់ហើយ បញ្ចវគ្គិយភិក្ខុទាំង៥រូប ក៏មានហឫទ័យ រួចចាកអាសវៈទាំងឡាយ មិនពោលប្រកាន់នូវពាក្យថាៈ"អញ" ឬ"យើង" ទៀតឡើយ។ ចិត្តរបស់បញ្ចវគ្គិយភិក្ខុក៏បានសំរេចនូវព្រះអរហន្ត ជាស្ថាពរ។ គ្រានោះហើយ ដែលព្រះអរហន្តឲអង្គប្រាកដមានឡើងមុនដំបូងបង្អស់ក្នុងលោកយើងនេះ។

ព្រះពុទ្ធទ្រង់មានព្រះពុទ្ធដីកា ដោយព្រះហឫទ័យ សោមនស្សរីករាយ ទៅកាន់ព្រះអរហន្ត ទាំង៥អង្គ នោះថា៖ " ឥឡូវនេះ យើងមានសហគមភិក្ខុ ពិតប្រាកដហើយ ដែលហៅថា " សង្ឃ "។ សង្ឃ គឺជាគណៈនៃបព្វជិត ដែលរស់នៅដោយចុះសម្រុងគ្នា និងបានយល់នូវធម៌ត្រាស់ដឹង។ យើងត្រូវនាំគ្នាយកគ្រាប់ពូជនៃការត្រាស់ដឹងនេះ ទៅសាបព្រោះលើផ្ទាលមនុស្សលោក នៅសព្វទិសានុទិស ក្នុងពិភពលោក ចាប់តាំងអំពីពេលនេះតទៅ។"



# បឋមសង្គាយនា (មហាសន្និបាតសង្ឃលើកទី១)



ព្រះពុទ្ធបរិនិព្វានទៅបានពាខែគត់ ព្រះមហាកស្សបត្ថេរបានបើក អោយមានការប្រជុំសង្ឃមួយ ក្នុងទីក្រុងរាជគ្រឹះ ក្នុងគោលបំណងរៀបចំ ផ្ទៀងផ្ទាត់ធម៌វិន័យ អោយត្រូវគ្នាជាបែបៗ និងចង់ជំរះសំអាតនូវព្រះពុទ្ធ ភាសិតទាំងអស់របស់ព្រះសាស្តា ដែលព្រះអង្គបានសំដែងរួចមកហើយ នោះ អោយបានល្អស្អាត និងភ្លឺរុងរឿងឡើង។

កត្តាដែលនាំអោយ ព្រះមហាកស្សបត្ថេរ ហៅពួកភិក្ខុទាំងឡាយ មកប្រជុំជាបន្ទាន់នេះ ដើម្បីប្រាប់ពួនូវសុភទ្ទវុឌ្ឍបព្វជិត ពោលនូវពាក្យ ចម្រូងចម្រាស់ ពោលគឺព្រះអង្គបានចាប់អារម្មណ៍ ទៅលើពាក្យសំដីមិន សមរម្យរបស់ភិក្ខុចូលបួសចាស់ឈ្មោះ សុភទ្ទវុឌ្ឍ នេះនៅក្នុងសំណាក់ របស់ព្រះអង្គផ្ទាល់។ "......ក្នុងដំណើរផ្លូវពីក្រុងបាវា ចូលមកកាន់ក្រុង កុសិនារា ព្រះមហាកស្សប និងភិក្ខុ៥០០រូប បានឈប់សំរាកក្រោមម្លប់ ឈើធំមួយក្បែរផងផ្លូវ ក្នុងក្រុងបាវា ស្រាប់តែជួបនឹង អ្នកដំណើរម្នាក់ (អាជីវក) កាន់ផ្កាមន្ទារវៈមកអំពីក្រុងកុសិនារា ឆ្ពោះទៅកាន់ក្រុងបាវា។ ព្រះមហាកស្សបបានសួរនឹងអាជីវកនោះថា៖ "ម្នាលអាវុសោ! តើអ្នកបាន ដឹងដំណឹងនៃព្រះសាស្តាបារបស់យើងផង ដែរឬទេ?"

អាជីវកឆ្លើយថា៖ "អើអាវុសោ! ខ្ញុំដឹងដែរ ព្រះសមណគោតម ទ្រង់បរិនិព្វានអស់កាល៧ថ្ងៃ គំរប់នឹងថ្ងៃនេះហើយ។ ផ្កាមន្ទារវៈនេះ ខ្ញុំ យកអំពីសាលវ៉ែន នាក្រុងកុសិនារា ជាទីបរិនិព្វាននៃព្រះគោតមនោះ។"

កាលបានឮដំណឹងនេះភ្លាម ភិក្ខុណាមិនទាន់ប្រាសចាករាគៈក៏

នាំគ្នាយំសោកពោកខ្លួន និង ពោលពាក្យស្រណោះស្រណោកជាច្រើន ទំនង។ ភិក្ខុណាដែលបានប្រាសចាករាគៈហើយ ក៏មានសតិសម្បជញ្ញៈ អាចសង្កត់វេទនាបាន ថាសង្ខារទាំងឡាយមិនទៀង ព្រោះតែហេតុនោះ បុគ្គលគប្បីបាននូវសេចក្តីទៀងទាត់ នៅក្នុងខន្ធប្បវត្តិនេះ មកអំពីណា? គ្រានោះ មានភិក្ខុចូលបួសចាស់មួយរូបឈ្មោះ សុភទ្ទវុឌ្ឍ កំពុងអង្គុយក្នុងហ្វូងបរិស័ទនោះ បានពោលនឹងពួកភិក្ខុទាំងនោះ នូវពាក្យដូច្នេះថា៖ ម្នាលអាវុសោទាំងឡាយ! ណ្ហើយអ្នកទាំងឡាយ កុំសោកសៅ កុំយំខ្សឹកខ្សួលឡើយ តាមពិត ពួកយើងបានរួចខ្លួនជ្រះស្រឡះហើយតើ ព្រោះថា មហាសមណៈ(គោតម)នោះ តែងតែពោលបៀតបៀន ដល់ពួកយើងថា អំពើនេះគួរដល់អ្នក អំពើនេះមិនគួរដល់អ្នក' ជាដើម។ ប៉ុន្តែ ឥឡូវនេះ ពួកយើងចង់ធ្វើនូវអំពើណានឹងធ្វើអំពើនោះបាន និង មិនចង់ធ្វើនូវអំពើណានឹងមិនធ្វើនូវអំពើនោះបាន ស្រេចហើយតែនឹងចិត្តរបស់ពួកយើង។

ហេតុដូច្នេះហើយបានជា **បឋមសង្គាយនា (មហាសន្និបាតសង្ឃលើកទី១)** បន្ទាប់អំពីពេលព្រះពុទ្ធទ្រង់បរិនិព្វានទៅ បានកើតឡើង។

ព្រះបាទអជាសត្តុ ព្រះចៅក្រុងមគធៈ ទ្រង់ជា អ្នកឧបត្ថម្ភយ៉ាងសកម្ម ក្នុងកម្មវិធីសង្គាយនាលើកទី១នេះ។ ព្រះរាជាទ្រង់ជាអធិបតីក្នុងការនិមន្តនិងសំរួលកិច្ចការទាំងឡាយសំរាប់ភិក្ខុសង្ឃមកកាន់អង្គសន្និបាត ដែលប្រព្រឹត្តឡើង នៅត្រង់រូងភ្នំឈ្មោះ សត្តបណ្ណគុហា ក្បែរភ្នំវេភារ នាទីក្រុងរាជគ្រឹះ ក្នុងជម្ពូទ្វីប ចាប់តាំងពីថ្ងៃចូលវស្សា ១រោច ខែអាសាឍ

ហើយត្រូវបញ្ចប់ក្នុងរយៈពេល៦ខែក្រោយមក។

អាសនៈចំនួន៥០០កន្លែងត្រូវបានប្រុងប្រៀបរៀបចំឡើង នៅក្នុងសាលាធំមួយ ប៉ុន្តែ មានតែព្រះអរហន្តល្បីល្បែក និងមានការពិសោធន៍ខ្ពង់ខ្ពស់៤៩៩រូបទេ ដែលបានជ្រើសរើសសំរាប់សន្និបាតនេះ។ អាសនៈទំនេរមួយកន្លែងទៀត ទុកសំរាប់ព្រះអានន្ទ ដែលពេលនោះ លោកនៅជា សោតាបន្នបុគ្គល នៅឡើយ។

នៅតែមួយថ្ងៃ មុនការប្រជុំចាប់ផ្តើម ព្រះអានន្ទក៏បានត្រិះរិះថា៖ "កិច្ចប្រជុំនឹងត្រូវធ្វើឡើងនៅថ្ងៃស្អែកនេះ ហាក់ដូចជាមិនត្រឹមត្រូវសោះ ចំពោះអាត្មាអញ ដើម្បីនឹងចូលទៅកាន់ការប្រជុំ ដែលគ្រាន់តែជាមនុស្សរៀនសូត្រធម្មតាម្នាក់ប៉ុណ្ណោះ និង មិនមែនជាព្រះអរហន្ត។ អាត្មាអញត្រូវតែព្យាយាមខ្លាំងក្លាបំផុត ដើម្បីធ្វើចិត្តរបស់អញ អោយបរិសុទ្ធផូរផង់ក្នុងពេលដែលអញ នៅសល់ពេលតែបន្តិចបន្តួចនេះ។" ព្រះអានន្ទបានចំណាយពេល នៅក្នុងរាត្រីនោះ ក្នុងការតាំងកាយ គឺការហាត់អប់រំចិត្តអោយបរិសុទ្ធ តាមព្រះពុទ្ធអង្គ។ នៅពេលជិតភ្លឺ ព្រះអានន្ទបានគិតថា៖ "អាត្មាអញនឹងទំរេត" ប៉ុន្តែ ព្រះអង្គនៅតែផ្ចង់ស្មារតីយ៉ាងខ្លាំងទៅលើរូបកាយ។ មុននឹងព្រះកេសព្រះអង្គធ្លាក់ចុះដល់ខ្នើយ និង មុននឹង ព្រះអង្គឈានព្រះបាទចេញពីកុដិ កិលេសទាំងប៉ុន្មាន ដែលនៅសេសសល់ក៏រលាយបាត់អស់អំពីចិត្ត។ ព្រះអានន្ទបានសំរេចព្រះអរហន្ត រួចក៏និមន្តចូលទៅកាន់អង្គសន្និបាត នាថ្ងៃនោះ ក្នុងនាមជាព្រះអរហន្តមួយអង្គ។

ព្រះមហាកស្សប ជាអគ្គសាវកទី៤ របស់ព្រះសម្ពុទ្ធ បន្ទាប់អំពី ព្រះវិមលកោណ្ឌញ្ញ(ទី៣) ព្រះមោគ្គល្លាន(ទី២) និង ព្រះសារីបុត្ត(ទី១) ត្រូវបានជ្រើសតាំង ជាប្រធានអង្គសន្និបាត និងជាអ្នកសួរ។ ដោយសារឧបាលិត្ថេរ ជាភិក្ខុពូកែចងចាំខាងសិក្ខាបទ ព្រះថេរៈត្រូវបានជ្រើសតាំងអោយឆ្លើយនឹងសំនួរទាំងឡាយទាក់ទងនឹងវិន័យ ហើយឡើងសូត្រសិក្ខាបទទាំងអស់ជូនអង្គប្រជុំ ដោយបញ្ជាក់នូវលក្ខណៈនិងស្ថានការណ៍ទាំងឡាយដែលបណ្ដាលអោយកើតជាសិក្ខាបទឬវិន័យនេះឡើង។ ព្រះអានន្ទដែលជាអរហន្តភិក្ខុ ពូកែចងចាំនូវព្រះធម្មទេសនា ត្រូវបានជ្រើសតាំងអោយឡើងថ្លែងបញ្ជាក់យ៉ាងល្អិតល្អន់បំផុតអំពីពេលវេលា ទីកន្លែង និងស្ថានការណ៍ដែលកើតមានឡើង ក្នុងព្រះធម្មទេសនានីមួយៗ ដែលព្រះសម្ពុទ្ធធ្លាប់បានសំដែងរួចមកហើយនិងឆ្លើយនូវសំនួរទាំងឡាយដែលទាក់ទងទៅនឹងព្រះសូត្រ និងព្រះអភិធម្ម។ បើនិយាយអោយស្រួលស្ដាប់ថា ក្នុងការប្រជុំការកសង្ឃ ជាសង្គីតិកាចារ្យនោះ មានគ្រែពីរគឺៈ គ្រែមួយហៅថា ថេរាសនៈ សំរាប់ព្រះមហាកស្សបត្ថេរ ជាអ្នកសួរ និង គ្រែមួយទៀតហៅថា ធម្មាសនៈ សំរាប់ព្រះថេរៈទាំងពីរអង្គ(ព្រះឧបាលិត្ថេរ និង ព្រះអានន្ទត្ថេរ) ជាអ្នកឆ្លើយតាមលំដាប់ការ។

តាមធម្មតា ព្រះឧបាលិត្ថេរ និង ព្រះអានន្ទ ក៏មិនអាចគិតថា នៅចងចាំព្រះធម៌និងព្រះវិន័យ បានយ៉ាងពិស្ដារទេ ដូច្នេះវត្តមាននៃភិក្ខុ ៤៩៨រូបទៀត មានសារៈសំខាន់ណាស់។ សង្គាយនាផ្ទៀងផ្ទាត់ ព្រះធម៌

និងព្រះវិន័យ នាពេលនោះ បានចែកការប្រៀនប្រដៅរបស់ព្រះសម្ពុទ្ធជាម្ចាស់ ជា៣ប្រភេទគឺ៖

១. ព្រះសូត្រ គឺជាដំណើររឿងដែលព្រះពុទ្ធបានសំដែងព្រះធម៌ទេសនា នៅតាមកន្លែងនានា ហើយព្រះថេរៈទាំងឡាយ មានព្រះអានន្ទជាដើម បានធ្វើរបាយការណ៍។

២. ព្រះវិន័យ គឺជាច្បាប់ដែលព្រះពុទ្ធទ្រង់បានបញ្ញត្តិ ជាខហាម និងជាខអោយធ្វើ សំរាប់បព្វជិតនិងគ្រហស្ថអនុវត្តតាម ហើយព្រះថេរៈទាំងឡាយ មានព្រះឧបាលិត្ថេរ ជាដើម បានធ្វើរបាយការណ៍។

៣. ព្រះអភិធម្ម គឺជាធម៌មានអត្ថ ដ៏ជ្រៅជ្រះ ដែលនិយាយអំពីចិត្ត ចេតសិក រូប និង និព្វាន។

ពុទ្ធវចនៈទាំង៣ប្រភេទនេះ ហៅថា"ព្រះត្រៃបិតក ឬ កញ្ជើ៣"។

ព្រះអានន្ទបានបញ្ជាក់ជូនអង្គសន្និបាតថា ព្រះពុទ្ធទ្រង់បានផ្តាំនឹងលោកថា"បន្ទាប់អំពីព្រះអង្គបរិនិព្វានទៅ ភិក្ខុទាំងឡាយអាចដកសិក្ខាបទតូចៗ និងតូចតាមលំដាប់បាន។" ប៉ុន្តែ ដល់ពេលភិក្ខុទាំងឡាយសួរថា៖ "តើព្រះមានព្រះភាគបានបញ្ជាក់ច្បាស់លាស់ ក្នុងសិក្ខាបទណាមួយទេ" ព្រះអានន្ទឆ្លើយតាមត្រង់ថា លោកឥតបាននឹកគិតសួរនូវសំនួរបែបហ្នឹងចំពោះព្រះដ៏មានព្រះភាគ វិញទេ។

បឋមសង្គាយនា នេះ ក្នុងគោលបំណង រក្សាពាក្យប្រៀនប្រដៅរបស់ព្រះសម្ពុទ្ធជាម្ចាស់កុំអោយបាត់បង់។ ព្រះអរហន្តទាំងឡាយចងក្រង

ពុទ្ធវចនៈនេះ ដោយព្រះនិស្ស ហៅថា មុខបាឋ គឺគ្រាន់តែទន្ទេញចាំមាត់រាល់ព្រះអង្គ មិនមានសរសេរពុទ្ធវចនៈ ជាលាយលក្ខណ៍អក្សរទេ ព្រមទាំងរក្សានូវព្រះពុទ្ធានុញ្ញាត ថាអោយរៀនពាក្យប្រៀនប្រដៅ(ពុទ្ធវចនៈ) តាមភាសាជាតិកំណើតរៀងៗខ្លួន។

ទុតិយសង្គាយនា (លើកទី២) បានធ្វើឡើងបន្ទាប់អំពីព្រះសម្ពុទ្ធទ្រង់បរិនិព្វានទៅបាន១០០ឆ្នាំ។ ពេលថេរៈមួយអង្គឈ្មោះ យសកាកណ្ឌបុត្ត ជាប្រធានសង្ឃ(ឬអង្គសន្និបាត)។ មានភិក្ខុសង្ឃចូលរួម៧០០អង្គ។ ធ្វើនៅ វាលិការាម នាទីក្រុងវេសាលី។ ក្នុងគោលបំណងប្រារព្ធនូវពាក្យរបស់ភិក្ខុវជ្ជីបុត្រទាំងឡាយ ដែលអាស្រ័យនៅក្នុងក្រុងវេសាលីនោះបានសំដែងនូវវត្ថុ១០យ៉ាង ដែលមិនមែនជាធម៌ជាវិន័យ ថាជាធម៌ជាវិន័យ ព្រមទាំងចង់ផ្ទៀងផ្ទាត់ពុទ្ធវចនៈ ក្នុងព្រះត្រៃបិដក អោយបានត្រឹមត្រូវ ដូចកាលពីធ្វើ បឋមសង្គាយនា នោះដែរ។ ព្រះរេវតត្ថេរ ជាអ្នកសួរ។ ព្រះសព្វកាមី ជាអ្នកឆ្លើយ។ ធ្វើអស់រយៈពេល ៨ខែទើបចប់។ ព្រះបាទកាលាសោក ទ្រង់ជាអ្នកជួយឧបត្ថម្ភក្នុងការធ្វើសង្គាយនាលើកទី២នេះ។

តតិសង្គាយនា (លើកទី៣) បានធ្វើឡើងបន្ទាប់អំពីព្រះសម្ពុទ្ធទ្រង់បរិនិព្វានទៅបាន២១៨ឆ្នាំ។ ព្រះមោគ្គល្លីបុត្តតិស្សត្ថេរ ជាប្រធានសង្ឃ។ ភិក្ខុចូលរួមប្រជុំមាន១០០០អង្គ។ ធ្វើនៅ អសោការាម ក្រុងបាតលីបុត្រ

ជម្ពូទ្វីប។ ក្នុងគោលបំណង ទំលាយនូវភាពៈរបស់ពួកតិរត្ថីយ៍ ដែលមកបន្លំបួសជាភិក្ខុ នៅក្នុងព្រះពុទ្ធសាសនា ព្រមទាំងចង់ជំរះសំអាតនូវព្រះត្រៃបិដក អោយបានត្រឹមត្រូវ ដូចកាលពីធ្វើបឋមសង្គាយនានោះដែរ។ ព្រះមហាមោគ្គល្លីបុត្តតិស្សត្ថេរ ជាអ្នកសួរ។ ភិក្ខុគ្រប់រូប ក្នុងក្រុងបាតលីបុត្រ រូបណាមួយដែលឆ្លើយខុសពីធម៌វិន័យត្រូវចាប់ផ្សឹក។ ធ្វើអស់រយៈពេល ៩ខែទើបចប់។ ព្រះបាទអសោកមហារាជ ទ្រង់ជាអ្នកជួយឧបត្ថម្ភយ៉ាងសកម្ម ក្នុងការធ្វើសង្គាយនាលើកទី៣ នេះ។

**ចតុត្ថសង្គាយនា** (លើកទី៤) បានធ្វើឡើងបន្ទាប់ពីព្រះសម្ពុទ្ធទ្រង់បរិនិព្វានទៅបាន ២៣៦ឆ្នាំ។ ព្រះមហិន្ទត្ថេរ ជាប្រធានសង្ឃ។ ភិក្ខុចូលរួមមានចំនួន៦៨,០០០អង្គ។ ធ្វើនៅថូបារាម ក្រុងអនុរាធបុរី លង្កាទ្វីប។ ក្នុងគោលបំណងប្រតិស្ឋានព្រះពុទ្ធសាសនា នៅលង្កាទ្វីប អោយឋិតនៅរឹងមាំ។ ព្រះមហាមហិន្ទត្ថេរ ទ្រង់ជាអ្នកសួរ។ ព្រះមហាអរិដ្ឋត្ថេរ ជាអ្នកឆ្លើយ។ ធ្វើអស់រយៈពេល ១០ខែ ទើបចប់។ ព្រះបាទទេវានម្បិយតិស្ស ទ្រង់ជាអ្នកជួយឧបត្ថម្ភ យ៉ាងសកម្ម ក្នុងសង្គាយនាលើកទី៤នេះ។

**បញ្ចមសង្គាយនា** (លើកទី៥) បានធ្វើឡើងបន្ទាប់ពីព្រះសម្ពុទ្ធទ្រង់បរិនិព្វានទៅបាន៤៥០ឆ្នាំ។ ព្រះពុទ្ធទត្តត្ថេរ ជាប្រធានសង្ឃ។ ភិក្ខុសង្ឃចូលរួមប្រជុំមាន ១០០០ អង្គ។ ធ្វើនៅ អាលោកលេណស្ថាន ក្នុង

មល្យជនបទ លង្កាទីប។ ក្នុងគោលបំណង ព្រោះឮការចងចាំរបស់ព្រះសង្ឃចុះអន់ថយ ទើបអោយចារនូវព្រះពុទ្ធវចនៈ ជាលាយលក្ខណ៍អក្សរលើស្លឹករឹត(ឬស្លឹកអូឡា) ឡើង។ ព្រះពុទ្ធទត្តត្ថេរ ជាអ្នកសួរ។ ព្រះមហាតិស្សត្ថេរ ជាអ្នកឆ្លើយ។ ធ្វើអស់រយៈពេល ១ឆ្នាំ ទើបចប់។ ព្រះបាទវដ្តគាមិនីអភ័យ ទ្រង់ជាអ្នកជួយឧបត្ថម្ភ ក្នុងការធ្វើសង្គាយនាទី៥នេះ។

បើយើងយកសង្គាយនាទាំងអស់នោះមកពិចារណា យើងឃើញថាព្រះសទ្ធម្មគង់វង់រហូតមកដល់សព្វថ្ងៃ អាស្រ័យដោយហេតុ៣យ៉ាងគឺ៖

១. អាស្រ័យដោយហេតុ ព្រះថេរានុត្ថេរៈទាំងឡាយ ចេះចាំមាត់ស្ទាត់នូវព្រះពុទ្ធវចនៈ(គឺព្រះត្រៃបិដក)របស់ព្រះសម្មាសម្ពុទ្ធជាម្ចាស់។

២. អាស្រ័យដោយហេតុ ព្រះថេរានុត្ថេរៈទាំងនោះ បានចារឹកព្រះពុទ្ធវចនៈទាំងអស់នោះ ទុកក្នុងសាស្ត្រាស្លឹករឹត។

៣. អាស្រ័យដោយហេតុ ជនជាតិនីមួយៗបានប្រែព្រះពុទ្ធវចនៈទាំងនោះ មកជាភាសាជាតិរៀងៗខ្លួន ដើម្បីសិក្សា និង ប្រតិបត្តិ។

ប្រទេសខ្មែរយើងក៏បានប្រែព្រះត្រៃបិដក ជាភាសារបស់ខ្លួនដែរ។ រាជរដ្ឋាភិបាលខ្មែរ បានធ្វើក្រឹត្យមួយ លេខ១០៦ ចុះថ្ងៃទី ១៤ធ្នូ ព.ស. ២៤៧២(គ.ស.១៩២៩) បង្កើតនូវព្រះសង្ឃគណៈចារ្យ៤០រូប ដែលចែកជា៦ក្រុម ហៅថា ក្រុមជំនុំព្រះត្រៃបិដក ដើម្បីប្រែព្រះត្រៃបិដកស្លឹករឹត មកជាភាសាខ្មែរ។ អស់រយៈពេល២៨ឆ្នាំ(គ.ស.១៩២៩-១៩៥៧) ទើបប្រែជាភាសាខ្មែរសំរាយចប់សព្វគ្រប់ និងបានបោះពុម្ពជាសៀវភៅ១១០ក្បាល។

# ០៥. ខែ ស្រាពណ៍ (សីហា)

## រំលឹកដល់

- បុណ្យចូលវស្សា (វស្សូបនាយិកា)

តាមទំនៀម ក្នុងព្រះពុទ្ធសាសនា លុះចូលដល់រដូវវស្សាហើយ ពុទ្ធសាសនិកជនតែងនាំគ្នាប្រារព្ធ "បុណ្យចូលវស្សា" ជាភាសាបាលីថា "វស្សូបនាយិកា" ។ បុណ្យចូលវស្សា គឺជាបុណ្យមួយមានដើមកំណើត តាំងអំពីសម័យពុទ្ធកាលមកម្ល៉េះ (មានក្នុង វិន័យបិដក ភាគ៧)។

គ្រាដែលព្រះពុទ្ធនិងភិក្ខុទាំង១២៥០រូប ឃ្លាតពីចំការត្នោត មកគង់នៅក្នុងព្រៃឫស្សី ទៀបក្រុងរាជគ្រឹះ គឺជារដូវវស្សាដែលធ្វើអោយពិបាកដល់ការកសាងវត្តថ្មីផង និង ដល់ការនិមន្តបិណ្ឌបាតផង។ ក្នុងពេលជាមួយគ្នានោះ មានភិក្ខុមួយចំនួនចូលទៅក្រាបបង្គំទូលព្រះសាស្តាចារ្យថា៖ "បពិត្រព្រះអង្គដ៏ចំរើន! ក្នុងពេលខ្ញុំព្រះអង្គទាំងឡាយ ត្រាច់បិណ្ឌបាតតាមភូមិអ្នកស្រុក ខ្ញុំព្រះអង្គទាំងឡាយបានឮគេពោលតិះដៀលនិងបណ្ដុះបង្អាប់ដល់គណៈរបស់យើងថា ពួកសមណៈជាសាក្យបុត្រ មិនសមនឹងដើរបិណ្ឌបាត ក្នុងវស្សានរដូវ ដើរជាន់ស្មៅស្រស់ ជាន់ជន្ទេននិងសត្វល្អិត ដែលចេញមកលើដី នៅពេលភ្លៀងធ្លាក់នេះឡើយ។ សូម្បីតែពួកបរិព្វាជក នៅក្នុងលទ្ធិដទៃ និងពួកអន្យតិរ្ថិយ ដែលជាអ្នកពោលនូវធម៌អាក្រក់ក៏គង់តែពួកគេឈប់សំរាកនៅក្នុងរដូវវស្សានេះ។ មិនតែប៉ុណ្ណោះ សូម្បីតែសត្វស្លាបទាំងឡាយក៏គង់វាចូលជ្រកក្នុងសំបុកលើចុងឈើដែរ។"

ព្រះពុទ្ធទ្រង់ព្រះតំរិះថា៖ "ពាក្យតិះដៀលរបស់អ្នកស្រុកទាំងនោះ គឺជាពាក្យត្រឹមត្រូវ និងព្រះអង្គផ្ទាល់ក៏មិនទាន់បានបញ្ញត្តិនូវការចូលកាន់វស្សានេះ ដល់ភិក្ខុទាំងឡាយផងដែរ ទើបព្រះអង្គហៅភិក្ខុទាំងឡាយមក

ប្រជុំដើម្បីទ្រង់អនុញ្ញាតការចូលកាន់វស្សាជាផ្លូវការ។ ព្រះអង្គទ្រង់ត្រាស់ថា៖ "ម្នាលភិក្ខុទាំងឡាយ! នៅរដូវវស្សាអាកាសធាតុមិនសូវល្អសំរាប់ធ្វើដំណើរឡើយ។ ភិក្ខុទាំងឡាយក៏ត្រូវការទីកន្លែង សំរាប់រៀនសូត្រព្រះធម៌រួមគ្នា ក្នុងរដូវភ្លៀងនេះដែរ។ ឥឡូវនេះ យើងមានកន្លែងល្អមួយ ដែលអាចជួយភិក្ខុសង្ឃ អោយចៀសផុតអំពីជម្ងឺតម្កាត់ផ្សេងៗ និងចៀសវាងការដើរជាន់ស្មៅស្រស់ និងសត្វល្អិតនានាដែលចេញមកលើដីទៀតផង។ រៀងរាល់ឆ្នាំ ក្នុងរដូវវស្សា ភិក្ខុណាដែលកំពុងស្ថិតនៅក្នុងដំណើរ ឬក៏ត្រាច់ចរតាមជនបទផ្សេងៗនោះ ត្រូវតែវិលត្រឡប់មកកាន់វត្តវិញអោយទាន់ពេលដើម្បីចូលកាន់វស្សា។ ពេលចូលកាន់វស្សានោះ អ្នកអាចសូមឧបាសកឧបាសិការស់នៅតាមតំបន់ដែលអ្នកគង់នៅនោះអោយជួយផ្គត់ផ្គង់នូវចង្ហាន់បិណ្ឌបាត។ ឧបាសក-ឧបាសិកាទាំងឡាយនោះក៏អាចទទួលប្រយោជន៍អំពីការប្រៀនប្រដៅធម៌របស់ភិក្ខុសង្ឃ ក្នុងឱកាសនោះដែរ។"

ដោយហេតុថា ក្នុងរដូវវស្សាមានដល់ទៅ៤ខែ ចាប់ពីថ្ងៃ១រោចខែអាសាឍ (ឬ ខែទុតិយាសាឍ បើឆ្នាំនោះមានអធិកមាស) រហូតដល់ថ្ងៃ១៥កើតខែកត្តិក ភិក្ខុត្រូវចាំវស្សាបានតែ៣ខែ ទើបព្រះមានព្រះភាគទ្រង់អនុញ្ញាតអោយមានការចូលវស្សាជាពីរបែប គឺៈ ថ្ងៃចូលកាន់វស្សាដើម (បុរិមិកាវស្សា) និង ថ្ងៃចូលកាន់វស្សាចុង (បច្ឆិមិកាវស្សា)។

ភិក្ខុទាំងឡាយណាដែលមិននៅក្នុងដំណើរ អាចចូលកាន់បុរិមិកាវស្សា នៅថ្ងៃ១រោចខែអាសាឍ(ឬខែទុតិយាសាឍ) រហូតដល់ថ្ងៃ១៥កើត

ខែអស្សុជ ទើបចេញវស្សាវិញ។ តែបើសិនមានឆ្នាំណា ជាអធិមាស គឺឆ្នាំដែលត្រូវលើកខែ ត្រូវចូលនៅថ្ងៃ១រោចខែទុតិយាសាឍ និងចេញនៅថ្ងៃ១៥កើតខែអស្សុជ ព្រោះមានពុទ្ធានុញ្ញាតថា៖ "អនុជានាមិ ភិក្ខវេ រាជូនំ អនុវត្តិតុំ" ប្រែថា៖ "ម្នាលភិក្ខុទាំងឡាយ! តថាគតអនុញ្ញាតអោយភិក្ខុចូលវស្សាទៅតាមការអនុវត្តលើកខែ របស់ព្រះរាជាចុះ"។

ចំពោះភិក្ខុណាដែលជាប់កិច្ចធុរៈ អាចចូលកាន់បច្ឆិមិកាវស្សានៅថ្ងៃ១រោចខែស្រាពណ៍ រហូតទៅដល់ថ្ងៃ១៥កើតខែកត្តិក ទើបចេញវស្សាវិញ ក៏បានដែរ។

ការចូលវស្សាទាំងពីរយ៉ាងនេះ ភិក្ខុមិនអាចគេចវេះបានឡើយគឺត្រូវតែចូលជាដាច់ខាត ដូចមានពុទ្ធបញ្ញត្តិថា៖ "ន ភិក្ខវេ វស្សំ ន ឧបគន្តព្វំ យោ ន ឧបគច្ឆេយ្យ អាបត្តិ ទុក្កដស្ស" ប្រែថា៖ "ម្នាលភិក្ខុទាំងឡាយ! ភិក្ខុពុំអាចមិនចូលវស្សាបានឡើយ គឺត្រូវតែចូលវស្សាដាច់ខាត បើភិក្ខុណាមិនចូលវស្សា ភិក្ខុរូបនោះនឹងត្រូវអាបត្តិទុក្កដ"។

ថ្ងៃចូលវស្សា ភិក្ខុត្រូវចូលក្នុងរោងឧបោសថាគារ(វិហារ) ដើម្បីអធិដ្ឋានចូលវស្សាព្រមគ្នាថា៖ "ឥមស្មឹ អាវាសេ ឥមំ តេមាសំ វស្សំ ឧបេម" ប្រែថា "យើងទាំងឡាយចាំវស្សាអស់៣ខែនេះ ក្នុងអាវាសនេះ"។

ពេលអធិដ្ឋានភិក្ខុត្រូវតាំងចិត្តថានឹងនៅក្នុងវេលារាត្រីរក្សាអរុណរះឡើង តែក្នុងពេលខ្លួននៅក្នុងខេត្តនៃអាវាស រហូតដល់កំណត់៣ខែ។

បើភិក្ខុនៅចាំវស្សាក្នុងទីសេនាសនៈណាមួយ ត្រូវតែកំណត់ខេត្ត

និងបរិវេណទីសេនាសនៈនោះ។ បើនៅច្រើនគ្នា ត្រូវអធិដ្ឋានចូលវស្សាព្រមគ្នាថា៖ "ឥមស្មឹ សេនាសនេ ឥមំ តេមាសំ វស្សំ ឧបេម" ប្រែថា "យើងទាំងឡាយនៅចាំវស្សាអស់៣ខែនេះ ក្នុងទីសេនាសនៈនេះ"។

បើភិក្ខុនៅតែម្នាក់ឯង ត្រូវតែអធិដ្ឋានថា៖ "ឥមស្មឹ សេនាសនេ ឥមំ តេមាសំ វស្សំ ឧបេមិ" ប្រែថា "អញ ឬអាត្មាអញ នៅចាំវស្សាអស់៣ខែនេះ ក្នុងទីសេនាសនៈនេះ"។

បើនៅក្នុងកុដិធំច្រើនគ្នា ត្រូវអធិដ្ឋានព្រមគ្នាថា៖ "ឥមស្មឹ វិហារេ ឥមំ តេមាសំ វស្សំ ឧបេម" ប្រែថា " យើងទាំងឡាយ នៅចាំវស្សាអស់៣ខែ ក្នុងវិហារនេះ"។

បើនៅតែឯងត្រូវតែអធិដ្ឋានថា៖"ឥមស្មឹ វិហារេ ឥមំ តេមាសំ វស្សំ ឧបេមិ" ប្រែថា "អាត្មាអញនៅចាំវស្សាអស់៣ខែក្នុងវិហារនេះ។"

បើនៅក្នុងតូបឬកុដិតូច តែម្នាក់ឯងក្នុងព្រៃ ត្រូវកំណត់ខេត្ត ឬទីបរិវេណនៃតូបឬកុដិនោះ ត្រូវអធិដ្ឋានថា៖"ឥធ វស្សំ ឧបេមិ ឥមាយំ កុដិយំ ឥមំ តេមាសំ វស្សំ ឧបេមិ" ប្រែថា "អញ ឬអាត្មាអញ នៅចាំវស្សាអស់៣ខែនេះ ក្នុងតូបនេះ"។

ក្នុងអាវាសនីមួយៗ នៅពេលភិក្ខុសង្ឃបានអធិដ្ឋានចូលវស្សារួចហើយ ភិក្ខុចៅអាវាសឬមហាថេរ ត្រូវប្រកាសប្រាប់ នូវខេត្តនៃអាវាសពីកំណត់ព្រំប្រទល់វត្ត គ្រប់ទិសទាំងបួន អោយភិក្ខុ-សាមណេរ គ្រប់រូបបានដឹង ដើម្បីនឹងចៀសវាងអំពីការដាច់វស្សា ពីព្រោះតែការបណ្តោយ

អោយអរុណរះឡើង ក្នុងពេលដែលខ្លួនស្ថិតនៅក្រៅខេត្តនៃអាវាសនោះ។

បើដល់ថ្ងៃចូលវស្សាហើយ មានភិក្ខុណានៅធ្វើដំណើរទៅមក ឬ អែអង់រង់ចាំចូលវស្សាក្រៅវត្ត ឃើញថា មិនសមគួរឡើយ ភិក្ខុនោះនឹងត្រូវអាបត្តិទុក្កដ។ បើភិក្ខុចូលវស្សានៅទីណាហើយ ត្រូវតែរក្សារាត្រីនៅក្នុងទីនោះ រហូតគ្រប់ពេលកំណត់៣ខែ។ បើមានធុរៈ ត្រូវចេញទៅក្រៅអាវាសជាចាំបាច់ខានមិនបាន គប្បីចេញចុះ តែប្រញាប់ត្រឡប់មកវិញអោយទាន់ពេលមុនអរុណរះ។ ភិក្ខុអាចទៅដោយសត្តាហករណីយបាន៖

១. បើបានដឹងជាមុនថា មាតាឬបិតា នៃភិក្ខុឬសាមណេរនោះមានធុរៈ ឬមានជម្ងឺធ្ងន់។

២. បើមានគេមកនិមន្តថា មានឧបាសក ឬឧបាសិកា បងប្អូន ឬញាតិមិត្រ មានធុរៈ។

៣. បើមានគេមកនិមន្ត ក្នុងសង្ឃករណីយកិច្ច ណាមួយ។ ក៏ប៉ុន្តែ តាមទម្លាប់ មុននឹងចេញអំពីវត្ត ឬអាវាស ទៅត្រូវអធិដ្ឋានថា៖

*"សចេ មេ អន្តរាយោ នត្ថិ សត្តាហព្ភន្តរេ ចយេ បុន និវត្តិស្សាមិ ...... ឧតិយម្បិ .......... តតិយម្បិ។"* ប្រែថា "បើមិនមានអន្តរាយឬឧបសគ្គដល់អាត្មាអញទេ អាត្មាអញនឹងត្រឡប់មក(វត្ត)វិញ ក្នុងចន្លោះសត្តាហៈ ពុំខាន។ ...... ជាគំរប់ពីរផងផង។ .....ជាគំរប់បីផងផង។"

ភិក្ខុលើកសត្តាហៈចេញអំពីវត្តទៅហើយ ត្រូវតែត្រឡប់មកវត្ត ខាងក្នុងអរុណនៃថ្ងៃទីប្រាំពីរវិញ (គឺអាចនៅក្រៅវត្តតែត្រឹម៦រាត្រី)។ ភិក្ខុមិនត្រូវ

នៅក្រៅវត្តអោយហួសអរុណនៃថ្ងៃទី៧អោយសោះ ពុំនោះសោតនឹងត្រូវដាច់វស្សា និងត្រូវអាបត្តិទុក្កដ មិនអាចទទួលអានិសង្សកឋិន និងសង្ឃលាភផ្សេងៗ ដែលកើតឡើងក្នុងវត្តនោះ បានទៀតផង។

ការចូលវស្សា មិនចំពោះតែភិក្ខុទេ សាមណេរក៏ត្រូវចូលវស្សាដែរ ទើបត្រូវតាមពុទ្ធានុញ្ញាត ចែកនូវសង្ឃលាភ តែសាមណេរមិនមានកិច្ចដោយការបវារណាឡើយ គ្រាន់តែអោយអធិដ្ឋានចូលវស្សាប៉ុណ្ណោះ។

នៅប្រទេសខ្មែរ ក៏ដូចជាប្រទេសកាន់ព្រះពុទ្ធសាសនាក្នុងលោកដែរ ពេលចូលវស្សានេះ ជាឱកាសសំខាន់បំផុតដែលយុវជននាំគ្នាចូលបួសនិងមកសំណាក់នៅក្នុងទីវត្ត ដើម្បីអប់រំខ្លួនអោយមានចរិយាសម្បត្តិល្អ តាមគន្លងព្រះពុទ្ធសាសនា។

*សាសនវិធីៈ*

រណ្តាប់ៈ ឧបាសក ឧបាសិកា ត្រូវរៀបរណ្តាប់ជាចតុប្បច្ច័យមានៈ ចង្ហាន់បិណ្ឌបាត សំពត់សាដក ប្រេង ទៀនវស្សា(សំរាប់ដុត៣ខែ)។ល។ ក្នុងវិន័យបិដក ភាគទី៨ និយាយអំពីអានិសង្សសំពត់សាដកសំរាប់ព្រះសង្ឃប្រើស្រង់ទឹក។ ទៀនវស្សា ត្រូវមានទំហំវិជ្ឈមាត្រ(មាត់) ១តឹក និងកំពស់២ហត្ថ ធ្វើអំពីក្រមួនសុទ្ធឬក្រមួនចំបក់ មានជើងទ្រជាឈើឬស្ពាន់ ក្បាច់ផ្កាឈូក។ សម័យបច្ចុប្បន្នច្រើនប្រើចង្កៀងប្រេងកាតឬប្រេងដូងជំនួស។ ទៀនវស្សាគឺជានិមិត្តរូបនៃព្រះបញ្ញាញាណរបស់ព្រះសម្ពុទ្ធ ដែលតែងតែភ្លឺជានិច្ចចំពោះសព្វសត្វ មិនមានរលត់សោះឡើយ។

ការប្រារព្ធ: ក្នុងថ្ងៃចូលវស្សា គឺល្ងាចថ្ងៃទី ១៥កើត ខែអាសាឍ ឬទុតិយាសាឍ ឧបាសក-ឧបាសិកានិងពុទ្ធបរិស័ទ ទៅជួបជុំគ្នាក្នុងទីវត្ត។ លុះជួបជុំហើយ នាំគ្នាហែទៀនវស្សា សំពត់សាដក និងគ្រឿងបរិក្ខារផ្សេងៗប្រទក្សិណព្រះវិហារ ឬអាវាសណាមួយដែលសង្ឃបានកំណត់។ បន្ទាប់មកទៀត នាំគ្នានមស្សការថ្វាយបង្គំព្រះរតនត្រ័យ(អានទំព័រទី១០) សមាទានសីល៥ឬ៨ (អានទំព័រទី២២និង២៤) និមន្តព្រះសង្ឃចំរើនព្រះបរិត្ត(អានទំព័រទី៣១និង៣២) និងបវរណាធម្មកថិកមួយអង្គ សំដែងព្រះធម្មទេសនា(អានទំព័រទី៤០) ព្រមទាំងវេរទៀនវស្សា សំពត់សាដក និងគ្រឿងបរិក្ខារប្រគេនព្រះសង្ឃ។

លុះព្រឹកឡើង ថ្ងៃ១រោច ខែអាសាឍ មានប្រគេនយាគូ និងភត្តចំពោះព្រះសង្ឃទៀតផង។

តំណម: ក្នុងរយៈពេលចូលវស្សា៣ខែនេះ ពុទ្ធបរិស័ទតែងមានតំណម ដូចជា មិនរៀបមង្គលការកូនចៅ និង មិនសង់ផ្ទះថ្មី ជាដើម ដោយចាត់ទុកថាថ្ងៃទាំងអស់ ក្នុងកំណត់៣ខែនោះ ជាថ្ងៃឃ្លុំ គឺជាថ្ងៃឥតមានឫក្សល្អ ឥតមានជោគជ័យ និង ឥតមានសិរីសួស្ដី។

# ០៦. ខែ ភទ្របទ (កញ្ញា)

រំលឹកដល់

- បុណ្យកាន់បិណ្ឌ និង ភ្ជុំបិណ្ឌ
- ព្រះពុទ្ធតាំងធម៌ ក្នុងព្រៃរក្ខិតវ័ន

# បុណ្យកាន់បិណ្ឌ និង ភ្ជុំបិណ្ឌ



ប្រជាពលរដ្ឋខ្មែរ ទូទាំងប្រទេស ប្រកាន់ទំនៀមទំលាប់តាមបែប ដូនតា កំណត់យកថ្ងៃ បុណ្យកាន់បិណ្ឌ ចាប់ពីថ្ងៃ១រោចដល់ថ្ងៃ១៤រោចខែភទ្របទ និងថ្ងៃ បុណ្យភ្ជុំបិណ្ឌ នៅថ្ងៃ១៥រោចខែភទ្របទ ជារៀងរាល់ឆ្នាំ។

ក្នុងសម័យពុទ្ធកាល ពុំមានពាក្យ កាន់បិណ្ឌនិងភ្ជុំបិណ្ឌ នេះទេ មានតែពាក្យ បច្ចារណាបច្ច័យ៤ ឬ ធំនុកបំរុងបច្ច័យ៤ ។ ដូចនៅក្នុងគម្ពីរធម្មបទមាននិយាយអំពីរឿងរ៉ាវព្រះសម្ពុទ្ធនិងភិក្ខុសង្ឃគង់ចាំវស្សាហើយ មានពុទ្ធបរិស័ទទំនុកបំរុងបច្ច័យ៤ អស់មួយត្រីមាស។ រីឯការកាន់បិណ្ឌក៏មិនកំណត់តែត្រឹម១៤ថ្ងៃយ៉ាងដូច្នេះដែរ គឺពុទ្ធបរិស័ទជំនាន់នោះចាប់កាន់បិណ្ឌ តាំងពីថ្ងៃចូលវស្សារហូតមកដល់ថ្ងៃចេញវស្សាទើបឈប់។

បុណ្យកាន់បិណ្ឌ

ក្នុងថ្ងៃកាន់បិណ្ឌទាំង១៤ថ្ងៃ ពុទ្ធបរិស័ទចំណុះជើងវត្តចែកវេនគ្នាជា១៤វេន ដើម្បីកាន់បិណ្ឌ។ កូនចៅបានរៀបចំនូវភេសជ្ជាននិងគ្រឿងបរិក្ខារផ្សេងៗ ជូនដល់មាតា-បិតា ជីដូន-ជីតា ឬចាស់ព្រឹទ្ធាចារ្យ ដើម្បីចូលទៅកាន់បិណ្ឌ ក្នុងវត្តរបស់ខ្លួន។ ក្នុងគ្រានោះ លោកទាំងឡាយនឹងបានឱកាស ចំរើនភាវនាធម៌ សមាទានសីល៥ សីល៨ឬសីល១០(អានទំព័រទី២២,២៤,២៨) និងបានបំពេញបុណ្យកុសលផ្សេងៗ ដូចជា ការបំរើព្រះសង្ឃ និងបោសសំអាតវត្តអារាម មានព្រះវិហារ កុដិ ជាដើម។

ក្នុងវេនទីមួយៗ វេលាយប់ មានប្រគេនភេសជ្ជៈចំពោះព្រះសង្ឃ និងចាស់ព្រឹទ្ធាចារ្យកាន់សីល៨ឬ១០។ បន្ទាប់មក នមស្សការព្រះរតន-

ត្រ័យ(អានទំព័រទី១០), សមាទានសីល៥ ឬសីល៨ ឬសីល១០, និមន្ត ព្រះសង្ឃចំរើនព្រះបរិត្ត(អានទំព័រទី៣១) និង អារាធនាធម្មកថិកមួយអង្គ សំដែងធម្មទេសនា (អានទំព័រទី៤០)។ ពេលទៀបភ្លឺ បន្ទាប់អំពីថ្វាយបង្គំ ព្រះ និងចំរើនភាវនារួចមក ព្រះសង្ឃសូត្រធម៌បទ មាតិកសូត្រ ឮសូរជំ ត្រលួចគួរអោយស្រណោះ ជាបទបាលីយ៉ាងនេះថា៖ " មាតិកទន្តំ មុរិសំ ...... ។ល។ "(អានទំព័រទី៩៨)។ បន្ទាប់មក ពុទ្ធបរិស័ទនាំគ្នាប្រគេនយាគូ ចំពោះព្រះសង្ឃនិងថ្ងៃត្រង់វេរភត្តប្រគេនព្រះសង្ឃ(អានទំព័រទី៤៤)ដោយ មានបង្សុកូលឧទ្ទិសកុសល ចំពោះវិញ្ញាណជីដូនជីតា ញាតិកាសន្តាន និងបុព្វការីជនទាំងឡាយដែលបានចែកឋានបាត់ទៅហើយនោះផង។

## បុណ្យភ្ជុំបិណ្ឌ

ថ្ងៃ១៥រោច ខែភទ្របទ ជាថ្ងៃបុណ្យធំឬជាថ្ងៃបង្ហើយ។ កូនចៅ ទាំងឡាយដែលមិនបានមកដាក់បាត្របង្សុកូលឧទ្ទិសកុសលដល់វិញ្ញាណ ក្ខន្ធជីដូនជីតា និងញាតិកាសន្តាន ក្នុងពេលកាន់បិណ្ឌទាំង១៤ថ្ងៃនោះ ព្រោះតែជាប់រវល់កិច្ចការ ក្នុងទីក្រុងឬខេត្តឆ្ងាយៗ ត្រូវតែធ្វើដំណើរទៅ កាន់ស្រុកភូមិកំណើត ក្នុងថ្ងៃ១៥រោចនេះ ដើម្បីប្រារព្ធពិធីបុណ្យភ្ជុំបិណ្ឌ ជាមួយក្រុមគ្រួសារ និងញាតិមិត្រ អោយបានសមរម្យតាមប្រពៃណី។

ពេលព្រឹក ថ្ងៃ១៥រោច គេនាំគ្នាស្លៀកពាក់ស្អាតបាត យួរស្រាក់ ម្ហូបអាហារ បង្អែម ចំអាប នំអន្សម នំគម នំជាល នំថ្នេ យកទៅវេរ ប្រគេនព្រះសង្ឃនៅឯវត្ត និងបង្សុកូលឧទ្ទិសកុសលវិញ្ញាណក្ខន្ធដូនតា។

ពេលល្ងាច តាមតំបន់ខ្លះ មានរៀបចំ ពិធីសែនដូនតា។ លុះព្រឹកឡើងស្រាងៗ ថ្ងៃ១កើតខែអស្សុជ មានរៀបចំនំចំណី ផ្លែឈើ សណ្ដែក ល្ង អង្ករ អំបិល ដាក់ក្នុងកូនទូក ធ្វើអំពីស្រទបចេក រួចហើយអុជទៀនធូបបណ្ដែតតាមទឹក ដើម្បីជូនដំណើរដូនតា ត្រឡប់ទៅស្រុកវិញ។ គ្រួសារខ្លះ យកបាយបិណ្ឌទៅចោលក្នុងស្រែសែនអោយយក្ខិនី ព្រោះយក្ខិនីជាអ្នកដឹងថា ឆ្នាំណាមានភ្លៀងច្រើន ឆ្នាំណាមានភ្លៀងតិច ជាដើម (ទាក់ទងនឹងរឿងយក្ខិនី ក្នុងគម្ពីរធម្មបទកថា ភាគទី១)។ល។

បុណ្យភ្ជុំបិណ្ឌនេះ ជាប់ទាក់ទងទៅនឹងរឿងជាច្រើន ក្នុងគម្ពីរពុទ្ធពុទ្ធសាសនា ដូចជា គម្ពីរពេតវត្ថុ គម្ពីរវិមានវត្ថុ គម្ពីរវិទ្យាធរ និងគម្ពីរធម្មបទ ជាដើម។ ប៉ុន្តែ បុណ្យភ្ជុំបិណ្ឌ ដែលខ្មែរយើងធ្លាប់ប្រារព្ធឡើងជារៀងរាល់ឆ្នាំ ចាប់ពីថ្ងៃ១រោចរហូតដល់ថ្ងៃ១៥រោចខែភទ្របទ ពុំដែលអាកខានទេនោះ ក៏ព្រោះតែប្រារព្ធនូវរឿងពួកប្រេត ដែលត្រូវជាព្រះញាតិរបស់ព្រះបាទពិម្ពិសារ ជាហេតុ។

ក្នុងគម្ពីរព្រះធម្មបទ ភាគទី១ មានរឿងបញ្ជាក់មកថា៖ "នៅក្នុងកប្បទី៩២(កន្លងពីភទ្ទកប្បនេះមក) មានព្រះសម្មាសម្ពុទ្ធព្រះនាម ផុស្សៈបានកើតឡើងក្នុងលោក។ ព្រះអង្គជាព្រះរាជបុត្រ នៃព្រះបាទជ័យសេន និង ព្រះនាងសិរិមា សោយរាជ្យក្នុងនគរកោសិកៈ។ ព្រះបាទជ័យសេនទ្រង់មានព្រះរាជបុត្រ៣ព្រះអង្គដែលមានព្រះមាតាទីទៃៗពីគ្នា មានបុគ្គលអ្នកថែរក្សាឃ្លាំង មាននាយស្មៀនត្រួតត្រាជនបទ ព្រមទាំងពួកបរិវារជា

ច្រើន។ នាយស្មៀនបានសាងព្រះវិហារថ្វាយព្រះសាស្តាផុស្សៈ តាមព្រះរាជបំណងរបស់ព្រះរាជនិរសទាំងពារអង្គរបស់ព្រះអង្គ និង បានយាងព្រះបាទជ័យសេនមក ដើម្បីវេរព្រះវិហារនោះ ថ្វាយព្រះសាស្តា។ ក្នុងថ្ងៃធ្វើបុណ្យឆ្លងព្រះវិហារនោះ ព្រះរាជាទ្រង់បានចំណាយទ្រព្យ អោយបុគ្គលអ្នកថែរក្សាឃ្លាំង និង នាយស្មៀន ចាត់ចែងនូវខាទនីយភោជនីយហារថ្វាយដល់ព្រះសាស្តាផុស្សៈ និងព្រះភិក្ខុសង្ឃ ជាសាវកចំនួន ៩ម៉ឺនអង្គអស់មួយត្រៃមាស នៅក្នុងព្រះវិហារ នោះ។ អ្នកថែរក្សាឃ្លាំងនិងភរិយានាយស្មៀននិងភរិយា ព្រមទាំងញាតិមិត្រមួយចំនួនមានចិត្តសទ្ធាជ្រះថ្លាបានថ្វាយទានដោយសេចក្តីគោរព។ ប៉ុន្តែ ពួកជនមួយចំនួនដែលត្រូវជាញាតិរបស់នាយស្មៀន ជាមនុស្សមានចិត្តលោភ បានធ្វើអន្តរាយដល់ទេយ្យទាន គឺបាននាំគ្នាបរិភោគនូវអាហារ ដែលគេដំកល់ទុកសំរាប់វេរប្រគេនចំពោះព្រះភិក្ខុសង្ឃនោះមុន។ លុះដល់ពួកជនទាំងនោះ បានធ្វើកាលកិរិយា ស្លាប់អំពីមនុស្សលោកយើងនេះទៅ ក៏បានទៅចាប់កំណើតក្នុងបេតវិស័យ នៅក្នុងឋាននរកគឺកើតជាពួកប្រេត ហើយបានទទួលនូវសេចក្តីទុក្ខវេទនា យ៉ាងក្រៃលែង។ ព្រោះតែកម្មផលដ៏អាក្រក់ ដែលខ្លួនបានប្រព្រឹត្តអស់កាលជាយូរអង្វែងនៅក្នុងបេតវិស័យនោះ។ រីឯ ព្រះរាជនិរសទាំងពារអង្គនិងបរិវារ ព្រមទាំងអ្នករក្សាឃ្លាំងនិងនាយស្មៀនបានទៅកើតក្នុងឋានសួគ៌។

លុះមកដល់សាសនាព្រះពុទ្ធ ព្រះនាម កកុសន្ធោ ព្រះអង្គបាន

ត្រាស់ដឹងឡើងក្នុងលោក ពួកប្រេតទាំងអស់នោះ ក៏បាននាំគ្នាទៅក្រាបទូលសួរចំពោះព្រះអង្គថា៖ "បពិត្រព្រះអង្គដ៏ចំរើន! ពួកយើងខ្ញុំទាំងឡាយជាពួកប្រេតមានសេចក្ដីស្រេកឃ្លាននូវចំណីអាហារខ្លាំងណាស់ ព្រោះតែអត់នូវចំណីអាហារ អស់កាលជាយូរអង្វែងមកហើយ តើដល់ពេលណាទៅ ទើបពួកយើងខ្ញុំទាំងឡាយ នឹងបានបរិភោគនូវចំណីអាហារ?"

ព្រះពុទ្ធព្រះនាមកកុសន្ធោទ្រង់បានឆ្លើយតបទៅកាន់ពួកប្រេតទាំងនោះថា៖ "នៅក្នុងសាសនារបស់យើងនេះ ពួកអ្នកទាំងអស់គ្នា មិនបានទទួលនូវចំណីអាហារ ដើម្បីនឹងបរិភោគទេ ចាំទូលសួរនឹងព្រះពុទ្ធជំនាន់ក្រោយទៀតចុះ!"

លុះដល់ផែនដីដុះបានមួយយោជន៍ ទើបព្រះពុទ្ធមួយព្រះអង្គបានត្រាស់ដឹងឡើងក្នុងលោកព្រះនាម កោនាគមនោ ។ ពួកប្រេតទាំងនោះក៏បាននាំគ្នាចូលទៅបង្គំទូលសួរដូចកាលពីលើកមុនទៀត ព្រះពុទ្ធព្រះនាមកោនាគមនោ ទ្រង់បានឆ្លើយដូចជាព្រះពុទ្ធអង្គ មុនៗនោះដែរ។

លុះដល់ផែនដីដុះបានមួយយោជន៍ទៀត ទើបព្រះពុទ្ធមួយព្រះអង្គព្រះនាម កស្សបៈ កើតឡើងក្នុងលោក។ ក្នុងគ្រានោះ ពួកប្រេតទាំងអស់ក៏ចូលទៅក្រាបបង្គំទូលសួរព្រះកស្សបៈថា៖ "បពិត្រព្រះអង្គដ៏ចំរើន! ធ្វើដូចម្ដេចហ្ន៎ ពួកយើងខ្ញុំគប្បីនឹងបាននូវសម្បត្តិយ៉ាងនេះ?"

ព្រះពុទ្ធព្រះនាមកស្សបៈក៏ទ្រង់ត្រាស់ថា៖ "នៅក្នុងសាសនារបស់យើងនេះ ពួកអ្នកទាំងអស់គ្នា មិនអាចនឹងទទួលនូវចំណីអាហារ សំរាប់

បរិភោគបានទេ ចាំដល់សាសនារបស់ព្រះពុទ្ធ ព្រះនាម គោតម ជំនាន់ក្រោយ ពួកអ្នកនឹងបានបរិភោគនូវចំណីអាហារ ដែលព្រះរាជាព្រះនាមពិម្ពិសារ ទ្រង់បានបំពេញព្រះរាជកុសល ធ្វើបុណ្យឧទ្ទិសមគ្គផល បញ្ជូនមកអោយពួកអ្នកទាំងឡាយ ក្នុងកាលនោះ ពួកអ្នកទាំងឡាយ នឹងបានទទួលហើយ។ ចូរអ្នកទាំងឡាយរង់ចាំសួរព្រះពុទ្ធអង្គ ជំនាន់នោះចុះ!"

លុះដល់ផែនដីដុះបាន១យោជន៍ទៀត ទើប ព្រះសមណគោតម គឺព្រះសម្មាសម្ពុទ្ធ នៃយើងសព្វថ្ងៃនេះ ព្រះអង្គបានត្រាស់ដឹងឡើង ក្នុងលោក។ ក្នុងពុទ្ធប្បាទនេះ ព្រះរាជឱរសទាំង៣ព្រះអង្គរបស់ព្រះបាទជ័យសេន បានច្យុតចុះអំពីឋានសួគ៌មកកើតក្នុងត្រកូលព្រាហ្មណ៍ ក្នុងទីក្រុងមគធៈ ជាជដិលឧរុវេលកស្សប ៣នាក់បងប្អូន។ បុរសអ្នកថែរក្សាឃ្លាំងបានកើតជាមហាសេដ្ឋីឈ្មោះ វិសាខៈ និងភរិយារបស់គាត់បានកើតជានាងភិក្ខុនី ធម្មទិន្នា ។ រីឯ នាយស្មៀនបានកើតជាស្ដេចព្រះនាម ព្រះបាទពិម្ពិសារ។ បរិស័ទសេសសល់បានកើតជាបរិវាររបស់ព្រះរាជា។

កាលព្រះអង្គបានសំរេចនូវព្រះសម្មាសម្ពោធិញាណ ហើយ ព្រះសមណគោតមបានប្រោសព្រះបាទពិម្ពិសារ និងពួកបរិវារ ជាព្រាហ្មណ៍ និងជាគហបតីទាំងឡាយ អោយតាំងនូវក្នុងសោតាបត្តិផល ក្នុងឧទ្យានឈ្មោះលដ្ឋិវន។ ព្រះរាជាទ្រង់សព្វព្រះទ័យអារាធនាព្រះពុទ្ធ ដើម្បីទទួលភត្តឬមហាទាន ក្នុងព្រះរាជវាំង ក្នុងថ្ងៃពេញបូណ៌មី ក្រោយមកទៀត។

ប្រេតទាំងនោះ ក៏នាំគ្នាទៅបង្គំទូលសួរចំពោះព្រះសមណគោតម

ហើយ ព្រះអង្គក៏ទ្រង់ឆ្លើយតបថា៖ "នៅក្នុងសាសនារបស់តថាគតនេះ ពួកអ្នកទាំងឡាយនឹងបានបរិភោគនូវចំណីអាហារហើយ គឺនៅពេលណា ដែលព្រះមហាក្សត្រ ព្រះនាម ពិម្ពិសារ ដែលធ្លាប់ជាញាតិសាលោហិត របស់អ្នកទាំងឡាយ ទ្រង់បានបំពេញនូវព្រះរាជកុសលថ្វាយទាន ចំពោះ តថាគត ព្រមទាំងភិក្ខុសង្ឃ ហើយព្រះអង្គទ្រង់ឧទ្ទិស នូវព្រះរាជកុសល ជូនដល់អ្នកទាំងឡាយៗនឹងបានទទួលនូវចំណីអាហារនាពេលនោះឯង។"

នៅថ្ងៃពេញបូរមី ដែលព្រះបាទពិម្ពិសារ ព្រះចៅនគរមគធៈទ្រង់ បានបំពេញនូវព្រះរាជកុសលថ្វាយមហាទានដល់ព្រះពុទ្ធនិងព្រះភិក្ខុសង្ឃ នៅគ្រាដំបូងនោះ ព្រះរាជាទ្រង់មិនបានឧទ្ទិសនូវបុណ្យកុសលបញ្ជូនទៅ អោយពួកប្រេតទាំងនោះទេ ព្រោះព្រះរាជាទ្រង់រវល់តែព្រះចិន្តា នូវទីគង់ នៅរបស់ព្រះសាស្តា៖ "តើព្រះមានព្រះភាគ គប្បីគង់នៅត្រង់ទីណាហ្ន៎?" ដូច្នេះហើយ ទើបទ្រង់មិនបានឧទ្ទិស នូវព្រះរាជកុសល ជូនទៅដល់ពួក ប្រេតទាំងអស់នោះ។

ពួកប្រេតទាំងឡាយ ដែលព្រះបាទពិម្ពិសារ មិនបានឧទ្ទិសបញ្ជូន កុសលទៅអោយនោះកើតទុក្ខអស់សង្ឃឹម ក៏នាំគ្នាស្រែកទ្រហោយំយ៉ាង ទ្រហ៊ឹងអឹងកង ឮស្នូរសម្លេងប្លែកៗ ខ្លាំងៗ គួរអោយភ័យខ្លាចជាទីបំផុត នៅជុំវិញព្រះបរមរាជវាំង នៅក្នុងរាត្រីកាលនោះឯង។

ព្រះបាទពិម្ពិសារទ្រង់សណ្តាប់នូវសម្លេងស្រែកទ្រហោយំគួរអោយ ភ័យខ្លាចរបស់ពួកប្រេតនោះហើយ ទ្រង់មានព្រះទ័យភ័យរន្ធត់ យ៉ាងក្រៃ

លែង ព្រោះខ្លាចមានក្តីអន្តរាយកើតមានដល់ព្រះរូបកាយព្រះអង្គផ្ទាល់។

លុះព្រឹកឡើង ទើបស្តេចយាងចូលទៅគាល់ វត្តវេឡុវន ហើយក៏ក្រាបថ្វាយបង្គំទូលសួរ ចំពោះនឹងព្រះបរមសាស្តាសម្មាសម្ពុទ្ធជាម្ចាស់ថា៖ "បពិត្រព្រះអង្គដ៏ចំរើន! នៅក្នុងរាត្រីយប់មិញនេះ ទូលព្រះបង្គំបានឮនូវសម្លេងស្រែកទ្រហោយំ យ៉ាងទ្រហ៊ឹងអឺងកង គួរអោយភ័យខ្លាចពន់ពេកណាស់ នៅជុំវិញព្រះរាជតំណាក់នៃទូលព្រះបង្គំ តើហេតុការណ៍អ្វី នឹងកើតមានដល់ទូលព្រះបង្គំឬ?"

គ្រានោះ ព្រះពុទ្ធទ្រង់ត្រាស់ថា៖ "បពិត្រមហារាជ! សូមស្តេចកុំមានព្រះហឫទ័យភ័យខ្លាចអ្វីឡើយ។ មិនមានហេតុអន្តរាយណាមួយកើតឡើងដល់ព្រះមហារាជ ទេ។ សម្លេងដែលស្រែកទ្រហោយំ នៅក្នុងរាត្រីយប់មិញនេះ គឺជាសូរសម្លេងនៃពួកប្រេតដែលត្រូវជាញាតិសាលោហិតរបស់ព្រះអង្គ។ ពួកប្រេតទាំងឡាយនោះ ធ្លាអត់ចំណីអាហារបរិភោគរាប់កោដិ រាប់លានឆ្នាំ កន្លងមកហើយ។ ពួកគេបានមកស្រែកយំ កងរំពងយ៉ាងនេះក៏ដើម្បីមកស្វែងរកនូវចំណីអាហារបរិភោគអំពីព្រះអង្គ ព្រោះថាពួកប្រេតទាំងអស់នេះនឹងបានទទួលនូវចំណីអាហារបរិភោគក្នុងសាសនារបស់តថាគតនេះហើយ។ ប៉ុន្តែកាលពីម្សិលមិញនោះ ព្រះមហារាជបានថ្វាយទានដល់តថាគត ព្រមទាំងភិក្ខុសង្ឃទាំងឡាយហើយ តែព្រះមហារាជមិនបានផ្សាយនូវព្រះរាជកុសលឧទ្ទិសផលបុណ្យបញ្ជូនទៅអោយពួកប្រេតទាំងអស់នោះទើបពួកគេមកស្រែកទ្រហោយំយ៉ាងខ្លាំងដូច្នេះឯង។"

ព្រះបាទពិម្ពិសារទ្រង់ព្រះសណ្ដាប់យ៉ាងដូច្នេះហើយទើបទ្រង់ចាប់ព្រារព្ធបំពេញ នូវព្រះរាជកុសលថ្វាយទាន ដល់ព្រះពុទ្ធនិងព្រះភិក្ខុសង្ឃទាំងឡាយ សារជាថ្មីម្ដងទៀត ជាគំរប់លើកទី២ មាន បាយ ទឹក នំ ចំណី ម្ហូបអាហារ សំពត់អាវ ត្រៃចីវរ ជាដើម ។ ស្ដេចទ្រង់បានតាំងព្រះទ័យយ៉ាងជ្រះថ្លាបរិសុទ្ធ ផ្សាយនូវព្រះរាជកុសលផលបុណ្យ ក្នុងគ្រាទី២នេះ ឧទ្ទិសជូនដល់ពួកប្រេតទាំងអស់នោះ ដោយព្រះកុសលចេតនាថា៖ "ដោយកុសលផលបុណ្យទាំងឡាយ ដែលយើងបានបំពេញ រួចមកហើយនេះ សូមអោយពួកអ្នកទាំងឡាយបានទទួលនូវកុសលផលបុណ្យរបស់យើងនោះ មួយចំណែកផង។ សូមអោយអ្នកទាំងឡាយបានទទួលយកនូវ បាយ ទឹក នំ ចំណី ម្ហូបអាហារ សំពត់អាវសាវស្បៃជាដើមនេះ ជាទុកដូចជារបស់នៃខ្លួន ហើយសូមអោយពួកអ្នកទាំងឡាយ បានបរិភោគនូវ បាយ ទឹក នំ ចំណី ម្ហូបអាហារ និង បានស្លៀកពាក់នូវសំលៀកបំពាក់ទាំងនេះ មួយចំណែកផង និង មួយចំណែកទៀត សូមអោយពួកអ្នកទាំងឡាយបានរួចរំដោះផុតចាកទុក្ខទោសភ័យខ្លាចទុក្ខវេទនាទាំងឡាយទាំងពួង ហើយសូមអោយបានទៅកើតនៅក្នុងទីដ៏ខ្ពង់ខ្ពស់ គឺសុគតិភព តាមសេចក្ដីប្រាថ្នារៀងៗខ្លួន ទៅហោង។"

ក្នុងគ្រានោះ ព្រះសមណគោតមទ្រង់ធ្វើ នូវអនុមោទនា ដោយតិរោកុឌ្ឌសូត្រ ថា៖ " តិរោកុឌ្ឌេសុ តិដ្ឋន្តិ ..... ។ល។" (អានទំព័រទី៩៤) ប្រែថា៖ "ពួកប្រេតទាំងឡាយមកកាន់ផ្ទះនៃញាតិ ដោយគិតថាជាផ្ទះរបស់

ខ្លួនក៏ឈរនៅខាងក្រៅ ជិតជញ្ជាំងទាំងឡាយខ្លះ នាផ្លូវបែកជាបួនខ្លះនិងផ្លូវបែកជាបីទាំងឡាយខ្លះ ឈរជិតទ្វារក្រុងនិងជិតទ្វារផ្ទះទាំងឡាយខ្លះ។"

បន្ទាប់មក ព្រះសាស្តាទ្រង់សំដែងអំពី គុណៈនៃញាតិ ជាគាថាទី២យ៉ាងនេះថា៖ "កាលបើ បាយ ទឹក បង្អែម និងចំអាប ដ៏ច្រើនដែលពួកញាតិ ចូលទៅតាំងទុកហើយ ញាតិណាមួយ មិនបាននឹករលឹកដល់ប្រេតទាំងឡាយនោះទេ ព្រោះតែកម្មរបស់សត្វទាំងនោះ ជាបច្ច័យ។"

បន្ទាប់មកទៀត ព្រះសាស្តាទ្រង់ត្រាស់ជាគាថាទី៣យ៉ាងនេះថា៖ "ញាតិទាំងឡាយណា ជាអ្នកអនុគ្រោះ ញាតិទាំងឡាយនោះរមែងឧទ្ទិសអោយនូវទឹកនិងភោជនដ៏ហ្មត់ចត់ដ៏ប្រសើរ ជារបស់គួរតាមកាល ដើម្បីញាតិទាំងឡាយ យ៉ាងដូច្នេះដែរ។"

បន្ទាប់មក ព្រះសាស្តាទ្រង់សំដែងអំពី ទាន ដែលព្រះរាជាទ្រង់បានប្រទានរួចហើយដល់ពួកប្រេត ជាកន្លះគាថាខាងដើមនៃព្រះគាថាទី៤យ៉ាងនេះថា៖ "ទាននេះ ចូរបានសំរេចដល់ញាតិទាំងឡាយ សូមញាតិទាំងឡាយដល់នូវសេចក្តីសុខចុះ។"

បន្ទាប់មកទៀត ព្រះសាស្តាទ្រង់ត្រាស់ជាកន្លះគាថា ខាងចុងនៃព្រះគាថាទី៤ និងកន្លះគាថាខាងដើមនៃព្រះគាថាទី៥ យ៉ាងដូច្នេះថា៖ "ចំណែកឯ ពួកប្រេតដែលជាញាតិទាំងនោះមកប្រជុំគ្នាក្នុងទីដែលអោយទាននោះ ជាអ្នកមកល្អហើយ។ កាលបើបាយនិងទឹក ដ៏ច្រើន ដែលគេឧទ្ទិសអោយដល់ខ្លួន គប្បីអនុមោទនាដោយគោរពចុះ។"

បន្ទាប់មក ព្រះសាស្តាទ្រង់សំដែងអំពី ទាយក ជាកន្ទះគាថាខាងចុងនៃព្រះគាថាទី៥ និងកន្ទះគាថាខាងដើមនៃព្រះគាថាទី៦ យ៉ាងដូច្នេះថា៖ "យើងទាំងឡាយបានទទួលនូវសម្បត្តិ(ផលបុណ្យ) ព្រោះហេតុនៃញាតិទាំងឡាយណា សូមពួកញាតិទាំងឡាយរបស់យើងនោះរស់នៅអស់កាលជាយូរអង្វែងចុះ។ ការបូជារឈ្មោះថាពួកញាតិបានធ្វើហើយដល់ពួកយើង។ ឯទាយកគឺអ្នកអោយទានក៏មិនមែនជាអ្នកឥតមានផលឡើយ។"

បន្ទាប់មកទៀត ព្រះសាស្តាទ្រង់ត្រាស់នូវគាថាទី៧ រួមទាំងកន្ទះគាថាខាងចុងនៃព្រះគាថាទី៦ផង យ៉ាងដូច្នេះថា៖ "កសិកម្ម គឺការភ្ជួររាស់ក៏មិនមាននៅក្នុងភូមិ នៃប្រេតនោះ។ គោរក្ខកម្ម គឺការរក្សាគោក៏មិនមាននៅក្នុងភូមិនៃប្រេតនោះ។ ពាណិជ្ជកម្ម គឺការជួញប្រែដែលជាហេតុបានទទួលសម្បត្តិដូច្នោះក៏មិនមាន ការលក់ចេញទិញចូលដោយប្រាក់ ក៏មិនមានដែរ។ បុគ្គលទាំងឡាយដែលធ្វើកាលកិរិយាលះលោកនេះទៅហើយរមែងញ៉ាំងអត្តភាពអោយប្រព្រឹត្តទៅក្នុងបេតវិស័យនោះ ដោយសារផលទាន ដែលញាតិមិត្របានឧទ្ទិសអោយហើយ អំពីលោកនេះ។"

បន្ទាប់មក ព្រះសាស្តាទ្រង់ប្រកាសនូវសេចក្តីដែលទ្រង់ត្រាស់រួចហើយ ដោយឧបមា២យ៉ាង ជា២គាថាដូច្នេះថា៖ "ទឹកធ្លាក់ចុះអំពីទីទួលរមែងហូរទៅកាន់ទីទំនាបដូចម្តេចមិញ ទានដែលបុគ្គលបានអោយហើយអំពីលោកនេះ រមែងសំរេចផល ដល់ពួកប្រេតទាំងឡាយ ក៏ដូច្នោះដែរ។ ផ្លូវទឹកទាំងឡាយមានទន្លេនិងស្ទឹង ជាដើម ដ៏ពេញ រមែងញ៉ាំងសាគរតី

សមុទ្រអោយពេញប្រៀបដូចម្តេចមិញ ទានដែលបុគ្គលបានអោយហើយ អំពីលោកនេះ រមែងសំរេចផលដល់ពួកប្រេតទាំងឡាយ ក៏ដូច្នោះដែរ។"

បន្ទាប់មក ព្រះសាស្តាទ្រង់សំដែងអំពី ឧបការគុណ ជាព្រះគាថាទី១០ យ៉ាងនេះថា៖ "បុគ្គល កាលបើរលឹកនឹកឃើញ នូវឧបការគុណដែលញាតិមិត្រជាដើមបានធ្វើដល់ខ្លួនក្នុងកាលមុនថា អ្នកឯណោះបានអោយរបស់នេះដល់អាត្មាអញ អ្នកនោះឯងបានធ្វើនូវគុណនេះដល់អាត្មាអញ ជនទាំងនោះ ត្រូវជាញាតិមិត្រ ជាសំឡាញ់របស់អាត្មាអញ ដូច្នេះហើយ គួរអោយនូវទក្ខិណាទានដល់ពួកប្រេតទាំងឡាយ។"

បន្ទាប់មក ព្រះសាស្តាទ្រង់សំដែងអំពី ការឥតប្រយោជន៍ ជាព្រះគាថាទី១១ យ៉ាងដូច្នេះថា៖ "ការយំក្តី ការសោកសៅក្តី ឬសេចក្តីខ្សឹកខ្សួលណាដទៃក្តី បុគ្គលមិនគួរគប្បីធ្វើឡើយ ព្រោះកិច្ចមានការយំស្រែកសោកសៅជាដើមនោះ មិនមានប្រយោជន៍ទៅដល់អ្នកបានស្លាប់ទៅកាន់បរលោកឡើយ។ ញាតិទាំងឡាយដែលទៅកាន់បរលោកនោះ ក៏ឋិតនៅយ៉ាងនោះដដែល ឥតបានដឹង ឬបានឮឡើយ។"

បន្ទាប់មក ព្រះសាស្តាទ្រង់សំដែងអំពី ភាពនៃទក្ខិណា ដែលព្រះរាជាទ្រង់បានប្រទានហើយ ថាជាទានមានប្រយោជន៍ ដោយព្រះគាថាទី១២យ៉ាងនេះថា៖ "លុះត្រាតែទក្ខិណាទាន ដែលបុគ្គលបានអោយហើយនេះឯង ជាទានបានតំកល់ទុកដ៏ល្អប្រពៃហើយ ក្នុងព្រះសង្ឃ ទើបបានសំរេចផល ដោយរួសរាន់ ដើម្បីជាប្រយោជន៍ដល់ញាតិ(ពួកប្រេត)ទាំង

នោះ អស់កាលជាយូរអង្វែង។"

កាលព្រះអង្គមានព្រះភាគទ្រង់ត្រាស់សរសើរព្រះរាជា ដោយគុណតាមសេចក្ដីពិត រួចស្រេចហើយ ទើបព្រះអង្គត្រាស់ជាព្រះគាថាទីបញ្ចប់ (ទី១៣) យ៉ាងដូច្នេះថា៖ "ញាតិធម៌នោះ ឈ្មោះថាព្រះមហាបពិត្រ(ព្រះបាទពិម្ពិសារ) ទ្រង់បានសំដែង ជាបែបយ៉ាងហើយ។ ការបូជា ដ៏ថ្លៃថ្លា ចំពោះពួកប្រេតទាំងឡាយ ឈ្មោះថា ព្រះអង្គបានធ្វើអោយ រួចហើយ។ កម្លាំងកាយនៃព្រះភិក្ខុសង្ឃទាំងឡាយ ឈ្មោះថាព្រះអង្គទ្រង់បានបំពេញអោយហើយ។ បុណ្យដ៏ច្រើន ក៏ព្រះមហារាជបានសន្សំទុកហើយ។"

ដោយអំណាចនៃកុសល ផលបុណ្យ ដែលព្រះបាទពិម្ពិសារទ្រង់បានឧទ្ទិសផ្សាយ ទៅអោយពួកប្រេតទាំងឡាយ នៅក្នុងឱកាសនោះ ក៏បានទទួល នូវផលបុណ្យនោះភ្លាមមួយរំពេច ហើយបានរួចចាកផុតអំពីសេចក្ដីស្រេកឃ្លាន និងសេចក្ដីទុក្ខទោសផ្សេងៗ បានទាំងទៅកើត ក្នុងសុគតិភព ដែលជាឋានប្រកបនូវសេចក្ដីសុខ សេចក្ដីចំរើនគ្រប់យ៉ាង។

ពេលព្រះសាស្ដាទ្រង់បញ្ចប់ព្រះធម៌ទេសនា ដោយព្រះគាថា ជាយ៉ាងនេះ មនុស្ស៨ម៉ឺន ៤ពាន់នាក់ កើតមានសេចក្ដីសង្វេគ ព្រោះការពណ៌នានូវទោសនៃការកើតក្នុងបេតវិស័យ ហើយក៏នាំគ្នាប្រារព្ធសេចក្ដីព្យាយាម រហូតបានសំរេចធម៌គ្រប់ៗគ្នា។

# ព្រះពុទ្ធគង់ចាំធម៌ ក្នុងព្រៃរក្ខិតវ័ន



ព្រះពុទ្ធទ្រង់គង់សំរាកព្រះកាយយ៉ាងស្ងាត់ស្ងៀមនិងយ៉ាងរីករាយ នៅក្រោមដើមពោធិព្រឹក្ស ក្នុងព្រៃរក្ខិតា ដែលជាព្រៃភ្នំពណ៌បៃតង ក្នុងនិទាឃរដូវដ៏ភ្លឺថ្លា និងមានបឹងមួយ គួរជាទីពេញចិត្ត។

ព្រះពុទ្ធទ្រង់គង់នៅជាមួយសត្វព្រៃជាច្រើន នៅក្នុងព្រៃរក្ខិតនោះ រួមទាំងគ្រួសារដំរីមួយហ្វូងផង។ ដំរីមេគឺជាស្តេចដំរីតែងបណ្តើរកូនតូចៗ ចុះទៅងូតទឹកក្នុងបឹងនោះ។ ស្តេចដំរីបង្រៀនកូនតូចៗ អោយចេះជីកទឹកដ៏ត្រជាក់ និង ស៊ីរុក្ខជាតិទាំងឡាយ ដោយយកប្រមោយចាប់គ្រវីគ្រវាត់ក្នុងទឹកដើម្បីអោយជ្រះភក់។ កូនដំរីតូចជាងគេបង្អស់មួយ ធ្វើត្រាប់តាមស្តេចដំរី។ ដំរីទាំងអស់ស្រឡាញ់ចូលចិត្តព្រះពុទ្ធនិងក្លាយជាមិត្រសំឡាញ់យ៉ាងជិតស្និទ្ធរបស់ព្រះអង្គ។ ជួនកាលស្តេចដំរីបេះផ្លែឈើយកមកថ្វាយព្រះសម្ពុទ្ធ។សព្វព្រះហឫទ័យ អង្អែលក្បាលកូនដំរីលេង និងព្រះអង្គតែងតែយាងជាមួយនឹងកូនដំរីទាំងនោះ ចុះទៅក្នុងបឹង។ ព្រះអង្គសព្វព្រះទ័យស្តាប់សម្រែក ប្រកបដោយសីហនិនាទរបស់ស្តេចដំរី។ សម្លេងលាន់ឮដូចជាសម្លេងត្រែ(ត្រុមប៉ែត)។ ព្រះអង្គហាត់ធ្វើតាម លុះត្រាតែទ្រង់អាចត្រាប់សម្លេងស្តេចដំរីនោះបានដូចបេះបិត។ ពេលមួយខណៈដែលស្តេចដំរីស្រែកហៅកូន ព្រះអង្គក៏ធ្វើត្រាប់ ដូចជាសម្លេងត្រែ ស្តេចដំរីសម្លឹងមើលព្រះអង្គមិនដាក់ភ្នែក ហើយដើរចូលមកជិត រួចក៏លុតជង្គង់ចំពោះព្រះភក្ត្រព្រះអង្គហាក់ដូចជាបង្ហោនខ្លួនសំពះ។ ព្រះពុទ្ធទ្រង់យកព្រះហស្តទះអង្អែលក្បាលស្តេចដំរីនោះដោយថ្នមៗ។

នេះគឺជាការចាំវស្សាទី១០ របស់ព្រះពុទ្ធ បន្ទាប់ពីព្រះអង្គត្រាស់ដឹងមក។ ក៏ប៉ុន្តែ នេះជាលើកទី២ ដែលព្រះពុទ្ធគង់ចាំវស្សាតែមួយព្រះអង្គឯង។ ព្រះពុទ្ធទ្រង់គង់នៅក្នុងព្រៃ ដ៏ត្រជាក់នេះ ពេញមួយរដូវវស្សា លុះដល់ពេលចេញវស្សា ទើបព្រះអង្គយាងចេញពីសំឡាញ់ដ៏របស់ព្រះអង្គ ឆ្ពោះទៅទិសខាងជើង ទៅកាន់វត្តជេតពន ក្នុងក្រុងសាវត្ថី។



# ០៧. ខែ អស្សុជ (តុលា)

រំលឹកដល់

- បុណ្យបវារណា ចេញវស្សា និង ព្រះពុទ្ធ សំដែងព្រះអភិធម្មទេសនា ប្រោសអតីតព្រះវរមាតា និងពពួកទេវតាទាំងឡាយ នៅតាវតិង្សទេវលោកឋាន
- បុណ្យកឋិន(ចាប់ពីថ្ងៃ ១រោច ខែអស្សុជ ដល់ថ្ងៃ១រោចខែ កត្តិក)

# បុណ្យចេញចស្សា និងព្រះពុទ្ធទ្រង់
# សំដែងអភិធម្មទេសនាប្រោសអតីតវរមាតា



លុះផុតកំណត់ចាំវស្សា៣ខែហើយ នៅថ្ងៃ១៥កើត ពេញបូរមី ខែអស្សុជ(ពាក់កណ្ដាលខែតុលា) ភិក្ខុសង្ឃត្រូវធ្វើកិច្ចចេញវស្សារបស់ខ្លួនវិញ ដែលហៅថា "បុណ្យចេញវស្សា" ឬ "បុណ្យបវារណា"។ ពិធីបវារណានេះ ភិក្ខុមួយអង្គៗត្រូវប្រកាសខ្លួនដាក់កាយអោយសង្ឃ ឬបុគ្គលម្នាងធ្វើការរិះគន់ ក្រែងមានប្រព្រឹត្តខុសឆ្គងឬល្មើសបញ្ញត្តិណាមួយ ក្នុងកាលចាំវស្សា៣ខែកន្លងមកនោះ ទោះដោយការឃើញក្ដី ការស្ដាប់ឮក្ដីនិងការរង្កៀសក្ដី ក៏សូមអោយលើកឡើងនិងបង្ហាញនូវភស្តុតាងច្បាស់លាស់ដើម្បីភិក្ខុប្រព្រឹត្តខុស ធ្វើការកែប្រែអោយប្រសើរឡើងវិញ។

មានរឿងមួយទាក់ទងនឹងភិក្ខុសង្ឃធ្វើបវារណាចេញវស្សានេះថា៖ "សម័យមួយ ព្រះសម្ពុទ្ធទ្រង់គង់នៅក្នុងវត្តជេតពន ដែលជាអារាមរបស់អនាថបណ្ឌិកសេដ្ឋី ជិតក្រុងសាវត្ថី។ គ្រានោះឯង មានភិក្ខុជាច្រើនដែលជាមិត្រស្និតស្នាលនឹងគ្នា បានជួបជុំគ្នាចូលវស្សាក្នុងអាវាសកំណត់មួយក្នុងកោសលជនបទ។ ភិក្ខុទាំងអស់បានត្រិះរិះថា 'តើយើងត្រូវធ្វើដូចម្ដេចដើម្បីអោយបានសុខ កុំអោយមានការទាស់ទែងខ្វែងគំនិតគ្នា នៅពេលចាំវស្សា និង មិនអោយមានការលំបាក ដោយអាហារបិណ្ឌបាតផង?' ភិក្ខុទាំងអស់ ក៏ព្រមព្រៀងគ្នាថា 'យើងមិនត្រូវនិយាយរកគ្នា មិនត្រូវចរចាររកគ្នាទៅវិញទៅមកទេ។ បើយើងត្រូវការពឹងពាក់គ្នា ត្រូវតែប្រើកាយវិការជាសញ្ញា'"។ កាលបានព្រមព្រៀងគ្នាយ៉ាងដូច្នោះហើយ ភិក្ខុទាំងនោះ ក៏លែងស្ដីរកគ្នា រហូតគ្រប់៣ខែ។

លុះចេញវស្សាហើយ បន្ទាប់ពីបានរៀបចំទុកដាក់សេនាសនៈរួចមក ភិក្ខុទាំងនោះ ប្រដាប់ដោយបាត្រ និងចីវរ ចេញដំណើរទៅកាន់ទីក្រុងសាវត្ថី ដើម្បីចូលទៅគាល់ព្រះដ៏មានព្រះភាគ ក្នុងវត្តជេតពននោះ។

ព្រះសាស្តាក៏ទ្រង់ត្រាស់សួរថា៖ "ម្នាលភិក្ខុទាំងឡាយ! អ្នកទាំងឡាយ ល្មមអត់ធន់នូវសេចក្តីទុក្ខលំបាកបានដែរឬទេ? ឥរិយាបថប្រព្រឹត្តទៅបានស្រួលដែរឬទេ? ចុះអ្នកទាំងឡាយ ជាបុគ្គលព្រមព្រៀងគ្នា ស្រុះស្រួលគ្នា មិនទាស់ទែងគ្នា នៅចាំវស្សាដោយសុខសប្បាយហើយឬ?"

ភិក្ខុទាំងនោះក្រាបទូលថា៖ "បពិត្រព្រះអង្គដ៏ចំរើន! យើងខ្ញុំព្រះអង្គទាំងអស់គ្នា នៅចាំវស្សាដោយសប្បាយ ក៏ព្រោះតែយើងខ្ញុំព្រះអង្គមានគំនិតឯកភាពគ្នាថា 'យើងខ្ញុំទាំងឡាយ មិនគប្បីហៅរកគ្នា មិនគប្បីចរចាររកគ្នាទៅវិញទៅមក នោះទើបមានឈ្មោះថា ជាអ្នកព្រមព្រៀងគ្នា ស្រុះស្រួលគ្នា មិនទាស់ទែងគ្នា នៅចាំវស្សាដោយសប្បាយ"។

កាលទ្រង់ព្រះសណ្តាប់នូវពាក្យនេះហើយ ព្រះសាស្តាក៏ទ្រង់មានព្រះបន្ទូលថា៖ "ម្នាលភិក្ខុទាំងឡាយ! អ្នកនៅចាំវស្សាបែបនេះ ពិតជាមិនសប្បាយទេ។ ប៉ុន្តែ អ្នកទាំងឡាយបែរជាប្តេជ្ញាថា ខ្លួនជាអ្នកនៅចាំវស្សាដោយសប្បាយទៅវិញ។ ការចាំវស្សារបស់អ្នកទាំងឡាយ ដូចជាការរស់នៅរបស់បសុសត្វ(សត្វដែលគេចិញ្ចឹម) ឬក៏ដូចជាការរស់នៅរបស់សត្វពពែ ឬក៏ដូចជាការរស់នៅរបស់បុគ្គលប្រមាទ តែនៅប្តេជ្ញាថាខ្លួនជាអ្នករស់នៅដោយសប្បាយ។ ម្នាលមោឃបុរស! អ្នកមិនសមបើនឹងសមា-

ទាននូវ មូគវត្ត (វត្តរបស់មនុស្សគ ឬការប្រព្រឹត្តរបស់មនុស្សគ) ដែល ជា តិត្ថិយសមាទាន (សមាទានរបស់ពួកតិរ្ថិយ) ទេ អំពើទាំងនេះ មិនមែនជាអំពើដែលនាំអោយគេជ្រះថ្លាទេ"។

ព្រះសាស្តាទ្រង់បន្ទោសភិក្ខុទាំងនោះ យ៉ាងដូច្នោះហើយ ក៏ទ្រង់សំដែងនូវធម្មីកថាថា៖ "ម្នាលភិក្ខុទាំងឡាយ! ភិក្ខុមិនត្រូវសមាទាននូវមូគវត្តដែលជាតិត្ថិយសមាទានទេ ភិក្ខុណាសមាទាននឹងត្រូវអាបត្តិទុក្កដ"។

ព្រះសម្ពុទ្ធទ្រង់បញ្ញត្តិ ដោយបទបាលីថា៖ "អនុជានាមិ ភិក្ខវេ វស្សំ វុត្ថានំ ភិក្ខូនំ តីហិ ឋានេហិ បវារេតុំ ទិដ្ឋេន វា សុតេន វា បរិសង្កាយ វា" ប្រែថា "ម្នាលភិក្ខុទាំងឡាយ! តថាគតអនុញ្ញាតអោយភិក្ខុទាំងឡាយ ដែលនៅចាំវស្សារួចហើយ អាចបវារណាដោយស្ថានបីយ៉ាងគឺ៖ ដោយឃើញក្តី ដោយឮក្តីនិងដោយរង្កៀសក្តី"។

បុណ្យចេញវស្សានេះ ក៏មានប្រវត្តិជាប់ទាក់ទងទៅនឹងរឿង ព្រះពុទ្ធអង្គផ្ទាល់ដែរ។ យោងតាមរឿងនេះថា៖ "ពេលមួយ ព្រះពុទ្ធទ្រង់គង់ចាំព្រះវស្សាអស់ត្រៃមាស នៅឯតាវតឹង្សសួគ៌ឋាន ជាកន្លែង ដែលព្រះអង្គទ្រង់សំដែងអភិធម្មទេសនា ប្រោសមាយាទេវបុត្ត (ដែលត្រូវជាអតីតព្រះមាតារបស់ព្រះអង្គ) និងពួកទេវតាដទៃទៀត។ នៅពេលចេញវស្សាព្រះអង្គក៏យាងចុះមកកាន់ឋានមនុស្សលោកវិញ ដោយមានការទទួលស្វាគមន៍និងបដិសណ្ឋារកិច្ច យ៉ាងសប្បាយរីករាយក្រៃលែង។ រឿងនេះបានកើតឡើង៧ឆ្នាំ បន្ទាប់អំពីព្រះពុទ្ធទ្រង់បានត្រាស់ដឹង។ ពិធីយ៉ាងអឹក

ធិកនេះ ប្រារព្ធឡើងដើម្បីរំលឹកដល់ព្រឹត្តិការណ៍ ដ៏សំខាន់នេះ។ កន្លែង ទ្រង់យាងចុះនោះឈ្មោះ" ក្រុងសង្កស្ស: " ស្ថិតនៅខាងជើងប្រទេសឥណ្ឌា។

ក្នុងពេលធ្វើបុណ្យចេញវស្សានេះ ជាទូទៅនៅពេលល្ងាចឬយប់ ថ្ងៃ១៥កើត ខែអស្សុជ ភិក្ខុសង្ឃដែលគង់ចាំវស្សា អស់ត្រៃមាស ក្នុង អាវាសណាមួយ ត្រូវជួបជុំគ្នាក្នុងព្រះវិហារ ដើម្បីនមស្សការព្រះរតន- ត្រ័យ និងសំដែងអាបត្តិ។ ពុទ្ធបរិស័ទនិមន្តព្រះសង្ឃសំដែងធម៌ទេសនា 'រឿងព្រះវេស្សន្តរ' គឺជារឿងព្រះពោធិសត្វ ដែលយោនយកកំណើត ក្នុងជាតិចុងក្រោយបង្អស់ ដើម្បីបំពេញទានបារមី។ ទេសនាមហាជាតក៏ ត្រូវយកមកសំដែងជូនពុទ្ធបរិស័ទ ជាទីសណ្ដាប់ ក្នុងរាត្រីនោះដែរ។

ព្រឹកឡើង ពុទ្ធបរិស័ទយកស្រាក់បាយ សម្លនិងចង្ហាន់ផ្សេងៗមក ឈរតំរៀបគ្នាជាជួររង់ចាំដាក់បាត្រ។ ព្រះសង្ឃដែលមានភ្នែកដាក់ចុះនិង កាន់ទ្រនូវបាត្រ និមន្តសន្សឹមៗតាមជួរសប្បុរសជន ដើម្បីទទួលចង្ហាន់ បិណ្ឌបាត ប្រកបដោយសេចក្ដីមេត្តានិងកាយវិការស្រគត់ស្រគំសមរម្យ។

បន្ទាប់មក សប្បុរសជនទាំងអស់នាំគ្នាទៅជួបជុំនៅក្នុងសាលាធំ ជាកន្លែងដែលពុទ្ធបរិស័ទប្រារព្ធពិធីផ្សេងៗ ដើម្បី សមាទាននិច្ចសីល ឬ ឧបោសថសីល ស្ដាប់ព្រះសង្ឃសំដែងធម្មទេសនា និងធ្វើសមាធិ។

កម្មវិធីល្បែងប្រជាប្រិយផ្សេងៗ ត្រូវបានយកមកសំដែងនិងអប់រំ ប្រជាពលរដ្ឋ។ ការកំសាន្តសប្បាយ និងការធ្វើបុណ្យ តែងប្រព្រឹត្តឡើង ក្នុងពេលជាមួយគ្នា។

ពាក្យថា "កឋិន" ជាភាសាបាលី សំដៅយកក្របក្ដារ ដែលភិក្ខុសង្ឃសម័យបូរាណឥណ្ឌា ប្រើសំរាប់ដេរសំពត់ធ្វើជាស្បង់ចីវរ។ សំពត់ដែលបានរៀបចំតាក់តែងឡើងនោះ មានឈ្មោះថា "សំពត់កឋិន" ។

បើតាមអដ្ឋកថា សំដៅយកពុទ្ធដីកាដែលព្រះពុទ្ធទ្រង់បានបញ្ញត្តិទុកមកថាៈ កឋិន គឺការប្រជុំរួបរួម រូបធម៌និងនាមធម៌ ដែលប្រព្រឹត្តទៅក្នុងអត្ថន័យពីរយ៉ាងគឺៈ

១. "រស់បានដោយកម្រ" សមដូចវិគ្គហៈថាៈ "កថតិ កិច្ឆេន ជីវតីតិ កឋិនោ។" ប្រែថា "សភាវឯណារស់នៅបានដោយកម្រ សភាវនោះហៅថា កឋិន"។ ព្រោះលោកប្រៀបប្រដូចជាឈើស្ងួតដែលបុគ្គលកាត់ចេញចាកពីដើម ហើយយកទៅបោះភ្ជាប់នឹងដី រមែងដុះលូតលាស់ ឬរស់នៅដោយកម្រយ៉ាងណា ឯកិច្ចដែលនឹងកើតឡើង ឬក៏តាំងឡើងជាកឋិនពេញទី គឺបានដោយកម្រពន់ពេកណាស់ ក៏យ៉ាងនោះដែរ។

២. "ពោលសរសើរ" ព្រោះចីវរទាន ដែលយើងបានកសាងជាកឋិននោះ ជាទានវិសេសជាងទានដទៃ ដែលព្រះអរិយទាំងឡាយ មានព្រះសម្ពុទ្ធជាប្រធាន តែងពោលសរសើរថា ជាទានវិសេស អាចរួបរួម ឬសង្គ្រោះ នូវអានិសង្ស៥យ៉ាង របស់ភិក្ខុអ្នកក្រាលគ្រង មិនអោយទៅគ្រងនៅទីដទៃបាន សមដូចវិគ្គហៈថាៈ "បញ្ច អានិសំសេ អញ្ញត្ថ គន្តុំ អទត្វា កឋតិៈ សង្គណ្ហាតីតិ កឋិនំ។" ប្រែថា "ធម្មជាតិឯណាក្រៀកទុក ឬសង្គ្រោះនូវអានិសង្សទាំង៥ មិនអោយទៅក្នុងទីដទៃបាន ធម្មជាតិនោះឈ្មោះថា "កឋិន"។"

កឋិន នេះ អាចអោយសំរេចផល ដល់បុគ្គល ទាំងពីរផ្នែក គឺៈ

(១). ទាយក ឬ ទាយិកា ដែលជាអ្នកអោយ ត្រូវបានទទួលអានិសង្សច្រើន បានទទួលផលច្រើន ក្នុងអនាគតកាល មានការទទួលនូវសម្បត្តិ ក្នុងឋានទេវលោក ជាដើម។

(២). បដិគ្គាហកៈ ដែលជាភិក្ខុអ្នកក្រាលគ្រងកឋិន ឬ បុគ្គល ឬគណៈ ឬសង្ឃ ដែលបានអនុមោទនា ក៏ត្រូវបានសំរេចនូវអានិសង្ស ៥យ៉ាង ពេញលេញគ្រប់គ្រាន់ ដរាបដល់រយៈកាលនៃកឋិនខេត្ត។

ពិធីដែលទាយកនិងទាយិកានាំយកសំពត់កឋិនទៅប្រគេនចំពោះភិក្ខុសង្ឃ ដែលបានគង់ចាំវស្សា អស់មួយត្រៃមាស(៣ខែ) ក្នុងអាវាស (វត្ត)ណាមួយ និងនៅពេលណាមួយ ក្នុងកំណត់២៩ថ្ងៃ(ចាប់តាំងពីថ្ងៃ១រោច ខែអស្សុជ រហូតដល់ថ្ងៃ១៥កើតពេញបូរមីខែកត្តិក) អោយលោកក្រាលគ្រង មានឈ្មោះថា "បុណ្យកឋិន" ឬ "កឋិនទាន"។

ចីវរកឋិន មិនខុសគ្នាអំពីចីវរទាន ដទៃទៀតទេ គ្រាន់តែការធ្វើបុណ្យកឋិនចីវរ មានកំណត់កាលបរិច្ឆេទច្បាស់លាស់ និង មានប្រជាប្រិយភាពច្រើន ដែលហៅថា "កាលទាន"។ បុណ្យកឋិនមានលក្ខណៈប្លែក៥យ៉ាង អំពីបុណ្យផ្សេងៗ និង ក្លាយជាបុណ្យដ៏មានសារៈសំខាន់នៅក្នុងវត្តពុទ្ធសាសនា និងនៅក្នុងចំណោមពុទ្ធបរិស័ទទូទៅ។

លក្ខណៈប្លែក៥យ៉ាងនោះគឺៈ

១. ប្លែកដោយកាល

ព្រះពុទ្ធទ្រង់អនុញ្ញាតកឋិនកាល មានតែចំនួន២៩ថ្ងៃ គឺ: ១៤ថ្ងៃ ក្នុងខែអស្សុជ (កំណត់ពីថ្ងៃ១រោច រហូតដល់ថ្ងៃ១៤រោចឬខែដាច់) និង ១៥ថ្ងៃ ក្នុងខែកត្តិក (កំណត់ពីថ្ងៃ១កើត ដល់ថ្ងៃ១៥កើត ពេញបូរមី)។ រយៈពេលនេះ ហៅតាមពាក្យសាមញ្ញថា "រដូវកឋិន"។ បុណ្យកឋិនធ្វើបានតែម្តងគត់ ក្នុងមួយឆ្នាំ សំរាប់វត្តមួយ និងត្រូវធ្វើតាមពេលកំណត់ មិនមានមុន និង មិនមានក្រោយ។ ភិក្ខុអាចទទួលសំពត់កឋិនបាន តែមួយដងគត់ ក្នុងមួយរដូវកឋិន។

២. ប្លែកដោយវត្ថុ

សំពត់ដែលជា អង្គកឋិន នោះមាន: ស្បង់ ចីវរ និងសង្ឃាដី ដែលបានធ្វើត្រឹមត្រូវតាមពុទ្ធបញ្ញត្តិ។ យោងតាមវិន័យបញ្ញត្តិ ទោះបីជាទាយកឬទាយិកា នាំសំពត់មួយត្រៃមកប្រគេនភិក្ខុសង្ឃ ក៏ភិក្ខុសង្ឃអ្នកក្រាលគ្រង លោករើសយកតែមួយមុខ មកធ្វើជាអង្គកឋិន។ តាមធម្មតាភិក្ខុច្រើនតែរើសយកសង្ឃាដីធ្វើជាអង្គកឋិន ពីព្រោះសង្ឃាដីជាសំពត់ធំជាងគេបង្អស់ ក្នុងត្រៃចីវរ ហើយអាចប្រើសំរាប់ដណ្តប់ដូចជាភួយ នៅពេលរងា ក៏បាន។

៣. ប្លែកដោយអំពើ

តាមទំនៀមទម្លាប់ ពុទ្ធបរិស័ទតែងតែមានជំនឿថា ការធ្វើបុណ្យ

ចំពោះភិក្ខុមួយអង្គ។ ពុំសូវមានអានិសង្សច្រើន ដូចជាធ្វើនឹង សង្ឃ ទេ (សង្ឃ សំដៅយកភិក្ខុ ចំនួនពី៥អង្គឡើងទៅ)។ យោងតាមវិន័យបញ្ញត្តិ អង្គកឋិនអាចវេរប្រគេនចំពោះសង្ឃ យ៉ាងហោចណាស់ ក៏មានវត្តមាន ភិក្ខុ៥អង្គដែរ ដើម្បីអោយកើតជាកឋិនពេញលក្ខណៈបាន។

៤. ប្លែកដោយបដិគ្គាហកៈ (ដោយអ្នកទទួល)

មានតែភិក្ខុទេ ដែលអាចទទួលសំពត់កឋិនបាន (រីឯសាមណេរ និងអ្នកដទៃទទួលពុំបាន)។ ភិក្ខុនោះត្រូវតែគង់ចាំវស្សាគំរប់៣ខែ ក្នុងវត្ត ឬអាវាសណាមួយ។ ភិក្ខុមិនបានគង់ចាំវស្សាគ្មានសិទ្ធិទទួលអង្គកឋិនទេ។

៥. ប្លែកដោយអានិសង្ស

នៅក្នុងការធ្វើបុណ្យកឋិន ទាយក និងទាយិកា តែងទទួលបាន អានិសង្សច្រើន។ យោងតាមវិន័យបិដក ភាគ៨ ត្រង់កឋិនក្ខន្ធកៈ ភិក្ខុសង្ឃដែលជាអ្នកអនុមោទនា និងក្រាលគ្រងកឋិន ត្រូវបានទទួលអានិសង្ស៥យ៉ាង ក្នុងរយៈពេល៥ខែ។ អានិសង្សទាំង៥យ៉ាងនោះគឺៈ

(១). អនាមន្តចារោ :ភិក្ខុត្រាច់ទៅកាន់ទីដទៃ ដោយមិនបាច់លាភិក្ខុផងគ្នាបាន និងមិនមានទោស(ត្រូវអាបត្តិ)ឡើយ។

(២). អសមាទានចារោ :ភិក្ខុត្រាច់ទៅដោយមិនបាច់យកសំពត់ណាមួយ ឬត្រៃចីវរគ្រប់ប្រដាប់ ជាប់ជាមួយបាន។

(៣) គណភោជនំ :ភិក្ខុអាចឆាន់គណភោជនបាន។

(៤). យាវទត្ថចីវរំ :ភិក្ខុអាចទុក អតិរេកចីវរ (ចីវរដែលលើសអំពីសេចក្តីត្រូវការ) ចំនួនប៉ុន្មានក៏បាន។

(៥). យោ ច តត្ថ ចីវរុប្បាទោ សោ នេសំ ភវិស្សតិ :ចីវរណាកើតឡើងក្នុងអាវាសនោះ ចីវរនោះនឹងមានដល់ភិក្ខុនោះ។

វិន័យបិដក ភាគ៨ កឋិនក្ខន្ធកៈ បានចែងអំពីប្រភពនៃ បុណ្យកឋិនថា៖ "នៅក្នុងសម័យពុទ្ធកាល ព្រះសម្ពុទ្ធជាម្ចាស់ ទ្រង់ពុទ្ធានុញ្ញាតិអោយភិក្ខុប្រើប្រាស់តែបង្សុកូលចីវរ ទ្រង់ពុំទាន់បានអនុញ្ញាត អោយប្រើគហបតីចីវរ នៅឡើយ។

សម័យមួយនោះ នៅក្នុងរវាងមជ្ឈិមពោធិកាល ព្រះពុទ្ធកំពុងគង់ចាំព្រះវស្សា ក្នុងវត្តជេតពន ដែលជាអារាមរបស់អនាថបិណ្ឌិកសេដ្ឋីសាងថ្វាយ នៅជិតក្រុងសាវត្ថី។ គ្រានោះ មានភិក្ខុ៣០រូប ឈ្មោះថា ភទ្ទវគ្គិយត្ថេរ ក្នុងដែនបាថេយ្យ ជាអ្នកប្រព្រឹត្តធម៌នៅក្នុងព្រៃ។ល។ បាននាំគ្នានិមន្តចេញអំពីទីនោះ មកកាន់ក្រុងសាវត្ថី ដើម្បីចូលគាល់បំរើព្រះដ៏មានព្រះភាគ។ ប៉ុន្តែ ភិក្ខុទាំងអស់ បានមកដល់តែត្រឹម សាកេត (ភូមិមួយជាប់នឹងទីក្រុងសាវត្ថី) ស្រាប់តែថ្ងៃចូលវស្សាក៏មកដល់ នឹងស្រុតមកទៀតមិនទាន់ ក៏នាំគ្នាផ្អាកធ្វើដំណើរ ស្វែងរកទីសេនាសនៈនៅចាំវស្សា៣ខែ នាពាក់កណ្តាលផ្លូវនោះតែម្តងទៅ។ ភិក្ខុសង្ឃទាំង៣០រូប មានសេចក្តីអផ្សុក កើតទុក្ខតូចព្រះទ័យជាខ្លាំង ដោយគិតឃើញថាព្រះ

ដ៏មានព្រះភាគទ្រង់គង់នៅទីនោះ ចម្ងាយតែ៦យោជន៍ទៀតសោះមិនសម យើងទាំងឡាយស្អុនដំណើរ មិនបានគាល់បំរើព្រះអង្គដូចបំណងសោះ។

លុះដល់ថ្ងៃចេញវស្សា បវារណាស្រេចហើយ ភិក្ខុទាំងអស់ក៏នាំគ្នាប្រញាប់ប្រញាល់ចូលទៅកាន់ក្រុងសាវត្ថី។ នៅទីនោះ ភិក្ខុសង្ឃទាំងអស់បានចូលធ្វើសាវនាការជាមួយនឹងព្រះពុទ្ធ ដោយមានស្បង់ចីវរទទឹកជោគ។ ព្រះមានព្រះភាគទ្រង់មានបន្ទូលរាក់ទាក់ទៅកាន់ភិក្ខុទាំងនោះថា៖ "ម្នាលភិក្ខុទាំងឡាយ! សរីរយន្តរបស់អ្នកទាំងឡាយល្មមអត់សង្កត់បានឬទេ? ល្មមប្រព្រឹត្តទៅបានឬទេ? តើអ្នកទាំងឡាយមានសេចក្តីព្រមព្រៀងស្មោះស្មើ ឥតមានវិវាទទាស់ទែងគ្នា ទេឬ? អ្នកទាំងឡាយនៅចាំវស្សាសោត ស្រួលបួលមិនលំបាកដោយអាហារបិណ្ឌបាត ទេឬ?"

ភិក្ខុទាំងឡាយនោះ ក៏ក្រាបបង្គំទូល នូវសេចក្តីលំបាករបស់ខ្លួនដែលមានមកតាមផ្លូវ ដោយសព្វគ្រប់ តាមដំណើរ។

លំដាប់នោះ ព្រះដ៏មានព្រះភាគទ្រង់សំដែងធម្មកថា ប្រារព្ធអំពីសង្សារវដ្តមិនមានទីបំផុត ប្រោសប្រទានដល់ភិក្ខុទាំងនោះ។ លុះចប់ធម៌ហើយ ភិក្ខុទាំងអស់នោះ បានជាព្រះអរហន្តទាំងអស់អង្គ រួចហើយក៏នាំគ្នា ក្រាបថ្វាយបង្គំលាព្រះសម្ពុទ្ធ វិលទៅកាន់លំនៅរបស់ខ្លួនវិញ។

បន្ទាប់អំពីនោះមក ព្រះមានព្រះភាគទ្រង់តម្រិះថា បើប្រសិនជាតថាគតបានតែងតាំងកឋិនត្ថារកិច្ច ទុកពីគ្រាមុន ម៉្លេះសមភិក្ខុទាំងឡាយនោះបានលះចីវរមួយទុកនៅទីកន្លែង ជាប់មកតែស្បង់ចីវរប៉ុណ្ណោះ មាន

អត្តភាពស្រាលមិនលំបាកយ៉ាងនេះសោះឡើយ។ ហើយកឋិនត្ថារកិច្ចនេះ ព្រះពុទ្ធរាល់ព្រះអង្គ ក៏តែងអនុញ្ញាតទុកដល់សាវក ពុំដែលលះបង់ផង។ ព្រះដ៏មានព្រះភាគទ្រង់ព្រះតិរិះដូច្នេះហើយ ទើបទ្រង់ត្រាស់ហៅភិក្ខុទាំងឡាយមក រួចហើយក៏ទ្រង់អនុញ្ញាតកឋិនត្ថារកិច្ច ដោយព្រះពុទ្ធដីកាថា៖ " អនុជានាមិ ភិក្ខវេ វស្សំ វុដ្ឋានំ ភិក្ខូនំ កឋិនំ។ អត្ថរិតុំ អត្ថតំ កឋិនានំ វោ ភិក្ខវេ បញ្ច កប្បិស្សន្តិ។" ប្រែថា "ម្នាលភិក្ខុទាំងឡាយ តថាគតអនុញ្ញាតអោយភិក្ខុទាំងឡាយ ដែលបានទៅចាំវស្សារួចហើយ ទទួលក្រាលគ្រងកឋិន។ ម្នាលភិក្ខុទាំងឡាយ! កាលបើ ភិក្ខុទាំងឡាយ បានក្រាលគ្រងកឋិនហើយ នឹងបានសំរេចអានិសង្ស៥ប្រការ។"

បន្ទាប់មក ព្រះសម្ពុទ្ធទ្រង់ពុទ្ធានុញ្ញាត អោយភិក្ខុទទួលស្បង់អំពីពុទ្ធបរិស័ទ និងគហបតីទាំងឡាយ ក្នុងពេលមួយខែ កំណត់ពីថ្ងៃ១រោច ខែអស្សុជ រហូតដល់ថ្ងៃ១៥កើតពេញបូរមី ខែកត្តិក(រវាងពាក់កណ្តាលខែតុលា រហូតដល់ពាក់កណ្តាលខែវិច្ឆិកា)។ ព្រះដ៏មានព្រះភាគទ្រង់ព្រះមេត្តាប្រោសអនុញ្ញាត ភិក្ខុសង្ឃដែលអនុមោទនា និងក្រាលគ្រង កឋិននោះ បានទទួលអានិសង្ស៥ប្រការ។ ជនមានសទ្ធា ដែលបានធ្វើកឋិនទាន ឈ្មោះថា ជាអ្នកបានគោរពនូវព្រះពុទ្ធដីកាដែលទ្រង់បានអនុញ្ញាតអោយភិក្ខុសង្ឃបានទទួលអានិសង្ស៥ប្រការផង ជាអ្នកមានចិត្តអាណិតអាសូរចំពោះភិក្ខុសង្ឃ ដែលគង់ចាំវស្សាអស់មួយត្រៃមាសនោះផង និងជាអ្នកតអាយុព្រះពុទ្ធសាសនាអស់កាលជាយូរអង្វែងទៅផង។

ព្រះសម្ពុទ្ធទ្រង់សំដែងថាៈ" សុខស្ស ទាតា មេធាវី សុខំ សោ អធិគច្ឆតិ។" ប្រែថា "ជនដ៏មានប្រាជ្ញា(ណាមួយ) បានធ្វើនូវសេចក្តីសុខស្រួល (ដល់អ្នកដទៃ) ជននោះឯង រមែងបានជួបប្រទះនឹងសេចក្តីសុខស្រួល(ជាពិតប្រាកដពុំខានឡើយ)។" សេចក្តីអធិប្បាយយ៉ាងនេះថា ជនណាបានធ្វើកឋិនទាន ដែលនាំអោយព្រះភិក្ខុសង្ឃ បានអានិសង្ស៥យ៉ាង ក្នុងរវាង៤ខែ បានឈ្មោះថា ជាអ្នកអោយសេចក្តីសុខស្រួលដល់អ្នកដទៃ នៅក្នុងបច្ចុប្បន្នជាតិ ជននោះឯងតែងតែបានសុខ ក្នុងមនុស្សលោកនិងទេវលោក ក្នុងពេលអនាគត។ ដោយអំណាចផលានិសង្សនៃកឋិនទាននោះ ក្នុងអនាគតកាលជននោះនឹងបានជាឯហិភិក្ខុឬឯហិភិក្ខុនីដែលមានត្រៃចីវរកើតឡើងឯកឯង ដោយឫទ្ធិ នៅពេលបព្វជ្ជាជាបព្វជិតក្នុងសាសនាព្រះពុទ្ធអង្គណាមួយ ហើយក៏នឹងបានសំរេចមគ្គផល និព្វានក្នុងពេលបព្វជ្ជានោះ ជាពិតប្រាកដពុំខានឡើយ។

តាំងពីពេលនោះមក បុណ្យកឋិនបានក្លាយជាបុណ្យទំនៀមមួយរបស់ពុទ្ធបរិស័ទ ដើម្បីបំពេញនូវសេចក្តីត្រូវការស្បង់ចីវរដ៏វិសេសនេះ។

វេលារាត្រី មុនថ្ងៃបុណ្យកឋិន ទាយក-ទាយិកាម្ចាស់ដើមបុណ្យនិងញាតិមិត្រ នាំគ្នាយកត្រៃចីវរ និងគ្រឿងបរិក្ខារផ្សេងៗ ទៅកាន់ទីវត្តដែលគេបានទាក់ទងស្និទ្ធស្នាល រួចមកហើយ និងធ្វើកុសលខ្លះៗដូចជា: ថ្វាយបង្គំព្រះរតនត្រ័យ (អានទីព័រទី១០), អារាធនាព្រះសង្ឃចំរើនព្រះបរិត្ត (អានទំព័រទី៣១) និង ស្តាប់ព្រះសង្ឃសំដែងធម្មទេសនា (ស្តីអំពី

អានិសង្សកឋិន)។

លុះព្រឹកស្អែកឡើង ទាយក-ទាយិកា និងពុទ្ធបរិស័ទ ម្ចាស់ដើមបុណ្យនាំគ្នាទៅកាន់ទីវត្តម្តងទៀត។ ដេប្រារព្ធពិធីថ្វាយបង្គំព្រះរតនត្រ័យ សមាទានសីល៥(អានទំព័រទី២២) ឬសីល៨(អានទំព័រទី២៤) ដាក់បាត្រ ប័ង្សុកូល(អានទំព័រទី១៨៦) និងវេរភត្តប្រគេនព្រះសង្ឃ។

បន្ទាប់ពីថ្ងៃត្រង់ ទាយកនិងទាយិកា ម្ចាស់ដើមបុណ្យ ព្រមទាំងញាតិមិត្រ នាំគ្នាទូលបាត្រត្រៃចីវរ និង កាន់ទ្រនូវគ្រឿងបរិក្ខារជាបរិវារកឋិនផ្សេងៗ ដើរប្រទក្សិណព័ទ្ធជុំវិញរោងឧបោសថ(ឬព្រះវិហារ) ចំនួន៣ជុំ។ អ្នកទាំងអស់ត្រូវបាននាំមុខដោយក្រុមភ្លេងកំប្លែងឆៃយ៉ាំ និងភិក្ខុសង្ឃសូត្រធម៌ ព្រមទាំងមានពុទ្ធបរិស័ទទាំងហ្វូងដង្ហែតាមពីខាងក្រោយ។

បន្ទាប់មក ត្រៃចីវរ និងគ្រឿងបរិក្ខារជាបរិវារកឋិន ត្រូវបានវេរប្រគេនចំពោះភិក្ខុសង្ឃ ដោយអនុលោមតាមក្បួននិងទម្រង់ការដែលបានបញ្ញត្តិទុកមក(អានទំព័រទី៨៧,៨៨,៨៩,៩០ និង៩១)។

ពេលពិធីវេរអង្គកឋិនបានចប់សព្វគ្រប់ហើយគឺជានាទីរបស់សង្ឃដើម្បីជួបជុំគ្នាសារជាថ្មីឡើងវិញ នៅក្នុងរោងឧបោសថឬព្រះវិហារ និងដើម្បីប្រារព្ធពិធីឆ្លងកឋិនទាន(សម្ពោធកឋិន) ទៅតាមវិន័យបញ្ញត្តិ។

តាមធម្មតា ព្រះចៅអធិការឬថេរភិក្ខុ នៅក្នុងវត្តត្រូវធ្វើសំណូមពរអោយមានភិក្ខុមួយរូប ជាតំណាងសង្ឃ ដើម្បីអនុមោទនានិងក្រាលគ្រងអង្គកឋិន។ ជាយថាហេតុ ភិក្ខុអង្គណាដែលមានស្បង់ចីវរហែកដាច

នឹងត្រូវជ្រើសរើសឡើង។ រោងឧបោសថ ឬព្រះវិហារ គឺជាកន្លែងសំរាប់ធ្វើសង្ឃកម្មពិសេស (សម្ភោធកឋិន)នេះ។ ពិធីនេះ ដោយឡែកសំរាប់តែសង្ឃ ពួកគ្រហស្ថមិនអាចចូលរួមជាមួយបានឡើយ។

ពុទ្ធបរិស័ទមានជំនឿថា ការធ្វើបុណ្យកឋិន នៅវត្តដែលមានព្រះវិហារបញ្ចុះសីមារួចហើយ ទើបបានអានិសង្សច្រើន។

នៅប្រទេសខ្មែរ បុណ្យកឋិន គឺជាបុណ្យសប្បាយអឺកធឹក មានពណ៌ចំរុះឆើតឆាយមានទិដ្ឋភាពជាបុណ្យពុទ្ធសាសនាយ៉ាងមហោឡារិក។

ជាការពិតណាស់ បុណ្យកឋិន គឺជាឱកាសមួយ សំរាប់បណ្ដុះបណ្ដាលអំពើល្អ និងគុណធម៌ នៅក្នុងដួងចិត្តយើងគ្រប់ៗគ្នា។

# ០៨. ខែ កត្តិក (វិច្ឆិកា)

## រំលឹកដល់

- បុណ្យអុំទូក បណ្តែតប្រទីប សំពះព្រះខែ អកអំបុក
- បុណ្យទេសនាមហាជាតក៍
- ព្រះពុទ្ធបញ្ជូនភិក្ខុ៦០រូប ចេញផ្សាយពុទ្ធសាសនា
- ការបរិនិព្វាននៃព្រះអគ្គសាវក សារីបុត្រ
- បុណ្យឯករាជ្យជាតិខ្មែរ

# បុណ្យអុំទូក បណ្តែតប្រទីប សំពះព្រះខែ អកអំបុក



ជាទំនៀមតរៀងមក ជនជាតិខ្មែរតែងធ្វើពិធីបណ្តែតប្រទីប នៅពេលយប់ នៃថ្ងៃបវារណា ចេញវស្សា(បុរិបវស្សា) គឺនៅថ្ងៃ ១៥កើត ខែអស្សុជ ជារៀងរាល់ឆ្នាំ។ នៅពេលយប់ បន្ទាប់ពីព្រះសង្ឃសូត្រពាលីបវារណាចេញវស្សាចប់ហើយ អ្នកស្រុកដែលរស់នៅតាមដងទន្លេ ស្ទឹង ព្រែក ឬបឹង និយមនាំគ្នាប្រារព្ធពិធីបណ្តែតប្រទីប ដោយយកដើមចេក និងឫស្សីរចនាជាក្បូន មានសណ្ឋានដូចចេតិយ តុបតែងដោយក្រដាស់ពណ៌ និងប្រទីបតូចៗ ធ្វើពីប្រេងកាតឬប្រេងដូង។ គេតែងយកនំអន្សម នំគមនិងផ្លែឈើផ្សេងៗទៅដាក់ក្នុងក្បូនប្រទីបនោះ ហើយអូសសណ្តោងដោយទូកធំ ដែលមានព្រះសង្ឃ និងគ្រហស្ថជិះដង្ហែ រួមជាមួយក្បូនទូកដទៃច្រើនទៀត។ គេនាំគ្នាអុជទៀនធូប អធិដ្ឋានថា៖ "យើងខ្ញុំសូមបូជាចំពោះព្រះចង្កូមកែវនៃព្រះសម្ពុទ្ធ ដែលប្រតិស្ឋាននៅឯ នាគពិភព និងស្នាមព្រះពុទ្ធបាទ ដែលប្រតិស្ឋាននៅក្នុងទីទាំង៨ មានស្ទឹងនម្មទា និងភ្នំសុមនកូដ នៅលង្កាទ្វីប ជាដើម"។ ពួកគ្រហស្ថនាំគ្នា នមស្សការព្រះរតនត្រ័យ និងព្រះសង្ឃសូត្រធម៌ផ្សេងៗ មានធម៌ សរសើរព្រះពុទ្ធបាទ (ភ្លេង-ស្តា) និងពហុទេវា ជាដើម។ ពិធីបណ្តែតប្រទីប ប្រព្រឹត្តទៅនៅក្រោមពន្លឺព្រះចន្ទថ្ងៃពេញបូណ៌មី ចាំងពន្លឺពណ៌ព្រាក់ព្រាតៗ លើខ្សែទឹកហូរវិញ។ លាយឡំជាមួយនឹងសម្លេងព្រះសង្ឃសូត្រធម៌ ដ៏ពីរោះជក់ចិត្ត និងគួរជាទីមនោរម្យក្រៃលែង។

ប៉ុន្តែ សព្វថ្ងៃពិធីបណ្តែតប្រទីបតាមបែបដូនតា នេះស្ទើរតែបាត់

អស់ទៅហើយ នៅសល់តែព្រះរាជពិធីដែលព្រះមហាក្សត្រប្រោសឲ្យធ្វើនៅរាជធានីភ្នំពេញតែប៉ុណ្ណោះ។ ព្រះមហាក្សត្រខ្មែរ តែងប្រោសឲ្យពិធីបណ្ដែតប្រទីបនេះ រួមជាមួយនឹង ពិធីអុំទូក សំពះព្រះខែ និង អកអំបុក ដែលរាប់បញ្ចូលទៅក្នុងរាជពិធីទាំងសមាសមួយ សំរាប់ប្រទេសផង។ ពិធីទាំងអស់នេះ ធ្វើឡើងក្នុងរយៈ៣ថ្ងៃ គឺថ្ងៃ១៤,១៥កើត និង១រោច ខែកត្តិកជារៀងរាល់ឆ្នាំ។ កន្លែងធ្វើបុណ្យធំជាងគេ ក្នុងប្រទេសខ្មែរ ឋិតនៅទន្លេចតុមុខ ត្រង់ដំណាក់ផែ ខាងមុខព្រះរាជវាំង។

ក្នុងថ្ងៃនីមួយៗ ចាប់ពីម៉ោង៨រសៀលទៅ មនុស្សម្នាស្លៀកពាក់ស្អាតបាត ចំរុះពណ៌ បានមកឈរត្រៀបត្រាយ៉ាងណែនណាន់តាន់តាប់តាមដងទន្លេ រង់ចាំមើលការប្រណាំងទូកកងនិងទូកម៉ូង(១) តាមរបៀបប្រណាំងប្ដូរគ្នា មួយគូម្ដងៗចំនួន៣លើក។ សម្លេងស្រែកហ៊ោកញ្ជ្រៀវទ្រហឹងអឺងកង គឺលចុះគឺលឡើង លាយឡំជាមួយសម្លេងដូរ្យតន្ត្រីពិណ-ពាទ្យ ប្រគំយ៉ាងពីរោះនិងឮសូររងំនៅលើផែបណ្ដែត ក្រោមអធិបតីភាពដ៏ខ្ពង់ខ្ពស់របស់ព្រះមហាក្សត្រ។

ពេលរាត្រី ចាប់ពីម៉ោង៧ទៅ មានអុជប្រទីបបារ៉ាលា នៅដំណាក់ផែ និងនៅតាមទូក កាណូត កប៉ាល់ នានា តាមបណ្ដោយមាត់ទន្លេ។ ក្បួនប្រទីបដែលក្រសួង ឬសហគ្រាសនីមួយៗ បានតាក់តែងឡើងជាក្បូរក្បាច់រចនា និងរូបភាពផ្សេងៗដោយភ្លើងអគ្គិសនីចំរុះពណ៌ បានបណ្ដែតយឺតៗតាមចរន្តទឹកក្នុងរដូវទឹកឡើង ក្នុងរាត្រីចន្ទភ្លឺថ្ងៃ ១៤កើត ធ្វើអោយ

ទស្សនិកជន តាមមើលមិនដាក់ភ្នែក។ ពេលជិតអធ្រាត្រ ស្នូរកាំជ្រួចក៏លាន់ឮឡើង ពន្លឺចំរុះពណ៌ចាំងជះដូចពេជ្រពណ្ណរាយ ក្នុងលំហអាកាសវេហា ក្រោមខ្យល់ជំនោរកត្តិកដ៏ត្រជាក់បក់មករំភើយៗ អបដោយចំរៀងសក្រវាទី(ចុះដៃ) និងភ្លេងមហោរីប្រគំ គួរអោយស្រណោះជក់ចិត្ត។

ថ្ងៃទី២ គឺថ្ងៃ១៥កើត មានរៀបចំពិធីសំពះព្រះខែ(២)។ គេបានយកកំរាលព្រំល្អប្រណិត ទៅក្រាលនៅត្រង់មាត់ច្រាំងទន្លេចតុមុខ ខាងមុខព្រះសក្យមុនីចេតិយ ដោយមានរៀបចំគ្រឿងសក្ការបូជាផ្សេងៗ មានអំបុកស្រូវថ្មី ចេកទុំ ដូងខ្ចី និងនំចំណី ជាច្រើនមុខ ដាក់ថ្វាយព្រះខែ និងព្រះបរមពោធិសត្វ ដែលទ្រង់យាងមកសន្ថិតនៅក្នុងរង្វង់ដួងព្រះចន្ទ ព្រមទាំងថ្វាយអង្គរ ដល់ពពួកទេវតាទាំងឡាយផង។ ហោរា ឬ ព្រះរាជតំណាងខាងសាសនា បានប្រកាសបួងសួងដល់ពពួកទេវតា សូមអោយជួយបីបាច់ថែរក្សាប្រទេសនិងប្រជាពលរដ្ឋខ្មែរ បានប្រកបតែនឹងសេចក្តីសុខ សន្តិភាព និង សំបូរ សប្បាយ រុងរឿង ជានិច្ចនិរន្តរ៍។

បន្ទាប់មក មានប្រារព្ធពិធីអុជទៀនសម្រក់មើលដំណក់ ដែលជានិមិត្តរូប នៃការបង្អុរទឹកភ្លៀង សំរាប់ឆ្នាំក្រោយ ប្រចាំខេត្តនីមួយៗ ក្នុងព្រះរាជណាចក្រកម្ពុជា។

បុណ្យទាំងបីប្រភេទនេះតែងប្រព្រឹត្តទៅក្នុងឱកាសតែមួយ យ៉ាងអធិកអធមសមរម្យល្អ និងសប្បាយរីករាយ ក្រៃលែង ហើយដែលប្រជាពលរដ្ឋខ្មែរគ្រប់រូបចាត់ទុកជាបុណ្យទំនៀម នាំគ្នាប្រារព្ធជារៀងរាល់ឆ្នាំ។

ពិធីបណ្តែតប្រទីប សំពះព្រះខែ និង អកអំបុក មានរឿងព្រេងពីបុរាណតំណាលមកថា៖

## ក. រឿងបណ្តែតប្រទីប

ក្នុងកាលពីព្រេងនាយ នាខាងដើមភទ្ទកប្ប យើងនេះ មានសត្វក្អែកសញ្ញីឈ្មោល បានកាច់សំបុកពងនៅនឹងឈើមួយដើមដែលដុះជាប់នឹងឆ្នេរសមុទ្រ ហើយបានបញ្ចេញពង តាមធម្មជាតិរបស់ខ្លួន ចំនួន៥។ ថ្ងៃមួយ មានភ្លៀងព្យុះបក់ពោកយ៉ាំងខ្លាំងបណ្តាលអោយត្វចយកសំបុកបក្សីក្អែក ព្រមទាំងពងធ្លាក់ចុះទៅក្នុងទឹកសមុទ្រ។

លុះពេលល្ងាច ក្អែកញីឈ្មោលហើរត្រឡប់មកពីរកចំណីវិញ រកសំបុកនិងពងមិនឃើញ ឃើញតែស្នាមសំបុករហ៊ត់ររហ៊យ ក៏គិតយល់ថា 'ពិតជាការអន្តរាយនេះបណ្តាលមកអំពីខ្យល់ព្យុះហើយ'។ ប៉ុន្តែក្អែកសញ្ញីឈ្មោលនោះ នៅមិនអស់ចិត្តសោះ ចេះតែសញ្ជប់សញ្ជឹង គិតក្រែងដូច្នេះដូច្នោះ ជាដើម ក៏វិយោគពោកប្រាណ ព្រោះស្តាយស្រណោះពងទាល់តែស្លាប់ទាំងគូទៅ។ ដោយអំណាចនៃការស្មោះត្រង់ ធ្វើអោយក្អែកសទាំងពីរទៅកើតជាព្រះឥន្ទ្រាធិរាជ នៅឯត្រៃត្រឹង្សសួគ៌ាទេវលោកឋាន។

ចំពោះពងក្អែកទាំង៥ ដែលធ្លាក់ទៅក្នុងទឹកសមុទ្រនោះអណ្តែតទៅទើក្នុងកន្លែងទីទៃៗពីគ្នា។ ពងមួយទៅក្នុងកណ្តាប់ដៃនៃសត្វមាន់ ពងមួយទៅស្តេចនាគ ពងមួយទៅអណ្តើក ពងមួយទៅគោ និងពងមួយទៅ

ខ្លា។ សត្វទាំង៥បានយកទៅបីបាច់ថែរក្សានៅក្នុងទីអាស្រ័យរៀងៗខ្លួន។ លុះដល់កំណត់ពងទាំងនោះញាស់ស្រាប់តែកើតមកសុទ្ធតែជាកូនមនុស្សប្រុសទាំងអស់។ សត្វជាអាណាព្យាបាលទាំងអស់នោះបានឃើញហេតុដ៏អស្ចារ្យដូច្នោះ ក៏នំនាំគ្នាបីបាច់ថែរក្សា ដោយយកចិត្តទុកដាក់បំផុត។

លុះទារកទាំង៥នោះ មានវ័យវឌ្ឍនាការ ធំឡើង ក៏មានចិត្តគិតឃើញរៀងៗខ្លួនថា៖ "អាត្មាអញជាមនុស្សសោះ ចុះហេតុអ្វីបានជាមាតាបិតាសុទ្ធតែជាជាតិតិរច្ឆានដូច្នេះ?" គិតសព្វគ្រប់ទៅទើបរកមធ្យោបាយរៀងៗខ្លួន លាមាតាបិតាចិញ្ចឹមទីទៃៗរបស់ខ្លួន ដើម្បីនឹងដើរស្វែងរករៀនសិល្បៈសាស្ត្រ សន្សំកុសលកសាងពុទ្ធភូមិ រៀងៗខ្លួន។ សត្វជាអាណាព្យាបាលទាំង៥ មានបណ្ដាំតែម្យ៉ាងដូចៗគ្នា ថា៖ "បើកូនចេញទៅធ្វើការកសាងពុទ្ធភូមិ បានសំរេចនៅ ថ្ងៃណា វេលាណា យើងសូមផ្ញើឈ្មោះរបស់យើង អោយនៅជាប់នឹងឈ្មោះអ្នកផង!"។

ព្រោះតែហេតុនោះឯង បានជាក្នុងភទ្ទកប្ប យើងនេះ មានព្រះពុទ្ធ៥ព្រះអង្គ ដែលមានព្រះនាមថា: កកុសន្ធោ (មាន់)១, កោនាគមនោ (នាគ)១, កស្សបោ (អណ្ដើក)១, គោតមោ (គោ)១ និង សិរីអារ្យមេត្តេយ្យោ (ខ្លា)១ ដែលបានត្រាស់ឡើងតាមលំដាប់បងប្អូននិងបារមី ហើយយកនាមសត្វទាំង៥ ដែលជាអ្នកចិញ្ចឹម មកប្រកបភ្ជាប់នឹងព្រះនាមរបស់ព្រះអង្គ តាមបណ្ដាំក្នុងរឿងតំណាល ដូចបានពោលមកហើយនេះ។

មាណពទាំង៥ កាលចេញចាកឋានមាតាបិតាចិញ្ចឹម រៀងៗខ្លួន

មកនោះ ក៏បានមកជួបជុំគ្នាទាំង៥ នៅក្នុងកន្លែងមួយ។ កាលសាកសួរទៅឃើញថាមានគំនិត និងហេតុភេទដូចគ្នា ក៏សុំរាប់អានគ្នា ធ្វើជាបងប្អូន រួមរស់ជាមួយគ្នារៀងរហូតទៅ។

ថ្ងៃមួយ ពេលដែលមាណពទាំង៥កំពុងតែជជែកគ្នាដើម្បីរកមាតាបិតាបង្កើតនោះ ព្រះឥន្ទនិងអគ្គមហេសីដែលជាអតីតមាតាបិតាដើមនោះ ក៏និម្មិតខ្លួនជាក្អែកសញ្ញីឈ្មោល ហើរមកទំលើមែកឈើជិតនោះ ហើយសាសព្ទប្រាប់មាណពទាំង៥ អោយបានដឹងប្រាកដថា៖ "ខ្លួននេះហើយជាមាតាបិតាបង្កើត"។ មាណពទាំង៥ក៏លុតជង្គង់ថ្វាយបង្គំចំពោះបុព្វបុរសទាំងពីរ ថ្លែងសេចក្តីស្តាយចំពោះការមិនបានទៅនៅបំរើឪពុកម្តាយនោះ។ ក្អែកសទាំងគូមិនអនុញ្ញាតអោយទៅនៅជាមួយទេគ្រាន់តែនិយាយផ្តាំថា៖ "បើកូនរាល់គ្នារលឹកអាល័យយើងខ្លាំង ហើយចង់បូជាអ្វីដល់យើង ទាំងពីរនាក់ ចូរកូនគូសសញ្ញាខ្វែងជើងក្អែកនៅលើគ្រប់វត្ថុដែលជាសំណែននោះ ហើយឧទ្ទិសអោយយើងទៅ។ អំពើនេះ មុខជានឹងបានផ្សាយផលដល់យើង មិនខានឡើយ"។ ថាតែប៉ុណ្ណេះក៏អន្តរធានបាត់ទៅ។

មាណពទាំង៥បានចាំបណ្តាំមាតាបិតា ហើយក៏នាំគ្នាទៅរករៀនសិល្បៈសាស្ត្រ បួសជាតាបស ចំរើនធម៌ ក្នុងព្រៃ។ ខាងក្រោយមក ក៏នាំគ្នាធ្វើបុណ្យសុន្ទរទាន រំលឹកគុណតាមបណ្តាំនោះ ជាដរាប ព្រមទាំងគូសខ្វែងជើងក្អែកលើវត្ថុជាសំណែន។ សែនរួចក៏បណ្តែតតាមខ្សែទឹកទៅដើម្បីបូជាក្អែកសញ្ញីឈ្មោល រហូតជាប់ជាទំនៀមមកដល់សព្វថ្ងៃនេះ។

២. រឿងសំពះព្រះខែ

កាលព្រះពុទ្ធជាបរមគ្រូនៃយើង ទ្រង់ត្រាច់រង្គាត់អន្ទោលជាតិក្នុងវាលវដ្តសង្សារនៅឡើយនោះ ក្នុងជាតិមួយ ព្រះអង្គទ្រង់បានយោនយកកំណើតជាសត្វទន្សាយ។ នៅរាល់ថ្ងៃពេញបូរមី ទន្សាយពោធិសត្វតែងតែសមាទាន រក្សាឧបោសថសីល ដោយឧទ្ទិសជីវិតថ្វាល់ព្រះអង្គជាទានបរមត្ថបារមី ដើម្បីបំពេញពោធិសត្វសម្ភារ អោយបានត្រាស់ដឹងជាព្រះពុទ្ធ។ នៅថ្ងៃពេញបូរមីមួយ ទន្សាយពោធិសត្វក្រឡេកឃើញព្រះចន្ទមានពន្លឺភ្លឺថ្លាស្រស់សោភា ក៏មានសេចក្តីជ្រះថ្លា ប្រកបដោយមេត្តាចិត្ត គិតយ៉ាងដូច្នេះថា៖ "បើអ្នកណាត្រូវការសាច់ ឈាមរបស់អាត្មាអញ ធ្វើជាអាហារ អាត្មាអញនឹងបំពេញជីវិតមានភ្លាម"។

ក្នុងគម្ពីរចរិយាបិដកនិទានថា៖ "មានសត្វ៤ពួកគឺ ចចក១ ស្វា១ ភេ១ និងទន្សាយ១ កាលបើជិតដល់ថ្ងៃពេញបូរមី តែងនាំគ្នាសមាទាននូវឧបោសថសីល ហើយដើរស្វែងរកចំណីអាហារចិញ្ចឹមជីវិតរៀងៗខ្លួន។

ចចកចេញស្វែងរកអាហារ តាមលំដាប់ភូមិអ្នកស្រុក បានប្រទះសាច់ដែលគេអាំងទុក។ ចចកស្រែកសួររកម្ចាស់អស់វារៈ៣ដងមិនឃើញឆ្លើយ ក៏ពាំសាច់នោះយកមកទុក នៅកន្ទែងរបស់ខ្លួន។

ស្វាចេញស្វែងរកអាហារ តាមឆ្នេរសមុទ្រ បានប្រទះឃើញផ្លែស្វាយទុំមួយ នៅក្នុងព្រៃទៀបមាត់សមុទ្រ។ ស្វាស្រែកសួររកម្ចាស់អស់វារៈ៣ដង មិនឃើញឆ្លើយ ក៏ពាំផ្លែស្វាយទុំនោះយកមកទុកនៅកន្ទែង

របស់ខ្លួន។ ស្មាគិតថា បើមានស្មូមយាចកណាម្នាក់ ចូលមកសូមដល់កន្លែង ក្នុងពេលឥឡូវនេះ អាត្មាអញនឹងអោយផ្លែស្វាយទុំនេះ ដើម្បីនឹងបំពេញបារមីទាន ក្នុងថ្ងៃពេញបូរមីនេះ។

គេ ចេញស្វែងរកអាហារ តាមឆ្នេរស្ទឹង បានប្រទះឃើញត្រីឆ្អិន១ ដែលគេកប់ទុកក្នុងពំនូកខ្សាច់។ ភេ ស្រែកសួររកម្ចាស់ អស់រយៈ៣ដង មិនឃើញឆ្លើយ ក៏ពាំយកត្រីឆ្អិននោះមកទុកនៅកន្លែងរបស់ខ្លួន។ ភេគិតថា បើមានអ្នកណាចូលមកសូមត្រីឆ្អិននេះអញនឹងអោយត្រីនេះជាទាន។

ឧន្សាយពោធិសត្វ មិនបានចេញស្វែងរកអាហារ ដូចសត្វទាំង៣នោះទេ នៅក្រាបសម្ងំក្នុងកន្លែង គ្រាន់តាំងអធិដ្ឋានក្នុងចិត្តថា៖ "ថ្ងៃនេះជាថ្ងៃសីល អញនឹងរក្សាឧបោសថ។ ពេលនេះ បើមានស្មូមយាចកណាចូលមកដល់កន្លែងអាត្មាអញ ហើយត្រូវការសាច់ ឈាម ឆ្អឹង ស្បែក ... របស់អញៗនឹងបូជាជូនភ្លាម។ កុំថាឡើយតែសាច់ ឈាម ស្បែក ឆ្អឹង សូម្បីតែស្មូមយាចកនោះត្រូវការនូវជីវិតរបស់អញ ក៏អញសុខចិត្តធ្វើជីវិតបរិច្ចាគដែរ ដើម្បីជាទានបារមី។ គ្រាន់តែឧន្សាយពោធិសត្វនឹកក្នុងចិត្តដូច្នេះក៏ក្តៅទៅដល់អាសនៈរបស់ព្រះឥន្ទ្រាធិរាជ។ ព្រះឥន្ទ្រាធិរាជក៏បើកទិព្វចក្ខុ មើលចុះមកឋានកណ្តាល ហើយក៏បានឃើញសត្វទាំង៤ កំពុងតែមានបំណងចង់បំពេញទានបារមី ក្នុងថ្ងៃនេះ។

ព្រះឥន្ទ្រាធិរាជក៏កាឡាខ្លួនធ្វើជាព្រាហ្មណ៍ចាស់ម្នាក់ ហោះចុះមក ហើយដើរកាន់ឈើច្រត់ ធ្វើដូចជាអស់កម្លាំងហេវហត់ អត់អាហារ ជា

ច្រើនថ្ងៃមកហើយ តម្រង់មកកន្លែងដែលចចកអាស្រ័យនៅ។ ចចកបាន អញ្ជើញតាព្រាហ្មណ៍ចូលមក ហើយក៏សុំជូនសាច់អាំងពិសា ដើម្បីយក កម្លាំងធ្វើដំណើរទៅមុខទៀត។ ព្រាហ្មណ៍ចាស់ក៏ទទួលយកសាច់អាំងពី ចចក ហើយជូនពរសព្ទសាធុការ។ បន្ទាប់មក ព្រាហ្មណ៍ចាស់និយាយ ទៅកាន់ចចកថា៖ "ខ្ញុំសូមផ្ញើសាច់អាំងនេះ ទុកនឹងចៅឯងសិន តែបើមិន ឃើញតាត្រឡប់មកវិញទេនុ៎ះ ចៅទទួលទានខ្លួនឯងចុះ"។ តាព្រាហ្មណ៍ ក៏លាចចកធ្វើដំណើរទៅកាន់កន្លែងស្វា ហើយនឹងភេទៀត។ ស្វាក៏បាន អោយផ្លែស្វាយទុំ និងភេក៏បានអោយត្រីឆ្អិន ទៅតាព្រាហ្មណ៍ៗក៏បានជូន ពរសព្ទសាធុការដល់ស្វានិងភេ ហើយសុំផ្ញើផ្លែស្វាយទុំ និងត្រីឆ្អិននោះ ទុកសិន ដូចជាសត្វចចកដែរ។

ចុងក្រោយបង្អស់ តាឥន្ទ្រព្រាហ្មណ៍បានទៅដល់កន្លែង ដែល ទន្សាយពោធិសត្វអាស្រ័យនៅ ហើយសុំអាហារទទួលទាន។ ទន្សាយ ពោធិសត្វឆ្លើយថា៖ "ខ្ញុំគ្មានវត្ថុអ្វីក្រៅពីសាច់-ឈាមរបស់ខ្ញុំផ្ទាល់ប៉ុណ្ណោះ ទេ បើតាត្រូវការខ្ញុំនឹងបូជាជីវិតទានជូនភ្លាម"។ ប៉ុន្តែ តាឥន្ទ្រព្រាហ្មណ៍ ឆ្លើយតបថា៖ "ខ្លួនខ្ញុំកាន់សីលយូរហើយ មិនអាចសម្លាប់សត្វបានទេ"។ ទើបទន្សាយពោធិសត្វ បង្គាប់ព្រាហ្មណ៍អោយបង្កាត់ភ្លើងឆេះពេញទំហឹង ឡើង រួចក៏រលាស់ខ្លួន លោតចូលក្នុងភ្លើងសម្លាប់ខ្លួន ដើម្បីអោយបាន សាច់ដល់ព្រាហ្មណ៍បរិភោគ។ ប៉ុន្តែ មុននឹងលោតចូលទៅក្នុងគ្នក់ភ្លើង នោះ ព្រះអង្គអធិដ្ឋានថា សុំអោយព្រះឆាយាលក្ខណ៍(ស្រមោល)របស់

ព្រះអង្គទៅប្រជិស្ឋាន ផ្ចិតជាប់នៅនឹងមណ្ឌលព្រះចន្ទ រហូតលុះទីបំផុតកប្បដោយអានុភាពនៃទានបរមត្ថបារមីនោះ។ ពេលទន្សាយពោធិសត្វលោតចូលទៅក្នុងភ្នក់ភ្លើង ស្រាប់តែភ្លើងរលត់ឈឹង បែរជាលេចចេញផ្កាឈូកមកទ្រព្រះអង្គវិញ។

អាស្រ័យរឿងនេះ ទើបបានជា រូបភាពទន្សាយ មានប្រាកដនឹងមណ្ឌលព្រះចន្ទ ដូចដែលយើងមើលឃើញសព្វថ្ងៃនេះ។

លុះចំណេរក្រោយមក បណ្ដាជនក៏នាំគ្នារំលឹក កំណើតទន្សាយពោធិសត្វនេះ ដោយធ្វើបុណ្យ ឈ្មោះ "*សំពះព្រះខែ* ឬ *បូជាព្រះចន្ទ*" គឺសំពះព្រះឆាយាលក្ខណ៍ព្រះពោធិសត្វ នោះឯង ព្រមទាំងនាំគ្នាជ្រើសរើសចំណីអាហារណាជាទីគាប់ចិត្ត តម្រូវតាមអធ្យាស្រ័យនៃសត្វទន្សាយ មានៈ អំបុក ចេក ដំឡូង ដូង ត្រាវ ជាដើម យកមកឧទ្ទិសថ្វាយផងនិងជាហូរហែជាប់ជាទំនៀមទម្លាប់រហូតមកដល់សព្វថ្ងៃនេះ។

ក្នុងរឿងទសជាតក គម្ពីរតិកនិបាត ព្រះពុទ្ធទ្រង់ប្រជុំជាតកថា៖ "ចចក បានសជាតិជាព្រះអានន្ទ, ស្វា បានសជាតិជាព្រះសារីបុត្រ, ភេ បានសជាតិជាព្រះមោគ្គល្លាន និងទន្សាយគឺរូបតថាគតផ្ទាល់នេះឯង។"

## គ. អកអំបុក

ជនជាតិខ្មែរ បានភ្ជាប់ ពិធីអកអំបុក មួយទៀត ទៅនឹង បុណ្យសំពះព្រះខែនេះ ដើម្បីបង្ហាញពីការបានទទួលភោគផល ក្នុងមួយឆ្នាំៗ។

នៅថ្ងៃពេញបូណ៌មី ខែកត្តិក ក្នុងវេលាយប់ អាចារ្យឬគណៈកម្មការវត្ត បានចាត់ចែងអោយមានការដាល់អំបុកប្រណាំងគ្នា។ យុវជនយុវតីនាំគ្នារៀបចំចង្ក្រាន អំបែង និង ត្បាល់ យ៉ាងហោច១០ក្រុម លឹងស្រូវ១តៅក្នុង១ក្រុម និងដាល់អំបុកប្រណាំងគ្នា រួចយកចង្អេរមកអុំសំរាំងប្រណាំងគ្នាទៀត។ ចាប់តាំងពីព្រលប់រហូតដល់ខែត្រង់ ទើបដាល់បានអំបុកគ្រប់គ្រាន់ យកមករៀបចំពិធីបុណ្យ។ អំបុក ដែលបានសំរាំងល្អហើយ ត្រូវចែកជា២ចំណែក។ មួយចំណែកទុកវេរប្រគេនព្រះសង្ឃពេលព្រឹកស្អែក និងមួយចំណែកទៀត គេយកមកដាក់ក្នុងថ្លសតាំងនៅលើតុ សំរាប់អកប្រណាំងគ្នា។ គណៈកម្មការបានចាត់ចែងរៀបចំអោយមានអំបុក ចេកទុំ ទឹកដូង ស្លឹកត្នោត និងផ្លែឈើដែលគេដាំបណ្តុះបាន មកតាំងលើតុវែង ដើម្បីប្រារព្ធពិធីអកអំបុក អោយបានសប្បាយរីករាយ និងអឹកធឹក។ អ្នកអកអំបុកគឺយុវជន អ្នកបង្អក(បញ្ចុក)អំបុកឬចេកគឺយុវតី កូនអ្នកស្រុក។ ពេលឮសម្លេងជួងឬស្គរជាសញ្ញា យុវតីចាប់ក្តាប់អំបុកបង្អកចូលក្នុងមាត់យុវជន បង្អកហើយបង្អកទៀតដរាបដល់ហៀរចេញក្រៅមាត់ កំពុំបខ្ទាត់ខ្ទាយ។ យុវតីបង្អកផង ស្រែកសួរបញ្ជាក់ផងថា 'ពេញហើយឬនៅ?' ឬ 'ភ្លៀងឬមិនភ្លៀង?'។ ចំណែកឯ យុវជនខំប្រឹងលេបអំបុកទាំងឈ្ងប់ ឬក៏គក់ទ្រូងឆ្លើយទាំងមាត់គ្រល។ និងបើកភ្នែកក្រលូងៗថា 'ពេញហើយៗ! ពេញបរិបូណ៌ហើយៗ!' ឬក៏ថា 'ភ្លៀងហើយៗ!'។ បើក្រុមណាបានឈ្នះហើយ ក៏នាំគ្នាទះដៃស្រែកហោកញ្ជ្រៀវ យ៉ាងសប្បាយរីករាយ។

អ្នកស្រុកខ្មែរ បានជានាំគ្នាប្រារព្ធពិធីសំពះព្រះខែ_អកអំបុក នៅថ្ងៃពេញបូរមី ខែកត្តិកនេះ ព្រោះជាពេលដំណាច់រដូវវស្សាផង ជាពេលសំបូរដោយផលដំណាំមានៈអំបុក ចេក អំពៅ ដំឡូង ដូង ត្រាវផង។

ជាពិសេស ក្នុងគោលបំណង ថែរក្សាប្រពៃណីព្រះពុទ្ធសាសនាអោយបានគង់វង់យូរអង្វែងផង និង ជួយពង្រឹងស្មារតីយុវជន_យុវតីខ្មែរអោយចេះសាមគ្គីបង្កបង្កើតផលកសិកម្ម និងស្រឡាញ់រាប់អានគ្នា ដូចជាបងប្អូនបង្កើតផង។

(១). ទូកអុំឬទូកចែវ ដែលបានជ្រើសរើសមកពីវត្តនានាតាមដងទន្លេ។
(២). នៅតាមជនបទ ស្រុកស្រែ ចំការ ឬខេត្តនានា ក៏មានប្រារព្ធពិធី "សំពះព្រះខែ_អកអំបុក"នេះ នៅថ្ងៃ១៥កើតពេញបូរមី ខែកត្តិក ដែរ។ គេបានទាំងនាំគ្នាយកផ្តិលទឹកមកដាក់មើលរូបព្រះចន្ទទៀតផង។

# ១ បុណ្យទេសនាមហាជាតក៏

ពុទ្ធបរិស័ទខ្មែរ ប្រារព្ធ បុណ្យទេសនាមហាជាតក៍ ជារៀងរាល់ឆ្នាំ ខុសគ្នាតែពេលវេលា តាមការចូលចិត្តនិងយល់ឃើញរៀងៗខ្លួន។ តំបន់ខ្លះធ្វើនៅថ្ងៃបវារណាចេញវស្សា ១៥កើតខែអស្សុជ។ តំបន់ខ្លះធ្វើនៅថ្ងៃពេញបូរមីខែកត្តិក និងតំបន់ខ្លះទៀត ធ្វើនៅថ្ងៃពេញបូណ៌មី ខែផល្គុន។ ខ្មែរយើង៧០ភាគរយ និយមធ្វើនៅថ្ងៃ១៥កើត ខែកត្តិក។ ថ្ងៃពេញបូរមីខែផល្គុន គឺជាកាលបរិច្ឆេទត្រឹមត្រូវស្របតាមសម័យពុទ្ធកាល ដែលព្រះពុទ្ធទ្រង់បានសំដែងនូវរឿង មហាវេស្សន្តរជាតក៍ នេះ ប្រោសពុទ្ធបិតា ព្រះបាទសុទ្ធោទន៍ និង ព្រះញាតិវង្សានុវង្ស ជាលើកដំបូង បន្ទាប់អំពីព្រះអង្គបានត្រាស់ដឹងនូវព្រះសម្មាសម្ពោធិញាណ។

ការប្រារព្ធបុណ្យទេសនាមហាជាតក៍ គឺធ្វើឡើងក្នុងគោលបំណងប្រារព្ធដល់ព្រះរាជបេសកកម្ម បំពេញនូវ បារមីទាន យ៉ាងឧក្រិដ្ឋ បំផុតរបស់ព្រះសម្ពុទ្ធ ក្នុងកាល ដែលព្រះអង្គទ្រង់សោយព្រះសញ្ជាតិជា ព្រះបាទស្រីវេស្សន្តរពោធិសត្វ។

ក្នុងព្រះជាតិនេះ ព្រះវេស្សន្តរពោធិសត្វទ្រង់គ្មានព្រះហឫទ័យរួញរា ក្នុងការបរិច្ចាគទានដល់ស្មូមយាចកទាំងឡាយដែលប្រាថ្នាចង់បាននូវទ្រព្យសម្បត្តិ មាសមាសប្រាក់ជាដើមនោះឡើយ។ ព្រះអង្គតែងតែបំពេញ

នូវសេចក្ដីប្រាថ្នារបស់ស្មូមយាចក ដោយព្រះទ័យជ្រះថ្លា សូម្បីតែ បុត្រ ភរិយារបស់ព្រះអង្គ ក៏ព្រះអង្គលះបង់អោយជាទានដែរ។ បើអ្នកណាចង់ត្រូវការ សូត បេះដូង ថ្លើម ប្រមាត់ សាច់ ឈាម របស់ព្រះអង្គ ក៏ព្រះអង្គអាចលះបង់ជីវិត ដើម្បីជាទានទាំងអស់។ នេះជាហេតុដ៏អស្ចារ្យ ដែលកម្ររកមនុស្សណាម្នាក់ ក្នុងលោកអាចធ្វើតាមព្រះអង្គបានឡើយ។ ព្រឹត្តិការណ៍ជីវិតដ៏អស្ចារ្យនេះ មានពណ៌នាយ៉ាងពិស្ដារ នៅក្នុងរឿងព្រះវេស្សន្ដរ គម្ពីរមហាទសជាតក៏ នោះឯង។

បុព្វហេតុដែលនាំអោយកើតជា បុណ្យទេសនាមហាជាតក៍ នេះឡើង ដោយសារមានរឿងមួយតំណាលថា៖ "សម័យមួយ មានព្រះថេរៈមួយរូប ព្រះនាម មាលីយត្ថេរ បាននិមន្ដទៅកាន់ឋានតាវតិង្ស ហើយក៏បានសន្ទនាជាមួយនឹង ព្រះសិរីអារ្យមេត្រីយ៍ទេវបុត្រ នូវរឿង ចិត្តគំនិតការងារ និងគោលបំណងរបស់មនុស្ស នៅក្នុងជម្ពូទ្វីបសព្វថ្ងៃនេះ។ លុះសន្ទនារួចហើយពេលព្រះថេរៈហៀបនឹងលាព្រះសិរីអារ្យមេត្រីយ៍ទេវបុត្រត្រឡប់មកកាន់ជម្ពូទ្វីបវិញ លោកបានផ្ដាំផ្ញើថា៖ "មហាជននៅក្នុងជម្ពូទ្វីបបើមានប្រាថ្នាចង់ទៅកើតនៅឋានតាវតិង្ស ហើយជួបនឹងខ្ញុំជា ព្រះសិរីអារ្យមេត្រីយ៍ សូមនាំគ្នាខំប្រឹងប្រែងបង្កើតអោយមានការធ្វើបុណ្យទេសនាមហាជាតក៍ យ៉ាងហោចណាស់ អោយបានម្ដង ក្នុងមួយឆ្នាំ។ នាំគ្នាស្ដាប់ព្រះធម្មទេសនានោះអោយបានចប់ ក្នុងមួយថ្ងៃ ហើយត្រូវបូជានូវគ្រឿងសក្ការៈអោយបានមួយមុខមួយពាន់ តម្រូវតាមចំនួនព្រះគាថាមួយ

ពាន់ ក្នុងរឿងមហាវេស្សន្តជាតក នោះ។ គ្រឿងបូជាមួយមុខមួយពាន់ នោះ មាន: ប្រទីប. ផ្កា. ផ្កាឈើ. ឆ័ត្រ. ផ្កាឈូកឈៀង. ផ្កាឈូកក្រហម. ផ្កាឈូកស. ផ្កាព្រលិត (បើរកផ្កាឈូកដូចពណ៌ បានពោលមកនេះមិនបានទេ អាចយកផ្កាចំប៉ាសឬក្រហម. ផ្កាម្ទិះរួត. ផ្កានគោងមកជំនួសក៏បាន) និងត្រូវបូជាដោយផ្លែឬមើមរុក្ខជាតិ មានចេក ដំឡូង ដូង ក្រូច មៀន ឬក៏ ភេសជ្ជៈ ទៀន ធូប ម្លូ ស្លា បារី ជាដើម។ បានបូជាមួយមុខមួយពាន់ ទើបកើតទាន់សាសនាព្រះសិរីអារ្យមេត្រីយ៍ខ្ញុំ ហើយនឹងបានសំរេចនូវអរហត្តបដិសម្ភិទាញាណជាព្រាកដ។ បើមនុស្សធ្វើអនន្តរិយកម្ម៥យ៉ាង មានសម្លាប់មាតា១ សម្លាប់បិតា១ សម្លាប់ព្រះអរហន្ត១ ប្រទូសព្រះពុទ្ធអោយចេញព្រះលោហិត១ និង បំបែកសង្ឃ១ ព្រមទាំងមនុស្សមានចិត្តចង់ទម្លាយព្រះសថូប. ព្រះចេតិយ. ព្រះពុទ្ធរូប. កាប់គាស់ដើមពោធិ. សម្លាប់ព្រះពោធិសត្វ. កំណាញ់ស្វិត. មិច្ឆាទិដ្ឋិជនទាំងនោះ ពិតជាមិនបានជួបនឹងសាសនារបស់ខ្ញុំឡើយ (ចំណែកឯដើមពោធិ បើគាស់យកទៅដាំក្នុងទីសមគួរឬលោះមែកអោយស្អាត និងចេតិយ ព្រះពុទ្ធរូប គម្ពីរដីកាដែលបាក់បែកពុកផុយហើយ បើជួសជុលកែលំអឡើងវិញ គ្មានទោសពៃរ៍អ្វីទេ រឹតតែបានផលល្អថែមទៀត)។"

ព្រះមាល័យត្ថេរបានឆ្លើយតបថា៖ "បើព្រះរាជសម្ភារត្រាស់បង្គាប់អោយស្តាប់មហាវេស្សន្តរជាតក៍ រហូតដល់ចប់ទាំង១៣កណ្ឌ និងអោយបូជានូវគ្រឿងសក្ការៈ មួយមុខមួយពាន់ អោយបានគ្រប់គាថាមួយពាន់

ដែរ ទើបបានទាន់សាសនារបស់ព្រះអង្គនោះ កិច្ចនេះដូចជាហួសវិស័យ នៃអ្នកទីទ័លក្រ ដែលគ្មានចង់ស្តាប់ពេកណាស់ រកកលអោយគ្នាមកស្តាប់ ផងក៏ពុំបាន បើយ៉ាងនេះ តើត្រូវប្រព្រឹត្តដូចម្តេចបានខ្ពះទៅព្រះអង្គ?"។

ព្រះសិរីអារ្យត្រាស់ថា៖ "មែនហើយ មាល័យត្តេរ! យើងនិយាយ មកនេះ ដល់ថ្នាក់ខ្ពង់ខ្ពស់ពេកហើយ។ ប៉ុន្តែ បើពុទ្ធបរិស័ទស្តាប់មិនបាន ចប់ទាំង១៣កណ្ឌទេ ស្តាប់បានតែ១ឬ២កណ្ឌ និងបូជានូវគ្រឿងសក្ការៈ មិនបានមួយមុខមួយពាន់ បានតែវត្ថុតិចតួចនោះ ក៏ជាការប្រពៃដែរ។"

ដូច្នេះ បុណ្យទេសនាមហាជាតក៍ ដែលយើងបានប្រារព្ធ តាំងពី ពេលនោះមកក៏ដោយសារតែបណ្តាំរបស់ព្រះសិរីអារ្យមេត្រីយ៍ ជាហេតុ។

របៀបធ្វើបុណ្យ

មុនថ្ងៃបុណ្យប្រមាណជា២អាទិត្យ អាចារ្យ ឬ គណៈកម្មការវត្ត ប្រកាសប្រាប់ពុទ្ធបរិស័ទចំណុះជើងវត្ត អោយមកចាប់ស្លាកកាន់អង្គ(បើ ធ្វើនៅថ្ងៃចេញវស្សា ត្រូវចាប់ស្លាកតាំងពីថ្ងៃភ្ជុំបិណ្ឌ)។ បើក្រុមណាចាប់ ស្លាកបានចំភិក្ខុអង្គណា ភិក្ខុអង្គនោះហើយ ជា មជិត្តាសភៈ ឬ ជម្ពាឌិក អ្នកសំដែងធម៌ទេសនា របស់ក្រុមគេ។ រួចមក គេនាំគ្នាចាប់ឆ្នោតកណ្ឌ ទាំង១៣ក្នុងគម្ពីរមហាជាតក៍គឺ:(១).កណ្ឌទសពរ, (២).កណ្ឌហេមពាន្ត, (៣).ទានកណ្ឌ, (៤).កណ្ឌវនប្បវេសន៍, (៥).កណ្ឌជូជក, (៦).កណ្ឌ ចូឡពន,(៧).កណ្ឌមហាពន, (៨).កណ្ឌកុមារបាពី,(៩).កណ្ឌមទ្រីបាពី,

(១០).កណ្ឌសក្កបព៌, (១១).កណ្ឌមហារាជបព៌, (១២).កណ្ឌឆក្សត្រ និង(១៣).នគរកណ្ឌ។ បើក្រុមណាមួយចាប់ឆ្នោតត្រូវចំកណ្ឌណា ត្រូវតែសំគាល់ថា កណ្ឌនោះជាកណ្ឌរបស់ក្រុមខ្លួន រួចហើយ ក្រុមនីមួយៗក៏ចាត់ចែងរៀបចំទ្រូវណ្ណាប់កាន់អង្គបំរុងទុកប្រគេន បឋិត្ថាហៈ មួយរូបៗនោះ ដោយទេយ្យទានដ៏ក្រាស់ក្រៃលនិងប្លែកៗ តម្រូវទៅតាមសាច់រឿងនៃកណ្ឌរបស់ក្រុមខ្លួននោះ។ រីឯ ធម្មកថិកអ្នកសំដែងធម្ម ក៏ដូច្នោះដែរ គឺត្រូវគ្រូចៅអធិការ ជ្រើសរើសរកភិក្ខុ-សាមណេរណា ដែលមានបញ្ញាឈ្លាសវៃ និងមានវោហាកោសល្យ អោយចាប់ស្លាកយកកណ្ឌ ហើយទេសនាទៅតាមកណ្ឌដែលខ្លួនចាប់បាននោះ។ ធម្មកថិកដែលបានទទួលឈ្មោះកណ្ឌហើយ ត្រូវយកទៅហាត់ទេសន៍អោយចាំរត់មាត់ស្ទាត់ ទាំងបាលី ទាំងសំរាយ ដើម្បីកុំអោយភ្លេចឬភ្លាំងភ្លាត់ រអាក់រអួល មិនពីរោះស្តាប់។ ប៉ុន្តែ ទោះជាពូកែចាំរត់មាត់ស្ទាត់យ៉ាងណាក៏ដោយក៏ធម្មកថិកអ្នកទេសន៍នោះត្រូវមើលសាស្ត្រាឬគម្ពីរកណ្ឌ ជាដាច់ខាត។ ត្រូវទេសន៍អោយចប់ទាំង១៣កណ្ឌ ក្នុងមួយថ្ងៃ និងអោយទាន់មុនពេលថ្ងៃលិច។

ចំពោះគ្រឿងសក្ការៈបូជា មានរៀបចំវត្ថុប្លែកៗគ្នា ទៅតាមកណ្ឌ ដូចជាកណ្ឌចូឡពន ឬកណ្ឌមហាពន ច្រើនបូជាផ្លែឈើគ្រប់មុខ មានៈ ចេក ដូង ក្រូច ល្មុត ជាដើម។ ប៉ុន្តែសព្វថ្ងៃនេះ គេច្រើនសារុបទេយ្យវត្ថុគ្រប់កណ្ឌដាក់លាយគ្នាមួយគំនរ ទុកដល់ចប់កិច្ចបុណ្យ ទើបអាចារ្យលៃលកប្រគេនលោកស្មើៗអង្គតែម្តង។

ក្នុងព្រះរាជវាំង ក៏ព្រះមហាក្សត្រនិងព្រះរាជវង្សានុវង្សប្រារព្ធពិធីទេសនាមហាជាតក៍នេះ ជាភាសាបាលីដែរ តែគេហៅថា 'ទេសនាគម្ពីរគាថាពាន់' ព្រោះជាគម្ពីរមហាជាតក៍ ដែលមានគាថាបាលីមួយពាន់។

ក្នុងថ្ងៃដំបូង ពេលល្ងាច ឬយប់ ពុទ្ធបរិស័ទនមស្សការថ្វាយបង្គំព្រះរតនត្រ័យ សមាទានសីល(អានទំព័រទី១០,២២,២៤) និមន្តព្រះសង្ឃចំរើនព្រះបរិត្ត(អានទំព័រទី៣១) និង និមន្តធម្មកថិកមួយអង្គ សំដែងធម្មទេសនា ស្ដីអំពី មាលយសូត្រ ។ លុះព្រឹកស្អែកឡើង ក៏ចាប់ផ្ដើមទេសន៍មហាជាតក៍ទៅតាមកណ្ឌ។ លុះទេសន៍ចប់កណ្ឌទាំងអស់រួចហើយ ត្រូវនិមន្តធម្មកថិកមួយអង្គទៀតទេសន៍អំពីអានិសង្សមហាវេស្សន្តរជាតក៍និងនាំគ្នាប្រារព្ធពិធីបុណ្យឆ្លង ជាកិច្ចបង្ហើយបុណ្យ។

# ព្រះពុទ្ធបញ្ជូនភិក្ខុ៦០រូបចេញផ្សាយសាសនា



ព្រះពុទ្ធប្រោសបញ្ចវគ្គិយភិក្ខុ អោយបានដល់នូវសុភមង្គលភេទី បំផុតគ្មាន។ កោណ្ឌញ្ញភិក្ខុជាអ្នកមានប្រាជ្ញាវៃឆ្លាតជាងគេ ស្តាប់ព្រះពុទ្ធ ដោយយកចិត្តទុកដាក់បំផុត និង យល់ច្បាស់នូវព្រះធម៌របស់ព្រះអង្គ។ បញ្ចវគ្គិយភិក្ខុស្នាក់នៅឥសិបតនមិគទាយវ័ននេះតែមួយរយៈខ្លីប៉ុណ្ណោះ។

ព្រឹកមួយនោះ ពេលព្រះពុទ្ធកំពុងយាងចង្ក្រម នៅក្នុងព្រៃឥសិប-តនមិគទាយវ័ន ទៀបក្រុងពារាណសី ទ្រង់ទតឃើញបុរសសង្ហារម្នាក់ ស្លៀកពាក់ហ៊ឹហារដើរចូលមក។ បន្ទាប់អំពីធ្វើគារវកិច្ចរួចមក បុរសបាន បង្គំទូលព្រះពុទ្ធអោយស្គាល់ឈ្មោះខ្លួនថា "យសកុលបុត្ត" ដែលជាបុត្រា របស់គហបតី មានឈ្មោះល្បីល្បាញម្នាក់ នៅក្នុងទីក្រុងពារាណសីនេះ។ ដោយព្រះពុទ្ធទ្រង់ឈ្វេងយល់ថា យសកុលបុត្តជាមនុស្សមានបញ្ញា និង មានសន្តាល្អ ទើបព្រះអង្គញ៉ាំងយស ដោយសំដែងនូវ អនុបុព្វិកថា គឺ៖ ទានកថាគឺការធ្វើទាន១ សីលកថាគឺការរក្សាសីល១ សគ្គកថាគឺការគិត ដល់សេចក្តីសុខក្នុងឋានសួគ៌១ ទោសនៃការប្រព្រឹត្តកាម១និងអានិសង្ស ក្នុងការចាកកាមចេញទៅបួស១។ ព្រមទាំងត្រាស់សំដែងចតុរារិយសច្ច អោយយសកាន់តែយល់ច្បាស់ និង មានចិត្តជ្រះថ្លាខ្លាំងឡើង។ ពាក្យ ប្រៀនប្រដៅរបស់ព្រះពុទ្ធ បានធ្វើអោយជីវិតចិត្តរបស់យសរំភើបរីករាយ ឥតឧបមា។ យសក៏លើកដៃទាំងគូប្រណម្យ ហើយក្រាបថ្វាយបង្គំ ដល់ ចុងព្រះបាទាព្រះពុទ្ធ រួចសុំថ្វាយខ្លួនធ្វើជាសាវករបស់ព្រះអង្គ។ ព្រះពុទ្ធ អនុមោទនា ហើយត្រាស់បង្គាប់អោយកោណ្ឌញ្ញភិក្ខុបំបួសយសកុលបុត្ត

តាមសំណូមពរ និងសេចក្ដីព្រាថ្នា។

ប៉ុន្ដែ នៅពេលរាត្រីនៃថ្ងៃនោះ បុរសចំណាស់ម្នាក់ ចូលមកកាន់សំណាក់នៃព្រះពុទ្ធ ហើយបង្គំទូលព្រះអង្គថា: បុត្ររបស់គាត់ចេញបាត់អំពីផ្ទះតាំងអំពីព្រលឹមអុរម្ល៉េះ ថាមកបង្គំគាល់ព្រះពុទ្ធ តែមិនទាន់ឃើញត្រឡប់ទៅផ្ទះវិញ ហើយមាតាក៏បានយំយែក ដោយគិតថាយសត្រូវពួកចោរប្លន់សម្លាប់តាមផ្លូវបាត់ទៅហើយ។ ព្រះពុទ្ធទ្រង់ធ្វើនិទ្ទេសអោយបិតារបស់យសអង្គុយនៅលើថ្មមួយជុំ ជិតព្រះអង្គ ដើម្បីព្រះអង្គនិទានប្រាប់នូវរឿងដែលព្រះអង្គបានជួបជាមួយយសកាលពីព្រឹកមិញនេះ។ ព្រះពុទ្ធទ្រង់បានពន្យល់ប្រាប់គហបតី អោយយល់អំពីទឹកចិត្តជ្រះថ្លា និងសេចក្ដីព្រាថ្នារបស់យសថា៖ "យសជាមនុស្សមានប្រាជ្ញា និង មានស្មារតីភ្ញាក់រលឹក និងជាអ្នកបានឃើញមាគ៌ានៃពន្លឺត្រាស់ដឹង ក្នុងបេះដូងរួចហើយ។ ឥឡូវនេះ យសមានចារឹកនឹងន មានចិត្តស្មោះត្រង់ និងសប្បាយរីករាយក្នុងព្រះធម៌ហើយ។ សូមលោកគហបតីជួយអបអរសាទរចំពោះសេចក្ដីល្អរបស់យសជាបុត្រាផងចុះ!"

បន្ទាប់មក ដោយព្រះអង្គទតឃើញចិត្តរបស់យសបិតា ថាជាអ្នកមានបញ្ញានិងមានចិត្តទន់ល្អ ទើបព្រះពុទ្ធប្រទាននូវអនុបុព្វិកថាទាំង៥និងចតុរារិយសច្ច:។ គហបតីមានអារម្មណ៍ដូចជាស្រាលខ្លួនកាលបានស្ដាប់យល់ នូវពាក្យទូន្មានរបស់ព្រះពុទ្ធរួចមក។ គហបតីក៏ក្រោកឈរ ហើយលើកដៃទាំងគូប្រណម្យសំពះ ថា៖ "បពិត្រព្រះអង្គដ៏ចំរើន! ព្រះពុទ្ធដីកា

របស់ព្រះអង្គដែលបានត្រាស់ហើយ ពីរោះពេកណាស់។ ព្រះអង្គជាអ្នកបានចាប់ផ្ការឡើងនូវរបស់ដែលគេផ្កាប់ចុះ ឬក៏បើកឡើងនូវរបស់ដែលគេបិទទុក ឬក៏ដុតបំភ្លឺនូវប្រទីបក្នុងទីងងឹត។ បពិត្រព្រះអង្គដ៏ចំរើន! ខ្ញុំព្រះអង្គសូមដល់នូវ ព្រះពុទ្ធ ព្រះធម៌ និងព្រះសង្ឃ ជាទីពឹងទីរលឹក សូមព្រះដ៏មានព្រះភាគមេត្តាទទួលខ្ញុំព្រះអង្គថាជាឧបាសករបស់ព្រះអង្គ ចាប់តាំងពីថ្ងៃនេះ តទៅផង!"

ព្រះពុទ្ធទ្រង់អនុមោទនា ហើយយសបិតាក៏បាននាមបញ្ញត្តិថាជាបឋមឧបាសក តាំងអំពីពេលនោះមក។

ពេលបិតារបស់យស កំពុងលុតជង្គង់នៅចំពោះព្រះភ័ក្ត្រព្រះពុទ្ធ យសត្ថេរក៏ចូលមកដល់។ យសគ្រងស្បង់ចីវរ ដែលមានព្រះកេសកោរ និងមានឫកពារស្រគត់ស្រគំសមរម្យល្អ។ ភិក្ខុដែលទើបនឹងបួសថ្មីញញឹមទទួលបិតា ដោយសេចក្ដីសង្ឃឹម។ យសបិតាមិនដែលឃើញបុត្ររបស់ខ្លួនសប្បាយចិត្ត ដូចថ្ងៃនេះសោះ រួចហើយក៏ពោលពាក្យយ៉ាងនេះ ថា៖ "យស! មាតារបស់លោកម្ចាស់ មានសេចក្ដីខ្សឹកខ្សួលខ្លាំងណាស់ណា! សូមលោកម្ចាស់ប្រទានជីវិតដល់មាតារបស់លោកម្ចាស់ផង!"

យសត្ថេរឆ្លើយតបវិញថា៖ "អាត្មានឹងទៅជួប ហើយចំរើនពរដល់អ្នកមានគុណ ដើម្បីអោយលោកបាត់ទុក្ខកង្វល់។ ប៉ុន្តែ អាត្មាបានប្ដេជ្ញាចិត្តដើរតាមព្រះពុទ្ធជាម្ចាស់ និងរស់នៅក្នុងជីវិតជាអ្នកបំរើដល់សព្វសត្វលោក រួចស្រេចទៅហើយ។"

បិតារបស់យសញញឹមទទួលដោយគ្មានបញ្ចេញវាចាអ្វីឡើយ រួចទើបគហបតីបង្គំទូលព្រះពុទ្ធថា៖ "បពិត្រព្រះអង្គដ៏ចំរើន! សូមព្រះដ៏មានព្រះភាគ ទទួលភត្តរបស់ខ្ញុំព្រះអង្គ ក្នុងថ្ងៃស្អែកនេះ ព្រមទាំងយស និងភិក្ខុទាំងឡាយផង។"

ព្រះពុទ្ធទ្រង់បែរព្រះភ័ក្ត្រទៅរកយសត្ថេរ ហើយក៏ទ្រង់ងក់ព្រះសិរអនុមោទនា តាមការនិមន្តរបស់យសបិតា។

ក្នុងគ្រានោះ ព្រះអរហន្ត៧អង្គ ក៏បានកើតមានឡើងក្នុងលោក។

លុះព្រឹកស្អែកឡើង ព្រះពុទ្ធនិងភិក្ខុសង្ឃ៦រូបចូលទៅកាន់លំនៅរបស់គហបតី ដើម្បីទទួលភត្ត។ នៅពេលក្រោយភត្ត ព្រះពុទ្ធទ្រង់ចាប់សំដែងធម៌ប្រោស យសមាតា និង យសភរិយា(បុរាណទុតិយាយិកា) ព្រមទាំងស្ត្រីបំរើគហបតី។ ស្ត្រីទាំងអស់បង្គំទូលព្រះពុទ្ធជាពាក្យយ៉ាងនេះថា៖ "បពិត្រព្រះអង្គដ៏ចំរើន! ព្រះពុទ្ធដីកាដែលព្រះអង្គបានសំដែងហើយនេះ ពីរោះពេកណាស់។ យើងខ្ញុំព្រះអង្គ សូមដល់នូវ ព្រះពុទ្ធ ព្រះធម៌ និង ព្រះសង្ឃ ជាទីពឹងទីរលឹក សូមព្រះអង្គទ្រង់ជ្រាបនូវយើងខ្ញុំព្រះអង្គថាជា ឧបាសិការបស់ព្រះមានព្រះភាគ ចាប់តាំងអំពីថ្ងៃនេះតទៅ។"

ស្ត្រីទាំងអស់នោះក៏បាននាមបញ្ញត្តិថា ជា បឋមឧបាសិកា ឬជាតេវាចិកាសរណគមន៍ ក្នុងព្រះពុទ្ធសាសនា តាំងអំពីពេលនោះមក។

ដំណឹងស្តីអំពីយសកុលបុត្តចូលបួសជាភិក្ខុ នៅក្នុងសំណាក់ព្រះពុទ្ធ បានលេចឮសុះសាយយ៉ាងឆាប់រហ័សបំផុត ជាពិសេសក្នុងបណ្តា

មិត្រភក្តិរបស់យសត្ថេរផ្ទាល់តែម្តង។ មិត្រស្និទ្ធស្នាលនឹងយសត្ថេរមាន៤នាក់ ដែលសុទ្ធសឹងជាបុត្រានៃត្រកូលសេដ្ឋី និងអនុសេដ្ឋី នៅក្នុងក្រុងពារាណសី គឺៈ វិមល១ សុពាហុ១ បុណ្ណជិ១ និង គវម្បតិ១។ កាលបានឮថាយសជាសំឡាញ់នៃខ្លួនបានកោរសក់និងពុកមាត់ពុកចង្កាស្លៀកដណ្តប់ដោយសំពត់កាសាយៈ(ចីវរ) ចេញអំពីផ្ទះ និងចូលបួសក្នុងភេទនៃបុគ្គល មិនមានប្រយោជន៍ដល់ផ្ទះហើយ ក៏នាំគ្នាត្រិះរិះថា ធម្មវិន័យដែលយសបព្វជ្ជានោះ មិនមែនជាធម៌-វិន័យថោកទាបឡើយ។ សំឡាញ់ទាំង៤នោះ ក៏សំរេចចិត្តបបួលគ្នាទៅជួបយសត្ថេរ នៅឯ ឥសិបតនមិគ-ទាយវ័ននោះ។

កាលបានជួបនឹងមិត្រសំឡាញ់ទាំង៤នាក់របស់លោក នៅក្នុងសួនម្រឹគរួចហើយ យសត្ថេរក៏នាំសំឡាញ់ទាំង៤ចូលទៅថ្វាយបង្គំព្រះពុទ្ធនិងពោលនូវពាក្យយ៉ាងនេះថា៖ "បពិត្រព្រះអង្គដ៏ចំរើន! សំឡាញ់របស់ខ្ញុំព្រះអង្គ ជាគ្រហស្ថទាំង៤នាក់នេះឈ្មោះ វិមល១ សុពាហុ១ បុណ្ណជិ១ និងគវម្បតិ១ ក៏ជាបុត្រក្នុងត្រកូលសេដ្ឋីនិងអនុសេដ្ឋីក្នុងក្រុងពារាណសីនេះដែរ។ មិត្រទាំង៤នៃខ្ញុំព្រះអង្គនេះ សុទ្ធសឹងជាមនុស្សល្អជាទេ សូមទ្រង់ព្រះមេត្តាប្រោសជួយបើកភ្នែកដល់សំឡាញ់នៃខ្ញុំព្រះអង្គទាំងអម្បាលនេះ អោយយល់ដឹងនូវមាគ៌ានៃពន្លឺត្រាស់ដឹងផង។"

ព្រះពុទ្ធទ្រង់អនុមោទនា និងសំដែងនូវអនុបុព្វីកថានិងចតុរារិយ-សច្ចៈ ញ៉ាំងអ្នកទាំង៤អោយបានឃើញ បានដល់ បានត្រាស់ដឹង បាន

ជឿសិប់នូវព្រហ្មចរិយធម៌ ឆ្ងកាត់ការមន្ទិលសង្ស័យ ឈប់ជឿបុគ្គលឯណា ក្រៅអំពីព្រះសាស្តា ទើបនាំគ្នាក្រាបថ្វាយបង្គំព្រះពុទ្ធ ដោយពាក្យយ៉ាងនេះថា៖ "បពិត្រព្រះសាស្តាដ៏ចំរើន! យើងខ្ញុំព្រះអង្គទាំង៤នាក់នេះ សូមបានបព្វជ្ជា និងឧបសម្បទា ក្នុងសំណាក់ព្រះដ៏មានព្រះភាគផង!"

ព្រះសាស្តាទ្រង់ពុទ្ធានុញ្ញាត ហើយទ្រង់ត្រាស់ថា៖ "ម្នាលអ្នកទាំងឡាយ! សាសនធម៌ព្រះពុទ្ធបានពោលល្អហើយ ចូរអ្នកទាំងឡាយ នាំគ្នាប្រព្រឹត្តព្រហ្មចរិយធម៌ ដើម្បីធ្វើនូវនិព្វានជាទីបំផុតនៃទុក្ខដោយប្រពៃចុះ។"

បន្ទាប់មក ព្រះពុទ្ធទ្រង់ទូន្មានភិក្ខុបួសថ្មីទាំង៤រូបដោយធម្មីកថា។ កាលបានស្តាប់នូវធម្មីកថារួចហើយ ភិក្ខុបួសថ្មីទាំង៤រូប ក៏មានចិត្តបាកផុតអាសវៈទាំងពួង ឥតមានជាប់ជំពាក់ដោយឧបាទានអ្វីទៀតសោះឡើយ ហើយក៏បានសំរេចជាព្រះអរហន្ត ក្នុងពេលនោះឯង។

ដូច្នោះក្នុងគ្រានោះ ព្រះអរហន្ត១១អង្គបានកើតឡើងក្នុងលោក។

លំដាប់អំពីនោះមក មានមិត្រសំឡាញ់របស់យសត្ថេរចំនួន១២០នាក់ទៀត ដែលជាអ្នករស់នៅក្នុងទីជនបទ ក្នុងត្រកូលផ្សេងៗ ក៏បានឮដំណឹងថាយសជាសំឡាញ់នៃខ្លួនបានចូលបួសក្នុងសំណាក់ព្រះពុទ្ធដែរ។ អ្នកទាំង១២០រូបនោះ ក៏នាំគ្នាត្រិះរិះ តាមទំនងមិត្ររបស់យសទាំង៤នាក់ពីមុនដែរ រួចហើយក៏សំរេចចិត្តនឹងគ្នាថា ពួកយើងនឹងទៅជួប យសត្ថេរ ក្នុងវេលាព្រឹក នាថ្ងៃស្អែកនេះតែម្តង។

យសត្ថេរ កាលបានឮដំណឹងថាសំឡាញ់ទាំង១២០នាក់មកដល់

ហើយ ក៏ចេញទៅចាំទទួលស្វាគមន៍ នៅឯដើមផ្លូវ។ ពេលសំឡាញ់ទាំងអស់មកដល់ យសត្ថេរបានពន្យល់ប្រាប់អំពីសេចក្ដីសំរេចចិត្តរបស់លោកក្នុងការចូលសាងផ្នួស រួចមកក៏អញ្ជើញសំឡាញ់១២០នាក់នោះ ចូលទៅគាល់ព្រះសម្ពុទ្ធជាម្ចាស់។

ព្រះពុទ្ធបានទទួលស្វាគមន៍ ដល់អ្នកទាំងឡាយនោះ រួចហើយក៏ព្រះអង្គចាប់ផ្ដើមសំដែងអំពីមាគ៌ា ដែលអាចបញ្ចប់នូវសេចក្ដីទុក្ខ និងនាំទៅរកសេចក្ដីស្ងប់កាយនិងសប្បាយរីករាយក្នុងចិត្ត។ ព្រះអង្គបាននិទាននូវការស្វែងរកព្រហ្មចរិយធម៌នេះ ដោយកម្រ គឺចាប់តាំងអំពីព្រះអង្គនៅកុមារភាពម្ល៉េះ។ ព្រះពុទ្ធក៏បានត្រាស់សំដែងនូវ អនុបុព្វីកថា និងចតុរារិយសច្ចៈ ព្រមទាំងញ៉ាំងអ្នកទាំង១២០នោះ ដោយធម្មីកថា ប្រាសចាកអាសវៈទាំងពួង ឥតមានជាប់ជំពាក់នឹងឧបាទានអ្វីទៀតឡើយ។

កាលបានស្ដាប់ និងយល់ច្បាស់នូវ ព្រហ្មចរិយធម៌ នេះហើយ មាណពទាំង១២០នាក់ក៏មានចិត្តចង់សាងបព្វជ្ជា និងឧបសម្បទា។ ក្នុងចំណោមមាណពទាំង១២០នាក់នោះ មានតែ៥០នាក់ទេដែលបានសំរេចចិត្តចូលបួសនៅនឹងកន្លែងតែម្ដង។ ចំណែកឯ៧០នាក់ទៀតក៏មានប្រាថ្នាចង់បួសខ្លាំងណាស់ដែរ ប៉ុន្តែមិនអាចចាកចោលការទទួលខុសត្រូវ ក្នុងបន្ទុកគ្រួសារបាន ដោយឋិតនៅក្នុងភារៈខ្លួនជាប្ដី ជាឪពុក ឬក៏ជា បងប្រុសរបស់គេ ជាដើម។

ឥឡូវនេះ ព្រះពុទ្ធមានព្រះអរហន្ត៦០អង្គ គង់នៅក្នុងឥសិបតន-

មិគទាយវ័ន ជាមួយព្រះអង្គហើយ។ ព្រះសាស្តាសំរេចព្រះហឫទ័យ ថា នឹងគង់នៅទីនេះត្រឹមតែ៣ខែទៀតប៉ុណ្ណោះ ដើម្បីអប់រំភិក្ខុបួសថ្មីទាំងនោះ អោយរឹតតែប្រសើរឡើង។ ក្នុងគ្រានោះឯង ក៏មានពួកគ្រហស្ថប្រុសស្រី ជាច្រើនរយនាក់ បានចូលមកកាន់ឥសិបតនមិគទាយវ័ននេះ ដើម្បីសូម ប្រគល់កាយថ្វាយខ្លួនធ្វើជាឧបាសក-ឧបាសិកានៃព្រះមានព្រះភាគដែរ។

ព្រះពុទ្ធទ្រង់ជ្រាបច្បាស់នូវ ការទទួលខុសត្រូវ ក្នុងព្រះឋានៈព្រះ អង្គជាព្រះសាស្តាចារ្យ។ ព្រះអង្គទទួលខុសត្រូវនិងណែនាំភិក្ខុទាំងឡាយ ទុកដូចជាបងប្អូនបង្កើត។ ព្រះពុទ្ធទ្រង់រំលែក ការទទួលខុសត្រូវ ជាមួយ នឹងបញ្ចវគ្គិយភិក្ខុ។ ភិក្ខុកោណ្ឌញ្ញទទួលខុសត្រូវភិក្ខុបួសថ្មី២០រូប។ ភិក្ខុ ភទ្ទិយៈ វប្បៈ មហានាម និង អស្សជិ ក្នុងមួយអង្គៗទទួលខុសត្រូវភិក្ខុ បួសថ្មី១០រូប។ ភិក្ខុបួសថ្មីទាំងអស់មានការរីកចំរើនយ៉ាងខ្លាំង ក្នុងមាគ៌ា សិក្សាព្រះធម៌-វិន័យ។

ដោយព្រះអង្គទតឃើញនូវការរីកដុះដាលខាងគំនិតប្រាជ្ញានៃភិក្ខុ ទាំង៦០រូបនេះហើយ ព្រះសាស្តាទ្រង់បើកនូវ អង្គសន្និបាតមួយ ហើយ ទ្រង់ត្រាស់បញ្ជាក់ថា៖ "ម្នាលភិក្ខុទាំងឡាយ! យើងទាំងអស់គ្នាមានសេរី ភាពបរិបូណ៌ហើយ យើងបានយល់ច្បាស់ នូវមាគ៌ាពន្លឺត្រាស់ដឹងហើយ យើងបានរួចពីអន្ទាក់ទាំងអស់ហើយ ទោះបីជាអន្ទាក់របស់ទេវតាក្តី ឬក៏ មនុស្សលោកក្តី។ អ្នកទាំងឡាយអាចត្រាច់ទៅកាន់ចារិកនៃស្រុកភូមិ និង ជនបទផ្សេងៗ ក្នុងឋានៈជាមនុស្សទំនេរ ហើយសំដែងនូវព្រហ្មចរិយធម៌

ដែលអ្នកបានចេះចាំស្ទាត់នោះ ដើម្បីជាប្រយោជន៍ ដើម្បីសេចក្តីសុខ និង ដើម្បីអនុគ្រោះ ដល់ជនដ៏ច្រើន ដល់ទេវតា និងមនុស្សលោកទាំងឡាយ ចូរអ្នកទាំងឡាយកុំទៅពីរនាក់ ក្នុងផ្លូវតែមួយ(មួយផ្លូវមួយអង្គ)។ ចូរអ្នកសំដែងធម៌អោយពីរោះ នូវបទខាងដើម បទកណ្តាល និង បទខាងចុង។ ចូរអ្នកទាំងឡាយប្រកាស នូវព្រហ្មចរិយធម៌ប្រកបដោយអត្ថ.ន័យ និងព្យញ្ជនៈពេញបរិបូណ៌ ដើម្បីសត្វលោកទាំងឡាយ ដែលមានរាគាទិក្កិលេសតិច ឬបំរុងនឹងត្រាស់ដឹងនោះ អោយបានត្រាស់ដឹងផង។ ម្នាលភិក្ខុទាំងឡាយ! ចំណែកឯតថាគតវិញ ដល់ពេលចេញវស្សាក៏នឹងចេញទៅកាន់ឧរុវេលាសេនានិគមដែលជាស្រុកកំណើតរបស់នាងសុជាតា ដើម្បីនឹងសំដែងធម៌ដែរ។ ប៉ុន្តែ មុននឹងទៅដល់ឧរុវេលាសេនានិគមនោះ តថាគតក៏ចង់ឆ្លៀតចូលទៅទស្សនាដើមពោធិព្រឹក្ស និងសួរសុខទុក្ខដល់ពួកកុមារទាំងឡាយ នៅឯទីនោះផងដែរ។ លុះចេញអំពីឧរុវេលនោះមក ទើបតថាគតចូលទៅគាល់ព្រះបាទពិម្ពិសារ នៅឯក្រុងរាជគ្រឹះទៀត។"

បន្ទាប់អំពីបាន ទទួលព្រះពុទ្ធដីកា របស់ព្រះសមណគោតម រួចហើយ ភិក្ខុមួយចំនួនធំប្រដាប់ដោយស្បង់ចីវរ និងបាត្រ និមន្តចេញទៅផ្សព្វផ្សាយព្រះធម៌-វិន័យ តាមទីកន្លែងផ្សេងៗគ្នា។ ព្រះពុទ្ធនឹងភិក្ខុ២០រូបទៀត គង់ចាំក្នុងឥសិបតនមិគទាយវ័នទេះ នៅឡើយ។

# ការបរិនិព្វាននៃព្រះអគ្គសាវក សារីបុត្រ

ពេល ព្រះសម្ពុទ្ធ និងភិក្ខុទាំងឡាយគង់នៅវេឡុវគ្រាម ជិតក្រុងវេសាលី ក្នុងវេលាព្រឹក មានសាមណេរមួយរូបឈ្មោះ ចុន្ទក ដែលត្រូវជាសិស្សជំនិតរបស់ព្រះសារីបុត្របានសាគសួររកព្រះអានន្ទ។ ពេលជួបនឹងព្រះអានន្ទ សាមណេរចុន្ទកបង្គំទូលថាព្រះសារីបុត្រទើបតែបរិនិព្វានទៅ នៅឯភូមិនាឡ ក្នុងពេលថ្មីៗនេះ។ កាលបង្គំទូលនូវពាក្យយ៉ាងនេះរួចហើយ សាមណេរចុន្ទក ក៏លើកស្បង់ចីវរ បាត្រ និងកោដ្ឋដាក់ព្រះអដ្ឋិធាតុព្រះមហាអគ្គសាវក ប្រគេនដល់ព្រះអានន្ទ។ សាមណេរចុន្ទកលើកដៃទាំងគូខ្ទប់មុខយំ ព្រះអានន្ទក៏យំស្រែកក្បាលដែរ។ ចុន្ទកបានទូលរៀបរាប់នូវរឿងនោះថា៖ "បន្ទាប់អំពីព្រះសារីបុត្រត្រឡប់ទៅដល់ភូមិនាឡវិញ ព្រះអង្គខិតខំថែទាំជម្ងឺមាតារបស់លោករហូតដល់អ្នកមានគុណនោះទទួលអនិច្ចកម្មបាត់ទៅ។ ក្រោយពីលោកបានធ្វើបុណ្យឈាបនកិច្ច ជូនសពមាតារួចហើយ ព្រះសារីបុត្របានប្រទានទូវឱវាទដល់ញាតិមិត្រនិងពុទ្ធបរិស័ទទាំងឡាយ នៅក្នុងភូមិនោះ។ ព្រះអង្គបានទូន្មានធម៌ អំពីត្បូងទាំង៣ និងពន្យល់បញ្ជាក់អំពីការប្រតិបត្តិ យ៉ាងច្បាស់លាស់ទៀតផង។ លំដាប់នោះ ព្រះសារីបុត្របានធ្វើសមាធិ ដោយគង់បត់ព្រះភ្នែន ដូចជាផ្កាឈូកក្រពុំ រួចហើយព្រះអង្គក៏បរិនិព្វាន ក្នុងពេលនោះបណ្ដោយទៅ។

មុនពេល ព្រះអង្គបរិនិព្វានបន្តិច ព្រះសារីបុត្របានផ្ដែផ្ដាំនឹងសាមណេរចុន្ទក អោយយកស្បង់ចីវរ បាត្រ និង អដ្ឋិធាតុរបស់ព្រះអង្គទៅថ្វាយដល់ព្រះពុទ្ធផង និងសុំពុទ្ធានុញ្ញាតអោយទទួលសាមណេរចុន្ទកបានគង់នៅជិតព្រះដ៏មានព្រះភាគផង។ ព្រះមហាអគ្គសាវកបានផ្ដាំនូវពាក្យចុងក្រោយថា 'ព្រះអង្គចង់បរិនិព្វានមុនព្រះពុទ្ធ'។"

ព្រះអានន្ទ និង សាមណេរចុន្ទក បានយករឿងនេះ ទៅក្រាបបង្គំទូលដល់ព្រះដ៏មានព្រះភាគដើម្បីព្រះអង្គទ្រង់ជ្រាប។ កាលព្រះសម្ពុទ្ធទ្រង់ព្រះសណ្ដាប់រួចហើយ ទ្រង់ទតសម្លឹងទៅកាន់ស្បង់ចីវរ បាត្រ និងកោដ្ឋដាក់អដ្ឋិធាតុរបស់ព្រះសារីបុត្រ ដោយទឹកព្រះភ័ក្ត្រនឹងនបំផុត និងទ្រង់គ្មានបញ្ចេញព្រះវាចាអ្វី មួយព្រះឱស្ឋឡើយ។ ព្រះអង្គគ្រាន់តែលើកព្រះហស្តអង្អែលព្រះកេសសាមណេរចុន្ទកដោយថ្នមៗ។ ព្រះអានន្ទលើកព្រះហស្តជូតទឹកភ្នែក និងសម្លឹងមើលចំព្រះភ័ក្ត្រព្រះសាស្ដា មុននឹងបង្គំទូលថា៖ "បពិត្រព្រះអង្គដ៏ចំរើន! គ្រាន់តែបានឮព្រះអាវុសោ សារីបុត្របរិនិព្វានភ្លាម ខ្ញុំព្រះអង្គអស់ស្មារតីពីខ្លួនរលីង ហាក់ដូចជាមនុស្សស្លាប់ពាក់កណ្ដាលខ្លួន ភ្នែកក៏ស្រវាំង គំនិតក៏កាន់តាំង រកគិតអ្វីលែងឃើញអស់ហើយ។ បពិត្រព្រះអង្គដ៏ចំរើន! ខ្ញុំព្រះអង្គពិបាកចិត្តខ្លាំងណាស់!"

ព្រះពុទ្ធទ្រង់ត្រាស់ថា៖ "ម្នាលអានន្ទ! តើអាវុសោរបស់អ្នក បានយកអ្វី ទៅជាមួយខ្លះ? តើបានយក សីល សមាធិ បញ្ញា និង វិមុត្តិ ទៅជាមួយ ដែរឬទេ?"

ព្រះអានន្ទបង្គំទូលថា៖ "បពិត្រព្រះអង្គដ៏ចំរើន! ខ្ញុំព្រះអង្គមិនមែនកើតទុក្ខក្នុងរឿងបែបហ្នឹងទេ។ ពេលអាវុសោសារីបុត្រនៅមានព្រះជន្មនៅឡើយ ព្រះអង្គរស់នៅជាមួយមនុស្សទាំងឡាយរបស់ព្រះអង្គ យ៉ាងសុខសាន្ត។ ព្រះអង្គបានពន្យល់ណែនាំ និងជំរុញទឹកចិត្តយើងរាល់គ្នាអោយខំប្រឹងប្រែងរៀនសូត្រព្រះធម៌វិន័យ។ ប៉ុន្តែ ដល់ពេលអាវុសោទាំងពីរគឺព្រះសារីបុត្រនិងព្រះមោគ្គល្លានបរិនិព្វានទៅ ភិក្ខុទាំងឡាយក៏ហាក់ដូចជាគ្មានន័យខ្លឹមសារអ្វីបន្តិចសោះឡើយ។ បើយ៉ាងហ្នឹងហើយ ធ្វើម្តេចឡើយមិនអោយខ្ញុំព្រះអង្គកើតទុក្ខខ្លាំងនោះ?"

ព្រះសម្ពុទ្ធទ្រង់ត្រាស់ថា៖ "ម្នាលអានន្ទ! ជាច្រើនលើក ច្រើនគ្រាណាស់មកហើយដែលតថាគតបាននាំលើកអ្នកអំពីរឿងកើតនិងស្លាប់នោះ។ អ្វីដែលមកជាមួយគ្នា រមែងបែកគ្នាជាធម្មតា។ ធម៌ទាំងអស់ជាវត្ថុមិនឋិតថេរ។ យើងមិនត្រូវជាប់ជំពាក់ចិត្ត ជាមួយវត្ថុទាំងនោះទេ។ អ្នកត្រូវពុះពារលើពិភពនៃការកើតនិងស្លាប់នេះ អោយបាន។

ម្នាលអានន្ទ! ព្រះសារីបុត្រជាបុគ្គលបានសំរេចការត្រាស់ដឹង ក៏ដោយសារព្រះអង្គបានប្រើបញ្ញា និងសេចក្តីស្រឡាញ់របស់ព្រះអង្គដើម្បីណែនាំសត្វលោកអោយបានទទួលពន្លឺត្រាស់ដឹងដែរ។ បណ្តាភិក្ខុសង្ឃទាំងអស់ គ្មានភិក្ខុអង្គណាមួយ មានបញ្ញាវៃឆ្លាត ស្មើនឹងព្រះសារីបុត្រឡើយ។ ដូច្នេះ ព្រះសារីបុត្រត្រូវបានទទួលនាមបញ្ញត្តិថា ព្រះអរហន្តដំណាងមហាបញ្ញា។

ម្នាលអានន្ទ! ប្រសិនបើមនុស្សជំនាន់ក្រោយនៅតែបន្តការសិក្សា និង ប្រតិបត្តិតាមផ្លូវនៃពន្លឺត្រាស់ដឹងដរាបណា ដរាបនោះ ព្រះអរហន្ត នឹងនៅតែបន្តកើត ក្នុងលោកយើងនេះ។ សេចក្តីស្មោះត្រង់ ចំពោះព្រះពុទ្ធ ព្រះធម៌ និងព្រះសង្ឃ គឺជាសេចក្តីស្មោះត្រង់ចំពោះអនាគតនៃភិក្ខុសង្ឃ។ អំណើះតទៅ នឹងមានព្រះអរហន្ត ដែលមានភាពអស្ចារ្យដូចជាព្រះសារីបុត្រ ដែរ។ ម្នាលអានន្ទ! ចូរអ្នកកុំបីកើតទុក្ខចំពោះការបរិនិព្វានរបស់ព្រះសារីបុត្រខ្លាំងពេកណាំ!"

នារសៀលថ្ងៃនោះ ព្រះដ៏មានព្រះភាគទ្រង់ប្រកាសប្រាប់ដល់ភិក្ខុសង្ឃទាំងឡាយ នៅជិតភ្នំមិនកសិលា ជាប់នឹងទន្លេគង្គា អោយបានដឹងអំពីការចូលនិព្វានរបស់ព្រះសារីបុត្រ។ ព្រះពុទ្ធទ្រង់ត្រាស់ជំរុញទឹកចិត្តដល់ភិក្ខុទាំងនោះ អោយយកតម្រាប់តាមព្រះសារីបុត្រ ដោយទ្រង់បានបញ្ជាក់ថា៖ "ម្នាលភិក្ខុទាំងឡាយ! ចូរអ្នកជាប្រទីបបំភ្លឺខ្លួនឯង ចូរអ្នកជួយខ្លួនឯង ចូរអ្នកកុំរស់នៅដោយសារអ្នកដទៃ ចូរអ្នកយកការទូន្មានរបស់ព្រះតថាគតធ្វើជាប្រទីប និងជាទីពុំនាក់អាស្រ័យ។ ចូរអ្នកកុំយោលតាមការទូន្មានរបស់បុគ្គលដទៃអោយសោះ។ ធ្វើដូច្នេះ អ្នកនឹងមិនលិចលង់ក្នុងរលកនៃសេចក្តីទុក្ខព្រួយ និងអស់សង្ឃឹមឡើយ។"

# • បុណ្យឯករាជ្យជាតិខ្មែរ



ព្រះបាទសម្តេច នរោត្តម សីហនុ ទ្រង់ឡើងគ្រងរាជ្យបន្តពីព្រះព្រះជយ្យកោរ ព្រះបាទសម្តេច ព្រះស៊ីសុវត្ថិ មុនីវង្ស នៅថ្ងៃទី២៣ ខែមេសា គ.ស.១៩៤១។ ព្រះអង្គទ្រង់ប្រសូតនៅរាជធានីភ្នំពេញ ថ្ងៃទី៣១ តុលា ១៩២២។ ព្រះវររាជបិតា ព្រះនាម ព្រះបាទ នរោត្តម សុរាម្រិត និង ព្រះវរមាតា ព្រះនាម ស៊ីសុវត្ថិ មុនីវង្ស កុសុមៈ នារីរតន៍។

ប្រទេសឥណ្ឌូចិន (ខ្មែរ,លាវ,យួន និងសៀម) ស្ថិតនៅក្រោមអាណានិគមនិយមបារាំងសេស អស់ជិតមួយសតវត្សរ៍។ មហាសង្គ្រាមលោកលើកទី២ បានផ្ទុះឡើង រវាងកងទ័ពសម្ពន្ធមិត្រ(បារាំង, អង់គ្លេស និង អាមេរិក) និងពួកមហាអំណាចម្ខាងទៀត(អាល្លឺម៉ង់, អ៊ីតាលី និង ជប៉ុន)។ នៅឥណ្ឌូចិន កងទ័ពជប៉ុនដណ្តើមអំណាច ពីបារាំងបាន នៅថ្ងៃទី៩ មិនា ១៩៤៥។ មហាសង្គ្រាមពិភពលោកលើកទី២នេះ បានត្រូវបញ្ចប់ ក្នុងពេលដែលជប៉ុន ទៅទម្លាក់គ្រាប់បែកនៅកំពង់ផែ ភើល ហៃ សហរដ្ឋអាមេរិក ហើយសហរដ្ឋអាមេរិក ក៏បានទៅទម្លាក់គ្រាប់បែកបរមាណូ នៅហ៊ីរ៉ូស៊ីម៉ា ប្រទេសជប៉ុនវិញ។ ជប៉ុនទទួលបរាជ័យក៏ដកទ័ពរបស់ខ្លួនថយអស់ពីប្រទេសកម្ពុជា និងប្រទេសដទៃទៀតនៅឥណ្ឌូចិនធ្វើអោយកងទ័ពបារាំងចូលមកកាន់កាប់ប្រទេសខ្មែរបន្តទៀត។

នៅថ្ងៃទី ៩ ខែធ្នូ ១៩៤៦ សៀមបានប្រគល់ខេត្ត បាត់ដំបង សៀមរាប កំពង់ធំ ស្ទឹងត្រែង មកអោយខ្មែរវិញ បន្ទាប់ពីបានប្លន់យកទៅតាំងពីឆ្នាំ១៩៤១។ ខេត្តចំនួន១២ មានទំហំ៦០.០០០គម² ដែលត្រូវ

សៀមប្លន់យកទៅជាយូរហើយ មិនបានប្រគល់អោយវិញទេ មានខេត្ត: (១).នគររាជ, (២).បុរីរម្យ, (៣).សុរិន, (៤).ធនបុរី, (៥).ស្ទឹងត្រែង, (៦).សិរីសាកេត, (៧).ច័ន្ទបុរី, (៨).គោកខណ្ឌ, (៩).បសិមបុរី, (១០).ត្រាច, (១១).សង្កិត និង (១២).អ្វីប៉ុន ។

នៅថ្ងៃទី៦ ឧសភា ១៩៤៧ រដ្ឋធម្មនុញ្ញជាតិបានអនុម័តច្បាប់គ្រប់គ្រងប្រទេសថ្មី យករបបប្រជាធិបតេយ្យ ជាមូលដ្ឋាន។

នៅថ្ងៃទី២១ ឧសភា ១៩៤៩ រដ្ឋសភាបារាំងបានអនុម័តដោយគ្មានសួរខ្មែរមួយម៉ាត់ ប្រគល់ដីខ្មែរមួយភាគធំ(ហៅ កម្ពុជាក្រោម) ទៅអោយយួន ដោយមិនគោរពតាមពាក្យសន្យារបស់ឧត្តមនាវីបារាំងឈ្មោះ អាមីរ៉ាល់ ដឺឡាក្រង់ឌីយែរ (Amiral de Lagrandiere) ប្រចាំទីក្រុងព្រៃនគរ ថានឹងបង្វិលដីដែលខ្លួនត្រួតត្រានោះ មកអោយខ្មែរវិញ តាមការស្នើសុំរបស់ព្រះបាទសម្តេច នរោត្តម។ ដីកម្ពុជាក្រោម ដែលយួនយកនោះមាន២១ខេត្ត ទំហំ៦៤.០០០គម២ គឺ៖ (១). កំពង់ស្រកាត្រី (ឬចង្វាត្រពាំង ឬបៀងហ្វា ឬកៀកបាញ់), (២). រោងដំរី (ឬតៃនិញ ឬឡុងនិញ ឬថាញ់អាញ់), (៣). ព្រៃនគរ (ឬសៃហ្គន ឬហូជីមិញ), (៤). ផ្សំអំបិល (ឬបៀនវ៉ែរ ឬគៀងហ្វា), (៥).មេស (ឬមិញហ៊ឿង), (៦).គោះគង (ឬឡុងអាន), (៧).ព្រែកឫស្សី (ឬតិនចី ឬជុងយិញ), (៨).លុងហោ (ឬវិញឡុង), (៩).ព្រះត្រពាំង (ឬត្រាវិញ ឬវិញមិញ), (១០).ផ្សារដែក(ឬសាដែក ឬកៀនផុង), (១១).មាត់ជ្រូក(ឬចូវដុក ឬ

អាងយ៉ាង ឬឡុងសៀង). (១២).បារាជ(ឬភៀឡេ). (១៣).ឃ្លាំង (ឬស្រុកទ្រាំង ឬខាយហុង ឬបាសៀង). (១៤). ពាម (ឬហាទៀង). (១៥).ក្រមួនស(ឬរ៉ាជយ៉ា ឬកៀងយ៉ាង ឬជៀនធៀន). (១៦).ពលលាវ(ឬបាក់លីវ). (១៧). ញ៉ុមបារាជ (ឬឡុងសៀង ឬអានយ៉ាង). (១៨).ទូលតាមោក (ឬធូយ៉ូវម៉ុក ឬបិញហៀង ឬបិញឡុង). (១៩). ព្រះសួគ៌ា(ឬទៀកឡេ ឬហៀង ឬបិញទី). (២០).អូរកាប់ (ឬវ៉ុងតាវ). និង (២១).ឈ្នាប្រី (ឬកិនអាន)។

គ្រានោះ ចលនាខ្មែរឥស្សរៈ គឺខ្មែរមួយក្រុមដែលមិនសប្បាយចិត្តនឹងអាណានិគមនិយមបារាំង ក៏បានកើតឡើង។ ចលនាខ្មែរឥស្សរៈបានរួមសហប្រតិបត្តិការ ជាមួយកងទ័ពវៀតមិញ បង្ករអោយមានអសន្តិសុខពាសពេញផ្ទៃប្រទេស ដើម្បីបណ្តេញបារាំងចេញពីស្រុក។

នៅថ្ងៃទី១៤ ធ្នូ ១៩៥៥ ប្រទេសកម្ពុជា បានចូលជាសមាជិកពេញអង្គ នៃអង្គការសហប្រជាជាតិ។ តាមសន្ធិសញ្ញា ចុះថ្ងៃទី៨ វិច្ឆិកា ១៩៤៩ ប្រទេសបារាំងបានទទួលស្គាល់ឯករាជ្យនៃប្រទេសកម្ពុជាតាមផ្លូវច្បាប់មករួចហើយ ប៉ុន្តែ សមត្ថកិច្ចខាងតម្រួត តុលាការ ទូត រូបិយវត្ថុ ឋិតនៅក្រោមការគ្រប់គ្រងរបស់បារាំងនៅឡើយ។ ហេតុដូច្នេះហើយបានជានៅថ្ងៃទី៩ កុម្ភៈ ១៩៥៣ព្រះបាទសម្តេចនរោត្តម សីហនុ យាងទៅប្រទេសបារាំង ដើម្បីទាមទារឯករាជ្យបរិបូណ៌ពីលោកវ៉ាំងសង់ អូរីយ៉ូល (Vincent Auriol) ប្រធានាធិបតីបារាំង។ ដើម្បីគាំទ្រនូវព្រះរាជបូជ

នីយកិច្ចនេះ ព្រះរាជាទ្រង់បានបង្កើតកងជីវពលនារីភ្លាមៗនៅគ្រប់ខេត្ត ស្រុក និងជនបទ ទូទាំងប្រទេស។

នៅថ្ងៃទី៩ វិច្ឆិកា ១៩៥៣ គឺរយៈពេល ៨ខែ មុនសន្និសីទក្រុងហ្សឺណែវ នៅខាងមុខព្រះបរមរាជវាំង ឧត្តមសេនីយបារាំងម្នាក់ ឈ្មោះ ដឺឡង់ក្លាត (De Langlade) បានប្រគល់បញ្ជាការរបស់ខ្លួន ថ្វាយមកសម្តេចព្រះនរោត្តម សីហនុ ហើយដកទ័ពថយចេញពីព្រះរាជាណាចក្រកម្ពុជា។ ប្រទេសកម្ពុជា ក៏បានទទួលឯករាជ្យ បរិបូណ៌ ចាប់តាំងអំពីពេលនោះមក។ ដើម្បីថ្លែងនូវកតញ្ញូតាធម៌របស់ខ្លួនចំពោះព្រះអង្គ ប្រជាពលរដ្ឋខ្មែរទូទាំងប្រទេសបានថ្វាយព្រះបរមនាមថា "ព្រះបិតាឯករាជ្យជាតិ"។

ព្រះអង្គទ្រង់រាជានុញ្ញាត អោយសាងជាវិមាន អនុស្សាវរីយមួយ ឈ្មោះ "វិមានឯករាជ្យ" នៅចំកណ្តាលក្រុងភ្នំពេញ ដើម្បីរំលឹកដល់ថ្ងៃប្រវត្តសាស្ត្រ ជារៀងរាល់ឆ្នាំ។ លោក វណ្ណ ម៉ូលីវណ្ណ ជាស្ថាបត្យករខ្មែរម្នាក់ដ៏ចំណាន ធ្លាប់មានស្នាដៃកសាង ពហុកីឡាដ្ឋានជាតិ អូឡាំពិក និង សាលសន្និសីទចតុមុខ បានសាងវិមានឯករាជ្យ នេះឡើង ទុកជាកេរ្តិ៍ដំណែល របស់ជាតិខ្មែរ។

ក្នុងឆ្នាំ១៩៥៤ ដើម្បីរក្សាឯករាជជាតិអោយបានគង់វង់ សម្តេចនរោត្តម សីហនុ ប្រកាន់យកនយោបាយអព្យាក្រិតភាព ឥតលំអៀង។ ពេលនេះ ប្រទេសខ្មែរឈ្មោះថា បានរស់នៅយ៉ាងសុខក្សេមក្សាន្ត ក្នុង

កោះសន្តិភាព ក្នុងកណ្តាលភ្នក់ភ្លើងសង្គ្រាម ដែលធ្លាប់តែឆេះរោលរាលពាសពេញជ្រោយឥណ្ឌូចិន។ សង្គ្រាមតំបន់នេះ កើតមកពីការប្រណាំងប្រជែងឥទ្ធិពលខាង នយោបាយ សេដ្ឋកិច្ច (ឬក៏សាសនា) នៃប្រទេសមហាអំណាចខាងមូលធននិយម(អាមេរិកាំង) និងខាងកុម្មុយនីសនិយម (ចិន និងរុស្ស៊ី) រួមទាំងការពង្វាតមនោគមវិជ្ជានិងទឹកដី នៃប្រទេសជិតខាងផង។

នៅថ្ងៃទី៣ មិនា ១៩៥៥ សម្តេច នរោត្តម សីហនុ ទ្រង់សព្វព្រះរាជហឫទ័យ ដាក់រាជ្យថ្វាយព្រះវរបិតា និងព្រះវរមាតា ហើយបានទទួលគោរម្យងារ ជា: "សម្តេចព្រះឧបយុវរាជ" ក្នុងព្រះបំណងបានប្រារព្ធកសាងប្រទេស នៅក្នុងវិស័យសេដ្ឋកិច្ច សង្គមកិច្ច វប្បធម៌ និងអប់រំជាតិ ។ល។ អោយបានលូតលាស់ទាន់អរិយប្រទេស។

នៅថ្ងៃទី ២៤ មិនា ១៩៥៥ ព្រះអង្គបានបង្កើត ចលនាបង្រួបបង្រួមជាតិមួយ ឈ្មោះថា៖ "ចលនាសង្គមរាស្ត្រនិយម" ដើម្បីរួមកម្លាំងកសាងជាតិ សមឋានៈជាប្រទេសឯករាជ្យ និងសន្តិភាព។

# ០៩. ខែ មិគសិរ (ធ្នូ)

- រំលឹកដល់ ព្រះនាង សង្ឃមិត្តា ថេរី ប្រតិស្ឋាន ភិក្ខុនីសង្ឃ ជាលើកដំបូង នៅលើកោះលង្កា

# ព្រះនាង សង្ឃមិត្តាថេរី ប្រតិស្ឋាន ភិក្ខុនីសង្ឃ លើកដំបូង លើលង្កាទ្វីប

ព្រះបាទធម្មាសោក ទ្រង់សព្វព្រះហឫទ័យ បំបួសព្រះរាជបុត្រា ព្រះនាម មហិន្ទៈ ជា ភិក្ខុ និងព្រះរាជបុត្រី ព្រះនាម សង្ឃមិត្តា ជា ភិក្ខុនី ក្នុងព្រះពុទ្ធសាសនា។ ព្រះមហាមហិន្ទត្ថេរ និងភិក្ខុ៤អង្គដែលបានសំរេចមគ្គផលនិងអភិញ្ញា៦ដូចគ្នា បាននិមន្តទៅផ្សាយព្រះពុទ្ធសាសនានៅកោះលង្កានោះមុនដំបូងបង្អស់។

ពេលព្រះនាង អនុឡា ជាព្រះរាជទេពី នៃព្រះរាជា កោះលង្កា ព្រះបាទទេវានម្បិយតិស្សៈ ក៏សព្វព្រះហឫទ័យ ចង់បួសជាភិក្ខុនីដែរ ព្រះមហាមហិន្ទត្ថេរក៏មានព្រះថេរដីកាថា៖ "ការបួសជាភិក្ខុនី លុះត្រាតែមានភិក្ខុនីសង្ឃផង ព្រោះឧបសម្បទាកម្មរបស់ភិក្ខុនី ជាឧភតោសង្ឃកម្ម គឺត្រូវបួសដោយមានឧបជ្ឈាយ៍ និងកម្មវាចាខាងពួកភិក្ខុនី ហើយមកបួសខាងពួកភិក្ខុថែមទៀត ទើបសំរេចជាភិក្ខុនីបាន។"

ព្រះនាងអនុឡាទេវី ទ្រង់បានជ្រាបនូវរឿងនោះ ក៏បង្គំទូលព្រះវរបិតា និងព្រះមហាមហិន្ទត្ថេរ អោយជួយចាត់ចែងនូវកិច្ចការនោះ។ ព្រះរាជានិងព្រះមហាថេរ ក៏ចាត់ការអោយទៅសុំព្រះរាជានុញ្ញាតអំពីព្រះបាទធម្មាសោក មហារាជ ដើម្បីនិមន្តព្រះនាង សង្ឃមិត្តាថេរី ដែលត្រូវជា

ព្រះអនុជនៃព្រះមហាមហិន្ទត្ថេរ ព្រមទាំងភិក្ខុនីសង្ឃមួយចំនួនអំពីជម្ពូទ្វីប (ប្រទេសឥណ្ឌា) ចូលមកកាន់លង្កាទ្វីប តាមសេចក្ដីត្រូវការចាំបាច់។

ក្នុងព្រះដំណើរទៅកាន់លង្កាទ្វីប ព្រះនាង សង្ឃមិត្តាថេរី បាន នាំយកមែកពោធិព្រឹក្ស ដែលព្រះពុទ្ធត្រាស់ដឹងនាក្រោមម្លប់នោះទៅផង។

ពេលនិមន្តដល់ មានមហាជនទាំងស្ដេច ទាំងប្រជាពលរដ្ឋ រាប់ សែននាក់ ជ្រើលឈ្ងួចរមកស្វាគមន៍និងគោរពភិក្ខុនីសង្ឃនិងមែកពោធិ៍ មហាអស្ចារ្យនោះ ដូចកាលព្រះមហិន្ទត្ថេរនិមន្តមកពីដំបូងនោះដែរ។

លំដាប់នោះ ព្រះនាង សង្ឃមិត្តាថេរី ក៏បានជា ព្រះឧបជ្ឈាយ៍ បំបួសព្រះនាងអនុឡាទេវី និងស្រ្ដីដទៃជាច្រើនរូបទៀត ជាភិក្ខុនី និងជា បឋម នៅលើកោះលង្កានោះទៅ។

ប្រទេសសិរីលង្កា ឬ សេឡុង ក៏ក្លាយទៅជាប្រទេសកាន់ព្រះពុទ្ធ សាសនា មានភិក្ខុសង្ឃ ភិក្ខុនីសង្ឃ ប្រតិស្ឋានយ៉ាងរឹងមាំ និងចំរើនរុង រឿង តាំងពីពេលនោះមក រហូតដល់សព្វថ្ងៃ ដោយសារព្រះរាជបេសក កម្មដ៏មោះមុត និងច្បាស់លាស់ របស់ព្រះបាទធម្មាសោក នោះឯង។

# បុណ្យសិទ្ធិមនុស្ស



## កំណើតអង្គការសហប្រជាជាតិ
(Origin of the United Nations)

ឈ្មោះ " អង្គការសហប្រជាជាតិ " ត្រូវបានប្រឌិតឡើង ដោយប្រធានាធិបតីសហរដ្ឋអាមេរិក ហ្វ្រង់ក្លាំង រូសវែល ( Franklin D.

Roosevelt ) និង ត្រូវបានយកទៅប្រើជាលើកដំបូង ក្នុង "សេចក្តីប្រកាសដោយអង្គការសហប្រជាជាតិ" នៅថ្ងៃទី១ មករា ១៩៤២ ក្នុងសង្គ្រាមលោកលើកទី២ ពេលតំណាងប្រទេស២៦សន្យារដ្ឋាភិបាលរបស់ខ្លួន ដើម្បីបន្តការប្រយុទ្ធប្រឆាំងនឹងអំណាចអ័ក្ស (Axis Powers)។

ធម្មនុញ្ញអង្គការសហប្រជាជាតិបានសរសេរឡើង ដោយតំណាងប្រទេស៥០ នៅពេលប្រជុំអង្គការសហប្រជាជាតិ លើបញ្ហាអង្គការអន្តរជាតិ ដែលបានជួបជុំគ្នានៅទីក្រុង សាន់ហ្វ្រាន់ស៊ីស្កូ រដ្ឋកាលីហ្វ័រនីញ៉ា សហរដ្ឋអាមេរិក (San Francisco, California U. S. A. ) ចាប់តាំងពីថ្ងៃទី២៥មេសា ដល់ថ្ងៃ២៦មិថុនា ១៩៤៥។ ប្រតិភូទាំងនោះបានពិភាក្សាគ្នាលើមូលដ្ឋាននៃសំណើរទាំងឡាយ ដែលបានដោះស្រាយដោយប្រទេសចិន សហភាពសូវៀត ចក្រភពអង់គ្លេស និង សហរដ្ឋអាមេរិក នៅដាំបាតុន អូក្ស ( Dumbarton Oaks ) កាលពីខែសីហា ដល់ខែតុលា ១៩៤៤។ ធម្មនុញ្ញត្រូវបានចុះហត្ថលេខា នៅថ្ងៃទី២៦ មិថុនា ១៩៤៥ ដោយតំណាងទាំង៥០ប្រទេស។ ប្រទេស ប៉ូឡូញ (Poland) ដែលអវត្តមាននៅពេលអង្គសន្និបាត បានចុះហត្ថលេខានៅពេលក្រោយ ហើយក៏បានក្លាយជា សមាជិកស្ថាបនិក ៥១ប្រទេសនឹងគេដែរ។ សព្វថ្ងៃមានសមាជិក ១៨៥ប្រទេស។ មានទីស្នាក់ការនៅទីក្រុង នីវ យ៉ក សហរដ្ឋអាមេរិក។ ប៉ុន្តែ ទីស្នាក់ការផ្នែកតុលាការអន្តរជាតិ នៅក្រុងហាគី ប្រទេស នីហ្សឺឡែន (Netherland)។

អង្គការសហប្រជាជាតិបានទទួលស្គាល់ ជាផ្លូវការ នៅថ្ងៃទី២៤ តុលា ១៩៤៥ ពេលដែលធម្មនុញ្ញត្រូវបានសច្ចានុមតិដោយប្រទេសចិន បារាំង សហភាពសូវៀត ចក្រភពអង់គ្លេស សហរដ្ឋអាមេរិក និងអ្នកចុះហត្ថលេខា ភាគច្រើន ដទៃទៀត។ បុណ្យអង្គការសហប្រជាជាតិ ប្រារព្ធឡើងជារៀងរាល់ឆ្នាំ នៅថ្ងៃទី ២៤ តុលា។



ដោយសារមានអ្នកដឹកនាំប្រទេសមួយចំនួន ក្នុងពិភពលោកត្រូវបានប្រជាពលរដ្ឋរបស់ខ្លួនតែងតាំង ឬបោះឆ្នោតជ្រើសតាំងអោយធ្វើជាតំណាងរបស់គេក្នុងឋានៈជាស្តេចក្តី ជាប្រធានាធិបតីក្តី មិនយកសិទ្ធិទៅបំរើប្រជាពលរដ្ឋ បែរជារំលោភជិះជាន់ ខុសច្បាប់ ដោយអាងអំណាចផ្ទាល់ខ្លួននិងបក្សពួក ទើបអ្នកស្រឡាញ់យុត្តិធម៌និងសន្តិភាពនាំគ្នាជំរុញរដ្ឋាភិបាលរបស់ខ្លួន អោយបង្កើតជាច្បាប់សាកល ផ្នែកសិទ្ធិមនុស្សនេះឡើង ដើម្បីការពារសិទ្ធិសេរីភាព ក្នុងឋានៈជាមនុស្សជាតិដូចគ្នា ហើយដែលត្រូវបានអង្គការសហប្រជាជាតិបានអនុម័តច្បាប់និងប្រកាសអោយប្រើជាផ្លូវការ ដែលខ្ញុំបាទសូមបកប្រែអំពីភាសាអង់គ្លេសមកជាភាសាខ្មែរក្រៅផ្លូវការ មានសេចក្តីដូចខាងក្រោមនេះ៖

## សេចក្តីប្រកាសជាសាកលនៃសិទ្ធិមនុស្ស

នៅថ្ងៃទី១០ធ្នូ ១៩៤៨ សន្និបាតសាមញ្ញមួយនៃអង្គការសហប្រ-ជាជាតិបានទទួលយកនិងថ្លែងនូវសេចក្តីប្រកាសនៃសិទ្ធិមនុស្ស។ អត្ថបទទាំងស្រុងមានចែងក្នុងទំព័រទាំងឡាយខាងក្រោម។ សកម្មភាពជា ប្រវត្តិ-សាស្ត្រដូចខាងក្រោមនេះ អង្គសន្និបាតបានបង្គាប់អោយប្រទេសជាសមាជិក ទាំងអស់ បោះពុម្ពផ្សាយអត្ថបទនៃសេចក្តីប្រកាស និងយកសេចក្តីប្រកាសនេះទៅផ្សព្វផ្សាយ តាំងអោយមើល សំរាប់អាននិងបរិយាយជាគោលការណ៍ក្នុងសាលារៀននិងវិជ្ជាស្ថានសិក្សាផ្សេងៗ ឥតមានការបែងចែកលើស្ថានការណ៍នយោបាយនៃប្រទេសឬបូរណភាពទឹកដី ឡើយ។

អត្ថបទអនុញ្ញាតចុងក្រោយ
អង្គការសហប្រជាជាតិ
ការិយាល័យឃោសនាសាធារណៈ

# បុព្វកថា

ដោយហេតុថា ការទទួលស្គាល់នូវការជាប់មកជាមួយសេចក្តីថ្លៃថ្នូ និងសិទ្ធិស្មើគ្នា និងមិនអាចផ្ទេរបាននៃសមាជិកទាំងអស់របស់គ្រួសារមនុស្សលោកគឺជាគ្រឹះសេរីភាព យុត្តិធម៌និងសន្តិភាព ក្នុងពិភពលោក។

ដោយហេតុថា ការមិនគោរព និងមើលងាយសិទ្ធិមនុស្ស កើតឡើង ក្នុងអំពើព្រៃផ្សៃ ដែលសាហាវយង់ឃ្នងដល់មនសិការៈនៃមនុស្សជាតិ និង ការមកដល់នៃពិភពលោកមួយ ដែលមនុស្សសប្បាយចិត្តនឹងសេរីភាពក្នុងការនិយាយស្តីនិងជំនឿ និងសេរីភាពអំពីការភ័យខ្លាច និងភាពទ័លក្រ ដែលបានប្រកាស ដូចជាសេចក្តីប្រាថ្នា ដ៏លើសលប់របស់មនុស្សធម្មតា។

ដោយហេតុថា វាជាការសំខាន់ បើមនុស្សឥតត្រូវគេបង្ខិតបង្ខំអោយមានការឧបាស្រ័យ ដូចមធ្យោបាយចុងក្រោយបំផុតគឺការបះបោរប្រឆាំងនឹងការជិះជាន់និងគៀបសង្កត់ ដែលសិទ្ធិមនុស្សត្រូវបានការពារដោយក្រមច្បាប់។

ដោយហេតុថា វាជាការសំខាន់ ធ្វើអោយមានការអភិវឌ្ឍន៍ នៃទំនាក់ទំនងមិត្តភាព រវាងប្រជាជាតិ។

ដោយហេតុថា មនុស្សទាំងឡាយ នៃ(អង្គការ) សហប្រជាជាតិ មាននៅក្នុងធម្មនុញ្ញ បានអះអាងអំពីវាសនារបស់គេសារឡើងវិញ ក្នុងគោលការណ៍សិទ្ធិមនុស្ស ក្នុងសេចក្តីថ្លៃថ្នូ និងតម្លៃមនុស្ស និងក្នុងសិទ្ធិស្មើគ្នានៃបុរសនិងស្ត្រី ដោយបានប្តេជ្ញាបង្កើនវឌ្ឍនភាពសង្គម និងកំរិតជីវភាពប្រសើរ ក្នុងសេរីភាពទូលំទូលាយ។

ដោយហេតុថា ប្រទេសជាសមាជិកបានសន្យាផ្ទាល់ដើម្បីសំរេចក្នុងការធ្វើសហប្រតិបត្តិការជាមួយអង្គការសហប្រជាជាតិ ក្នុងការបង្កើនការគោរពជាសាកលចំពោះ និងការប្រតិបត្តិនូវសិទ្ធិមនុស្ស ដែលជាគ្រឹះនៃសេរីភាព។

ដោយហេតុថា ការយល់ដឹងជាទូទៅនៃសិទ្ធិនិងសេរីភាពទាំងនេះមានសារៈសំខាន់បំផុត សំរាប់ការជឿឲ្យាស់លាស់នូវកិច្ចសន្យានេះ។

ឥឡូវ ដូច្នេះ,

សន្និបាតសាមញ្ញ

សេចក្តីប្រកាស

សេចក្តីប្រកាសជាសាកលនៃសិទ្ធិមនុស្សនេះ គឺជាកំរិតនៃសេចក្តីសំរេច ជាទូទៅ សំរាប់មនុស្ស និងប្រជាជាតិទាំងអស់ ដើម្បីបញ្ជាក់ថា

បុគ្គលគ្រប់រូប និងរាល់អង្គការនៃសង្គម ត្រូវរក្សាសេចក្តីប្រកាសនេះទុកក្នុងចិត្តជានិច្ច នឹងខំប្រឹងប្រែងដោយការបង្រៀននិងការអប់រំដើម្បីបង្កើនការគោរពសិទ្ធិនិងសេរីភាពទាំងនេះ និងដោយវិធានការរីកចម្រើនខាងជាតិ និងអន្តរជាតិ ដើម្បីធានាដល់ការទទួលស្គាល់ជាសាកលនិងមានប្រសិទ្ធិភាពរបស់ខ្លួន និងការប្រតិបត្តិតាម ទាំងក្នុងចំណោមមនុស្សនៃប្រទេស ជាសមាជិកផ្ទាល់ និងទាំងក្នុងចំណោមមនុស្សនៃដែនដី ក្រោមយុត្តាធិការ (ក្រោមអាណានិគមនិយម) របស់គេ។

មាត្រា១: មនុស្សគ្រប់រូបមានតម្លៃស្មើៗគ្នា

មនុស្សទាំងអស់ កើតមកដោយសេរីនិងស្មើភាពគ្នា ក្នុងសេចក្តីថ្លៃថ្នូ និងសិទ្ធិ។ គេទាំងអស់ត្រូវផ្តល់នូវវិចារណញ្ញាណ និងមនសិការៈព្រមទាំងត្រូវប្រព្រឹត្តចំពោះគ្នាទៅវិញទៅមក ក្នុងស្មារតីភាតរភាព (ភាពជាបងប្អូនបង្កើត)។

មាត្រា២: ត្រូវចាត់ទុកមនុស្សគ្រប់រូបអោយស្មើភាពគ្នា

មនុស្សម្នាក់ៗ មានអំណាចទទួលសិទ្ធិនិងសេរីភាពដែលមានចែងក្នុងសេចក្តីប្រកាសនេះ គ្មានការបែងចែកប្រភេទ ឯណា ដូចជា: ពូជ-សាសន៍, ពណ៌សម្បុរ, ភេទ, ភាសា, សាសនា, នយោបាយ, ឬមតិ, ជាតិ, ប្រភពសង្គម, ទ្រព្យសម្បត្តិ, កំណើត ឬក៏ ស្ថានការណ៍ផ្សេងៗ។ លើសពីនេះ គ្មានការបែងចែកធ្វើឡើង នៅលើគោលនយោ-

៣យ. ស្ថានការណ៍យុត្តាធិការជាតិនិងអន្តរជាតិនៃប្រទេសឬដែនដីដែលជាកម្មសិទ្ធិរបស់បុគ្គលទេ ទោះបីជាប្រទេសឯករាជ្យក្តី រណបគេក្តី មិនមែនជារដ្ឋាភិបាលផ្ទាល់ខ្លួនក្តី ឬក្រោមអធិបតេយ្យភាពណាមួយក្តី។

មាត្រា៣: សិទ្ធិមានជីវិតរស់នៅ

មនុស្សម្នាក់ៗមានសិទ្ធិរស់នៅ មានសេរីភាពនិងនិរភ័យ(សន្តិ-សុខ)នៃមនុស្ស គឺមិនសម្លាប់ និងការពារជីវិតអោយគង់វង។។

មាត្រា៤: សិទ្ធិការពារមិនអោយគេយកទៅធ្វើជាខ្ញុំកញ្ជះ

គ្មាននរណាម្នាក់ត្រូវប្រកាន់ជា ទាសភាព, សេវគតិភាពឡើយ។ ទាសភាពនិងការជួញទាសករ ត្រូវហាមឃាត់ដាច់ខាតនៅគ្រប់រូបភាព។

មាត្រា៥: សិទ្ធិមិនអោយមានទារុណកម្មមកលើខ្លួន

គ្មាននរណាម្នាក់ត្រូវធ្វើទារុណកម្ម ប្រព្រឹត្តអំពើឃោរឃៅចំពោះ, ប្រព្រឹត្តអមនុស្សធម៌ និងអំពើថោកទាប ព្រមទាំងធ្វើទណ្ឌកម្ម ឡើយ។

មាត្រា៦: សិទ្ធិអោយគេទទួលស្គាល់ខ្លួនក្នុងឋានៈជាមនុស្ស

មនុស្សម្នាក់ៗមានសិទ្ធិត្រូវគេទទួលស្គាល់គ្រប់ទីកន្លែង(ក្នុងឋានៈជាមនុស្ស) ចំពោះមុខច្បាប់។

មាត្រា៧: សិទ្ធិស្មើគ្នាចំពោះមុខច្បាប់

មនុស្សទាំងអស់ មានសិទ្ធិស្មើគ្នាចំពោះមុខច្បាប់ និង គ្មានការប្រកាន់ចំពោះការការពារស្មើភាពគ្នានៃច្បាប់។ គេមានសិទ្ធិការពារខ្លួនស្មើគ្នាប្រឆាំងនឹងការប្រកាន់ ក្នុងការបំពានផ្សេងៗ លើសេចក្តីប្រកាស នេះ ព្រមទាំងប្រឆាំងនូវដីកាបណ្តោះអាសន្នផ្សេងៗនឹងការប្រកាន់នេះ។

មាត្រា៨: សិទ្ធិសុំអោយច្បាប់ការពារខ្លួន

មនុស្សម្នាក់ៗ មានសិទ្ធិដោះស្រាយដោយប្រសិទ្ធិភាព នៅតាមសាលាក្តីជាតិ មានសមត្ថភាព ចំពោះអំពើបំពាន ទៅលើគោលការណ៍សំខាន់ៗ នៃសិទ្ធិផ្តល់ជូនបុគ្គលនោះ ដោយធម្មនុញ្ញ ឬដោយច្បាប់។

មាត្រា៩: សិទ្ធិមានសេរីភាព

គ្មាននរណាម្នាក់ត្រូវឃាត់ខ្លួន,រំលោភសិទ្ធិ, ឃុំឃាំង ឬនិរទេសតាមអំពើចិត្តឡើយ។

មាត្រា១០: សិទ្ធិអោយមានការកាត់ក្តីត្រឹមត្រូវ

មនុស្សម្នាក់ៗ មានសមភាពគ្រប់គ្រាន់ធ្វើសាវនាការ ស្របច្បាប់ និងមិនលំអៀង ក្នុងការប្តេជ្ញាសិទ្ធិនិងកាតព្វកិច្ចរបស់ខ្លួន និងឧក្រិដ្ឋកម្មចោទប្រកាន់មកលើខ្លួន។

មាត្រា១១: សិទ្ធិទទួលការកាត់ទោសស្របច្បាប់

(១). មនុស្សម្នាក់ ដែលបានចោទពី បទព្រហ្មទណ្ឌ មានសិទ្ធិឆ្លើយ (ដោយសន្មតជាមុន)ថា មិនបានប្រព្រឹត្តដូចពាក្យគេចោទ ដរាបណាបានបង្ហាញភ័ស្តុតាងខុស(ជាប់ពិរុទ្ធ)យោងតាមច្បាប់ក្នុងការវិនិច្ឆ័យជាសាធារណៈ។ ក្នុងនោះ សាមីខ្លួនមានការធានាចាំបាច់ទាំងអស់សំរាប់ការពារខ្លួន។

(២). គ្មាននរណាម្នាក់ អាចជាប់ពិរុទ្ធអំពីបទព្រហ្មទណ្ឌ ព្រោះអំពើផ្សេងៗ និងលុបចោលនូវអ្វីដែលមិនមានលក្ខណៈជាបទព្រហ្មទណ្ឌក្រោមច្បាប់ជាតិ និងអន្តរជាតិ នៅពេលដែលចោទប្រកាន់នោះ។ គ្មាន

ការដាក់ទោសបញ្ញត្តិឯណា អោយធ្ងន់លើសពីអំពើដែលខ្លួនបានធ្វើ ក្នុងពេលប្រព្រឹត្តល្មើសបទព្រហ្មទណ្ឌនោះឡើយ។

មាត្រា១២: សិទ្ធិការពារជីវភាពឯកជនរបស់ខ្លួន

គ្មាននរណា អាចធ្វើអន្តរាគមតាមអំពើចិត្ត ចំពោះរឿង ឯកជន គ្រួសារ, ផ្ទះសម្បែង ឬ សំបុត្រស្នាម របស់បុគ្គលនោះ ទាំងមិនអាចរិះគៀនដល់កិត្តិយស និងកេរ្តិ៍ឈ្មោះរបស់គាត់ផង។ ជនម្នាក់ៗមានសិទ្ធិការពារខ្លួនក្នុងផ្លូវច្បាប់ ប្រឆាំងនឹងការធ្វើអន្តរាគមនិងរិះគៀនបែបនេះ។

មាត្រា១៣: សិទ្ធិធ្វើដំណើរទៅមកដោយសេរី

(១). មនុស្សម្នាក់ៗមានសិទ្ធិប្តូរផ្លាស់និងតាំងទីលំនៅតាមសេចក្តីប្រាថ្នា ក្នុងប្រទេសនីមួយៗ(តែត្រូវមានការអនុញ្ញាតពីប្រទេសនោះ)។

(២). មនុស្សម្នាក់ៗ មានសិទ្ធិចាកចេញពីប្រទេសនានា រួមទាំងប្រទេសរបស់ខ្លួនផង និងអាចវិលត្រឡប់មកកាន់ប្រទេសរបស់ខ្លួនវិញ។

មាត្រា១៤: សិទ្ធិទៅសុំជ្រកកោន នៅប្រទេសដទៃ

(១). មនុស្សម្នាក់ៗមានសិទ្ធិស្វែងរក និងពេញចិត្តសុំជ្រកកោនក្នុងប្រទេសដទៃ អំពីការធ្វើទុក្ខបុកម្នេញ។

(២). សិទ្ធិនេះ មិនអាចយកមកប្រើ ក្នុងករណីដែលការធ្វើទុក្ខបុកម្នេញនោះ កើតឡើង មិនមែនមកអំពី ឧក្រិដ្ឋកម្មនយោបាយ ឬក៏សកម្មភាពទាំងឡាយ ផ្ទុយពីគោលបំណង និងគោលការណ៍នៃអង្គការសហប្រជាជាតិ។

មាត្រា១៥: សិទ្ធិមានសញ្ជាតិមួយ

(១). មនុស្សម្នាក់ៗមានសិទ្ធិប្តូរសញ្ជាតិនិងត្រូវតែមានសញ្ជាតិ។

(២). គ្មាននរណា អាចដកសញ្ជាតិរបស់គាត់ ឬ មិនអាចបដិសេធសិទ្ធិប្តូរសញ្ជាតិរបស់គាត់ តាមអំពើចិត្តបានឡើយ។

មាត្រា១៦: សិទ្ធិរៀបចំគូស្រករ និងមានគ្រួសារ

(១). បុរសនិងស្រីមានអាយុពេញវ័យ គ្មានការដាក់កំរិតដោយពូជសាសន៍ សញ្ជាតិ ឬ សាសនា ឡើយ។ គេមានសិទ្ធិរៀបការ និងស្ថាបនាគ្រួសារ ។ គេមានសិទ្ធិស្មើគ្នា នៅមុនពេលរៀបការ ក្នុងពេលកំពុងរៀបការ និងការលែងលះគ្នា។

(២). អាពាហ៍ពិពាហ៍ត្រូវតែមានការព្រមព្រៀងដោយសេរី និងត្រឹមត្រូវពីអនាគតស្វាមី-ភរិយា។

(៣). គ្រួសារ គឺជាក្រុមឯកភាពធម្មជាតិ និងជាមូលដ្ឋានសង្គម និងត្រូវការពារដោយសង្គម និងប្រទេស។

មាត្រា១៧: សិទ្ធិមានកម្មសិទ្ធិទ្រព្យសម្បត្តិ

(១). មនុស្សម្នាក់ៗ មានសិទ្ធិទទួលកម្មសិទ្ធិទ្រព្យសម្បត្តិផ្ទាល់តែឯង ក៏ដូចជាការចូលរួមជាមួយអ្នកដទៃដែរ។

(២). គ្មាននរណា អាចដកហូតយកទ្រព្យសម្បត្តិរបស់គេ តាមអំពើចិត្ត បានឡើយ។

មាត្រាទី១៨: សិទ្ធិមានជំនឿសាសនាដោយសេរី

មនុស្សម្នាក់ៗ មានសិទ្ធិ ក្នុងការត្រិះរិះពិចារណា ការមានមនៈ-

សិការៈ និងមានសាសនា។ សិទ្ធិនេះ រួមទាំងសេរីភាពប្តូរផ្លាស់សាសនា ឬជំនឿ និងសេរីភាពផ្ទាល់ខ្លួន ឬក្នុងសមាគមជាមួយអ្នកដទៃ និង ក្នុងសាធារណៈឬសួនតួ(ដាច់ពីគេ)។ បញ្ចេញអោយឃើញ(ឃោសនា)តាមរយៈសាសនាឬជំនឿរបស់គាត់ក្នុងការបង្រៀន ការអនុវត្តន៍ ធ្វើសក្ការៈបូជា និងការធ្វើបុណ្យទាន។

មាត្រា១៩: សិទ្ធិនិយាយស្តី និងបញ្ចេញមតិដោយសេរី

មនុស្សម្នាក់ៗ មានសិទ្ធិសេរីភាពបញ្ចេញមតិនិងយោបល់ដោយសេរី ។ សិទ្ធិនេះ រួមទាំង សេរីភាពប្រកាន់គំនិត គ្មានអន្តរាគមន៍ និងមានសិទ្ធិស្វែងរក ទទួល និងចែកចាយពត៌មាននិងគំនិតតាមរយៈគ្រឿងផ្សាយពត៌មាន ដោយមិនគិតអំពីព្រំដែន។

មាត្រា២០: សិទ្ធិរួមប្រជុំដោយសេរី

(១). មនុស្សម្នាក់ៗ មានសិទ្ធិសេរីភាពក្នុងការរួមប្រជុំនិងបង្កើតសមាគមដោយសន្តិភាព។

(២). គ្មាននរណាម្នាក់ត្រូវបង្ខិតបង្ខំអោយចូលជាសមាជិករបស់សមាគមណាមួយឡើយ។

មាត្រា២១: សិទ្ធិចូលរួមក្នុងសកម្មភាពនយោបាយ

(១). មនុស្សម្នាក់ៗ មានសិទ្ធិចូលរួមនៅក្នុងរដ្ឋាភិបាលរបស់ខ្លួនដោយផ្ទាល់ ឬតាមរយៈតំណាងជ្រើសរើសទាំងឡាយ ដោយសេរី។

(២). មនុស្សម្នាក់ៗមានសិទ្ធិបំរើស្មើគ្នាចំពោះហិតប្រយោជជន៍ជាសាធារណៈ ក្នុងប្រទេសរបស់ខ្លួន។

(៣). ឆន្ទៈពលរដ្ឋជាមូលដ្ឋាននៃអាជ្ញាធររដ្ឋាភិបាល។ ឆន្ទៈនេះនឹងបង្ហាញអោយឃើញនៅពេលបោះឆ្នោត ក្នុងកាលកំណត់និងត្រឹមត្រូវ ដែលជាការបោះឆ្នោតសាកលនិងស្មើភាព និង ធ្វើឡើងដោយការបោះ-ឆ្នោតសម្ងាត់ ឬដោយទម្រង់ការបោះឆ្នោតសេរី ស្មើភាព។

**មាត្រា២២: សិទ្ធិមានធានារ៉ាប់រងសង្គម**

មនុស្សម្នាក់ៗ ក្នុងឋានៈជាសមាជិកសង្គម មានសិទ្ធិការពារសន្តិសុខសង្គម និងមានការយល់ដឹងតាមរយៈឋាមពលជាតិ និងសហប្រតិ-បត្តិការអន្តរជាតិ និងយោងតាមអង្គការ និងធនធាននៃប្រទេសនីមួយៗ នៃសិទ្ធិចាំបាច់ ខាងសេដ្ឋកិច្ច សង្គមកិច្ចនិងវប្បធម៌ សំរាប់សេចក្តីថ្លៃថ្នូររបស់ខ្លួន និងការអភិវឌ្ឍន៍ដោយសេរី នៃបុគ្គលិកលក្ខណៈរបស់ខ្លួន។

**មាត្រា២៣: សិទ្ធិមានការងារធ្វើ**

(១). មនុស្សម្នាក់ៗ មានសិទ្ធិ ធ្វើការងារ ជ្រើសរើសការងារដោយសេរី ទទួលលក្ខខណ្ឌដែលល្អ និងអាចធ្វើបាន ព្រមទាំងប្រឆាំងនឹងការគ្មានការងារធ្វើ។

(២). មនុស្សម្នាក់ៗមានសិទ្ធិទទួលប្រាក់ខែស្មើនឹងការងារដោយគ្មានការប្រកាន់។

(៣). អ្នកធ្វើការ (និយោជិក) ម្នាក់ៗ មានសិទ្ធិទទួលសំណងដោយល្អ និងអាចធ្វើបានសំរាប់ខ្លួននិងគ្រួសារ នូវវត្តមានដែលសមនឹងសេចក្តីថ្លៃថ្នូររបស់មនុស្ស និងអ្វីៗដែលបង្រប់ បើត្រូវការចាំបាច់ក្នុងន័យ

ផ្សេងៗ នៃការការពារសង្គម។

(៤). មនុស្សម្នាក់ៗ មានសិទ្ធិ បង្កើត និង ចូលរួមធ្វើសហជីព ពាណិជ្ជកម្ម សំរាប់ការពារផលប្រយោជន៍របស់ខ្លួន។

**មាត្រា២៤: សិទ្ធិមានការឈប់សំរាក និងលំហែកាយ**

មនុស្សម្នាក់ៗ មានសិទ្ធិឈប់សំរាកនិងលំហែ រួមទាំងកំរិតម៉ោងធ្វើការសមរម្យនិងឈប់ថ្ងៃបុណ្យហើយ នៅតែទទួលប្រាក់ខែដូចធម្មតា។

**មាត្រា២៥: សិទ្ធិមានជីវភាពរស់នៅសមរម្យ**

(១). មនុស្សម្នាក់ៗមានសិទ្ធិរស់នៅក្នុងជីវភាពគ្រប់គ្រាន់ ដើម្បីសុខភាព និងសុខុមាលភាពផ្ទាល់ខ្លួន និងគ្រួសារ រួមទាំង ម្ហូបអាហារ សំលៀកបំពាក់ ផ្ទះសម្បែង និងថ្នាំសង្កូវសំរាប់ព្យាបាល ព្រមទាំងការបំរើសង្គមចាំបាច់ និងមានសិទ្ធិការពារសន្តិសុខ ក្នុងពេលគ្មានការងារធ្វើ ឈឺ, ពិការ, មេម៉ាយឬពោះម៉ាយ, ចាស់ជរា ឬខ្វះខាត ក្នុងការចិញ្ចឹមជីវិត ក្នុងកាលៈទេសៈហួសពីសមត្ថភាពគ្រប់គ្រងរបស់ខ្លួន។

(២). ភាពជាមាតា និងកុមារភាព ត្រូវមានការថែរក្សា និងកិច្ចសង្គ្រោះ(សង្គ្រហៈ)ពិសេស។ កុមារទាំងអស់ ទោះបីកើតនៅក្នុង ឬក្រៅពេលមានមាតាបិតាថែរក្សាក៏ដោយ ត្រូវបានសង្គមការពារដូចគ្នា។

**មាត្រា២៦: សិទ្ធិទទួលការអប់រំ**

(១). មនុស្សម្នាក់ៗត្រូវមានសិទ្ធិទទួលការអប់រំ។ ការសិក្សាត្រូវឥតបង់ថ្លៃ យ៉ាងហោចណាស់ នៅក្នុងបឋមសិក្សា និងមធ្យមសិក្សា។ បឋមសិក្សា ត្រូវតែរៀនខានពុំបាន។ បច្ចេកទេសនិងវិជ្ជាជីវៈសិក្សាត្រូវ

បង្កើតអោយមានជាធម្មតា និងឧត្តមសិក្សាត្រូវបើកបន្តពីសាលាទាប។។

(២). ការអប់រំ ត្រូវដឹកនាំទៅរកការអភិវឌ្ឍន៍ ពេញលេញ ក្នុងបុគ្គលិកលក្ខណៈមនុស្សនិងមូលដ្ឋានសេរីភាព។ ត្រូវបង្កើនការយល់ដឹងសន្តោស និងមិត្តភាពរវាងប្រជាជាតិ ពូជសាសន៍ និង ក្រុមសាសនាទាំងអស់។ ព្រមទាំងធ្វើអោយបានចំរើន នូវសកម្មភាពនៃអង្គការសហ-ប្រជាជាតិ សំរាប់ការថែទាំ និងសន្តិភាព។

(៣). មាតាបិតា មានសិទ្ធិមុនគេបង្អស់ ក្នុងការជ្រើសរើស នូវមុខវិជ្ជាសិក្សា ដែលនឹងត្រូវផ្តល់អោយកូនរបស់ខ្លួន។

**មាត្រា២៧: សិទ្ធិទទួលផលក្នុងជីវភាពវប្បធម៌និងរក្សាសិទ្ធិ**

(១). មនុស្សម្នាក់ៗមានសិទ្ធិសេរីភាពចូលរួមក្នុងជីវិតវប្បធម៌នៃសហគម។ សប្បាយរីករាយនឹងសិល្បៈ និងរួមចំណែកក្នុងការចំរើនលូតលាស់ ខាងវិទ្យាសាស្ត្រ និងអត្ថប្រយោជន៍របស់វិទ្យាសាស្ត្រ នោះផង។

(២). មនុស្សម្នាក់ៗ មានសិទ្ធិការពារប្រយោជន៍សីលធម៌ និងសម្ភារៈ កើតមកពីផលិផលខាងវិទ្យាសាស្ត្រ អក្សរសាស្ត្រ និង សិល្បៈដែលខ្លួនជាអ្នកនិពន្ធ។

**មាត្រាធិ២៨: សិទ្ធិអោយមានច្បាប់ការពារសិទ្ធិរបស់ខ្លួន**

មនុស្សម្នាក់ៗត្រូវមានសណ្តាប់ធ្នាប់សង្គមជាតិនិងអន្តរជាតិ ក្នុងនោះ មានសិទ្ធិនិងសេរីភាព ក្នុងសេចក្តីប្រកាសនេះ អាចត្រូវយល់ដឹងដោយគ្រប់គ្រាន់។

មាត្រា២៩: ភារកិច្ចចំពោះសហគមន៍និងគោរពសិទ្ធិអ្នកដទៃ

(១). មនុស្សម្នាក់ៗ មានករណីយកិច្ចចំពោះសហគមន៍ ក្នុងនោះមានតែការអភិវឌ្ឍន៍ ដោយសេរី និងពេញលក្ខណៈនៃបុគ្គលិកលក្ខណៈរបស់ខ្លួនទេ ដែលអាចសំរេចទៅបាន។

(២). ក្នុងការប្រើសិទ្ធិនិងសេរីភាពរបស់ខ្លួន មនុស្សម្នាក់ៗអាចមានកំណត់ ដូចមានចែងក្នុងច្បាប់តែម្យ៉ាង គឺដើម្បីគោលបំណងនៃសន្តិសុខ ទទួលស្គាល់និងគោរព ចំពោះសិទ្ធិនិងសេរីភាព នៃអ្នកដទៃ និងដើម្បីគោលបំណងនៃការរួមប្រជុំ ដែលគ្រាន់តែជាការតម្រូវ ខាងចរិយាធម៌ សណ្ដាប់ធ្នាប់សាធារណៈ និងសុខុមាលភាពទូទៅ ក្នុងសង្គមប្រជាធិបតេយ្យ។

(៣). សិទ្ធិនិងសេរីភាពទាំងអស់នេះ មិនអាចប្រើផ្ទុយនឹងគោលបំណងនិងគោលការណ៍ នៃអង្គការសហប្រជាជាតិឡើយ។

មាត្រា៣០: ភារកិច្ចការពារខ្លឹមសារនៃសេចក្ដីថ្លែងការណ៍នេះ

គ្មានអ្វីក្នុងសេចក្ដីប្រកាសនេះ អាចបកស្រាយ មានន័យកំហិតសំរាប់សិទ្ធិប្រទេស ក្រុម ឬ បុគ្គល ណា ដើម្បីទទួលខុសត្រូវនៅក្នុងសកម្មភាពណាមួយ ឬធ្វើសកម្មភាពណាមួយឆ្ពោះទៅរកការបំផ្លិចបំផ្លាញសិទ្ធិនិងសេរីភាពទាំងអស់ ដែលមានចែងក្នុងសេចក្ដីប្រកាសនេះ រួចមកហើយនោះទេ។

ចាប់តាំងពីមានសង្គ្រាមស៊ីវិល ឆ្នាំ១៩៧០មក ធ្វើអោយប្រទេសខ្មែរមានភាពវឹកវរ បាត់បង់ជីវិតមនុស្ស ជាង៣លាននាក់ ក្នុងរបបខ្មែរក្រហម បាត់បង់ទ្រព្យសម្បត្តិជាតិនិងឯកជន អស់ធនធានមនុស្ស អស់សីលធម៌អប់រំខ្លួន និងសង្គមតាមបែបព្រះពុទ្ធសាសនា លែងគោរពសិទ្ធិមនុស្សជាតិ និងស្ទើរតែបាត់ឈ្មោះពីផែនទីពិភពលោកផង។ ដើម្បីដោះស្រាយបញ្ហាទាល់ច្រកក្នុងរឿងខ្មែរ និងដើម្បីស្រោចស្រង់ជីវិតខ្មែរអោយមានឈ្មោះនិងរស់ឡើងវិញ ទើបប្រទេសមហាអំណាចទាំង៥ (អាមេរិក, សហភាពសូវៀត, ចិន, អង់គ្លេសនិងបារាំង) រួមទាំងជប៉ុន និងប្រទេសនានាក្នុងពិភពលោក បានបង្កើតអោយមានការបោះឆ្នោតជាសាកល ត្រឹមត្រូវ និងយុត្តិធម៌មួយ ចំណាយប្រាក់អស់ជិត២កោដិដុល្លារ៍អាមេរិកាំងក្រោមការត្រួតពិនិត្យនៃអង្គការសហប្រជាជាតិ នៅឆ្នាំ១៩៩៣។

ក្នុងការគោរពតាមខ្លឹមសារនៃសេចក្តីថ្លែងការណ៍ជាសាកលស្តីពីសិទ្ធិមនុស្ស នៅថ្ងៃទី១០ ធ្នូ ១៩៤៨ ប្រទេសកម្ពុជាបានចុះហត្ថលេខាចូលជាភាគីនៃកតិកសញ្ញា និងអនុសញ្ញាអន្តរជាតិ ជាច្រើន មុនពេលបោះឆ្នោត ដូចជាៈ

នៅថ្ងៃទី២០ មេសា ១៩៩២ ៈចុះហត្ថលេខាស្តីពីសិទ្ធិពលរដ្ឋនិងនយោបាយ យ៉ាងតិច៥៦ប្រការ និងស្តីពីសិទ្ធិសេដ្ឋកិច្ច សង្គមកិច្ច និងវប្បធម៌ យ៉ាងតិច១៥ប្រការ។

នៅថ្ងៃទី២២ កញ្ញា ១៩៩២ ៈចុះហត្ថលេខាស្តីពីសិទ្ធិនារី យ៉ាង

តិច៦ប្រការ និងសិទ្ធិកុមារ យ៉ាងតិច១០ប្រការ ។ល។

រៀងរាល់ឆ្នាំ នៅថ្ងៃ១០ ធ្នូ មនុស្សលោកនាំគ្នារំលឹកបុណ្យសិទ្ធិមនុស្ស ដែលជាទិវាអន្តរជាតិ ដើម្បីបង្កើននូវការគោរពសិទ្ធិមនុស្សជាតិអោយរឹតតែប្រសើរឡើង។ គ្រប់ស្ថាប័នរដ្ឋ សាសនា អប់រំ និង សហគ្រាសឯកជននានា បុគ្គលិករាជការ បុគ្គលិកសិក្សា ព្រះសង្ឃ កម្មករ សិស្ស និស្សិត ត្រូវឈប់សំរាក១ថ្ងៃដើម្បីសិក្សាផ្សព្វផ្សាយអំពីអត្ថន័យ និងខ្លឹមសារនៃទិវាសិទ្ធិមនុស្សនេះ អោយបានយល់ច្បាស់គ្រប់ៗគ្នា។

បុគ្គលិករាជការ បុគ្គលិកសិក្សា សិស្ស និស្សិត សហគ្រិននិងកម្មករ អាចនិមន្តព្រះសង្ឃទៅធ្វើបុណ្យនៅក្នុងក្រសួងមន្ទីរនិងគ្រឹះស្ថានសិក្សាឬក៏ទៅចូលរួមជាមួយពុទ្ធបរិស័ទ នៅតាមវត្តអារាមនានា។ នៅពេលធ្វើបុណ្យនោះ យើងអាចនាំគ្នាសមាទានសីល៥ជាដើម ដាក់បាត្របង្សុកូលរំលឹកដល់វិញ្ញាណក្ខន្ធអ្នកដែលស្លាប់ទៅ ដោយអំពើឃោរឃៅអមនុស្សធម៌(ឬដោយសង្គ្រាមជាដើម) និងនិមន្តព្រះសង្ឃចំរើនព្រះបរិត្តព្រមទាំងសំដែងធម្មទេសនា ស្តីអំពីសិទ្ធិមនុស្ស ប្រៀបធៀបតាមបែបព្រះពុទ្ធសាសនា។ យើងអាចឃោសនាអប់រំសិទ្ធិមនុស្ស តាមរលកធាតុអាកាស(សម្លេងវិទ្យុ) ទូរទស្សន៍ កាសែត និងសៀវភៅបោះពុម្ពតូចៗ។

បើមនុស្សគ្រប់រូប គោរពសិទ្ធិមនុស្ស តាមសេចក្តីប្រកាសថ្លែងការណ៍ជាសាកល ស្តីពីសិទ្ធិមនុស្ស ចុះថ្ងៃទី១០ ធ្នូ ១៩៤៨ មិនកាប់

សម្លាប់ ឬរំលោភជិះជាន់អ្នកដទៃ នោះសុខសន្តិភាពពិតប្រាកដនឹងកើតមានដល់បុគ្គលគ្រប់រូប ដល់សង្គម ដល់ប្រទេសជាតិនីមួយៗ និងដល់ពិភពលោកទាំងមូល ពុំខានឡើយ។



# ១០. ខែ បុស្ស (មករា )

## រំលឹកដល់

- ថ្ងៃព្រះពុទ្ធឧតកោះលង្កា និងប្រតិស្ឋានព្រះពុទ្ធសាសនាថេរវាទ នៅទីនោះ។
- បុណ្យបង្កក់លាន។
- បុណ្យបញ្ចុះសីមា និង រៀបមង្គលការ។

◉ តាមប្រភពប្រទេសស្រីលង្កា បានអោយដឹងថា ក្នុងសម័យពុទ្ធកាល ព្រះពុទ្ធបានមកកោះលង្កា និង ប្រតិស្ឋានពុទ្ធសាសនាថេរវាទជាលើកដំបូង ក្នុងខែបុស្ស នៅលើកោះនេះ។ ទោះបីព្រឹត្តការណ៍ប្រវត្តិសាស្ត្រមិនបានបញ្ជាក់ច្បាស់លាស់ក៏ដោយ ក៏រឿងពិតបានបង្ហាញអោយឃើញច្បាស់ថា កោះនេះបានទទួលការអប់រំខាងព្រះពុទ្ធសាសនាថេរវាទមុនគេបង្អស់ ដោយបានផ្ដល់ការចេះដឹងនិងសាបព្រោះនូវព្រះធម៌។

នៅខែបុស្សនេះ ខ្មែរយើងនិយមប្រារព្ធពិធីបុណ្យផ្សេងៗ ដូចជា៖

◉ បុណ្យបន្ដក់លាន :កសិករខ្មែរយើង តែងទទួលផលចុងឆ្នាំនៅខែបុស្សនេះ ដូចជា ការបោកបែន បញ្ជាន់ និង ប្រមូលផលស្រូវដាក់ក្នុងជង្រុក។ ពិធីបុណ្យ គេច្រើននិមន្ដលោកមកឆាន់ត្រង់មួយពេលដើម្បីអបអរសាទរចំពោះធញ្ញផលដែលគេទើបបានទទួលថ្មីៗនោះផងនិងគេយល់ថា បើបានរបស់អ្វីថ្មីៗឬស្រស់ៗ ត្រូវនឹកដល់ព្រះសង្ឃ ដែលជាអ្នកមានសីល ឬក៏មាតាបិតា ដែលជាអ្នកមានគុណ នោះ ជាមុនផង។ ជួនកាល គេបានទាំងប្រគេនស្រូវថ្មីទាំងបាវៗ សំរាប់ដាក់វត្តទៀតផង។

◉ ក្រៅពីនេះ ខ្មែរយើងតែងនិយម រៀបអាពាហ៍ពិពាហ៍ កូនចៅ (អានទំព័រទី៦៤០) និង ធ្វើ បុណ្យបញ្ចុះសីមា (អានទំព័រទី៥២៩) នៅខែបុស្សនេះ។ ជាពិសេស ខ្មែរយើងទាំងក្មេង ទាំងចាស់ តែងមានទំលាប់បង្ហោះខ្លែងធម្មតាឬខ្លែងឯក លេងកំសាន្តតាមជំនោរខ្យល់ យ៉ាងរីករាយ។

# ១១. ខែ មាឃ (កុម្ភៈ)

## រំលឹកដល់

- **បុណ្យមាឃបូជា** (ចតុរង្គសន្និបាត ដែលព្រះពុទ្ធទ្រង់បានសំដែងឱ្វាទបាតិមោក្ខ ដល់ព្រះអរហន្ត១២៥០អង្គ និងបានប្រទាននូវព្រះឋានៈអគ្គសាវ័កដល់ព្រះសារីបុត្រ និងព្រះមោគ្គល្លាន)
- **ព្រះពុទ្ធទ្រង់ដាក់អាយុសង្ខារ**

# • បុណ្យមាឃបូជា (ចតុរង្គសន្និបាត)



នៅថ្ងៃទី ១៥កើត ពេញបូរមី ខែមាឃ ឆ្នាំរកា ក្រោយពីពេល ព្រះបាទពិម្ពិសារថ្វាយអារាមវេឡុវ័ន ដល់ព្រះដ៏មានព្រះភាគរួចហើយថ្មីៗ និងក្រោយពេលព្រះពុទ្ធត្រាស់ដឹងបាន៩ខែ ព្រះអង្គទ្រង់ប្រជុំសាវកដើម្បី បើកមហាសាវកសន្និបាត ឬចតុរង្គសន្និបាត នៅក្នុងអារាមវេឡុវ័ន នេះ ដោយមានព្រះអរហន្តសាវ័កចំនួន១២៥០អង្គ ចូលមកប្រជុំ។

ក្នុងគ្រានោះឯង ព្រះមានព្រះភាគទ្រង់តែងតាំង ព្រះសារីបុត្ត ជា អគ្គសាវ័កស្តាំ ឬជាឯតទគ្គខាងប្រាជ្ញា និង ព្រះមោគ្គល្លាន ជាអគ្គសាវ័ក ឆ្វេង ឬជា ឯតទគ្គខាងឫទ្ធិ។ ការតែងតាំងព្រះអគ្គសាវ័កទាំងពីរអង្គនេះ គឺជាឧបនិស្ស័យនិងគុណសម្បត្តិរបស់ព្រះថេរទាំងពីរព្រះអង្គផ្ទាល់តែម្តង។ ព្រះសារីបុត្រ ជាអ្នកមានប្រាជ្ញាដ៏ឆ្នើម អាចសំដែងធម៌បានយ៉ាងពិស្តារ ដូចជា ធម្មចក្កប្បវត្តនសូត្រ និងអរិយសច្ច ជាដើម ព្រមទាំងអាចណែ នាំបរិស័ទអោយតាំងមាំក្នុងមគ្គផល ជាលើកដំបូង ក្នុងព្រះពុទ្ធសាសនា ទៀតផង។ រីឯ ព្រះមោគ្គល្លានវិញ ជាអ្នកមានឫទ្ធិដ៏ឆ្នើមអាចធ្វើអ្វីៗបាន គ្រប់យ៉ាង ព្រមទាំងអាចញុំាងត្រកូល ដែលមិនទាន់ជ្រះថ្លា ក្នុងព្រះពុទ្ធ សាសនា អោយជ្រះថ្លាបាន និងអាចញុំាងត្រកូលដែលជ្រះថ្លារួចហើយ អោយរឹងរិតតែជ្រះថ្លាឡើងថែមទៀត។ លោកមិនដែលធ្វើអោយខូចដល់ ត្រកូល ដែលលោកចូលទៅអាស្រ័យនោះឡើយ ប្រៀបដូចជាឃ្មុំ ដែល ចូលទៅក្រេបលំអងអំពីផ្កា តែមិនធ្វើអោយផ្កានោះ ខូចស្រពោនឡើយ។ លោកក៏អាចណែនាំបរិស័ទ អោយតាំងនៅក្នុងមគ្គផល បានទៀតផង។

ព្រះសារីបុត្តជាអគ្គសាវ័កមែន ប៉ុន្តែ លោកមានសេចក្ដីគោរពកោតក្រែងចំពោះមហាថេរភិក្ខុ ដែលមានព្រះជន្មចាស់ជាងលោកនោះជានិច្ច។ ជាពិសេស ចំពោះព្រះអស្សជិត្ថេរ ដែលព្រះអង្គបានបង្ហាញធម៌ដល់លោកជាលើកដំបូងនោះណាស់។ បើព្រះសារីបុត្រដឹងថាព្រះអស្សជិត្ថេរគង់នៅទិសណា លោកតែងសិងយកព្រះកេស តម្រង់រកទិសនោះជានិច្ច ដើម្បីគោរពដឹងគុណចំពោះគ្រូបាធ្យាយរបស់លោក។

ការប្រជុំធ្វើមហាសាវ័កសន្និបាត ឬចតុរង្គសន្និបាត នេះ ដើម្បីសំដែងនូវ ឱវាទបាតិមោក្ខ និង ប្រទាននូវ ព្រះឋានៈអគ្គសាវ័ក ដល់ព្រះសារីបុត្ត និង ព្រះមោគ្គល្លាន នេះឯង។ ចតុរង្គសន្និបាតនេះ មានតែម្ដងគត់ ក្នុងសម័យពុទ្ធកាល ពីព្រោះព្រះពុទ្ធទ្រង់មានព្រះជន្មតិច និងប្រកបដោយអង្គ៤យ៉ាងគឺៈ

(១). ប្រជុំនៅថ្ងៃពេញបូរមី ជាថ្ងៃឧបោសថ ប្រកបដោយផ្កាយនក្ខត្តប្ញក្ស ប្រចាំខែមាឃ។

(២). មានព្រះភិក្ខុសង្ឃទាំង១២៥០អង្គ និមន្តមកប្រជុំដោយខ្លួនឯង តាមធម្មតារបស់ខ្លួន ឥតមានអ្នកណានិមន្តមកឡើយ។

(៣). ព្រះភិក្ខុសង្ឃទាំង១២៥០អង្គ សូម្បីមានឋានៈត្រឹមតែ ជាបុថុជ្ជន ឬសោតាបន្នបុគ្គល ជាសកទាគាមី ជាអនាគាមី ឬ ជាអរហន្តគ្រាន់តែស្ងួតកិលេស(សុក្ខវិបស្សក)ក៏គ្មានឡើយ គឺសុទ្ធតែជាព្រះអរហន្តបានអភិញ្ញា៦ គ្រប់រូបទាំងអស់។

(៤). ព្រះភិក្ខុសង្ឃទាំង១២៥០អង្គ គ្មានភិក្ខុណាមួយ កោរសក់ដោយកាំបិត ហើយបួសទេ គឺសុទ្ធតែជា ឯហិភិក្ខុ(ភិក្ខុបួសផ្ទាល់ជាមួយព្រះពុទ្ធ) ទាំងអស់។

ក្នុងគ្រានោះឯង ព្រះបរមសាស្តាក៏ទ្រង់សំដែង និវាទបាតិមោក្ខមាន សព្វបាបស្សអករណំ គឺការមិនធ្វើបាបគ្រប់យ៉ាង ជាដើម។

ព្រះសម្ពុទ្ធទ្រង់បានសំដែងព្រះធម្មទេសនាដោយសង្ខេបនូវគោលការណ៍សំខាន់ ៣យ៉ាងគឺៈ (១). មិនធ្វើបាប (២). ធ្វើតែបុណ្យ និង (៣). ធ្វើចិត្តអោយបរិសុទ្ធ។

គោលការណ៍ទាំង៣យ៉ាងនេះ គឺជាគ្រឹះនៅក្នុងលទ្ធិពុទ្ធសាសនា។

បុណ្យមាឃបូជាក៏មានសារៈសំខាន់ នៅក្នុងរឿងម្យ៉ាងទៀតដែរ។ នៅក្នុងឆ្នាំ ដែលព្រះសម្ពុទ្ធបរិនិព្វាន គឺប្រហែលជា៣ខែមុនព្រះអង្គទ្រង់បរិនិព្វាន ព្រះពុទ្ធទ្រង់បានកំណត់ថ្ងៃ ដាក់អាយុសង្ខារ និងប្រកាសប្រាប់ដល់សាវកទាំងឡាយរបស់ព្រះអង្គ។ ឧប្បត្តិហេតុនេះឈ្មោះថា ការប្រានបោលចំពោះខន្ធនៃជីវិត និង បានកើតឡើង នៅថ្ងៃពេញបូរមី ខែមាឃនេះដែរ។ ហេតុការណ៍នេះ បន្ថែមអោយកាន់តែច្បាស់ថែមទៀតចំពោះបុណ្យមាឃបូជា និងធ្វើអោយពុទ្ធបរិស័ទ កាន់តែមានជំនឿខ្លាំងឡើង។

នៅថ្ងៃបុណ្យមាឃបូជា ក្នុងពេលល្ងាច ពុទ្ធបរិស័ទនាំគ្នាចូលទៅកាន់ទីវត្ត សមាទានសីល៥ឬ៨ (អានទំព័រទី២២,២៤) សូត្រមាឃបូជា (អានទំព័រទី៨៤) និមន្តព្រះសង្ឃចំរើនព្រះបរិត្ត(អានទំព័រទី៣១,៣២)និង

អាវាធនាធម្មកថិកមួយអង្គសំដែងធម៌ទេសនា(អានទំព័រទី៨០)។

លុះដល់ស្អែកឡើង ពុទ្ធបរិស័ទចូលទៅកាន់ទីវត្តម្តងទៀត នាំគ្នាប្រគេនយាគូព្រះសង្ឃនៅពេលព្រឹក និងវេរភត្ត នៅពេលថ្ងៃត្រង់ ព្រមទាំងនាំគ្នាវេរគ្រឿងសក្ការមាឃបូជា (អានទំព័រទី៨១) និងប្រកាសមាឃបូជាផង(អានទំព័រទី៨៣)។ ក្រៅពីនេះពុទ្ធបរិស័ទច្រើននាំគ្នាតាំងសមាធិឬចូលរួមធ្វើសកម្មភាពជាបុណ្យកុសលផ្សេងៗ ដូចជានាំគ្នាដើរប្រទក្សិណព្រះពុទ្ធបដិមាករ ក្នុងព្រះវិហារ ចំនួន៣ជុំ ដើម្បីបង្ហាញនូវកាយវិការដ៏ស្មោះត្រង់ និងគោរពយ៉ាងខ្ពង់ខ្ពស់បំផុត ក្នុងព្រះរតនត្រៃ។

# ព្រះពុទ្ធទ្រង់ដាក់អាយុសង្ខារ

ព្រះសម្ពុទ្ធនិងភិក្ខុទាំងឡាយកំពុងគង់នៅ វេឡុវគ្រាម ទៀបក្រុងវេសាលី ។ លុះព្រឹកស្អែកឡើង ទើបព្រះដ៏មានព្រះភាគទ្រង់ស្បង់ជាត្រនិងចីវរ យាងចេញទៅបិណ្ឌបាត ក្នុងក្រុងវេសាលីនោះ។

ពេលយាងត្រឡប់មកវិញ នៅវេលាក្រោយភត្ត ព្រះសម្ពុទ្ធទ្រង់ត្រាស់នឹងព្រះអានន្ទថា៖ "ម្នាលអានន្ទ! ចូរអ្នកកាន់យក និសីទនៈ (ព្រះធម្មខណ្ឌ) ទៅ។ ក្នុងវេលារសៀលនេះ យើងនឹងចូលទៅសំរាក នៅឯបាវាលចេតិយ ។"

ព្រះអានន្ទទទួលព្រះបន្ទូលថា៖ "ព្រះករុណាព្រះអង្គ!" រួចហើយក៏កាន់នូវ និសីទនៈ និមន្តតាមពីក្រោយព្រះដ៏មានព្រះភាគ ចេញទៅ។

ពេលព្រះអង្គចូលដល់ ចាបាលចេតិយ ព្រះសម្ពុទ្ធទ្រង់ត្រាស់នឹងព្រះអានន្ទដែលកំពុងអង្គុយ ក្នុងទីដ៏សមគួរជិតនោះថា៖ "ម្នាលអានន្ទ! ក្រុងវេសាលី ជាទីគួរត្រេកអរ ឧទេនចេតិយ ជាទីគួរត្រេកអរ គោតមចេតិយ ជាទីគួរត្រេកអរ សត្តម្ពចេតិយ ជាទីគួរត្រេកអរ និង ចាបាលចេតិយនេះ ក៏ជាទីគួរត្រេកអរ។ ម្នាលអានន្ទ! ឥទ្ធិបាទ៤ បើបុគ្គលណាមួយ បានចំរើនហើយ បានធ្វើរឿយៗហើយ បានធ្វើអោយដូចជាយានហើយ បានធ្វើអោយជាទីរស់នៅហើយ បានតាំងទុកជារឿយៗហើយ

បានសន្សំទុកហើយ បានប្រារព្ធដោយល្អហើយ បុគ្គលនោះបើប្រាថ្នាចង់មានជីវិតរស់នៅ ក៏នឹងអាចរស់នៅរហូតទៅដល់មួយអាយុកប្ប(១អាយុកប្បកំណត់១០០ឆ្នាំ) ឬលើសជាងមួយអាយុកប្ប ក៏បាន។"

ទោះបីជាព្រះមានព្រះភាគទ្រង់បានធ្វើនិមិត្តនិងឱភាសជាឧឡារិក (ប្រលយពាក្យ) យ៉ាងនេះក៏ដោយ ក៏ព្រះអានន្ទមិនអាចនឹងយល់សេចក្តីរបស់ព្រះពុទ្ធបានដែរ។ ព្រះអានន្ទមិនបានអារាធនាព្រះពុទ្ធអោយព្រះអង្គគង់នៅបានដល់មួយអាយុកប្ប ឬក៏ជាងមួយអាយុកប្ប ដើម្បីជាប្រយោជន៍ ដើម្បីសេចក្តីសុខ ដើម្បីអនុគ្រោះដល់ជនដ៏ច្រើន ដល់សត្វលោក ដល់ទេវតានិងមនុស្សទេ ព្រោះតែមានមារ ចូលមកជ្រែកគំនិតព្រះអង្គ។ ព្រះសាស្តាទ្រង់មានព្រះបន្ទូលនឹងព្រះអានន្ទ នូវពាក្យដដែលនេះជាគំរប់ ២ដងផង ជាគំរប់៣ដងផង ក៏ព្រះអានន្ទនៅតែមិនចាប់ភ្លឹកដែរ។

ព្រះពុទ្ធទ្រង់យល់អំពីព្រះអានន្ទ ទើបទ្រង់ត្រាស់ថា៖ "ម្នាលអានន្ទ ឥឡូវនេះអ្នកទៅណាក៏ទៅចុះ តែចូរដឹងនូវកាលដែលគួរនឹងទៅនោះណា!

ព្រះអានន្ទទទួលបន្ទូលថា៖ "ព្រះករុណាព្រះអង្គ!" រួចហើយក៏ក្រោកចេញអំពីអាសនៈ ទៅអង្គុយទៀបនឹងគល់ឈើមួយ ដែលនៅមិនឆ្ងាយប៉ុន្មានអំពីព្រះពុទ្ធ។

កាលបើព្រះអានន្ទ ចេញផុតទៅមិនយូរប៉ុន្មាន ស្រាប់តែក្រុងមារមានចិត្តបាបចូលមកអារាធនាព្រះសម្ពុទ្ធ ដោយវាចាថា៖ "បពិត្រព្រះអង្គដ៏ចំរើន! សូមព្រះដ៏មានព្រះភាគយាងចូលបរិនិព្វាន ក្នុងពេលឥឡូវនេះ

ភ្នាមទៅ នេះជាកាលគួរនឹងបរិនិព្វានរបស់ព្រះដ៏មានព្រះភាគហើយ!"

ព្រះសម្ពុទ្ធទ្រង់ឆ្លើយតបនឹងក្រុងមារថា៖ "ម្នាលមារមានចិត្តបាប! ដរាបណា ពួកភិក្ខុជាសាវក ពួកភិក្ខុនីជាសាវិកា ពួកឧបាសកជាសាវក និង ពួកឧបាសិកាជាសាវិកា របស់តថាគត មិនទាន់ឈ្លាសវៃ ក្លៀវក្លា ជាពហុស្សូត ទ្រទ្រង់ធម៌ ប្រតិបត្តិធម៌ សមគួរដល់ធម៌ ប្រតិបត្តិធម៌ដ៏គួរសម ប្រព្រឹត្តតាមធម៌ ទាំងមិនទាន់បានរៀននូវវាទៈ នៃអាចារ្យរបស់ខ្លួន និង មិនទាន់បានប្រាប់ សំដែង បញ្ញត្ត តាំងទុក បើក ចែក ធ្វើអោយងាយបាន ទាំងមិនទាន់បានសង្កត់សង្កិន នូវបរប្បវាទ ដែលកើតឡើងនោះអោយទៅជាកិច្ចសង្កត់សង្កិនដោយល្អ តាមពាក្យសមហេតុនិងទាំងមិនទាន់សំដែងធម៌ប្រកបដោយបាដិហារ្យ ដរាបនោះ តថាគតក៏នឹងមិនទាន់បរិនិព្វានទេ។"

ក្រុងមារបានប្រលោមព្រះពុទ្ធថា៖ "បពិត្រព្រះអង្គដ៏ចំរើន! ឥឡូវនេះ ពួកភិក្ខុជាសាវក ពួកភិក្ខុនីជាសាវិកា ពួកឧបាសកជាសាវក និង ពួកឧបាសិកាជាសាវិការបស់ព្រះមានព្រះភាគ បានឈ្លាសវៃ បានក្លៀវក្លា បានជាពហុស្សូត បានទ្រទ្រង់ធម៌ បានប្រតិបត្តិធម៌ បានសមគួរដល់ធម៌ បានប្រតិបត្តិធម៌ដ៏សមគួរ បានប្រព្រឹត្តតាមធម៌ ទាំងបានរៀននូវវាទៈនៃអាចារ្យរបស់ខ្លួន និងទាំងបានប្រាប់ បានសំដែង បានបញ្ញត្ត បានតាំងទុក បានបើក បានចែក បានធ្វើអោយងាយ ទាំងបានសង្កត់សង្កិននូវបរប្បវាទ ដែលកើតឡើងហើយនោះ អោយទៅជាកិច្ច សង្កត់

សម្តិនដោយល្អតាមពាក្យសមហេតុនិងបានសំដែងធម៌ដែលប្រកបដោយបដិហារ្យ រួចហើយ។ សូមព្រះដ៏មានព្រះភាគបរិនិព្វាន ក្នុងគ្រាឥឡូវនេះភ្លាមទៅ នេះជាកាលដ៏ល្អ ដែលព្រះអង្គគួរបរិនិព្វានហើយ។"

ព្រះពុទ្ធទ្រង់ពិចារណានិងឆ្លើយតបក្រុងមារម្តងមួយៗថា៖ "នៃមារចិត្តបាប! ដរាបណា ពួកភិក្ខុជាសាវក........(ពោលដូចគាថាខាងលើ) ដរាបនោះ តថាគតនឹងមិនទាន់បរិនិព្វានឡើយ។"

ក្រុងមារបន្តប្រលោមព្រះពុទ្ធនូវពាក្យដដែល ម្តងទៀត។ ព្រះពុទ្ធទ្រង់ឆ្លើយតបថា៖ "នៃក្រុងមារចិត្តបាប! ដរាបណា ព្រហ្មចារ្យ(សាសនាដែលសង្គ្រោះដោយត្រៃសិក្ខា) របស់ព្រះតថាគត មិនទាន់ខ្ជាប់ខ្ជួន មិនទាន់ចំរើន មិនទាន់ផ្សាយចេញទៅគ្រប់ទិស គេមិនទាន់ដឹងច្រើនគ្នា មិនទាន់ពេញបរិបូណ៌ និង ដរាបណា ពួកទេវតា និងមនុស្ស មិនទាន់ចេះសំដែងបានដោយប្រពៃ ដរាបនោះ តថាគតនឹងមិនទាន់បរិនិព្វានទេ។"

ក្រុងមារក៏ទំទទូចអង្វរទៀតថា៖ "បពិត្រព្រះអង្គដ៏ចំរើន! ឥឡូវនេះព្រហ្មចារ្យរបស់ព្រះដ៏មានព្រះភាគ បានខ្ជាប់ខ្ជួនហើយ បានចំរើនហើយ បានផ្សាយទៅសព្វទិសហើយ បានគេដឹងច្រើនហើយ បានពេញបរិបូ-ណ៌ហើយ ពួកទេវតា និង មនុស្ស ក៏ចេះសំដែងបានដោយល្អហើយ។ បពិត្រព្រះអង្គដ៏ចំរើន! សូមព្រះដ៏មានព្រះភាគទ្រង់បរិនិព្វានទៅ។ ឥឡូវនេះ ជាកាលគួរនឹងបរិនិព្វានរបស់ព្រះដ៏មានព្រះភាគហើយ។"

កាលបើក្រុងមារក្រាបទូលយ៉ាងនោះហើយ ព្រះសម្ពុទ្ធទ្រង់ត្រាស់

ជាភាសិតមួយ ទៅកាន់ក្រុងមារវិញថា៖ "ម្នាលមារមានចិត្តបាប! ចូរអ្នកមានសេចក្តីខ្វល់ខ្វាយតិចចុះ ការបរិនិព្វានរបស់តថាគត នឹងមិននៅយូរប៉ុន្មានទេ កន្លង៣ខែ អំពីថ្ងៃនេះទៅ តថាគតនឹងបរិនិព្វានហើយ។

លំដាប់នោះ ព្រះពុទ្ធទ្រង់មានសតិសម្បជញ្ញៈនិងទ្រង់ ដាក់អាយុសង្ខារ នាឰដ៍ចាបាលចេតិយ នោះទៅ។ លុះព្រះសម្ពុទ្ធទ្រង់កំណត់អាយុសង្ខារ រួចហើយ ផែនដីក៏ចាប់កក្រើកកំរើកឡើងយ៉ាងខ្លាំង សម្លេងផ្គរក៏បានលាន់ឮឡើង ព្រមគ្នាដែរ។ ព្រះសមណគោតមទ្រង់ជ្រាបច្បាស់ នូវដំណើរនោះហើយ ក៏ទ្រង់បន្លឺនូវឧទានវាចាយ៉ាងនេះថា៖ "ព្រះពុទ្ធជាអ្នកប្រាជ្ញ ទ្រង់ពិចារណាឃើញនូវព្រះនិព្វាន ដែលជាគុណថ្លឹងមិនបានផង និងនូវភពផង។ ទ្រង់បានលះបង់អស់នូវសង្ខារ ដែលនាំសត្វលោក ទៅកាន់ភពផង ទ្រង់ត្រេកអរនូវអារម្មណ៍ខាងក្នុង(ដោយអំណាចវិបស្សនា)ផង ទ្រង់មានព្រះហឫទ័យតាំងមាំ(ដោយអំណាចសមថៈ)ផង ទ្រង់បានទម្លាយនូវបណ្តាញគឺកិលេសកើតមានឡើងក្នុងខ្លួនដូចជាក្រោះនោះផង"។

លំដាប់នោះ ព្រះអានន្ទក៏ចាប់អារម្មណ៍ នូវហេតុដ៏អស្ចារ្យនៃការរញ្ជួយផែនដី។ ព្រះអង្គពិចារណាថា៖ "តើហេតុអ្វីហ្ន៎ក៏ចម្លែកអាស្ចារ្យម្ល៉េះ! ផែនដីអីក៏កក្រើកខ្លាំងមានសម្លេងផ្គរផងយ៉ាងដូច្នេះ! គួរអោយព្រឺសម្បុរព្រឺរោមណាស់ ប្រហែលជាមានហេតុបច្ច័យអ្វីបានកើតឡើងហើយមើលទៅ!" ព្រះអានន្ទក៏ស្ទុះស្ទារត់ទៅរកព្រះសមណគោតម ទាំងដកដង្ហើមដង្ហឹតដង្ហក់។ កាលព្រះអង្គបានឃើញព្រះសាស្តា ទ្រង់កំពុងគង់ស្ងៀម

ព្រះអានន្ទក៏បង្គំទូលសួរថា៖ "បពិត្រព្រះអង្គដ៏ចំរើន! តើមានហេតុបច្ច័យអ្វីដែរ ដែលនាំអោយកើតមានការរញ្ជួយផែនដីដ៏ធំសម្បើម គួរអោយព្រឺព្រួច តក់ស្លុត យ៉ាងនេះ?"

ព្រះសម្ពុទ្ធទ្រង់ទតចំព្រះភ័ក្ត្រព្រះអានន្ទ ហើយទ្រង់ព្រះតម្រាស់ថា "ហេតុបច្ច័យ ដែលនាំអោយរញ្ជួយកក្រើកនូវផែនដីនេះ មាន៨យ៉ាងគឺ៖

(១). ពេលខ្យល់បក់ខ្លាំង ខ្យល់ធំនោះធ្វើអោយទឹកកក្រើកខ្លាំង ហើយទឹកនោះក៏ធ្វើអោយផែនដីកក្រើកឡើង (ព្រោះដីស្ថិតនៅលើផ្ទៃទឹក និងទឹកស្ថិតនៅលើខ្យល់ ហើយខ្យល់ស្ថិតនៅលើអាកាស)។

(២). ពេលសមណៈក្តី ព្រាហ្មណ៍ក្តី ដែលស្ទាត់ជំនាញខាងផ្លូវចិត្ត ឬទេវតាក្តីដែលមានអានុភាពធំ បានចំរើនបឋវីសញ្ញា អោយមានកម្លាំងតិច និងចំរើនអាបោសញ្ញា អោយមានកម្លាំងច្រើន សំដែងឫទ្ធិ។

(៣). ពេលមានព្រះពោធិសត្វទ្រង់យាងចុះអំពីឋានតុសិត មកកាន់ព្រះមាតុឧទរ (ចាប់កំណើតក្នុងផ្ទៃនៃមាតាណាមួយ)។

(៤). ពេលមានព្រះពោធិសត្វទ្រង់ប្រសូត ចាកព្រះមាតុឧទរ។

(៥). ពេលព្រះពុទ្ធត្រាស់ដឹង នូវអនុត្តរសម្មាសម្ពោធិញ្ញាណ។

(៦). ពេលព្រះពុទ្ធទ្រង់ញ៉ាំងអនុត្តរធម្មចក្រ អោយប្រព្រឹត្តទៅ។

(៧). ពេលព្រះពុទ្ធទ្រង់ដាក់ព្រះអាយុសង្ខារ។

(៨). ពេលព្រះពុទ្ធបរិនិព្វាន ដោយអនុបាទិសេសនិព្វានធាតុ។

ព្រះសម្ពុទ្ធទ្រង់ត្រាស់ប្រាប់ព្រះអានន្ទ អោយបានដឹងអំពីបរិស័ទ

ទាំង៨ពួកគឺៈ ខត្តិយបរិស័ទ១, ព្រាហ្មណ៍បរិស័ទ១, គហបតីបរិស័ទ១, សមណបរិស័ទ១, ចាតុម្មហារាជិកបរិស័ទ១, តាវត្តិង្សបរិស័ទ១, មារបរិស័ទ១ និងព្រហ្មបរិស័ទ១ ថាព្រះអង្គទ្រង់ស្គាល់បរិស័ទទាំង៨ពួកនោះច្បាស់លាស់ណាស់។ ព្រះអង្គធ្លាប់អង្គុយលេងជាមួយផង ធ្លាប់ចរចាជាមួយផង ធ្លាប់ចូលទៅសាកច្ឆាជាមួយផង។ សម្បុរនៃបរិស័ទ ទាំង៨ពួកនោះជាយ៉ាងណា សម្បុររបស់ព្រះអង្គក៏យ៉ាងនោះដែរ។ សម្លេងបរិស័ទទាំង៨ពួកនោះយ៉ាងណា សម្លេងរបស់ព្រះអង្គក៏យ៉ាងនោះដែរ។ ពេលព្រះអង្គកំពុងញុំាងបរិស័ទទាំង៨ពួកនោះអោយឃើញច្បាស់ និងកាន់យកដោយរីករាយនូវធម្មីកថា បរិស័ទទាំងនោះ មិនស្គាល់ព្រះអង្គ ថាជាអ្នកណាទេ ជា មនុស្ស ឬក៏ជា ទេវតា?។

បន្ទាប់មក ព្រះដ៏មានព្រះភាគ ទ្រង់លើកយក វិមោក្ខ៨ (ធម៌ជាគ្រឿងរួចចាកអាសវៈ មកសំដែងប្រាប់ព្រះអានន្ទ...........និង ព្រះអង្គទ្រង់បានរំលឹកព្រះអានន្ទម្តងទៀត អំពីការដែលព្រះអង្គបានប្រលយ នូវពាក្យជាច្រើនដង ដើម្បីអោយព្រះអានន្ទអាចអារាធនាព្រះដ៏មានព្រះភាគទ្រង់រស់នៅបានដល់មួយអាយុកប្ប ឬ ក៏ច្រើនជាងមួយអាយុកប្ប ប៉ុន្តែព្រះអានន្ទនៅតែមិនជ្រាបសេចក្តីនោះទាល់តែសោះ។

ព្រះដ៏មានព្រះភាគបញ្ជាក់ប្រាប់ព្រះអានន្ទថា៖ "ម្នាលអានន្ទ! ថ្ងៃនេះ ក្រុងមារចិត្តបាបបានចូលមកក្នុង ចាបាលចេតិយ ហើយក៏អង្វរនូវពាក្យដដែលនេះ ទៀតហើយ! ម្នាលអានន្ទ! ថ្ងៃនេះ តថាគតមានសតិ

សម្បជញ្ញៈ បានដាក់អាយុសង្ខារ ក្នុងចាបាលចេតិយអម្បាញ់នេះឯង។"

កាលបើ ព្រះសម្ពុទ្ធទ្រង់ព្រះតម្រាស់យ៉ាងនេះហើយ ព្រះអានន្ទក៏ក្រាបបង្គំទូលនឹងព្រះអង្គ យ៉ាងនេះថា៖ "បពិត្រព្រះអង្គដ៏ចំរើន! សូមព្រះអង្គឋិតនៅអស់មួយអាយុកប្បទៅ ដើម្បីជាប្រយោជន៍ ដើម្បីសេចក្ដីសុខ ដើម្បីអនុគ្រោះដល់ជនដ៏ច្រើន ដល់សត្វលោក និងមនុស្សលោក និងដល់ទេវតា ជាដើម។"

ព្រះសម្ពុទ្ធទ្រង់ត្រាស់តបថា៖ "ម្នាលអានន្ទ! ឥឡូវនេះហួសហើយ កុំបីអ្នកមកអង្វរតថាគត ទៀតឡើយ។ ឥឡូវនេះ មិនមែនជាកាលដែលអ្នកគួរមកអារាធនាតថាគតទេ។"

ព្រះអានន្ទក៏សូត្រនូវពាក្យដែលខាងលើនេះ អង្វរព្រះសម្ពុទ្ធជាគំរប់២ដងផង ជាគំរប់៣ដងផង។

ព្រះដ៏មានព្រះភាគទ្រង់ត្រាស់ថា៖ "ម្នាលអានន្ទ! តើអ្នកជឿលើពោធិញ្ញាណ របស់តថាគតដែរឬទេ?"

ព្រះអានន្ទទូលថា៖ "បពិត្រព្រះអង្គដ៏ចំរើន! ខ្ញុំព្រះអង្គជឿហើយ!

ព្រះសម្ពុទ្ធទ្រង់ត្រាស់បន្តថា៖ "ម្នាលអានន្ទ! បើអ្នកជឿដែរ ចុះហេតុអ្វីក៏អ្នកនៅតែទទូចអង្វរតថាគត ដល់ទៅ៣ដង យ៉ាងនេះ។ បើអ្នកហាពោលអារាធនាដល់តថាគតវិញ មិនបាច់ពោលដល់ទៅ៣ដង យ៉ាងនេះទេ អស់ហើយតែមួយដង តថាគតទទួលបាត់ទៅហើយ!"

ព្រះអានន្ទបង្គំទូលថា៖ "បពិត្រព្រះអង្គដ៏ចំរើន! ព្រះពុទ្ធដីកានេះ

ខ្ញុំព្រះអង្គបានស្តាប់ ក្នុងទីចំពោះព្រះភ័ក្ត្រហើយ បានត្រងរងក្នុងទីចំពោះព្រះភ័ក្ត្រ រួចហើយ។"

ព្រះពុទ្ធទ្រង់ត្រាស់បន្តថា៖ "ម្នាលអានន្ទ! បើតថាគតប្រាថ្នានឹងឋិតនៅ តថាគតអាចឋិតនៅ អស់ពេលមួយអាយុកប្ប ឬក៏លើសពីមួយអាយុកប្ប ក៏បាន។ តើអ្នកជឿដែរឬទេ?"

ព្រះអានន្ទទូលថា៖"បពិត្រព្រះអង្គដ៏ចំរើន! ខ្ញុំព្រះអង្គជឿហើយ"

ព្រះសម្ពុទ្ធត្រាស់ថា៖ "ម្នាលអានន្ទ! បើអីញ្ចឹង នេះជាអំពើទាស់របស់អ្នកហើយ នេះជាកំហុសរបស់អ្នកហើយ ព្រោះអីតថាគតបានប្រលយពាក្យនេះ ជាច្រើនលើកច្រើនគ្រារួចមកហើយ ដើម្បីអោយអ្នកអារាធនាដល់តថាគត ប៉ុន្តែ អ្នកនៅតែមិនយល់ នូវសេចក្តីនេះ ច្បាស់លាស់បាន។ ម្នាលអានន្ទ! តថាគតបានប្រលយពាក្យ យ៉ាងនេះ ដល់អ្នកអស់ចំនួន១៦ដងរួចមកហើយ គឺ១០ដងនៅកន្លែងទាំងឡាយជិតក្រុងរាជគ្រឹះ និង៦ដងទៀត នៅកន្លែងទាំងឡាយ ជិតទីក្រុងវេសាលី នេះ។ ម្នាលអានន្ទ! ក្រែងតថាគតបានប្រាប់អ្នកពីមុនរួចមកហើយថា 'សេចក្តីព្រាត់ប្រាស់ សេចក្តីវិនាស សេចក្តីប្រែប្រួល ចាកសត្វនិងសង្ខារដែលជាទីស្រឡាញ់ពេញចិត្តនោះ តែងមានជាធម្មតា។ ម្នាលអានន្ទ! ព្រោះហេតុនោះបុគ្គលមិនមានសេចក្តីទៀងទាត់ទេ មិនដែលថាគ្មានការប្រាស់ព្រាត់ អំពីខន្ធទាំង៥បានទេ។ ធម្មជាតិណាកើតឡើងហើយ សង្ខារណាតាក់តែងឡើងហើយ តែងមានសេចក្តីវិនាសទៅជាធម្មតា។ បុគ្គលណា

នឹងពោលឃាត់ថាកុំអោយវិនាសដោយសារហេតុណាទីមួយ ពិតជាមិនបានសោះឡើយ។

ម្នាលអានន្ទ!ម្យ៉ាងវិញទៀត ធម្មជាតិឯណា ដែលតថាគតបានទាត់ចោលហើយ បានខ្ជាក់ចោលហើយ បានជម្រុះចោលហើយ បានលះបង់ចោលហើយ និង បានបន្សាត់ចោលហើយ អាយុសង្ខាររបស់តថាគត ក៏បានដាក់ចុះហើយ។

ម្នាលអានន្ទ! តថាគតនឹងពោលនូវវាចាពិតថា "បរិនិព្វានរបស់តថាគតមិននៅយូរឡើយ ក្នុងពីរខែអំពីថ្ងៃនេះទៅ តថាគតនឹងបរិនិព្វានហើយៗតថាគតក៏នឹងមិនត្រឡប់មកកាន់ធម្មជាតិនោះ (កើតឡើង) វិញទៀតទេ។"

# ១២. ខែ ផល្គុន (មិនា)

## រំលឹកដល់

- ព្រះពុទ្ធនិមន្តចូលជាតិភូមិ ប្រោស ពុទ្ធបិតា និងព្រះញាតិវង្សានុវង្ស



# ព្រះពុទ្ធនិវត្តន៍ចូលជាតិភូមិ
# ប្រោសពុទ្ធបិតា និងព្រះញាតិវង្សានុវង្ស

ពេលព្រះបាទសុទ្ធោទន៍បានជ្រាបថា ព្រះពុទ្ធកំពុងតែសំដែងធម៌នៅឯរាជគ្រឹះ ទើបព្រះអង្គបញ្ជូនអ្នកនាំសារ៩នាក់(ម្នាក់ម្តងៗ) ទៅយាងព្រះពុទ្ធមកកាន់ក្រុងកបិលពស្តុ។ ប៉ុន្តែអ្នកនាំសារទាំងនោះ បានបួសជាភិក្ខុ ក្នុងសំណាក់ព្រះពុទ្ធអស់។ ការទូន្មានរបស់ព្រះពុទ្ធបានធ្វើអោយអ្នកទាំងអស់ ចង់ស្តាប់ធម៌របស់ព្រះអង្គហើយចង់ស្តាប់ទៀត រហូតដល់អ្នកទាំងនោះភ្លេចអស់នូវពាក្យបណ្តាំរបស់ព្រះរាជា។

ព្រះរាជាបានរៀបចំកន្លែងថ្វាយព្រះពុទ្ធគង់នៅក្នុងសួនមួយឈ្មោះនិគ្រោធ ។ ប៉ុន្តែ ដល់ព្រះសម្ពុទ្ធមិនបានយាងមកវិញ ព្រះរាជាក៏បញ្ជូនកាឡុទាយិ ដែលជាអ្នកធ្លាប់លេងចូលព្រះពុទ្ធកាលពីនៅកុមារ អោយទៅយាងព្រះពុទ្ធម្តង។ ពេលព្រះអង្គបានទទួលព្រះរាជសារ ព្រះពុទ្ធក៏យល់ព្រមយាងនិវត្តន៍ចូលក្រុងកបិលពស្តុ ដែលជាជាតិភូមិនោះវិញ។

នៅថ្ងៃ១៥កើត ពេញបូរមី ខែផល្គុន (ក្រោយពីពេលព្រះសម្ពុទ្ធត្រាស់ដឹងហើយបាន១០ខែ) ព្រះដ៏មានព្រះភាគនិងភិក្ខុ៣០០រូបបានចូលទៅដល់ក្រុងកបិលពស្តុ និងគង់នៅក្នុងឧទ្យានឈ្មោះនិគ្រោធ នោះឯង។

ពេលប្រជាពលរដ្ឋក្នុងក្រុងកបិលពស្តុ បានដឹងថា ព្រះពុទ្ធយាង

មកដល់ក្រុងនៃខ្លួនហើយ ក៏នាំគ្នាភ្ញាក់ទឹកភ្ញាក់ដីចូលទៅកាន់សួននិគ្រោធ ដើម្បីមើលព្រះពុទ្ធ ហើយព្រះញាតិផ្ទាល់របស់ព្រះសិទ្ធត្ថ បានពោលថា៖ "ព្រះអង្គជាព្រះអនុជរបស់យើង! ព្រះអង្គជាក្មួយរបស់យើង! ព្រះអង្គជាព្រះឯយ្យបុត្តរបស់យើង!" ពួកស្ដេចចាស់ៗប្រាប់ស្ដេចក្មេងៗថា៖ "ចូរអ្នកឋិតទៅខាងមុខ ហើយថ្វាយបង្គំព្រះអង្គចុះ យើងអង្គុយពីក្រោយអ្នក!"

ពេលនោះ ព្រះពុទ្ធទ្រង់ជ្រាបច្បាស់ថា អ្នកខ្លះមិនទាន់បានដឹងថាព្រះអង្គបានត្រាស់ដឹងនៅឡើយទេ ប៉ុន្តែ ព្រះអង្គទ្រង់ព្រះតំរិះថា អ្នកទាំងអស់នោះគឺជារៀមច្បងរបស់ព្រះអង្គ។ ព្រះអង្គក៏សំដែងឫទ្ធិ ឈ្មោះ "បាដិហារ្យ" ដល់អ្នកទាំងអស់នោះ។

លុះព្រឹកស្អែកឡើង គឺថ្ងៃទី២ ទើបព្រះសម្ពុទ្ធ និងភិក្ខុទាំងឡាយប្រដាប់ដោយចីវរនិងបាត្រ យាងនិងនិមន្តចេញទៅបិណ្ឌបាតតាមលំដាប់ផ្ទះអ្នកស្រុក។ កាលបានឃើញភិក្ខុសង្ឃ ៣០០អង្គ គ្រងស្បង់ចីវរពណ៌លឿងប្រាលកំពុងតែត្រាច់បិណ្ឌបាត ដោយឥន្ទ្រិយស្រគត់ស្រគំសមរម្យល្អ នៅគ្រប់ច្រកល្ហកក្នុងរាជធានី ធ្វើអោយអ្នកក្រុងផ្អើលឈ្ងរឆេងនិងនាំគ្នារត់មកឈរមើល។ ចំណែកឯព្រះបាទសុទ្ធោទន៍ទ្រង់មិនបានទូលអារាធនាព្រះសាស្ដា កាលពីរាត្រីកន្លងមកនោះទេ ទ្រង់ត្រាស់បង្គាប់អោយបរិវារធ្វើនូវចង្ហាន់ នឹងរៀបចំអាសនៈទុកចាំទទួលព្រះសាស្ដានិងភិក្ខុសង្ឃនៅឯព្រះរាជវាំងឯណោះវិញ ព្រោះស្ដេចទ្រង់សំគាល់ថា៖ "ព្រះរាជឱរសរបស់អញ បើមិនយាងមកកាន់ព្រះបរមរាជវាំងទេ តើនឹងយាងទៅកាន់ទីណា

វិញ?" លុះស្តេចជ្រាបថា ព្រះសាស្តាយាងទៅបិណ្ឌបាតវិញនោះ ទើប ព្រះរាជាប្រញាប់ប្រញាល់បញ្ជានាយសារថី អោយទឹមយានអាជានេយ្យ នាំព្រះអង្គទៅរកព្រះសាស្តាតែមួយព្រះអង្គឯង ដោយទុកអោយព្រះអគ្គ-មហេសី មជាបតីគោតមី និង ព្រះនាងយសោធរា នៅរង់ចាំងក្នុងប្រាសាទ សិន។ ពេលព្រះទីនាំងបរចរដល់ត្រង់ភូមិភាគ ខាងកើតនៃរាជធានី ព្រះរាជាទ្រង់ភ្ញាក់ស្រឡាំងកាំង យ៉ាងខ្លាំង កាលទ្រង់ទតឃើញព្រះរាជឱរស របស់ព្រះអង្គកំពុងតែឈរទ្រង់បាត្រ នៅខាងមុខខ្ទមចាស់កន្ទ្រករួកមួយ។ ព្រះរាជាទតឃើញស្ត្រីម្នាក់ស្លៀកពាក់ដាចដោចរយីករយាក កំពុងតែដាក់ដុំឡូងមួយដុំតូចចូលទៅក្នុងបាត្ររបស់ព្រះពុទ្ធ។ទ្រង់ទទួលយកដំឡូងនោះ ដោយបង្អោនព្រះសិរគោរពយ៉ាងសុភាពរមទម្យ ទៅរកស្ត្រីម្ចាស់ទាននោះ វិញ។ បន្ទាប់មក ព្រះពុទ្ធក៏និមន្តទៅឈរទ្រង់បាត្រនៅមុខផ្ទះមួយទៀត។ ព្រះរាជាទ្រង់បញ្ជាអោយនាយសារថី បញ្ឈប់យានភ្លាម រួចទ្រង់លោតចុះ អំពីព្រះទីនាំង ហើយយាងយ៉ាងលឿនសំដៅទៅកាន់ព្រះសាស្តា។ កាល ទ្រង់ទតឃើញនូវសភាពបែបនេះ ព្រះរាជាទ្រង់ព្រះចិន្តាថា៖ "ម៉្លេះសមព្រះសិទ្ធត្ថឈប់រវល់នឹងរាជសម្បត្តិ ប៉ុន្តែ នឹងទៅជាមហាសាស្តាបាត្រគួរជាទីគោរពទៅវិញ។" ដោយសេចក្តីទឹករលឹកខ្លាំងពេក ព្រះរាជាចង់តែឱបរឹតបុត្រាសំណប់ អោយអស់ព្រះហឫទ័យ។ ប៉ុន្តែ ព្រះអង្គទ្រង់ព្រះចិន្តាថា៖ "ហាក់ដូចជាមិនសូវសមរម្យ" ទើបព្រះអង្គលើកព្រះហស្តទាំងពីរ ផ្គងអញ្ជលីក្រាបថ្វាយបង្គំចំពោះព្រះឱរស ក្នុងរបៀបព្រះរាជាគោរពចំពោះគ្រូ

អាចារ្យ ខាងសាសនាជំនួសទៅវិញ។ នេះគឺជាលើកទីពាហើយ ដែលព្រះរាជា ព្រះបាទសុទ្ធោទនថ្វាយបង្គំចំពោះព្រះឱរសផ្ទាល់ព្រះអង្គ។ ព្រះជំមានព្រះភាគទ្រង់ចាប់ព្រះហស្តព្រះរាជាជ្រងអោយក្រោកឈរឡើងវិញ។

បន្ទាប់មក ព្រះសាស្តាទ្រង់បែរព្រះភ័ក្ត្រទៅរកព្រះសារីបុត្ត ដែលកំពុងឈរនៅជិតនោះ ហើយត្រាស់ថា៖ "ម្នាលសារីបុត្ត! ចូរអ្នកនាំភិក្ខុទាំងឡាយ ត្រឡប់ទៅឆាន់នៅឯនិគ្រោធនិទ្យានវិញចុះ។ តថាគតសម្រាលនឹងទៅកាន់ព្រះរាជវាំងជាមួយតថាគត លុះដល់ពេលល្ងាចទើបយើងទាំងពីរ វិលទៅកាន់និគ្រោធនិទ្យានវិញ។"

ព្រះរាជាសម្លឹងទៅកាន់ព្រះពុទ្ធអស់ពេលយ៉ាងយូរ និងយ៉ាងយកព្រះទ័យទុកដាក់បំផុត មុននឹងស្តេចមានព្រះរាជបន្ទូល ថា៖ "នែសិទ្ធត្ថ! បិតាគិតថាបុត្រគួរតែយាងទៅជួបជាមួយនឹងព្រះរាជវង្សានុវង្ស នៅឯក្នុងព្រះរាជវាំងនោះជាមុនសិនទើបត្រឹមត្រូវ។ គ្មានអ្នកណាម្នាក់គិតស្មានថាបុត្រមកដើរសុំទានគេ នៅក្នុងរាជធានីយ៉ាងដូច្នេះសោះ? ហេតុដូចម្តេចបានជាបុត្រមិនយាងទៅសោយ នៅក្នុងព្រះរាជវាំងយ៉ាងដូច្នោះ?"

ព្រះពុទ្ធទ្រង់ញញឹមទៅកាន់ព្រះបិតា ហើយទ្រង់មានព្រះពុទ្ធដីកាថា៖ "បពិត្រមហារាជ! តថាគតមិនមែននិមន្តមក តែមួយអង្គឯងទេ។ តថាគតធ្វើដំណើរមកជាមួយសង្ឃដ៏ធំ គឺភិក្ខុសង្ឃ។ តថាគត ក៏ជាភិក្ខុមួយរូបដែលត្រូវតែត្រាច់បិណ្ឌបាត ដូចគ្នានឹងភិក្ខុសង្ឃទាំងនោះដែរ។"

ព្រះរាជាទ្រង់មានបន្ទូលតបថា៖ "ប៉ុន្តែ យ៉ាងម៉េចបានជាបុត្រទៅ

សុំទានម្ហូបអាហារ តាមបែបផ្ទះអ្នកក្រ នៅម្តុំនោះអីញ្ចឹង? គ្មានអ្នកណាម្នាក់ក្នុងប្រវត្តិសាស្ត្រនៃសាក្យត្រកូលនេះ ហ៊ានធ្វើរបៀបអីញ្ចឹងទេ។"

ព្រះសមណគោតមទ្រង់ត្រាស់ថា៖ "បពិត្រមហារាជ! តថាគតធ្វើយ៉ាងនេះ គឺធ្វើតាមព្រះរាជវង្ស។"

ព្រះបាទសុទ្ធោទន៍ បង្គំទូលសួរថា៖ "នេះគឺជាវង្សរបស់យើង ពិតមែនឬ?"

ព្រះសម្ពុទ្ធទ្រង់ញញឹមម្តងទៀត មុននឹងត្រាស់ថា៖ "បពិត្រ ព្រះសម្មតិទេព! នេះមិនមែនជាវង្សរបស់ព្រះមហាបពិត្រទេ តែនេះគឺជាវង្សរបស់តថាគត ព្រោះព្រះពុទ្ធទាំងឡាយទ្រង់យាងបិណ្ឌបាតយ៉ាងនេះដែរ។ បពិត្រព្រះសម្មតិទេព! បព្វជិតមិនគួរប្រមាទក្នុងការបិណ្ឌបាត ដែលខ្លួនត្រូវក្រោកឈររង់ចាំទទួលទេ។ បុគ្គលគួរប្រព្រឹត្តធម៌ដោយសុចរិត។ អ្នកប្រព្រឹត្តធម៌ជាប្រក្រតី រមែងនៅជាសុខក្នុងលោកនេះផង និងក្នុងលោកខាងមុខផង។ បុគ្គលគួរប្រព្រឹត្តធម៌អោយសុចរិត មិនគួរប្រព្រឹត្តធម៌នោះអោយទុច្ចរិតទេ។ បពិត្រព្រះសម្មតិទេព! ការត្រាច់ចរបិណ្ឌបាត គឺជាការហាត់អប់រំខាងផ្លូវចិត្ត ដែលអាចជួយអោយភិក្ខុសង្ឃ ឈប់មានការអៀនខ្មាស និងមើលឃើញថាមនុស្សទាំងអស់សុទ្ធតែមានភាពស្មើៗគ្នា។ នៅពេលដែលតថាគតទទួលដំឡូងមួយដុំតូចអំពីគ្រួសារអ្នកក្រីក្រ ដំឡូងនោះ ក៏មិនខុសប្លែកគ្នាអំពីអាហារមួយភាជន៍ដ៏ល្អប្រណិតដែលតថាគតបានទទួលយកអំពីព្រះរាជាដែរ។ ភិក្ខុអាចពុះពារលើឧបសគ្គដែលជាការ

ប្រកាន់វណ្ណៈរវាងអ្នកមាន និងអ្នកក្រ។ នៅក្នុងផ្លូវរបស់តថាគត អ្វីទាំងអស់ត្រូវតែតិតស្មើភាពគ្នា។ មនុស្សគ្រប់រូបមិនថាឡើយអ្នកនោះជាអ្នកក្រក៏អាចមានសិទ្ធិសេរីភាពនឹងសំរេចពន្លឺត្រាស់ដឹងបានដូចៗគ្នា។ ការត្រាច់បិណ្ឌបាតមិនមែនបន្ថោកបន្ទាបដល់កិត្តិយសរបស់តថាគតឡើយ។ ត្រូវតែទទួលស្គាល់ថា ការដើរបិណ្ឌបាតនេះ ក៏ជាប់ជាមួយ នូវសេចក្ដីថ្លៃថ្នូនៃមនុស្សជាតិផងដែរ។"

ព្រះរាជាទ្រង់ព្រះសណ្ដាប់ ដោយស្ងប់ព្រះហឫទ័យ និងទ្រង់ព្រះចិន្ដាយ៉ាងនេះថា៖ "ទំនាយព្យាករណ៍របស់ អាសិតតាបស នោះ គឺពិតជាត្រឹមត្រូវឥតខ្ចោះ។"

ព្រះសិទ្ធត្ថបានក្លាយជាព្រះមហាសាស្ដាដែលមានគុណធម៌ភ្លឺចាំងចែងចូទាំងសាកលលោក។ កាលព្រះរាជាទ្រង់បានព្រះសណ្ដាប់ធម៌របស់ព្រះសាស្ដាហើយ ពុទ្ធបិតាក៏បានសំរេចនូវសោតាបត្តិផល ភ្លាម។ ព្រះពុទ្ធចាប់កាន់ព្រះហស្ដព្រះវរបិតា ហើយយាងដោយព្រះបាទឆ្ពោះទៅកាន់ព្រះរាជវាំង។ នាគសមាលត្ថេរ និមន្ដតាមពីក្រោយដោយស្ងប់ស្ងៀម។

ពេលព្រះពុទ្ធនិងព្រះបាទសុទ្ធោទនយាងជិតដល់ខ្លោងទ្វារប្រាសាទព្រះនាងពិម្ពាយសោធរៈ លើកព្រះហស្ដចង្អុលប្រាប់រាហុល ដោយមានព្រះសវនីយ៍ថា៖ "នែរាហុល! តើបុត្របានទតឃើញព្រះសមណៈមួយអង្គដែលកំពុងកាន់ព្រះហស្ដព្រះជយ្យកោ ហៀបនឹងចូលមកដល់ខ្លោងទ្វារប្រាសាទនោះ ដែរឬទេ?"

រាហុលងើយមើលព្រះភ័ក្ត្រព្រះវរមាតា រួចក៏ងក់ព្រះសិរពីរ-បីដង ដើម្បីបង្ហាញនូវការយល់ព្រម។

ព្រះនាងមានព្រះសវនីយ៍បន្តថា៖ "នែរាហុលកុមារ! ព្រះសមណៈនោះហើយ ជាព្រះបិតារបស់បុត្រ។ ចូរបាយាងទៅ! យាងទៅថ្វាយបង្គំព្រះអង្គភ្លាមទៅ ព្រះអង្គមានមរតកពិសេសថ្លៃថ្លាណាស់សំរាប់ទុកប្រទានដល់បុត្រ។ ចូរបាកុំភ្លេចបង្គំទូលសួរព្រះអង្គ អំពីរឿងមរតក ដ៏ឧត្តមនោះអោយសោះណាំ រាហុល!"

រាហុលកុមារ ក៏រត់ចុះទៅក្រោមយ៉ាងលឿន។ តែមួយពព្រិចភ្នែកប៉ុណ្ណោះ រាហុលបានទៅដល់ចំពោះព្រះភ័ក្ត្រព្រះពុទ្ធ។ ព្រះពុទ្ធទ្រង់ជ្រាបយ៉ាងច្បាស់ភ្លាមថា កុមារតូចដែលរត់មករកព្រះអង្គនេះមិនមានអ្នកណាក្រៅអំពីរាហុលជាបុត្រាឡើយ។ ព្រះអង្គទ្រង់លាតសន្ធឹងព្រះហស្តយ៉ាងធំហើយចាប់បីត្រកងលើកបុត្រាស្ងួន រាហុលសម្លឹងមើលព្រះភ័ក្ត្រព្រះបិតាដោយហ្មត់ចត់ ហើយក៏ក្រាបបង្គំទូលព្រះវរបិតាដោយព្រះវាចាទាក់ៗថា៖ "ព្រះសមណៈជាទីគោរព! ព្រះវរមាតាមានព្រះសវនីយ៍ថាខ្ញុំព្រះអង្គត្រូវតែបង្គំទូលសួររកមរតកពិសេសថ្លៃថ្លា ដែលព្រះអង្គ ទុកប្រទានដល់បុត្រនោះ។ តើមរតកនោះជាអ្វីទៅ? ព្រះវរបិតាអាចបង្ហាញអោយបុត្រឃើញផង បានដែរឬទេ?"

ព្រះពុទ្ធទ្រង់យកព្រះហស្តស្ទាបថ្ពាល់រាហុល រួចហើយទ្រង់ត្រាស់ទាំងព្រះភ័ក្ត្រញញឹមថា៖ "រាហុល! បុត្រចង់ដឹងអំពីមរតកពិសេសរបស់

បុត្រឬ? មរតកដ៏ឧត្តមនោះ កំពុងស្ថិតនៅក្នុងនិកាសល្អនៅឡើយ បិតានឹងប្រទានដល់បុត្រ នៅថ្ងៃក្រោយ។"

បន្ទាប់មកទៀត ព្រះពុទ្ធបានជួបជាមួយព្រះញាតិវង្សានុវង្សមានព្រះមាតុច្ឆា បជាបតី ព្រះមហេសី ពិម្ពាយសោធរា ព្រះនាងកញ្ញារូបៈនន្ទា និងព្រះអនុជ នន្ទ។

ពេលព្រះពុទ្ធយាងមកកាន់ព្រះរាជវាំងជាមួយព្រះរាជាៗបានទូលសួរនូវសំនួរជាច្រើនចំពោះព្រះសាស្តា តែនៅពេលជួបជុំព្រះញាតិវង្សានុវង្ស គ្មានស្តេចអង្គណាទូលសួរព្រះអង្គសោះ សូម្បីតែរាហុលក៏គង់នៅស្ងៀមព្រងើយដែរ។ គ្រប់ព្រះអង្គសុទ្ធតែមានទឹកព្រះភ័ក្ត្រស្រស់ថ្លា ដែលបង្ហាញអោយឃើញនូវការសព្វព្រះហឫទ័យយ៉ាងខ្លាំង ចំពោះការជួបជុំព្រះញាតិវង្សានុវង្ស សារជាថ្មីឡើងវិញ។

ដោយមានសេចក្តីរំភើបខ្លាំងពេក ព្រះនាងបជាបតីគោតមី និងព្រះនាងពិម្ពាទ្រង់ព្រះកន្សែងម្តងទៀត។ ព្រះពុទ្ធទុកពេលអោយព្រះក្សត្រិយ៍ទាំងពីរអង្គ បន្ទោបង់នូវការយំយែកអោយអស់អំពីព្រះចិន្តា។ ព្រះពុទ្ធបែរជាត្រាស់ហៅរាហុល មកគង់ជិត និង យកព្រះហស្តអង្អែលព្រះសិរបុត្រាលេង យ៉ាងសព្វព្រះហឫទ័យ ជាទីបំផុតទៅវិញ។

ព្រះនាងគោតមី ទាញយកជាយសំពត់សារី មកជូតទឹកព្រះនេត្រហើយបង្គំទូលសួរព្រះពុទ្ធថា៖ "ព្រះអង្គយាងចេញចាត់ទៅ អស់ពេលយូរពេកណាស់។ កន្លងទៅអស់ជាង៧ឆ្នាំហើយ។ តើព្រះអង្គទ្រង់ព្រះចិន្តា

យ៉ាងដូចម្ដេចដែរ ចំពោះការតស៊ូដ៏ស្វិតស្វាញ និងក្លាហានបំផុត របស់ស្ត្រីមួយរូប បែបដូចព្រះនាងពិម្ពានេះ?"

ព្រះពុទ្ធទ្រង់ត្រាស់តបវិញ ដោយព្រះវាចាដ៏សុភាពថា៖ "បពិត្រព្រះមាតា! តថាគតបានយល់ច្បាស់ជាយូរណាស់មកហើយ នូវការតស៊ូដ៏ក្លាហាន និងមុះមុតបំផុតរបស់ព្រះមាតានិងព្រះនាងពិម្ពារ។ ព្រះមាតា ព្រះនាងពិម្ពារគឺជាស្ត្រីដែលមានការតស៊ូដ៏ខ្ពង់ខ្ពស់បំផុត ក្នុងលោកនេះ។ មិនគ្រាន់តែបានជួយផ្ដល់នូវការយោគយល់និងការជួយឧបត្ថម្ភ ដល់ព្រះស្វាមី ប៉ុណ្ណោះទេ តែទាំងពីរព្រះអង្គ គឺជាគំរូនៃសេចក្ដីក្លាហាន និងការប្ដេជ្ញាចិត្តលើអ្វីៗទាំងអស់។ តថាគតមានសំណាងល្អណាស់ ដែលមានព្រះមាតា និងព្រះនាងពិម្ពារ រស់នៅជាមួយ ក្នុងជាតិនេះ។"

តាមសំណូមពររបស់ព្រះបាទសុទ្ធោទន៍ ព្រះសាស្ដាបានតំណាលដោយសង្ខេបនូវប្រវត្តិនៃការស្វែងរកការត្រាស់ដឹងរបស់ព្រះអង្គ ក្នុងរយៈពេលជាង៧ឆ្នាំ កន្លងមកនេះ ជូនព្រះញាតិវង្សានុវង្ស ជាទីសណ្ដាប់។

មុនពេលព្រះសម្ពុទ្ធយាងត្រឡប់ទៅឱទ្យាននិគ្រោធវិញ ព្រះរាជាទ្រង់អារាធនាព្រះអង្គ ជាពាក្យយ៉ាងនេះថា៖ "បពិត្រព្រះដ៏មានព្រះភាគ! ខ្ញុំព្រះអង្គ សូមនិមន្តព្រះភិក្ខុសង្ឃទាំងឡាយ ដែលមានព្រះពុទ្ធ ជាព្រះប្រធាន ដើម្បីទទួលភត្តបានមួយពេល ក្នុងថ្ងៃស្អែកនេះ នៅក្នុងព្រះបរមរាជវាំង ដូចដែលព្រះចៅនគរមគធៈ ទ្រង់បានប្រារព្ធចំពោះព្រះអង្គយ៉ាងដូច្នោះដែរ។ ខ្ញុំព្រះអង្គនឹងអញ្ជើញ អស់រាជវង្សានុវង្ស និងសមាជិករាជ

រដ្ឋាភិបាល គ្រប់តំណែងជាន់ថ្នាក់ អោយមកចូលរួមនិងស្តាប់នូវព្រះធម្មទេសនារបស់ព្រះអង្គដែរ។"

ព្រះពុទ្ធទ្រង់អនុមោទនាតាមសេចក្តីអារាធនារបស់ព្រះមហាក្សត្រ។

ស្អែកឡើង (ថ្ងៃទី៣) គឺជាថ្ងៃបុណ្យទទួលបដិសណ្ឋារកិច្ចចំពោះព្រះដ៏មានព្រះភាគក៏មកដល់។ ប្រជាពលរដ្ឋក្មេងចាស់ប្រុសស្រីសប្បាយរីករាយ នឹងចង់ឃើញវីរបុរសជាតិរបស់ខ្លួន ក៏នាំគ្នាមកឈរត្រៀបត្រាតាមផងវិថីដែលតុបតែងដោយចង្កៀងគោមនិងផ្កាស្រស់ចំរុះពណ៌ ដើម្បីរង់ចាំទទួលស្វាគមន៍ព្រះសាស្តា និងភិក្ខុសង្ឃរបស់ព្រះអង្គ។

...... នៅពេលក្រោយភត្ត ព្រះពុទ្ធទ្រង់សំដែងធម្មទេសនាតាមការអារាធនារបស់ព្រះរាជា។ ព្រះពុទ្ធទ្រង់ព្រះចិន្តាថា ប្រជាពលរដ្ឋម្នាក់ៗសុទ្ធតែមានបំណងចង់ដឹងនូវរឿងជីវិតរបស់ព្រះអង្គផ្ទាល់ ដែលបានកើតឡើងក្នុងរវាង៧ឆ្នាំកន្លងមកនេះ ទើបព្រះអង្គសំរេចព្រះទ័យសំដែងដោយសង្ខេបនូវការពិសោធផ្ទាល់ព្រះអង្គ ក្នុងការស្វែងរកព្រហ្មចរិយធម៌ តាំងពីពេលយាងចេញអំពីព្រះរាជវាំង រហូតដល់ពេលព្រះអង្គបានសំរេចការត្រាស់ដឹងជាស្ថាពរ។ បន្ទាប់មក ព្រះពុទ្ធទ្រង់សំដែងអំពីព្រះត្រៃលក្ខណ៍ បដិច្ចសមុប្បាទធម៌និងចតុរារិយសច្ចៈ ព្រមទាំងអប់រំព្រះញាតិវង្សានុវង្ស និងសព្វមុខមន្ត្រី ក្នុងរាជរដ្ឋាភិបាល លើផ្លូវក្ដាក់លើក តាំងមាំក្នុងសតិបដ្ឋាន និង សមាទានសីល៥ គ្រប់ៗគ្នា។

ភ្ញៀវម្នាក់ៗបានយល់ច្បាស់ និងរំជួលចិត្តយ៉ាងខ្លាំង ចំពោះការ

ខ្ទង់នូវភ័ព្វមិនតម្លៃរកគ្មាន របស់ព្រះពុទ្ធ។ ព្រះបាទសុទ្ធោទនៈសព្វព្រះរាជហឫទ័យឥតឧបមា ទ្រង់បានសំរេចនូវ សកិទាគាមិផល ក្នុងគ្រានោះឯង។ រីឯ ព្រះនាងបជាបតីគោតមី ក៏បានសំរេច សោតាបត្តិផល ដែរ។

ស្អែកឡើង(ថ្ងៃទី៤) ព្រះសាស្តា បានយាងទៅទទួលភត្ត នៅក្នុងព្រះរាជតំណាក់ព្រះនាងពិម្ពាតាមសេចក្តីអារាធនារបស់ព្រះនាង ជាមួយកាឡុទាយីត្ថេរ និងនាគសមាលត្ថេរ ព្រមទាំងមានវត្តមានរបស់ព្រះរាជាព្រះបាទសុទ្ធោទនៈនិងព្រះនាងបជាបតីផង។ ពេលក្រោយភត្ត ព្រះសម្ពុទ្ធទ្រង់បានសំដែងនូវ ធម្មបាលជាតក ថ្វាយព្រះវរបិតា។ កាលបានស្តាប់ធម៌នេះហើយ ព្រះរាជាក៏បានសំរេច អនាគាមិផល ។

បន្ទាប់មកទៀត ព្រះនាងយសោធរា បានយាងព្រះពុទ្ធ និងនិមន្តភិក្ខុទាំងពីររូប ទៅសួរសុខទុក្ខកុមារ-កុមារី នៅតាមភូមិស្រុកទាំងឡាយដែលព្រះនាងធ្លាប់បានជួយឧបត្ថម្ភ ពីមុនមក។ ព្រះនាងបជាបតីគោតមី និងរាហុលកុមារក៏យាងទៅជាមួយដែរ។ ព្រះនាងពិម្ពារបាននាំភិក្ខុទាំងបីអង្គទៅកាន់ដើមព្រីងធំមួយ ជាអតីតដើមព្រីង ដែលព្រះពុទ្ធ ធ្លាប់គង់ធ្វើសមាធិ កាលពីនៅកុមារភាព។ ព្រះពុទ្ធទ្រង់កោតស្ញប់ស្ញែង ដល់កន្លែងនេះ ដែលហាក់បីដូច ជាទើបបានកើតឡើងពីម្សិលមិញសោះ តាមពិតរឿងនេះ បានកើតឡើងតាំងពី២៧ឆ្នាំ កន្លងមកម្ល៉េះ។

កុមារកំសត់ទុគ៌តជាច្រើនបាននាំគ្នាមកចោមរោមមើលព្រះសាស្តានៅក្រោមម្លប់ដើមព្រីងធំនេះ។ ព្រះនាងយសោធរា បានសុំអោយកុមារ

ទាំងអស់នោះអង្គុយចុះ និងបង្គាប់អោយរៀនថ្វាយបង្គំ៣ដង ចំពោះភិក្ខុសង្ឃ។ ព្រះនាងបានបង្គំទូលព្រះពុទ្ធថា៖ "បពិត្រព្រះពុទ្ធជាម្ចាស់! កុមារមួយចំនួន ដែលព្រះអង្គធ្លាប់ជួបជាច្រើនឆ្នាំកន្លងមកនោះ មានភរិយាឬស្វាមីបាត់អស់ហើយ។ រីឯ កុមារទាំងអម្បាលនេះ សុទ្ធតែជាក្មេងជំនាន់ក្រោយ ដែលមានអាយុប្រមាណពី៧ទៅ១២ឆ្នាំតែប៉ុណ្ណោះ។ តើព្រះអង្គមានរឿងអ្វី អាចចែករំលែកដល់ពួកកុមារទាំងឡាយនេះផង ដែរឬទេ?"

ព្រះសាស្តាទ្រង់សព្វព្រះហឫទ័យ តង់នៅទីនេះណាស់ ព្រោះជាកន្លែងអនុស្សាវរីយ៍ដែលព្រះអង្គទ្រង់បានចាប់ផ្តើមស្វែងរកសម្មាសម្ពោធិញ្ញាណ ជាលើកដំបូងបង្អស់។ ព្រះអង្គទ្រង់ត្រាស់នឹងកុមារទាំងអស់នោះថា៖ "ម្នាលកុមារា-កុមារីទាំងឡាយ! តថាគតធ្លាប់បានចំណាយពេល ជាច្រើន ជាមួយកុមារទាំងឡាយនៅឯ ឧរុវេលសេនានិគម កាលអំពីពេលតថាគតកំពុងតែស្វែងរក ព្រះធម៌។ កុមារទាំងឡាយនោះ បានជួយដល់តថាគតច្រើនណាស់ ដូចជា សោត្ថិកុមារ បានថ្វាយស្បូវដល់តថាគតសំរាប់ធ្វើជាកំរាលអង្គុយ នាងសុជាតាបានថ្វាយនូវមធុបាយាស ចំពោះតថាគតដែលកំពុងដេកដួលនៅលើទឹកចង្រ្កម ជាដើម។ បើអ្នកទាំងឡាយមិនរវល់ទៅឯណាទេ តថាគតនឹងនិទាននូវរឿងមួយ ជូនស្តាប់កំសាន្ត។ រឿងដែលតថាគតនឹងនិទាននេះ បានកើតឡើងតាំងអំពីច្រើនជាតិ កន្លងមកហើយ។"

កុមារទាំងអស់ងក់ក្បាលយល់ព្រម និងប្រុងប្រៀបរៀបចំខ្លួន រង់

ចាំស្តាប់ព្រះដ៏មានព្រះភាគ មានព្រះពុទ្ធដីកា។

ព្រះសាស្តាទ្រង់ត្រាស់និទានថា៖"ម្នាលកុមារ-កុមារី ទាំងឡាយ! ជាយូរយាណាស់មកហើយ មានមាណពម្នាក់ឈ្មោះ មេឃះ អាស្រ័យនៅទៀបជើងភ្នំព្រះសុមេរុ។ គាត់ជាមនុស្សម្នាក់ មានចិត្តសប្បុរស និងឧស្សាហ៍។ សូម្បីតែគ្មានលុយមួយកាក់សោះក៏ដោយ ក៏គាត់សុខចិត្តធ្វើដំណើរទៅកាន់ទីក្រុង ដើម្បីស្វែងរកគីរះវិជ្ជាដែរ។ ពេលចេញដំណើរទៅកាន់រាជធានី មាណពគ្មានយកអ្វី ជាប់ទៅជាមួយខ្លួន ក្រៅតែអំពី ឈើច្រត់១ មួក១ បំពង់ទឹក១ និង សំលៀកបំពាក់១បន្ទាស់ ព្រមទាំងអាវផាយ១ ដែលគាត់ពាក់ជាប់នឹងខ្លួន នោះឡើយ។ តាមផងផ្លូវ មាណពតែងឈប់ស៊ីឈ្នួល ធ្វើការអោយគេ ដើម្បីជួរយកបាយទទួលទាន ជួនកាល ក៏បានទាំងលុយកាក់មកផង។ ពេលមាណពចូលទៅដល់រាជធានីមួយឈ្មោះ នីឧមច័យ គាត់សន្សំប្រាក់បាន ចំនួន៥០០រៀល។ ក្នុងគ្រានោះមាណពបានឃើញមនុស្សម្នាជាច្រើនកំពុងដើរឈូឆរនិងនិយាយគ្នាយ៉ាងតឹកតង ហាក់បីដូចជាគេកំពុងនាំគ្នារៀបចំធ្វើពិធីអ្វីមួយសំខាន់។ ដោយមានការងឿងឆ្ងល់និងចង់ដឹងថាគេកំពុងធ្វើអ្វីក្នុងឱកាសនោះ មាណពក៏ងាករកមើលជុំវិញខ្លួន ក្រែងមានមនុស្សណាម្នាក់អាចសាកសួរពត៌មានបាន។ ក្បែណនោះ មាននារីក្រមុំ រូបស្រស់ប្រិមប្រិយម្នាក់ ដើរមកជិត។ នារីនោះមានទាំងបីត្រកងនូវផ្កាឈូកដែលរីកបានពាក់កណ្តាលមួយបាច់ជាប់នឹងដៃផង។

មាណពបានសួរទៅកាន់នារីរូបស្អាតនោះថា៖ "ខ្ញុំសូមអភ័យទោសអ្នកនាង! តើថ្ងៃនេះ មានគេកំពុងរវល់ធ្វើពិធីអ្វីដែរ?"

នារីរូបស្អាតក៏ឆ្លើយតបថា៖ "លោកប្រាកដជាមនុស្សមកអំពីស្រុកឆ្ងាយ ក្រៅពីទីរបទ័យ នេះហើយ! មិនដឹងទេឬ ថាថ្ងៃនេះព្រះអង្គ ព្រះនាម ព្រះទីបង្ករ ទ្រង់យាងមកណា! គេរាល់គ្នាល្បីថាព្រះអង្គដូចជាភ្លើងចន្ទ៖ បំភ្លឺផ្លូវដល់សត្វលោក។ ព្រះអង្គជាព្រះរាជបុត្រនៃ ព្រះបាទអាជីម័តដែលបានយាងចេញស្វែងរកធម៌ ហើយក៏បានរកឃើញ ព្រហ្មចរិយធម៌នោះ ដូចព្រះបំណងទៀតផង។ មាគ៌ារបស់ព្រះអង្គមានរស្មីរុងរឿងទូទាំងសាកលលោក ហេតុដូច្នេះហើយ បានជាមនុស្សម្នា គេនាំគ្នារៀបចំពិធីបុណ្យ ក្នុងថ្ងៃនេះឡើង ដើម្បីថ្វាយព្រះកិត្តិយសដល់ព្រះអង្គ។"

មេឃៈបុរស សប្បាយរីករាយក្នុងចិត្តឥតឧបមា កាលបានឮអំពីវត្តមាននៃព្រះសាស្តាចារ្យ ដែលជាបុគ្គលត្រាស់ដឹងនេះ។ មាណពអន្ទះសារចង់រកវត្ថុអ្វីមួយ ដើម្បីថ្វាយដល់ព្រះទីបង្ករ ហើយក៏ចង់ធ្វើជាសិស្សរបស់ព្រះអង្គទៀតផង។ មាណពក៏ផ្តើមសួរ ទៅកាន់នារីរូបស្អាតនោះថា៖ "ខ្ញុំសូមអភ័យទោសអ្នកនាង! តើអ្នកនាងទិញផ្កាឈូកទាំងអស់នេះតម្លៃប៉ុន្មានដែរ?"

នាងកញ្ញារូបស្អាតក៏សម្លឹងមើលទៅមុខមាណពនោះ។ នាងបានយល់យ៉ាងងាយបំផុតថា បុរសនេះជាមនុស្សមានប្រាជ្ញា និង គួរអោយពិចារណាទៀតផង។ នាងកញ្ញាក៏ឆ្លើយតបវិញថា៖ "ចាំលោក! នាងខ្ញុំ

មិញតែផ្កា៥នេះទេ ចំណែកឯផ្កា២ទៀត នាងខ្ញុំកាច់មកអំពីស្រះទឹកនៃផ្ទះរបស់នាងខ្ញុំ។"

មេឃៈបុរសក៏សួរបន្ថែមទៀតថា៖ "ចុះផ្កាទាំង៥ហ្នឹង តម្លៃប៉ុន្មានដែរ អ្នកនាង?"

នាងឆ្លើយជាបន្ទាន់ថា៖ "ចាំលោក! ផ្កាឈូក៥នេះតម្លៃ៥០០រូពី។"

មេឃៈអង្វរសុំទិញថា៖ "តើអ្នកនាងអាចចែកអោយខ្ញុំ នូវផ្កាទាំង៥ដែលមានតម្លៃ៥០០រូពីនោះមក បានទេ? ព្រោះខ្ញុំបាទក៏ចង់បានផ្កាឈូកទាំង៥នេះ ដើម្បីយកទៅថ្វាយចំពោះព្រះទីបង្ករដែរ។"

នាងកញ្ញារូបស្អាតឆ្លើយប្រកែកថា៖ "នាងខ្ញុំទិញផ្កាឈូកទាំងអស់នេះ ក៏ដើម្បីយកទៅថ្វាយចំពោះព្រះទីបង្ករ ផ្ទាល់ខ្លួននាងខ្ញុំដែរ។ នាងខ្ញុំគ្មានបំណងនឹងលក់ឬចែកនូវផ្កាឈូកនេះ ទៅអោយអ្នកណាទៀតទេ។"

មេឃៈបុរសព្យាយាមតាមអង្វរនាងកញ្ញាទៀតថា៖ "ក៏ប៉ុន្តែ អ្នកនាងនៅមានផ្កា២ទៀត ដែលអ្នកនាងបានកាច់ យកមកអំពីស្រះ នៅឯផ្ទះរបស់អ្នកនាង ដែរនោះអី។ សូមមេត្តាចែកអោយខ្ញុំបាទ នូវផ្កាឈូក៥នោះមក អ្នកនាង! ខ្ញុំបាទក៏មានបំណងចង់ថ្វាយវត្ថុអ្វីមួយដល់ព្រះទីបង្ករផងដែរ។ នេះជាឱកាសមួយដ៏មានតម្លៃនិងកម្របំផុត ដែលបានជួបនូវព្រះសាស្តាចារ្យបែបហ្នឹងណាស់ ក្នុងជាតិនេះ។ ខ្ញុំបាទចង់ជួបជាមួយព្រះអង្គ និងចង់សុំធ្វើជាសិស្សរបស់ព្រះអង្គ ទៀតផង។ ប្រសិនជាអ្នកនាងសុខចិត្តលក់ផ្កាឈូកទាំង៥នេះអោយខ្ញុំៗនឹងមិនបំភ្លេចគុណអ្នកនាងអស់

មួយជីវិត។"

នារីរូបស្រស់ក្មេងនោះមានសេចក្ដីអៀនខ្មាស់យ៉ាងខ្លាំង ក៏ទម្លាក់មុខចុះទៅក្រោម សម្លឹងមើលដី ដោយពុំបញ្ចេញវាចាអ្វីមួយមាត់ឡើយ។

មេឃៈបុរសទទូចអង្វរជាចុងក្រោយថា៖ "ប្រសិនជាអ្នកនាងលក់ផ្កាឈូកទាំង៥នេះអោយខ្ញុំ អ្នកនាងប្រើខ្ញុំអោយធ្វើអ្វីក៏ខ្ញុំសុខចិត្តធ្វើដែរ!"

គ្រាន់តែឮពាក្យនេះភ្លាម នារីរូបស្អាតនោះកើតមានសេចក្ដីអៀនខ្មាសកាន់តែខ្លាំងឡើង។ នាងលែងហ៊ានងើបមុខមើលទៅមាណព អស់ពេលយ៉ាងយូរ។ បន្ទាប់មក ទើបនាងដាច់ចិត្តឆ្លើយតបវិញ ទាំងទឹកមុខឡើងក្រហមថា៖ "នាងខ្ញុំមិនដឹងថា កាលពីជាតិមុនយើងទាំងពីរនាក់មាននិស្ស័យទាក់ទងគ្នា យ៉ាងដូចម្ដេចទេ។ ក៏ប៉ុន្តែ ពេលនាងខ្ញុំបានឃើញរូបលោកកាលណា នាងខ្ញុំមានចិត្តអាណិតនិងស្រឡាញ់លោកភ្លាម។ នាងខ្ញុំ ធ្លាប់បានជួបប្រទះជាមួយមនុស្សប្រុស ច្រើនណាស់ ក៏ប៉ុន្តែ បេះដូងរបស់នាងខ្ញុំមិនដែលរំភើបញាប់ញ័រ ដូចជាបានជួបរូបលោកទេ។ នាងខ្ញុំនឹងប្រគល់ជូនលោក នូវផ្កាឈូកទាំង៥ទងនេះ ដើម្បីយកទៅថ្វាយដល់ព្រះទ្រង់ញាណចុះ។ ក៏ប៉ុន្តែ នាងខ្ញុំ នៅមានលក្ខខ័ណ្ឌមួយ គឺទាល់តែលោកស្បថសច្ចានឹងនាងខ្ញុំថា 'ទោះក្នុងជាតិនេះក្ដី និងទោះក្នុងជាតិខាងមុខក្ដី លោកសុខចិត្តទទួលយកនាងខ្ញុំធ្វើជាភរិយារបស់លោក!"

មេឃៈរកនិយាយអ្វី មិនកើត ក៏ឈរទ្រឹងស្ងៀមទៅ។ មួយសន្ទុះក្រោយមក ទើបមាណពឆ្លើយតប ដោយសំដីសុភាពរាបសារ ថា៖ "អ្នក

នាង ពិតជាមនុស្សពិសេសណាស់ និងមានសេចក្ដីស្មោះត្រង់ជាទីបំផុត ទៀតផង។ ពេលខ្ញុំបាទបានឃើញរូបអ្នកនាងកាលពីដំបូង ក៏ខ្ញុំបាទចាប់អារម្មណ៍ ថាដូចជាមានអ្វីពិសេសនៅក្នុងខ្លួនរបស់ខ្ញុំដែរ។ ប៉ុន្តែ ខ្ញុំកំពុងតែស្វែងរកផ្លូវនៃពន្លឺត្រាស់ដឹង ណាអ្នកនាង! បើខ្ញុំបាទរៀបការជាមួយអ្នកនាងក្នុងពេលនេះ ខ្ញុំបាទប្រាកដជាពុំមានសេរីភាព ដើរតាមផ្លូវត្រាស់ដឹង ដែលខ្ញុំបាទកំពុងប្រាថ្នាចង់បាននោះទេ។"

នារីរូបស្អាតនោះក៏ពោលឡើងថា៖ "លោកគ្រាន់តែសន្យានឹងនាងខ្ញុំថា លោកនឹងទុកនាងខ្ញុំជាភរិយារបស់លោកទៅបានហើយ។ ចំណែកឯនាងខ្ញុំវិញ ក៏សច្ចាទុកក្នុងចិត្តដែរថា ពេលលោកកំពុងតែស្វែងរកនូវព្រហ្មចរិយធម៌ នាងខ្ញុំក៏នឹងមិនរារាំងរំខានដល់ដំណើររបស់លោកឡើយ។ តែផ្ទុយទៅវិញ នាងខ្ញុំសុខចិត្តធ្វើកិច្ចការសព្វបែបយ៉ាង ដែលនាងខ្ញុំអាចដើម្បីជួយលោកអោយបានសំរេចការស្វែងរកធម៌ត្រាស់ដឹងដ៏ឧត្តមនោះ។"

មេឃៈសប្បាយចិត្ត ទទួលធ្វើតាមសំណូមពរ របស់នាងកញ្ញារូបស្អាត ហើយអ្នកទាំងពីរ ក៏បបួលគ្នាដើររកមើលព្រះទីបង្ករ។ ដោយហ្វូងមនុស្សឈរណែនក្រាស់ ពីខាងមុខច្រើនពេក ធ្វើអោយអ្នកទាំងពីរមើលព្រះទីបង្ករ មិនឃើញ។ មេឃៈចង់ចូលទៅជិតព្រះទីបង្ករ ដើម្បីនឹងថ្វាយផ្កាឈូក ប៉ុន្តែមិនអាចជ្រៀតទៅរួច។ មិនដឹងធ្វើដូចម្ដេចកើត មាណពក៏ចោលផ្កាឈូកនោះរំលងគេរំលងឯងតម្រង់ទៅកាន់ព្រះទីបង្ករ។ គួរអោយអស្ចារ្យណាស់ ផ្កាឈូកទាំង៥ទងនោះ ក៏ធ្លាក់នៅលើព្រះហស្ត ព្រះទ្រង់

ញាណ។ មេឃៈសប្បាយចិត្តយ៉ាងខ្លាំង កាលដែលបានឃើញ ផ្កាឈូករបស់ខ្លួន បានដល់ព្រះហស្តព្រះទីបង្ករ។ កាលបានឃើញហេតុដ៏អស្ចារ្យដូច្នេះ នារីរូបស្អាត ក៏ស្រវាហុចផ្កាទាំង២របស់នាង ទៅអោយមាណពហើយសុំអោយមាណពបោះផ្កានោះជំនួសនាងផង។ ផ្កាឈូករបស់នាងក៏បានធ្លាក់ដូចបំណង ទៅក្នុងព្រះហស្តព្រះទីបង្ករដែរ។ គ្រានោះ ព្រះទីបង្ករទ្រង់មានព្រះបន្ទូលហៅរកម្ចាស់ផ្កាឈូកទាំងពីរបាច់នោះ អោយចូលមកបង្ហាញខ្លួន។ ហ្វូងមនុស្សក៏បាននាំគ្នាបើកផ្លូវអោយអ្នកទាំងពីរដឹកដៃគ្នាដើរចូលទៅ។ លុះចូលដល់ហើយ អ្នកទាំងពីរក្រាបថ្វាយបង្គំព្រះទ្រង់ញាណ ដោយសេចក្តីគោរពបូជា បំផុត។ ព្រះទីបង្ករ ទ្រង់ទតមើលមុខមេឃៈបុរសនោះ រួចហើយទើបទ្រង់មានព្រះបន្ទូលថា៖ "ម្នាលមាណព! តថាគតបានយល់ច្បាស់ដល់ជម្រៅទឹកចិត្ត ដ៏ស្មោះត្រង់របស់អ្នកហើយ។ តថាគតក៏មើលឃើញថាអ្នកទាំងពីរមានប្រាថ្នាដើរតាមផ្លូវសាសនា ដើម្បីនឹងសំរេចនូវការត្រាស់ដឹង និងជួយសង្គ្រោះដល់សព្វសត្វ។ ចូរអ្នកតាំងអារម្មណ៍អោយស្រួលបួលចុះ គង់ថ្ងៃណាមួយ នៅក្នុងជាតិក្រោយ អ្នកនឹងបានសំរេចនូវពាក្យសច្ចារបស់អ្នកហើយ។"

បន្ទាប់មក ព្រះទីបង្ករក៏មានព្រះបន្ទូលទៅកាន់នារីរូបស្អាត ដែលកំពុងអង្គុយលុតជង្គង់ជាប់នឹងមេឃៈនោះថា៖ "ម្នាលនាងកញ្ញា! នាងនឹងក្លាយជាមិត្រភក្តិរបស់មេឃៈ ទាំងនៅក្នុងជាតិនេះ និង ជាតិទាំងឡាយខាងក្រោយៗទៀត។ ចូរនាងរក្សានូវពាក្យសច្ចារបស់នាងដោយប្រពៃចុះ

នាងពិតជាអាចជួយស្វាមីរបស់នាង អោយបានយល់ដឹង និងសំរេចនូវពាក្យដែលលោកបានប្តេជ្ញា។"

មេឃៈនិងនារីរូបស្អាតរំជួលចិត្តយ៉ាងខ្លាំង កាលបានស្តាប់នូវព្រះបណ្តាំរបស់ព្រះទីបង្ករ។ អ្នកទាំងពីរក៏បូជាកាយថ្វាយខ្លួន ដើម្បីសិក្សានូវព្រហ្មចរិយធម៌ នៃពន្លឺត្រាស់ដឹង ដែលព្រះទ្រង់ញាណ ព្រះទីបង្ករទ្រង់បានទូន្មាន។

"ម្នាលកុមារា-កុមារីទាំងឡាយ! នៅក្នុងជាតិនោះនិងជាតិក្រោយៗមកទៀត មេឃៈ និង នារីរូបស្អាត បានរស់នៅជាមួយគ្នា ជាប្តីប្រពន្ធយ៉ាងសុខសាន្ត។ ពេលស្វាមីត្រូវការចេញទៅបួស ដើម្បីស្វែងរកមគ្គៈនៃពន្លឺត្រាស់ដឹងនោះ ភរិយាភក្តីជួយគាត់ នូវគ្រប់មធ្យោបាយ ដែលនាងអាចធ្វើបាន។ នាងមិនដែលរំខាន និងរារាំងដល់ស្វាមីរបស់នាងឡើយ។ ដោយសារអីញ្ចឹងហើយ បានជាស្វាមីនោះ ដឹងគុណចំពោះនាងដ៏ជ្រាលជ្រៅបំផុត។ នៅទីបញ្ចប់ ស្វាមីក៏បានដឹងនូវពាក្យប្តេជ្ញាដ៏មានតម្លៃរបស់ខ្លួន ហើយគាត់ក៏ក្លាយទៅជាបុគ្គលអ្នកត្រាស់ដឹង ដោយខ្លួនឯង ដូចជាទំនាយដែលព្រះទីបង្ករបានព្យាករណ៍ទុកតាំងពីច្រើនជាតិកន្លងមកហើយនោះមែន។"

"ម្នាលកុមារទាំងឡាយ! លុយកាក់ និងកិត្តិយស មុខមាត់ មិនមែនជាវត្ថុមានតម្លៃ ក្នុងជីវិតទេ! លុយកាក់និងកិត្តិយសអាចវិនាសបាត់បង់ទៅវិញ យ៉ាងឆាប់រហ័សបំផុត។ ការយល់ដឹង (បញ្ញា) និងសេចក្តី

ស្រឡាញ់(មេត្តា) ជាវត្ថុមានតម្លៃបំផុតក្នុងជីវិត។ បើអ្នករាល់គ្នាមានការយល់ដឹង និង មានសេចក្ដីស្រឡាញ់ អ្នកព្រាកដជានឹងបានស្គាល់ នូវសុភមង្គលក្នុងជីវិត។ មេឃៈនិងភរិយាមានសុភមង្គលជាមួយគ្នាជាច្រើនជាតិ ដោយសារតែការយល់ដឹង និងសេចក្ដីស្រឡាញ់ របស់គេទាំងពីរ។ បើមានបញ្ញា និងសេចក្ដីមេត្តាហើយ គ្មានអ្វីថាអ្នកមិនបានសំរេចបំណងដ៏ឧត្ដមនោះឡើយ។"

ព្រះនាងពិម្ពាយសោធរា ទ្រង់រំជួលព្រះហឫទ័យ ស្រក់ទឹកព្រះនេត្រា ហើយក៏លើកព្រះហស្តទាំងគូ ថ្វាយបង្គំព្រះពុទ្ធដល់ចុងព្រះបាទ។ ព្រះនាងយល់យ៉ាងច្បាស់ថា ព្រះពុទ្ធចង់មានអត្ថន័យយ៉ាងណា ចំពោះព្រះនាង ទោះបីជាព្រះអង្គមានព្រះពុទ្ធដីកាទៅកាន់កុមារទាំងអស់នោះក៏ដោយ។ នេះគឺជារបៀប ដែលព្រះពុទ្ធចង់សំដែងសេចក្ដីដឹងគុណចំពោះព្រះនាង។ ចំណែកឯ ព្រះនាងបជាបតី ក៏ព្រះនាងទ្រង់យល់ ដូច្នេះដែរ ព្រះនាងមានព្រះសវនីយ៍ ទៅកាន់កុមារទាំងឡាយថា៖ "មើលកុមារទាំងឡាយ! តើអ្នករាល់គ្នាបានដឹងថា អ្នកណាដែលជាតួអង្គមេឃៈនោះទេ? មាណពកំសត់នោះ គ្មានអ្នកណាក្រៅអំពីព្រះពុទ្ធអង្គនេះឡើយ។ នៅក្នុងជាតិនេះហើយ ដែលព្រះអង្គបានក្លាយជាបុគ្គលត្រាស់ដឹង។ និងតើអ្នករាល់គ្នាបានដឹងថា អ្នកណាជាភរិយារបស់មាណពនោះទេ? នារីរូបស្អាតនោះ គ្មានអ្នកណាក្រៅអំពីព្រះនាងយសោធរានេះឡើយ។ ដោយសារតែការយល់ដឹង(បញ្ញា)និងសេចក្ដីស្រឡាញ់(មេត្តា)របស់ព្រះនាងនេះហើយ

ទើបព្រះសិទ្ធត្ថអាចយាងតាមមាគ៌ារបស់ព្រះអង្គ និងសំរេចការត្រាស់ដឹងបាន ជាស្ថាពរ។ យើងសូមថ្លែងអំណរគុណ យ៉ាងជ្រាលជ្រៅជាទីបំផុតចំពោះព្រះនាងពិម្ពាយសោធរា។"

នៅក្នុងគ្រានោះឯង ព្រះនាងពិម្ពាយសោធរា ទ្រង់បានសំរេចនូវសោតាបត្តិផលនិងព្រះនាងបជាបតីទ្រង់បានសំរេចនូវសកិទាគាមិផល។

កុមារា-កុមារីទាំងអស់ នឹកអាណិត ដល់ព្រះនាងពិម្ពាយសោធរា គេនាំគ្នាបែរមុខទៅរកព្រះនាង ហើយងក់ក្បាលគោរព ដើម្បីសំដែងនូវការពេញចិត្តខ្លាំង។

ព្រះសមណគោតមនិងភិក្ខុពីរអង្គទៀត ក៏លាព្រះញាតិនិងកុមារទាំងនោះ ត្រឡប់ទៅកាន់និគ្រោធនិទ្យានវិញ។

ព្រះបាទសុទ្ធោទន៍ទ្រង់បាត់អោយគេរៀបចំនិគ្រោធនិទ្យាន អោយទៅជាអារាមមួយ យ៉ាងសំខាន់ សំរាប់អប់រំប្រជាពលរដ្ឋ គ្រប់ជាន់ថ្នាក់ខាងផ្លូវព្រះពុទ្ធសាសនា។

## ព្រះសង្ឃ និងពុទ្ធបរិស័ទដែលបានចូលបច្ច័យ បោះពុម្ពសៀវភៅ "បុណ្យទំនៀមខ្មែរ" នេះគឺ:

០១. ភិក្ខុមហាយិន នឿន វត្តខ្មែរសាន់តាអាណា CA U.S.A.........$370.
០២. ភិក្ខុ សុខ រស់ វត្តខ្មែរសាន់តាអាណា CA ......................$100.
០៣. ភិក្ខុ អ៊ុយ ហេង វត្តខ្មែរសាន់តាអាណា CA.....................$100.
០៤. ភិក្ខុ អ៊ាប ភៀរ វត្តខ្មែរសាន់តាអាណា CA ......................$50.
០៥. ភិក្ខុ អ៊ុន ឱន សង្ឃរក្ខិតោ..................................................$20.
០៦. លោកចាន់ ធឿន និងអ្នកស្រីហួន មុំ Tennessee U.S.A.$3,000.
០៧. ឧបាសិកា យូ គិម អ៊ិន និងបុត្រី សំ បុញ និងគ្រួសារ..............$600.
០៨. អ្នកស្រី ឈុន យ៉េន និងបុត្រ Santa Ana, CA............$500.
០៩. អ្នកស្រីធាំ ធូក Lake Elsinore, CA ......................$500.
១០. លោកតា ញ៉ឹក ចាំត និងលោកយាយ ឆេង គីមហេង ព្រមទាំង
កូនចៅ មាន លោក សំ អ៊ិន និអ្នកស្រី ញ៉ឹក ស៊ីថា, អ្នកស្រី
សំ ចាន់សុគន្ធី និងគ្រួសារ, អ្នកស្រី សំ សុជាតិ និងគ្រួសារ,
អ្នកស្រី សំ សុផល និងគ្រួសារ, អ្នកស្រី សំ ដាវី និងគ្រួសារ,
លោក សំ ចេស្តា និងគ្រួសារ, លោក សំ អូន និងអ្នកស្រី
ចាន់ ធឿន, កញ្ញា សំ សុខហេង, កញ្ញា សំ ផល្លា............$500.
១១. ប្រាក់ពុទ្ធបូជា-ធម្មបូជា វត្តសាន់តាអាណា........................$355.
១២. ឧបាសិកា ហេង យន, លោកហេង ស្វៃត និងគ្រួសារ...........$300.
១៣. លោក តាំងប៊ុណ្ណារុធ និងអ្នកស្រី អុប ម៉ិះចិន្តា........................$200.
១៤. លោក អុប ចិសស៊ីន និងអ្នកស្រី កុល បនទី.....................$200.
១៥. លោក អ៊ុំ តួយ និងគ្រួសារ .................................$200.

១៦. លោក អ៊ី យូហេង និងអ្នកស្រី ត្រាំង ចាក់ហៀង......................$200.

១៧. លោកតា បេ រី និងយាយ ធូ សុខ (ញ៉ឹង)...........................$130.

១៨. លោក ឡេា សំអាន និងអ្នកស្រី កង សម្បត្តិ ........................$100.

១៩. លោក ឆឹង ចាន់ណាក និងអ្នកស្រី ឡេ ណាក់.......................$100.

២០. លោកតាឧបាសក ឆឹង ជាន់ ..............................................$100.

២១. លោក ចាក់ ថាវៃ និងគ្រួសារ ...............................................$100.

២២. លោក សូថុង និងអ្នកស្រី ងួន ស៊ីង ...................................$100.

២៣. លោក វង់ មៅ និងអ្នកស្រី ឆន់ កាន់ជួង .........................$100.

២៤. លោកយាយ លឹម ស្រេន .......................................................$100.

២៥. លោកយាយ ជា វេង និងកូនស្រី ប៉ូល ចាន់នារី.

ប៉ូល ភិមាន និង នាង គុល......................................................$100.

២៦. លោក ឡូ ប៊ុន ឡេង និងអ្នកស្រី អៀប ឆៃ គិម ..................$100.

២៧. លោក អ៊ុន សុគន្ធ និងអ្នកស្រី ម៉ម សុវណ្ណចន្ទណា(ភ្នំពេញ)......$100.

២៨. លោកយាយ លឹម តាម ទី ....................................................$50.

២៩. អ្នកស្រី លី ប៉ូលីន (ស៊ុម ប៉ូ) ..............................................$50.

៣០. លោក យូ និងគ្រួសារ ........................................................$50.

៣១. អ្នកស្រី ចាន់ ហួរ និង បុត្រ ...............................................$50.

៣២. លោកយាយ ង៉ែ លី វេត (ហៅលោកយាយ នាង) ..................$50.

៣៣. លោកតា សៀក និងយាយ សៀង គិត .....................................$40.

៣៤. លោក ណៅ ឆេង ហ៊ាត និងអ្នកស្រី ចាវ គីមនី .......................$40.

៣៥. លោក ពិន ឈុនលី និងគ្រួសារ ...............................................$35.

៣៦ លោកយាយ គី គង់ .............................................................$20.

៣៧. លោកតា ឈៀង ...................................................................$20.

៣៨. លោកយាយ ម៉ែក អាក .........................................................$20.

៣៩. អ្នកមីង ហេង ស៊ីន ................................................$20.

៤០. លោកហាក់ មុំងហេង និងយាយ គឹម ................................$20.

៤១. លោកយាយ កុល យន់ (ហៅយាយសម្ញា) ........................$20.

៤២.. លោកតា តាញ់ និងភរិយា ............................................$20.

៤៣. លោកតា តៀប ឈួន និងយាយ យ៉ង់ ................................$20.

៤៤. លោកតា ប៊ុក ណាយ និងយាយ យ៉ឹម លឹម ..........................$20.

៤៥. លោកយាយ អេង យន ...................................................$20.

៤៦ លោក ស៊ួ ហួត និងអ្នកស្រី ផល្លី ....................................$20.

៤៧. លោកតា ទុយ ស៊ុនជាង និងយាយ ឡាង ..............................$20.

៤៨. លោកតា ផូ មី និងយាយ ប៉ូលីន ......................................$20.

៤៩. លោកតា ជឿម និងយាយ ឱន ...........................................$20.

៥០. យុវជន សុខៈ និងនាង លក្ខិណា ......................................$20.

៥១. លោកតា ហ៊ុន និងយាយ អ៊ន ...........................................$20.

៥២. អ្នកស្រី ហេង ឈាប ......................................................$20.

៥៣. លោក សៅ សុគណ និងអ្នកស្រី ស យុត ............................$20.

៥៤. លោកយាយ សួន ចាន់ ....................................................$20.

៥៥. លោកយាយ ឆាង ............................................................$20.

៥៦. អ្នកស្រី ពៅ គឹម លាង ....................................................$20.

៥៧. លោកយាយ ឆាយ ខន .....................................................$15.

៥៨. លោកយាយ ងី ទេ ..........................................................$15.

៥៩. លោកយាយ អ៊ុច ឈា .......................................................$15.

៦០. អ្នកស្រី ចាល់ ស៊ុ ឡេ .....................................................$10.

៦១. លោកវៅ វឿន និងអ្នកស្រី ហម ........................................$10.

៦២. លោកតាង ឈុន ហេង និងអ្នកស្រីជឿម បូរាណ .....................$10.

៦៣. អ្នកស្រី ហែម ពិម ..................................................$10.

៦៤. លោកយាយ ស៊ិន ង៉ែក ..................................................$10.

៦៥. លោក ថ្វ សុជាត និងអ្នកស្រី សុខ យី ..................................$10.

៦៦. លោកតា ឈឹម មុយ និងយាយ ស្តេង មុយ ..............................$5.

៦៧. អ្នកស្រី ស៊ឹម ជា ..................................................$5.



# ចប់ភាគទី២